# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ១៨

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូឆូ**សម្លាប់**ឡាន់បេង** ហើយឡោមព័ទ្ធ**លីប៉ោ**នៅស្រុកហែហ្វី រហូតដល់**តាំងស៊ិន**និង**ឡៅពី**គិតគ្នានឹងសម្លាប់**ចូឆូ**)*

**ចូឆូ**ក៏បង្គាប់ឲ្យយកខ្លួន**ឡាន់បេង** ទៅកាត់ក្បាលដោតទុកនៅមុខបន្ទាយ ហើយបរពលចូលឡោមព័ទ្ធស្រុកហែហ្វីជុំវិញ ហើយកំជាប់ពាក្យទុកថា បើមនុស្សក្នុងស្រុករត់ចេញទៅបានត្រង់គយល្បាតពួកណា យើងនឹងយកទោសនាយទ័ពនាយកង ដែលត្រួតត្រារក្សាគយល្បាតពួកនោះដល់អស់ជីវិត។ **ឡៅពី**បានឮ**ចូឆូ**ដាក់កម្រិតឲ្យនាងទ័ពនាយកងដូច្នោះ ក៏លា**ចូឆូ**វិលទៅបន្ទាយ ហើយនិយាយដាក់កម្រិតលើ**គួនអ៊ូ**, **តៀវហ៊ុយ**, **ស៊ុនខៀន**ឲ្យប្រុងប្រយ័ត្នកុំឲ្យ**លីប៉ោ**និង**អ៊ួនសុត**ទៅមករកគ្នាបាន។ ខណៈកាល**តៀវហ៊ុយ**និង**ឡាន់បេង**កំពុងច្បាំងគ្នានោះ **ខៅគី** និង**អងកាយ**ក៏រត់ទៅដល់ក្រុងហែហ្វី ហើយចូលទៅប្រាប់**លីប៉ោ**ថា ខ្ញុំបាទបានទៅដល់ក្រុងហ្វួយណាំ បានប្រាប់**អ៊ួនសុត**គ្រប់ប្រការ។ **អ៊ួនសុត**ថាឲ្យលោកបញ្ជូនកូនក្រមុំទៅឲ្យមុនវិញ ទើបនឹងលើកទ័ពមកជួយ ដែលនឹងលើកមកមុននោះ **អ៊ួនសុត**ថាបានឃើញចិត្តលោកម្តងហើយ។

**លីប៉ោ**ក៏ប្រឹក្សាថា ឥឡូវកងទ័ព**ចូឆូ**ឡោមព័ទ្ធស្រុកយើងជុំជិតដូច្នេះ ធ្វើម្តេចយើងនឹងឲ្យនាំកូនក្រមុំចេញទៅបាន? **ខៅគី**ឆ្លើយថា កាល**ចូឆូ**បានខ្លួន**ឡាន់បេង**យកទៅ ក៏សាកសួរដឹងសេចក្តីអស់ហើយ ដែលលោកនឹងប្រើអ្នកដទៃ ឲ្យទៅជំនួសនោះ

កម្រណាស់ សុំឲ្យលោកលើកទាហានដែលមានថ្វីដៃ ជូនដំណើរឲ្យនាំកូនក្រមុំទៅដល់ប្រទល់ដែនស្រុកហ្លួយណាំទើបនឹងចេញទៅបាន ប្រសិនបើ**ចូឆ្ង**នឹងតច្បាំងប្រការម្ដេច នឹងបានជួយការពារឲ្យមាំមួន។ **លីប៉ោ**យល់ឃើញត្រូវ ទើបចាត់ប្រើ**តៀវលៀវ**និង**កោស៊ុន**ឲ្យលើកទាហានបីពាន់និងរទេះតូចមួយ ហើយនិយាយថា "យើងត្រូវប្រើអ្នកឲ្យឃុំនាំខ្លួនកូនក្រមុំយើងទៅឲ្យ**អ៊្វនសុត** យើងនឹងជូនដំណើរអ្នកចេញទៅដល់ប្រទល់ដែនស្រុកហ្លួយណាំ។ ថាហើយឲ្យកូនក្រមុំតែងខ្លួនពាក់ក្រើសយ៉ាងមាំមួនណាស់។ លុះដល់ពេលយាមពីរយប់ **លីប៉ោ**ក៏យកព្រែពណ៌បីផាប់ចងរុំខ្លួនកូនក្រមុំណែន ហើយស្ពាយពីក្រោយខ្នងឡើងជិះសេះកាន់ទួន នាំ**កោស៊ុន** និង**តៀវលៀវ** លើកទាហានបីពាន់លបចេញទៅផុតពីស្រុកហែហ្វី។

ឯទាហាន**ចូឆ្ង**ដែលឡោមព័ទ្ធស្រុកនោះ មិនបានសង្កេតត្រួតត្រាជាមាំមួន ក៏បណ្ដោយឲ្យ**លីប៉ោ**លបចេញទៅបាន។ លុះ**លីប៉ោ**ទៅដល់ព្រំដែនស្រុកហ្លួយណាំទទួល**គួនអ៊ូ, តៀវហ៊ុយ** លើកទាហានចេញទៅឃាមល្បាតក្រៅបន្ទាយ ឃើញ**លីប៉ោ**និងទាហានលើកទៅដល់ **តៀវហ៊ុយ**ស្រែកថា អា**លីប៉ោ** អាឯងលបរត់ទៅណា? **លីប៉ោ**ឃើញ**គួនអ៊ូ, តៀវហ៊ុយ**ស្ទាក់ទទឹងពីមុខក៏ញាក់សេះនឹងស្ទុះទម្លាយ ទទួល**ឡៅពី**ក៏លើកទាហានតាមមកទាន់**លីប៉ោ**ពីក្រោយ **លីប៉ោ**ភ័យណាស់ខ្លាចកូនក្រមុំនឹងអន្តរាយ ក៏បរពារទម្លាយកងទ័ព**ចូឆ្ង**ត្រឡប់ចូលទៅក្នុងស្រុកហែហ្វីវិញបាន។ **ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**ក៏លើកទាហានតាមមកទៀត ឡោមព័ទ្ធស្រុកនោះពីទិសខាងលិច។

**លីប៉ោ**ទាល់គំនិតមិនដឹងគិតយ៉ាងម្ដេច ក៏ចេះតែផឹកស្រាព្រឹកល្ងាចមិនឈប់ឈរពេលណាសោះ **ចូឆ្ង**ក៏ឡោមព័ទ្ធស្រុកហែហ្វីទុកដល់បីខែ។ **លីប៉ោ**ក៏មិនបាន

ចេញតច្បាំងសោះ **ចូឆ្វ**នឹងលើកទ័ពវាយទម្លាយ ឃើញថា**លីប៉ោ**ត្រួតត្រារក្សាសើនបន្ទាយមាំមួនណាស់។ ទទួលមានបម្រើសេះនាំសេចក្ដីចូលទៅជម្រាបចូឆ្វថា **តៀវអេង**ចៅហ្វាយស្រុកហោឡាយដឹងថា មហាឧបរាជលើកទ័ពមកឡោមព័ទ្ធស្រុកហែហ្វី **តៀវអេង**ក៏លើកទាហាននឹងមកជួយ**លីប៉ោ, អៀវស៊ីវ**នាយទាហានមិនយល់ព្រមលបសម្លាប់**តៀវអេង**ស្លាប់ ហើយកាត់ក្បាលនឹងនាំមកជូនមហាឧបរាជ លុះមកដល់ពាក់កណ្ដាលផ្លូវ **អ៊ុយក** ជាមនុស្សស្និទ្ធរបស់**តៀវអេង**តាមមកទាន់សម្លាប់**អៀវស៊ីវ**បាន ហើយនាំក្បាល**តៀវអេង**ត្រឡប់ទៅស្រុកវិញ។

**ចូឆ្វ**បានឮដូច្នោះ ក៏ប្រើ**ស៊ូហ្វួន**លើកទាហានទៅសម្លាប់**អ៊ុយក**បានហើយ ប្រជុំនាយទ័ពនាយកងទាំងពួងមកប្រឹក្សាថា ឥឡូវ**តៀវអេង**ស្លាប់ទៅហើយ សត្រូវរបស់យើងខាងទិសឯជើងនៅបារម្ភក្រែងតែ**អ៊ួនសៀវ** ចំណែកទិសឯលិច ក្រែងតែ**ឡៅពៀវ**និង**តៀវស៊ីវ** មានកម្លាំងខ្លាំងពូកែឡើង យើងនឹងទុកចិត្តមិនបាន ឥឡូវយើងមកឡោមព័ទ្ធក្រុងហែហ្វីទុកយូរហើយ ទាហានទាំងឡាយក៏មានតែសេចក្ដីនឿយលំបាក យើងនឹងត្រឡប់ទៅស្រុកហ៊ូតោវិញ ដើម្បីនឹងបម្រុងប្រុងប្រៀបរៀបចំសន្សំសេនាទាហានឲ្យមានច្រើនឡើងទៀត ទុកបង្ការស្រុកយើងឯនាយផង តើអ្នកទាំងឡាយនឹងយល់ឃើញដូចម្ដេច?

**ស៊ុនហុក**ឆ្លើយថា យើងធ្វើការគ្រានេះ**លីប៉ោ**ក៏ថ្លោះការនឹងយើងជាច្រើនគ្រាហើយ ជាតិនឹងទាល់ច្រកយកខ្លួនមិនរួច ដែលនឹងលើកទ័ពត្រឡប់ទៅវិញនោះ ខ្ញុំបាទយល់ឃើញថា **លីប៉ោ**គង់នឹងមានកម្លាំងឡើងវិញ បើយើងនឹងវិលមកធ្វើការទៀតក៏លំបាកនឹងយកជ័យជម្នះណាស់។ **គុយកែ**ឆ្លើយថា ឥឡូវនេះជាទេសកាលទឹកជំនន់ជន់ឡើងលិចគ្រប់អន្លើ ហើយហូរចុះមកក្បែរស្រុកហែហ្វី ខាងទិសឯលិច

សុំឲ្យលោករិះគិតចាត់ទាហានទប់ទឹកស្ទឹងខាងត្បូងស្រុកនោះឲ្យជាប់ កុំឲ្យទឹកហូរចុះទៅបាន បើមានទំនប់ដូច្នេះហើយ គង់តែទឹកនឹងហូរចូលមកក្នុងស្រុកហែហ្វឺលិចទាំងអស់ **លីប៉ោ**ក៏ថ្កោះការរបស់យើងជាប្រាកដ។

**ចូឆូ**បានស្ដាប់ឃើញត្រូវណាស់ ក៏ឲ្យប្រមូលទាហានចុះទៅលើកទំនប់ទប់ស្ទឹង ហើយឲ្យលើកទំនប់ព័ទ្ធជុំវិញស្រុករហូតឡើងមកបើកប្រឡាយមួយ ឲ្យហូរចូលទៅក្នុងស្រុកហែហ្វឺ លុះមានភ្លៀងធំធ្លាក់មក ទឹកនោះក៏ហូរចុះពីលើភ្នំតាមពោះស្ទឹងចុះទៅទើរលើទំនប់ ត្រឡប់ហូរចូលទៅក្នុងស្រុកហែហ្វឺលិចអស់ផ្ទះសម្បែង។ អ្នកស្រុកក្នុងស្រុកនោះក៏ផ្អើលជ្រួលច្របល់ខ្លាំងណាស់ បណ្ដាមនុស្សម្នាក៏នាំយកសេចក្ដីទៅជម្រាប**លីប៉ោ** ៗក៏ថា "យើងនឹងបារម្ភខ្លាចទឹកនោះធ្វើអ្វី សេះសឹកថៅរបស់យើងមានកម្លាំងច្រើនណាស់បោលឆ្លងទឹក ដូចជាបោលលើគោកដូចគ្នា" ហើយ**លីប៉ោ**ក៏មិនមានយកចិត្តទុកដាក់ ចេះតែផឹកស៊ីសប្បាយរាល់វេលា។ ខណៈនោះ **លីប៉ោ**ក៏ជតារាសីថយចុះ ថ្ងៃមួយភរិយាយកកញ្ចក់មកឲ្យ**លីប៉ោ**ឆ្លុះមើលមុខ។ **លីប៉ោ**ឃើញទឹកមុខខ្លួនសៅហ្មង ក៏គិតថា "ដោយហេតុផឹកស្រាច្រើន ស្រានេះរមែងជាទោសច្រើនណាស់ ទោះអ្នកឯណារូបស្អាតល្អដូចម្ដេចក៏គង់សៅហ្មងព្រោះស្រា។ **លីប៉ោ**គិតឃើញដូច្នោះ ក៏ចេញទៅប្រកាសហាមសេនាទាហានទាំងពួងថា ពីថ្ងៃនេះតទៅបើនរណាសេពសុរានឹងយកទោសកាត់ក្បាលចេញ។

ខណៈនោះ មនុស្សដែលថែរក្សាសេះ**លីប៉ោ** គិតលួចយកសេះដប់ប្រាំទៅឲ្យ**ឡៅពី**។ **ហៅសេង**ជានាយត្រួតដឹងការទាន់ ក៏តាមទៅចាប់ខ្លួនមនុស្សទាំងសេះនោះទៅសម្លាប់បង់ នាយទ័ពនាយកងទាំងពួងដឹងដូច្នោះ ក៏បបួលគ្នាទៅសួរ**ហៅសេង** ៗគិតចង់លៀងស្រា បណ្ដាទាហានទាំងពួងតែខ្លាចអាជ្ញា**លីប៉ោ** ក៏ចូលទៅជម្រាប

**លីប៉ោ**ថា មានអាចោរកំណាចលួចនាំសេះចេញទៅឱ្យ**ឡៅពី** ខ្ញុំបាទតាមទៅទាន់សម្លាប់អស់ទៅហើយ ពីព្រោះបុណ្យរបស់លោកមិនដែលខូចរបស់នឹងសឹកសត្រូវ ឥឡូវនាយទ័ពនាយកងទាំងពួងមកសួរខ្ញុំបាទជាច្រើន ខ្ញុំបាទចង់សុំច្បាប់លោកលៀងស្រា តើលោកនឹងប្រោសមេត្តាបានឬទេ?

**លីប៉ោ**ខឹងច្រឡោតឡើងថា យើងបានហាមឃាត់ថា ស្រានេះជាទោសនឹងនាំឱ្យខូចផលប្រយោជន៍ទាំងពួង បើនរណាផឹកស្រា យើងនឹងកាត់ក្បាលចេញ ហេតុម្ដេចខ្លួនមកចរចាសុំលៀងស្រាដូច្នេះទៀត ចង់ឱ្យខូចអាជ្ញារបស់យើងឬ?” ថា ហើយក៏បង្គាប់ទាហានឱ្យចាប់ខ្លួន**ហៅសេង**នឹងយកទៅសម្លាប់។

**ស៊ុងហៀន**និង**ងុយសុក** ក៏ចូលទៅអង្វរសុំទោសឱ្យ**ហៅសេង**។ **លីប៉ោ**ថា “**ហៅសេង**ធ្វើខុស ទោសត្រូវប្រហារជីវិតហើយ តែយើងយល់ដល់អ្នក ព្រមលើកទោសឱ្យរួចជីវិតម្ដងចុះ” ហើយឱ្យទាហានយកខ្លួន**ហៅសេង**ទៅវាយដោយរំពាត់ហាសិបខ្វាប់។ ទាហានទាំងពួងឃើញដូច្នោះក៏តូចចិត្តពន់ពេក។ **ស៊ុងហៀន**និង**ងុយសុក**ក៏នាំគ្នាទៅសួរ**ហៅសេង**ដល់ផ្ទះ **ហៅសេង**ក៏ចេញទៅទទួលហើយនាំឡើងទៅអង្គុយនិយាយថា “កាលពីម្សិលមិញបើកុំតែអ្នកទាំងពីរទៅជួយខ្ញុំហើយ ខ្ញុំក៏មិនបានរស់ឃើញមុខអ្នកឡើយ” និយាយហើយ **ហៅសេង**អង្គុយយំ។

**ស៊ុងហៀន**ថា សព្វថ្ងៃនេះ**លីប៉ោ**ប្រែកិរិយាខុសពីដើមប្លែកណាស់ ព្រោះមិនយកចិត្តសេនាទាហាន ជឿស្ដាប់តែពាក្យភរិយា ទាល់តែ**ចូឆ្វូ**លើកទ័ពឡោមព័ទ្ធស្រុកទុកជុំវិញហើយទប់ទឹកឱ្យឡើងលិចក្នុងស្រុកទាំងអស់ ដូច្នេះហើយ **លីប៉ោ**ក៏នៅព្រងើយកន្តើយមិនយកចិត្តយើង យើងទាំងឡាយដូចជាមនុស្សមានជំងឺឈឺធ្ងន់

មិនអាចដឹងថាថ្ងៃណានឹងស្លាប់ ហេតុដូច្នេះយើងត្រូវតែលះបង់**លីប៉ោ** គិតរត់ចេញឲ្យតែរួចអាយុជីវិតចុះ។

**ងុយសុក**ថា បើយើងនឹងរត់ចេញទៅទទេដូចមិនមែនជាជាតិទាហាន គួរតែយើងព្រួតគ្នាចាប់ខ្លួន**លីប៉ោ**បញ្ជូនទៅឲ្យ**ចូឆូ** ដើម្បីយកគុណគាប់ប្រសើរជាជាង។ **ហៅសេង**ថា **លីប៉ោ**នោះមានកម្លាំងខ្លាំងពូកែណាស់ មានជំនិះគឺសេះសឹកថៅក៏ចំណាប់ បើយើងនឹងគិតចាប់**លីប៉ោ**គួរតែលួចយកសេះសឹកថៅទៅឲ្យ**ចូឆូ**សិន។ **ស៊ុងហៀន** និង**ងុយសុក**ក៏យល់ត្រូវគ្នា លា**ហៅសេង**ត្រឡប់ទៅផ្ទះ ។ លុះដល់ពេលយប់ **ហៅសេង**ក៏ចូលទៅលួចសេះសឹកថៅមកបាន ចេញទៅរក**ចូឆូ**តាមផ្លូវទ្វារទិសខាងកើត ហើយ**ហៅសេង**ក៏នាំសេះនោះទៅជូន**ចូឆូ** ជម្រាបថា ខ្ញុំបាទនិង**ងុយសុក, ស៊ុងហៀន**គិតគ្នានឹងចាប់ខ្លួន**លីប៉ោ**មកជូនមហាឧបរាជ។ **ចូឆូ**បានស្តាប់ក៏មានចិត្តត្រេកអរណាស់ ទើបសរសេរសេចក្តីចងនៅចុងព្រួញផ្តោងទៅក្នុងស្រុកហេហ្វីសេចក្តីថា "ឥឡូវ**លីប៉ោ**អស់អំណាចដោយជតារាសីចុះហើយ ឧបមាដូចជាខ្លានៅក្នុងអណ្តូង បើប្រសិនអ្នកឯណាចាប់ខ្លួន**លីប៉ោ**នោះទៅឲ្យយើងបាន យើងនឹងឲ្យបំណាច់រង្វាន់តាំងជានាហ្មឺនធំ" ។ លុះព្រឹកឡើង**ចូឆូ**ក៏បរពលទម្លាយបន្ទាយចូលទៅក្នុងស្រុក ទាហានដែលរក្សានាទីសើនបន្ទាយ ក៏តតាំងច្បាំងកាប់សម្លាប់គ្នាស្លាប់ជាច្រើន ។

**លីប៉ោ**ឮសំឡេងគឹកកងក៏ភ័យតក់ស្លុត ហៅទាហានឲ្យយកសេះសឹកថៅ ទាហានដែលរក្សាសេះនោះជម្រាបថា **ហៅសេង**លួចយកសេះនោះនាំទៅឲ្យ**ចូឆូ**ពីយប់មិញទៅហើយ។ **លីប៉ោ**ក៏ចាប់យកទួនស្នុះឡើងទៅលើសើនបន្ទាយឃើញ **សុងហៀន, ងុយសុក** ក៏សួរថា "ហេតុម្តេចខ្លួនឯងប្រែចិត្តទៅចូលនឹងអា**ហៅសេង**

ល្បួចយកសេះអញទៅ បើកាលណាអញធ្វើការនេះសម្រេច អញនឹងកាត់ក្បាលឯងទាំងពីរនាក់ឲ្យបាន” ថាហើយ**លីប៉ោ**ក៏បង្គំដេញទាហានឲ្យចេញទៅតច្បាំងនឹងកងទ័ព**ចូវឆូ** តាំងពីព្រឹកទាល់ដល់ថ្ងៃត្រង់ ទាហាន**ចូវឆូ**ក៏ថយទៅវិញ **លីប៉ោ**ក៏វិលមកអង្គុយលើកៅអីនៅប្រឡបទ្វារស្រុកខាងក្នុង ហើយយកទួនផ្អែកនឹងកំពែងក៏ធ្វេសលក់ទៅ។ **ស៊ុងហៀន** និង**ងុយសុក**ឃើញបានការដូច្នោះ ក៏ធ្វើបីដូចជាចូលទៅប្រឹក្សាការរាជការ ហើយបណ្ដេញទាហានដែលនៅរក្សាខ្លួន**លីប៉ោ**នោះឲ្យថយចេញ **ងុយសុក**ក៏កន្ត្រាក់យកទួនទៅបោះចោលឆ្ងាយពីដៃ**លីប៉ោ** ហើយ**ស៊ុងហៀន**និង**ងុយសុក**ស្ទុះព្រមគ្នា ចូលទៅយកខ្សែចង**លីប៉ោ** ៗភ័យភ្ញាក់ឡើងស្រែកឲ្យទាហានជួយ ទាហានទាំងអស់នោះក៏គ្មាននរណាម្នាក់នឹងចូលទៅជួយសោះ លុះចង**លីប៉ោ**ជាប់ហើយ **ងុយសុក**ក៏បើកទ្វារស្រុកស្រែកប្រកាសប្រាប់ទាហានចូវឆូថា យើងចាប់ចងខ្ជាប់ហើយ ឲ្យប្រញាប់ចូលមកយកខ្លួនទៅចុះ។

**ហែហ្វូអៀន**ឮដូច្នោះ ក៏បំផាយសេះចូលទៅដល់ទ្វារស្រុក តែគិតសង្ស័យថា**លីប៉ោ**នឹងធ្វើកលឧបាយដូចម្ដេចទេដឹង តែឆ្ងល់ហេតុម្ដេចក៏មិនឃើញមានសេះ។ ទទួល**ងុយសុក**យកទួនរបស់**លីប៉ោ**ចោលចេញទៅជាសម្គាល់ **ហែហ្វូអៀន** និងទាហានទាំងពួងក៏អស់សង្ស័យ ស្ទុះស្រូចូលទៅក្នុងស្រុកហែហ្វីបាន។ ឯ**កោស៊ុន**និង**តៀវលៀវ** ដែលរក្សាត្រួតត្រាយាមល្បាតទ្វារទិសខាងលិចដឹងថា **ស៊ុងហៀន**និង**ងុយសុក**ប្រទូសរ៉ាយលីប៉ោ ក៏ចុះពីលើនាទីសើនបន្ទាយទៅជួយ**លីប៉ោ**។ ទទួលទាហាន**ចូវឆូ**ទម្លាយបន្ទាយទ្វារស្រុកចូលមកបាន ក៏ចាប់ខ្លួន**កោស៊ុន**និង**តៀវលៀវ**បានទៀត។ **តាន់កុង**ឃើញទាហាន**ចូវឆូ**ហែកទម្លាយចូលទៅក្នុងស្រុកបាន ក៏ឡើងសេះបំផាយចេញតាមទ្វារស្រុកទៅទិសឯជើងជួបប្រទះនឹង**ស៊ីឡុង** ៗលើកទាហាន

ព័ទ្ធចាប់ខ្លួន**តាន់កុង**បានទៀត។ **ចូឆ្ង**ក៏លើកទ័ពចូលទៅតាំងនៅក្នុងស្រុកហៃហ្វឺ ហើយចាត់ទាហានទៅរំលើងរំលាយទំនប់ដែលទប់ទឹកនោះចេញ ទឹកក៏ហូរស្រេក អស់ទៅ ហើយ**ចូឆ្ង**ក៏ប្រាបប្រាមអស់បណ្ដារាស្ត្រ ដែលនៅក្នុងស្រុកនោះឲ្យនៅជាសុខក្សេមក្សាន្តតាមប្រក្រតី។

**ចូឆ្ង**ក៏នាំ**ឡៅពី**ទៅអង្គុយលើសើនឈ្មោះបេកប៊ុនឡៅ **គួនអ៊ូ**, **តៀវហ៊ុយ**ក៏ឡើងទៅជាមួយ **ចូឆ្ង**ក៏នាំខ្លួន**លីប៉ោ**ឡើងទៅ។ **លីប៉ោ**ក្រឡេកឃើញទាហានទាំងពួងព្រួតគ្នាចូលចាប់ខ្លួនខ្ជាប់រឹតរួតស្មើរតែនឹងស្លាប់ដូច្នោះ ក៏ស្រែកថា មហាឧបរាជ សូមមេត្តាអាណិតខ្ញុំបាទផង។ **ចូឆ្ង**ថា ធម្មតាខ្លាដែលជាប់ចំណងយ៉ាងមាំមួនហើយ គេមិនដែលស្រាយលែងទេ ។ **លីប៉ោ**ឮដូច្នោះក៏ទាល់គំនិត ក្រឡេកទៅឃើញ **ហៅសេង, ស៊ុងហៀន, ងុយសុក** ឈរក្បែរខ្លួន **លីប៉ោ**ក៏ស្ដីថា អញបានចិញ្ចឹមរក្សាទំនុកបម្រុងខ្លួនឯងរាល់គ្នាជាយូរមកហើយ ហេតុម្ដេចខ្លួនមកគិតទុរយសនឹងអញដល់ទីនេះ? **ស៊ុងហៀន**ថា យើងធ្វើដូច្នោះ ព្រោះអ្នកឯងមិនជឿស្ដាប់ពាក្យយើងសោះ អ្នកឯងជឿស្ដាប់រាប់អានតែពាក្យភរិយា ហើយត្រឡប់មករករឿងធ្វើទោសយើងវិញ ហេតុម្ដេចក៏ថាយើងគិតទុរយសខ្លួន? **លីប៉ោ**ឮដូច្នោះ ក៏ទុញទាល់មិនដឹងឆ្លើយថាប្រការម្ដេច។

ឯទាហានដែលចាប់ខ្លួន**កោស៊ុន**បាន ក៏ចងនាំទៅជូន**ចូឆ្ង** ៗសួរថា អ្នកឯងមានការនិយាយនឹងយើងឬទេ? **កោស៊ុន**មិនឆ្លើយ **ចូឆ្ង**ខឹងណាស់ ប្រើទាហានឲ្យនាំខ្លួន**កោស៊ុន**យកទៅប្រហារជីវិត។ ក្រោយនោះ **ស៊ីឡុង**ក៏ឃុំនាំខ្លួន**តាន់កុង**ទាំងចំណងឡើងទៅជូន**ចូឆ្ង**ទៀត។ **ចូឆ្ង**សួរថា តាំងពីអ្នកឯងឃ្លាតចាកយើងមក បានសេចក្ដីសុខសប្បាយជាឬទេ? **តាន់កុង**បានឮដូច្នោះក៏សម្គាល់ថា **ចូឆ្ង**និយាយឡកឲ្យ

ខ្លួនក៏នឹកខឹងណាស់ ឆ្លើយថា អ្នកឯងជាមនុស្សអាក្រក់ណាស់ មិនមានសេចក្តីសត្យពិតត្រង់ មានតែឆរបញ្ឆោតមនុស្សឲ្យវង្វេងដោយកលឧបាយ បានជាយើងរត់ចោលតាំងពីនោះមក។ **ចូឆ្វ**ឆ្លើយថា យើងជាមនុស្សអាក្រក់ហើយ បានជាអ្នកឯងរត់ចេញពីយើងទៅ ហេតុម្តេចមិនទៅនៅនឹងមនុស្សល្អ ក៏បានជាមកនៅនឹង**លីប៉ោ**ជាមនុស្សអាក្រក់ទៀត? **តាន់កុង**ឆ្លើយថា **លីប៉ោ**ជាមនុស្សគ្មានតម្រិះប្រាជ្ញាមិនចេះគិតការអ្វីក៏មែន តែមិនមែនជាមនុស្សភូតកុហកដូចខ្លួន បានជាយើងចូលមកនៅធ្វើការផង។ **ចូឆ្វ**ថា **លីប៉ោ**ជាមនុស្សគ្មានតម្រិះប្រាជ្ញាសោះ ខ្លួនអ្នកឯងជាអ្នកមានតម្រិះប្រាជ្ញា ហេតុម្តេចក៏បណ្តោយឲ្យ**លីប៉ោ**ថ្លោះការដូច្នេះ?

**តាន់កុង**ស្តាប់ហើយងាកទៅនិយាយនឹង**លីប៉ោ**ថា ព្រោះតែខ្លួនមិនចេះស្តាប់យើងរំឭកសោះ បានជាថ្លោះការយ៉ាងនេះ បើជាស្តាប់ពាក្យយើងខ្លះ កាលណាឡើយនឹងអាប់យសខ្មាសទាហានទាំងពួងដូច្នេះ។ **ចូឆ្វ**ឮ**តាន់កុង**និយាយដូច្នោះក៏ថា **លីប៉ោ**មិនស្តាប់ពាក្យខ្លួនបានជាថ្លោះការ ឥឡូវខ្លួនមានប្រាជ្ញានឹងគិតដូចម្តេច? **តាន់កុង**ខឹងណាស់ស្រែកគំហកថា ខ្លួនអញគ្រានេះអស់អាយុជីវិតនឹងស្លាប់ហើយ ឯងមិនត្រូវមកដេញដោលសួរយកការណ៍ធ្វើអ្វីទៀតទេ។ **ចូឆ្វ**ធ្វើជាមិនខឹង សួរថា ដែលខ្លួននិយាយនេះត្រូវហើយ តែថាមាតា និងភរិយាបុត្ររបស់ខ្លួន ៗនឹងគិតប្រការម្តេច? **តាន់កុង**បានស្តាប់ក៏គិតអាល័យដល់មាតា និងភរិយាបុត្រពន់ប្រមាណ ឆ្លើយតបទៅ**ចូឆ្វ**វិញថា ធម្មតាជាតិសេនាទាហាន នឹងប្រាថ្នាតាំងខ្លួនជាធំ ទោះបីនឹងចាប់សឹកសត្រូវបាន ក៏គេមិនដែលមានធ្វើអន្តរាយដល់មាតា ភរិយាបុត្រសត្រូវនោះទេ គេធ្វើអន្តរាយចំពោះតែរូបអ្នកដែលប្រព្រឹត្តខុសនោះ ដូចខ្លួនយើងក៏មានទោសដល់អាយុជីវិតហើយ យើងមិនមានស្តាយរូបកាយនេះទេ តែមាតា និងភរិយាបុត្ររបស់យើង

ៗសូមផ្ញើនឹងមហាឧបរាជ ៗត្រូវមានសេចក្តីករុណាចិញ្ចឹមរក្សាផងចុះ។ **ចូឆ្វូ**ក៏នឹករឭកដល់គុណូបការៈ**តាន់កុង** ដែលបានជួយសង្គ្រោះដោះទុក្ខមកពីខាងដើម ប្រាថ្នានឹងចិញ្ចឹមរក្សា**តាន់កុង**ទុក មិនទាន់នឹងថាប្រការម្តេច **តាន់កុង**ក៏ស្ទុះលោតចុះពីលើសើន ដើម្បីនឹងឲ្យទាហានសម្លាប់ខ្លួនចេញ។ **ចូឆ្វូ**ឃើញដូច្នោះក៏ឲ្យទាហានចាប់ខ្លួន**តាន់កុង**ទុក។ **តាន់កុង**មិនព្រមស្តាប់ **ចូឆ្វូ**ក៏មានចិត្តអាណិតអាណាថដើរយំពីក្រោយទៅ ហើយក៏និយាយនឹង**តាន់កុង**ថា បើអ្នកមិនចូលចិត្តនៅជាមួយនឹងយើងក៏វាហើទៅចុះ តែមាតានិងបុត្រភរិយារបស់អ្នក យើងនឹងទទួលពិភ័ក្តិរក្សា អ្នកកុំបីមានវិតក្កទុក្ខក្តៅផ្សាឡើយ។ ឯ**តាន់កុង**ដើរទៅដល់ក្រៅកំពែង ក៏សម្តែងអាការឲ្យទាហានប្រហារជីវិតស្លាប់ក្នុងទីនោះ។ **ចូឆ្វូ**ក៏ប្រើទាំហានឲ្យរៀបចំសព**តាន់កុង**នាំយកទៅរក្សាទុកក្នុងក្រុងហ៊ូតោ ហាមប្រាមមិនឲ្យនរណាទៅបៀតបៀនឲ្យបានសេចក្តីលំបាកឡើយ។

ឯ**លីប៉ោ**នៅលើសើនបន្ទាយនិយាយនឹង**ឡៅពី**ថា មហាឧបរាជរាប់អានស្រឡាញ់អ្នកជាប្រាកដ គ្រានេះខ្លួនខ្ញុំពេញជាមនុស្សទោស មានទោសដល់ស្លាប់ហើយ អ្នកចូរជួយរិះគិតយកអាយុជីវិតខ្ញុំផងចុះ គុណូបការៈរបស់អ្នកនឹងមានលើខ្លួនខ្ញុំតទៅ។ **ឡៅពី**បានឮដូច្នេះ ក៏នៅស្ងៀមគ្រាន់តែញាក់មុខ ទទួល**ចូឆ្វូ**ឡើងទៅលើសើនវិញ **លីប៉ោ**ក៏និយាយថា “សព្វថ្ងៃមហាឧបរាជគិតការធំ បារម្ភតែខ្លួនខ្ញុំបាទមួយថាជាមនុស្សចម្រូងចម្រាស ឥឡូវចាប់ខ្លួនខ្ញុំបាទបានហើយ ខ្ញុំបាទក៏សូមអាយុជីវិតទុកធ្វើការតបស្នងសងគុណលោកតទៅ ព្រោះអំណើះទៅមុខខ្ញុំបាទយល់ថារាជសម្បត្តិគង់ជាកម្មសិទ្ធិរបស់លោក”។ **ចូឆ្វូ**បានស្តាប់ដូច្នោះទើបសួរ**ឡៅពី**ថា ដែល**លីប៉ោ**ថាដូចនេះ អ្នកនឹងយល់ឃើញប្រការដូចម្តេច?

**ឡៅពី**តបថា កាលគ្រា**តេងង្ហួន**និង**តាំងតុះ**ស្លាប់នោះ លោកក៏គង់ជ្រាបស្រាប់ហើយ ហេតុម្តេចត្រឡប់មកសួរចង់ដឹងចិត្តខ្ញុំធ្វើអ្វីទៀត? **លីប៉ោ**ឮ**ឡៅពី**ថាដូច្នោះ ក៏ខឹងណាស់ សម្លក់សម្លឹង**ឡៅពី**ដោយទឹកក្នាញ់ថា **ឡៅពី**ជាមនុស្សមិនដឹងគុណអញសោះ ។ **ចូឆ្វ**ក៏បង្គាប់ទាហានឱ្យនាំខ្លួន**លីប៉ោ**ចេញទៅសម្លាប់។ ខណៈកាលទាហានចូលទៅទាញយកខ្លួននោះ **លីប៉ោ**ស្រែកជេរថា អា**ឡៅពី**ត្រចៀកយារ! អាឯងមិនគិតដល់គុណអញសោះ កាលគ្រា**គីឡោង**នឹងធ្វើអន្តរាយវា កុំតែអញគិតកលឧបាយបាញ់ធ្នូឱ្យត្រូវចុងទួន វាក៏មិនមែនរួចជីវិតទេ ឥឡូវវាត្រឡប់រមិលគុណអញវិញ។ ទទួលទាហានចូឆ្វចាប់ខ្លួន**តៀវលៀវ**ចងនាំមកទៀត។ **តៀវលៀវ**ឮ**លីប៉ោ**ថាដូច្នោះ ក៏និយាយនឹង**លីប៉ោ**ថា កើតមកជាជាតិទាហានហើយ មិនត្រូវស្តាយជីវិតទេ បើត្រូវស្លាប់ក៏ស្លាប់ទៅចុះ ត្រូវចុះតែឈ្មោះឱ្យជាប់ក្នុងពង្សាវតារ។ **លីប៉ោ**បានស្តាប់**តៀវលៀវ**ថាដូច្នោះ ក៏ស្ងៀម ទាហានទាំងពួងក៏នាំខ្លួន**លីប៉ោ**ចេញទៅប្រហារជីវិតហើយកាត់ក្បាលដោតនៅមុខទ្វារស្រុក។

ទាហានក៏នាំខ្លួន**តៀវលៀវ**ឡើងលើសើនជួបនឹង**ចូឆ្វ** ៗក៏ថា **តៀវលៀវ**! អ្នកឯងនេះមានរូបរាងមាំមួនសមជាសេនាទាហាន មួយទៀតយើងក៏នៅចាំថា អ្នកឯងនេះហើយដែលច្បាំងនឹងយើងម្តង។ **តៀវលៀវ**ឆ្លើយថា កាលច្បាំងនៅស្រុកប៉ាក់អៀងនោះលោកភ្លេចទៅហើយឬ ខ្ញុំនៅគិតស្តាយពេកណាស់។ **ចូឆ្វ**សួរថា អ្នកឯងស្តាយអ្វី? **តៀវលៀវ**តបថា ខ្ញុំស្តាយកាលដុតស្រុកប៉ាក់អៀងនោះភ្លើងឆេះតិចពេក បើភ្លើងឆេះខ្លាំងប្រហែលស្លាប់អាសត្រូវរាជសម្បត្តិឯងបាត់ទៅហើយ។ **ចូឆ្វ**បានឮដូច្នោះក៏មានសេចក្តីអាប់យសណាស់ ស្រែកថា "ខ្លួនអាឯងជាឈ្លើយនឹងស្លាប់ជីវិតឥឡូវហើយ ហេតុម្តេចក៏ហ៊ាននិយាយទ្រគោះឱ្យអញដូច្នេះ?" ថាហើយក៏

ហួតគ្រប៊ីនឹងកាប់**តៀវលៀវ**។ ក្នុងខណៈនោះ **តៀវលៀវ**ក៏ឥតញញើតឱនកទៅឲ្យ**ចូឆូ**កាប់។ ទទួល**គួនអ៊ូ**ចូលទៅហាមឃាត់**ចូឆូ** ហើយគំនាប់ថា ដែលលោកនឹងសម្លាប់**តៀវលៀវ**នោះសូមឲ្យបង្អង់សិន ព្រោះ**តៀវលៀវ**ជាមនុស្សសុចរិតពិតត្រង់ គួរចិញ្ចឹមរក្សាទុកឲ្យនៅធ្វើរាជការនឹងលោក បើទៅមុខហើយ**តៀវលៀវ**ត្រឡប់វៀចគិតប្រទូសរ៉ាយនឹងលោកវិញ សុំឲ្យលោកកាត់ក្បាលខ្ញុំបាទចុះ។

**ចូឆូ**បានស្តាប់ដូច្នោះ ក៏មានសេចក្តីត្រេកអរឆ្លើយថា "យើងដឹងហើយ គឺចិត្ត**តៀវលៀវ**នេះជាមនុស្សទៀងត្រង់ល្អណាស់ ដែលយើងធ្វើដូច្នោះប្រាថ្នានឹងពិសោធចិត្ត**តៀវលៀវ**លមើល បើជាទាហានមែននឹងមិនខ្លាចស្លាប់ទេ។ ឥឡូវយើងឃើញចិត្ត**តៀវលៀវ**ជាមនុស្សមាំមួន គួរចិញ្ចឹមរក្សាទុកតទៅបាន" និយាយហើយក៏ក្រោកទៅស្រាយចំណង**តៀវលៀវ**ចេញទាំងអស់ ហើយយកអាវយ៉ាងល្អឲ្យ**តៀវលៀវ**ពាក់ ហើយដឹកដៃទៅអង្គុយក្នុងទីសមគួរ។ **តៀវលៀវ**មានចិត្តត្រេកអរ ក៏ឱនគំនាប់ហើយនិយាយថា ដែលមហាឧបរាជមានសេចក្តីករុណាទុកអាយុជីវិតខ្ញុំបាទឲ្យរស់នៅដូច្នេះ ព្រះតេជព្រះគុណធ្ងន់មិនមានទីបំផុត។ ខ្ញុំបាទនឹងសុំនៅជួយធ្វើរាជការនឹងលោកត្រាតែអស់ជីវិត។ **ចូឆូ**ក៏តាំង**តៀវលៀវ**ជាចុងឡុងជៀង គឺនាយទាហានទោ ហើយក៏ចាត់ប្រើ**តៀវលៀវ**ទៅបញ្ចុះបញ្ចូល**ចុងប៉ា**ជាសេនា**លីប៉ោ**។ ឯ**ចុងប៉ា**កាលបានដឹងដំណឹងថា**លីប៉ោ**ស្លាប់ហើយ ឥឡូវ**តៀវលៀវ**ចូលទៅនៅនឹង**ចូឆូ**ដូច្នោះ **ចុងប៉ា**ក៏បបួល**ស៊ុនគួន១, ង៉ំគុន១, អ៊ិនឡេ១** ចោរទាំងបីនាក់នៅតែ**សៀងហ្ស៊ី**រត់ទៅពីទីនោះបាត់។ **ចូឆូ**ឃើញ**ចុងប៉ា**និងទាហាននោះមក ក៏ទទួលរាក់ទាក់រួសរាយណាស់ តាំង**ចុងប៉ា**ជានាយទាហានធំ ឯនាយចោរទាំងបីតាំងជានាយទាហានរង ហើយឲ្យ

លើកពលទៅគយល្បាតលាតកងក្រវែលដែនខេត្តតាមមាត់សមុទ្រ ដើម្បីការពារសត្រូវ។

ក្នុងសម័យនោះ **ចូឆ្វ**ឲ្យរង្វាន់បំណាច់នាយកងនាយទ័ព និងពលទាហានធំតូចតាមសមគួរ ហើយឲ្យលើកគ្រប់គ្រួ**លីប៉ោ**ចូលទៅក្រុងហ៊្វិតោ។ ឯ**ចូឆ្វ**ក៏លើកទ័ពត្រឡប់ទៅស្រុកឈីជីវ។ អាណាប្រជានុរាស្ត្រទាំងពួងដឹងដូច្នោះ ក៏តែងតុតាំងគ្រឿងសម្ភារបូជាអុជទានធូបគំនាប់ជាកិត្តិស័ព្ទ កិត្តិយស**ចូឆ្វ**ទាំងបរិវេណ។ បណ្ដារាស្ត្រទាំងនោះជម្រាប**ចូឆ្វ**ថា សុំឲ្យលោកតាំង**ឡៅពី**ទុកជាចៅហ្វាយស្រុកឈីជីវចុះ។ **ចូឆ្វ**តបថា គ្រានេះ**ឡៅពី**មានបំណាច់នឹងរាជការផែនដីច្រើនណាស់ យើងនឹងនាំខ្លួនចូលទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ**សិន បើទ្រង់ប្រោសព្រះរាជទានគុណបំណាច់ស្រេចហើយ ទើបនឹងវិលត្រឡប់មកឈរខេត្តតទៅ។ **ចូឆ្វ**ក៏ចាត់ទាហានឲ្យនៅព្យាបាលភរិយាបុត្រ**ឡៅពី**នៅក្នុងស្រុកឈីជីវនោះ។

រួច**ចូឆ្វ**ក៏នាំ**ឡៅពី**លើកកងទ័ពត្រឡប់ចូលទៅក្រុងហ៊្វិតោ កាលទៅដល់ហើយក៏ចូលទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ** ហើយក្រាបទូលថា គ្រានេះ**ឡៅពី**ធ្វើរាជការមានគាប់ប្រសើរជាច្រើនណាស់។ ព្រះចៅ**ហៀនតេ** ទ្រង់ព្រះសណ្ដាប់ក៏មានព្រះទ័យសោមនស្សត្រេកអរ ត្រាស់ឲ្យហៅ**ឡៅពី**ចូលទៅគាល់ ហើយត្រាស់សួរថា អ្នកឯងជាបុត្រអ្នកឯណា? **ឡៅពី**ក្រាបទូលថា ទូលព្រះបង្គំជាខ្ញុំជាបុត្រ**ឡៅហេង** បិតាទូលព្រះបង្គំជាខ្ញុំជាពូជព្រះរាជវង្សព្រះចៅ**កេងតេ**។ ព្រះចៅ**ហៀនតេ**ទ្រង់សណ្ដាប់ក៏ត្រាស់បង្គាប់អាល័ក្សឲ្យយកពង្សាវតារមកទត រាប់តាមលំដាប់ក្សត្រតៗមកក៏ឃើញថា **ឡៅពី**ជាមារបស់ព្រះអង្គ ហើយទ្រង់តាំង**ឡៅពី**ជាទីយីតេងហៅ គឺសេនា

បតីធំខាងក្រុមវាំង។ អំណើះតមកព្រះចៅ**ហៀនតេ** ទ្រង់រាប់អាន**ឡៅពី**ហៅមា។ **ចូឆូ**និង**ឡៅពី**ក៏ថ្វាយបង្គំលាថយទៅទីលំនៅរៀងខ្លួន ។

**ស៊ុនហុក**ចូលទៅជម្រាប**ចូឆូ**ថា ឥឡូវនេះព្រះចៅ**ហៀនតេ**ទ្រង់រាប់អាន**ឡៅពី** ថាជាពូជព្រះរាជវង្ស អំណើះតទៅគង់តែ**ឡៅពី**នឹងគិតប្រទូសរ៉ាយដល់លោកជាប្រាកដ ។ **ចូឆូ**តបថា ដែលព្រះចៅ**ហៀនតេ**រាប់អាន**ឡៅពី**ជាពូជព្រះរាជវង្សនោះមិនជាអ្វីទេ ព្រោះកិច្ចការរាជការទាំងពួងជាកម្មសិទ្ធិនៅលើយើងទាំងអស់ ឧបមាដូចពងមាន់នៅក្នុងកណ្តាប់ដៃយើង ទោះបី**ឡៅពី**នឹងប្រទូសរ៉ាយដល់យើង ៗក៏មិនត្រូវញញើតសោះ។ សព្វថ្ងៃនេះយើងនៅបារម្ភតែ**អៀវពីវ** ដែលជាប្អូននឹង**អ៊ួនសៀវ,** **អ៊ួនសុត**ប៉ុណ្ណោះ ក្រែងវាមកធ្វើកលសឹកក្នុងទីក្រុង ព្រោះ**អ៊ួនសៀវ**និង**អ៊ួនសុត**នៅមានកម្លាំងច្រើន ។ **ស៊ុនហុក**ស្តាប់យល់ត្រូវ។

**ចូឆូ**ទើបប្រើឧបាយកល ឲ្យបក្សពួករបស់ខ្លួនទៅលបស៊ើបស្តាប់ថា **អៀវពីវ**ផ្ញើសំបុត្រសម្ងាត់ទៅដល់**អ៊ួនសុត**ថា ឲ្យ**អ៊ួនសុត**លើកទ័ពមកវាយស្រុកហ៊ូតោ **អៀវពីវ**នឹងទទួលធ្វើកលសឹកខាងក្នុង។ **ចូឆូ**ស៊ើបដឹងការណ៍ប្រាកដ ក៏បង្គាប់ឲ្យចាប់ខ្លួន**អៀវពីវ**ដាក់គុកទុក ហើយឲ្យ**ម៉ាន់ថង**សម្រេចសេចក្តីធ្វើទោស។ **ខុងយ៉ុង**ដឹងការណ៍ក៏ចូលទៅជួបនឹង**ចូឆូ**ហើយជម្រាបថា **អៀវពីវ**ធ្វើរាជការជានាហ្មឺនត ៗពីជីតានិងបិតាដរាបមកដល់**អៀវពីវ**នេះ ៗមិនដែលធ្វើសេចក្តីប្រទូសរ៉ាយដល់អ្នកឯណាសោះ ដែលលោកជឿស្តាប់ពាក្យញុះញង់ មិនពិចារណាឲ្យឃើញវៀចនិងត្រង់សិននោះ មិនគួរសោះ។ ហេតុនេះខ្ញុំបាទសុំឲ្យលោកពិចារណាតាមយុត្តិធម៌សិន។ **ចូឆូ**តបថា ការនេះជាព្រះរាជតម្រាស់ព្រះចៅ**ហៀនតេ** មិនមែនយើងធ្វើតាមអំពើចិត្តទេ។

**ខុងយ៉ុង**ថា មហាឧបរាជជាអធិបតីសម្រេចរាជការក្នុងព្រះនគរ ទោះបីព្រះរាជតម្រាស់ព្រះចៅ**ហៀនតេ**ត្រាស់ឱ្យធ្វើយ៉ាងណា ក៏ត្រូវតែលោកពិចារណាឱ្យឃើញខុសត្រូវសិន។ **ចូឆ្វ**បានឮដូច្នោះក៏មានសេចក្ដីខ្មាសណាស់ ទើបឱ្យដោះលែង**អៀវពីវ**ចេញពីក្នុងគុក តែឱ្យហូតងារពីតំណែងមន្ត្រីខ្ញុំរាជការ។ **អៀវង៉ាន់**ជានាហ្មឺនខ្ញុំរាជការព្រះចៅ**ហៀនតេ** ដឹងសេចក្ដីដូច្នោះ ក៏ធ្វើរឿងរ៉ាវក្រាបបង្គំទូលព្រះចៅ**ហៀនតេ**ឱ្យទ្រង់ជ្រាបថា **ចូឆ្វ**ធ្វើការអែបបន្ទំព្រះតម្រាស់យកខ្លួន**អៀវពីវ**ទៅដាក់គុក ហើយហូតងារចេញពីរាជការ។ ព្រះចៅ**ហៀនតេ**ជ្រាបហើយ ក៏មិនត្រាស់ថាប្រការម្ដេច។ **ចូឆ្វ**ដឹងដូច្នោះក៏ប្រើទាហានទៅចាប់ខ្លួន**អៀវង៉ាន់**យកទៅប្រហារជីវិត។ តាំងពីនោះរៀងមក នាហ្មឺនធំតូចនៅក្នុងក្រុងហ៊ូតោ ក៏កោតខ្លាច**ចូឆ្វ**ខ្លាំងណាស់។

**ធៀយ៉ុក**ទីប្រឹក្សាចូលទៅនិយាយនឹង**ចូឆ្វ**ថា ឥឡូវនេះបណ្ដានាហ្មឺនតូចធំនិយមកោតខ្លាចអំណាចមហាឧបរាជទាំងអស់ហើយ ហេតុម្ដេចមហាឧបរាជមិនគិតយករាជសម្បត្តិតែម្ដងទៅ នឹងបង្អង់ទុកនៅចាំដល់ណាទៅទៀត? **ចូឆ្វ**តបថា វេលានេះនៅមាននាហ្មឺនមុខមន្ត្រី ដែលព្រះចៅ**ហៀនតេ**ទុកព្រះទ័យច្រើនណាស់ យើងនឹងធ្វើការរូតរះមិនបានសម្រេចដូចចិត្តនៅឡើយ បើដូច្នោះត្រូវយើងរិះគិតអញ្ជើញព្រះចៅ**ហៀនតេ**ទៅប្រពាតព្រៃមើលកលការសិន និយាយហើយក៏ចាត់ចែងគ្រឿងប្រដាប់សម្រាប់ប្រពាតព្រៃទុកព្រមស្រេច ក៏ចូលទៅក្រាបទូលអញ្ជើញស្ដេចចេញទៅប្រពាតព្រៃជាកំសាន្ត។

ព្រះចៅ**ហៀនតេ**ត្រាស់ថា នឹងទៅលេងព្រៃនោះមិនត្រូវព្រួយការនឹងសេនាទាហានទេ ព្រោះគ្មានផលប្រយោជន៍អ្វីសោះឡើយ។ **ចូឆ្វ**ក្រាបទូលថា ប្រវេណីនៃ

ព្រះមហាក្សត្រពីបុរាណ ស្ដេចចេញទៅប្រពាតព្រៃសំសាន្តក្នុងមួយឆ្នាំបួនដង ត្រូវល្បងថ្វីដៃសេនាទាហានផង ឥឡូវក្នុងព្រះរាជអាណាខេត្តក៏មិនទាន់រាបទាបជាប្រក្រតី សូមអញ្ជើញស្ដេចចេញទៅប្រពាតព្រៃ នឹងបានទតខ្ញុំរាជការទាំងពួងល្បងមើលថ្វីដៃបាញ់ធ្នូ។ ព្រះចៅ**ហៀនតេ**ទ្រង់ព្រះសណ្ដាប់ក៏មិនអាចទទឹងទាស់នឹង**ចូវឆ្វូ**បាន **ចូវឆ្វូ**ក៏បានប្រមូលពលទាហានដប់ម៉ឺន ព្រមដោយគ្រឿងសាស្ត្រាវុធ។ ព្រះចៅ**ហៀនតេ**ក៏យាងគង់លើទីនាំងអស្សតរ បណ្ដានាហ្មឺនមុខមន្ត្រី និង**ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**ក៏ជិះសេះហែហាមអមស្ដេចចេញទៅ។ ឯ**ចូវឆ្វូ**ក៏ធ្វើឫកពារដូចជាស្ដេច ជិះសេះអែបព្រះទីនាំងមិនបានកោតក្រែងព្រះចេស្ដា លុះស្ដេចយាងទៅដល់ជាយព្រៃព្រឹក្សាមានវល្លិរបោះមួយអន្លើក៏ឲ្យឈប់កងទ័ព។ នាហ្មឺននិងសេនាទាំងពួង ក៏លើកគ្នាដេញហ្វូងសត្វកៀរប្រមូលចូលទៅត្រង់ច្រកភ្នំមុខព្រះភក្ត្រ។ ព្រះចៅហៀនតេក៏ទ្រង់ត្រាស់នឹង**ឡៅពី**ថា យើងចង់ឃើញថ្វីដៃមាបាញ់សត្វនោះល្បងមើល។ **ឡៅពី**ទទួលព្រះរាជឱង្ការហើយ ក៏ឡើងសេះបាញ់ធ្នូទៅត្រូវរមាំងមួយដួលចុះនៅទីនោះ។

ព្រះចៅហៀនតេក៏ទ្រង់ធ្នូបាញ់ប្រើសមិនត្រូវ ទើបត្រាស់នឹង**ចូវឆ្វូ**ថា អ្នកចូរបាញ់ប្រើសនោះឲ្យបាន។ **ចូវឆ្វូ**ទូលថា បើព្រះអង្គនឹងចង់ទតថ្វីដៃទូលព្រះបង្គំជាខ្ញុំសុំព្រះករុណាព្រះរាជទានធ្នូព្រះសែងមកចុះ ទូលព្រះបង្គំជាខ្ញុំនឹងបាញ់ថ្វាយទត។ ព្រះចៅ**ហៀនតេ**ក៏ហុចព្រះសែងកៅទ័ណ្ឌទ្រង់ឲ្យ**ចូវឆ្វូ** ៗទទួលហើយក៏លើកឡើងបាញ់ទៅត្រូវប្រើសនោះដួលចុះមួយរំពេច។ នាហ្មឺនទាំងពួងដែលនៅពីចម្ងាយឃើញព្រះសែងកៅទ័ណ្ឌចំព័ន្ធរូបមក្ករ ត្រូវប្រើសដួលដូច្នោះ ក៏ស្មានថា ព្រះចៅ**ហៀនតេ**ទ្រង់ផ្ដែងព្រះអង្គឯង ទាំងអស់គ្នាក៏ចូលមកក្រាបថ្វាយបង្គំចំពោះព្រះភក្ត្រ។ **ចូវឆ្វូ**ឃើញដូច្នោះក៏កើតទោមនស្សប្រិតា បរសេះកាត់មុខព្រះភក្ត្រចេញទៅហើយស្រែក

ថា ខ្លួនយើងបាញ់ត្រូវប្រើសនេះ ។ នាហ្មឺននិងសេនាទាហានទាំងពួង ឃើញ**ចូវឆ្វ**ធ្វើកិរិយាមើលងាយព្រះចេស្ដាដូច្នោះ ក៏ធ្លាក់ស្មារតីស្រឡាំងកាំងទាំងអស់គ្នា។

**គួនអ៊ូ**ឃើញ**ចូវឆ្វ**ធ្វើអាកប្បកិរិយាដូច្នោះក៏នឹងខឹងណាស់ បរសេះចូលទៅលើកដាវឡើងនឹងកាប់**ចូវឆ្វ** ហើយក្រឡេកមកមើលមុខ**ឡៅពី** ៗក៏ញាក់ភ្នែកបញ្ឈប់ ហើយគ្រវីក្បាល។ **គួនអ៊ូ**ក៏ឈប់ថយចេញ។ **ឡៅពី**និយាយថា ថ្វីដៃមហាឧបរាជបាញ់ធ្នូនេះនឹងរកអ្នកឯណាស្មើមិនបានទេ។ **ចូវឆ្វ**ក្អែងតបថា “ថ្វីដៃយើងជាប្រមាណយ៉ាងសមគួរប៉ុណ្ណោះ” ហើយត្រឡប់មុខមកគំនាប់ព្រះចៅ**ហៀនតេ** រួចក្រាបទូលថា ដែលទូលព្រះបង្គំបាញ់ទៅត្រូវប្រើសនោះ ព្រោះព្រះសែងកៅទ័ណ្ឌនិងព្រះបារមីរបស់ព្រះអង្គជួយទ្រទ្រង់។ ព្រះចៅហៀនតេទ្រង់មិនជ្រាបឧបាយកល**ចូវឆ្វ** ក៏នាំនាហ្មឺនមុខមន្ត្រីក្រសាលដេញសត្វកំសាន្តព្រះទ័យ លុះពេលរសៀលហើយក៏ស្ដេចត្រឡប់ចូលក្នុងព្រះបរមរាជវាំងវិញ។ **ចូវឆ្វ**ក៏យកព្រះសែងកៅទ័ណ្ឌទុកជាកម្មសិទ្ធិមិនបានថ្វាយទៅវិញ។ ឯនាហ្មឺនមុខមន្ត្រីក៏ត្រឡប់ទៅទីលំនៅរៀងខ្លួន។

**គួនអ៊ូ**និយាយនឹង**ឡៅពី**ថា **ចូវឆ្វ**ធ្វើកិរិយាមើលងាយព្រះចេស្ដា ខ្ញុំប៉ងនឹងសម្លាប់ចេញ ហេតុម្ដេចបានជាបងឃាត់ខ្ញុំ? **ឡៅពី**តបថា ព្រះចៅ**ហៀនតេ** និងខ្លួនបងវេលានោះនៅក្នុងចំណោមទាហាន**ចូវឆ្វ** បើប្អូនសម្លាប់**ចូវឆ្វ**ហើយ ទាហានគេក៏សម្លាប់បងវិញ ហើយនឹងធ្វើអន្តរាយដល់ព្រះចៅ**ហៀនតេ**ផង ព្រោះហេតុនេះបានជាបងហាមឃាត់។

ខណៈនោះព្រះចៅ**ហៀនតេ**យាងចូលទៅរកព្រះនាង**ហុកហៅ** ជាអគ្គមហេសីហើយត្រាស់ប្រាប់ពីរឿងចេញទៅប្រពាតព្រៃ **ចូវឆ្វ**ធ្វើកិរិយាមើលងាយកណ្ដាលទីប្រជុំ ឲ្យព្រះអគ្គមហេសីស្ដាប់គ្រប់ប្រការ ទ្រង់ត្រាស់ថាខ្លួនយើងបាន

សោយរាជសម្បត្តិនេះ មានតែសេចក្តីព្រួយរំខានក្នុងចិត្តឥតស្រាកស្រាន្ត កាលគ្រា**តាំងតុះ**ក៏វាធ្វើអាក្រក់នឹងយើងច្រើន កាលគ្រា**លីឈុយ, គុយគី**ក៏វាធ្វើអន្តរាយដល់យើងផ្សេងៗ ឥឡូវយើងគិតថា **ចូឆ្វ**នឹងជួយទំនុកបម្រុងផែនដី ក៏ត្រឡប់មកធ្វើអប្រិយអាក្រក់ដល់យើងទៀត ជីវិតរបស់យើងនិងនាងនេះ មិនដឹងជាមានសេចក្តីស្លាប់មកដល់ថ្ងៃណាទេ។ ព្រះចៅ**ហៀនតេ**ទ្រង់ពណ៌នារួចហើយ ក៏ទ្រង់ព្រះកន្សែងពិលាប។ ព្រះអគ្គមហេសីបានទ្រង់ជ្រាបតាមក្រសែព្រះរាជឱង្ការព្រះស្វាមី ក៏ទ្រង់ព្រះកន្សែងថ្លែងថា នាហ្មឺនមុខមន្ត្រីធំតូចទាំងប៉ុន្មានសុទ្ធតែបានស៊ីបៀវត្សគ្រប់គ្នា ម្តេចក៏ចេះតែមើលបំណាំមិនជួយទំនុកបម្រុងផែនដី លះបង់មេត្រីទុកឲ្យព្រះអង្គសោយទុក្ខលំបាកដូច្នេះ ក៏ជាកេណ្ឌកម្មសម្រាប់ព្រះអង្គនិងខ្ញុំម្ចាស់។

ពេលនោះ ទទួល**ហុកអ៊្វន**ជាបិតាព្រះនាង**ហុកហៅ**ចូលទៅគាល់ខាងក្នុង ឃើញព្រះចៅ**ហៀនតេ**ទ្រង់ព្រះកន្សែងក៏ទូលសួរថា ព្រះអង្គទ្រង់ទាស់ព្រះហឫទ័យពីការអ្វី ឬនឹងនរណា? ព្រះចៅ**ហៀនតេ**ក៏អធិប្បាយរ៉ាយរឿង ដែល**ចូឆ្វ**ធ្វើល្មើសមើលងាយប្រមាថឲ្យ**ហុកអ៊្វន**ស្តាប់គ្រប់ប្រការ។ **ហុកអ៊្វន**ក៏ទូលថា កាលស្តេចចេញទៅប្រពាតព្រៃ ថ្ងៃនោះទូលព្រះបង្គំជាខ្ញុំក៏បានឃើញជាក់ច្បាស់ទាំងអស់ហើយ តែមិនដឹងធ្វើប្រការម្តេច សូម្បីនាហ្មឺនមុខមន្ត្រីទាំងពួងក៏មិនមានឈឺចិត្តក្តៅជួសព្រះអង្គ ទូលព្រះបង្គំឃើញតែ**តាំងស៊ីន** ជាព្រះរាជវង្សនឹងជួយគិតអានគិតកម្ចាត់**ចូឆ្វ**ចេញបាន។

ព្រះចៅ**ហៀនតេ**ត្រាស់ថា ការទាំងនេះគួរនឹងរក**តាំងស៊ីន**ចូលមកគាល់ នឹងបានពិគ្រោះប្រឹក្សា ឬនឹងគិតប្រការម្តេច? **ហុកអ៊្វន**ទូលថា សព្វថ្ងៃនេះ**ចូឆ្វ**នឹងបានទុកចិត្តដល់ព្រះអង្គក៏ទេ វាមានប្រើមនុស្សស្រីជាទំនុកទុកចិត្តឲ្យចូលមកចាំស្តាប់

ការល្អអាក្រក់ក្នុងព្រះបរមរាជវាំងជានិច្ច ដែលទ្រង់នឹងឲ្យហៅ**តាំងស៊ីន**ចូលមកក្រាបបង្គំគាល់នោះ ខ្លាចដឹងទៅដល់**ចូឆ្វ** ការដែលគិតទុកនឹងខូចអាសារទៅ សូមព្រះអង្គទ្រង់ព្រះអក្សរលាក់ទុកក្នុងស្រទាប់អាវឲ្យកំបាំង រួចទ្រង់ឲ្យហៅ**តាំងស៊ីន**ចូលមកគាល់ រួចយកអាវនោះព្រះរាជទានឲ្យ**តាំងស៊ីន** ហើយទ្រង់ប្រាប់**តាំងស៊ីន**ថា បើបានទៅដល់ផ្ទះហើយ ឲ្យយកព្រះអក្សរចេញមកមើល ឃើញថា**ចូឆ្វ**នឹងមិនបានដឹងសេចក្ដីកំបាំងនោះឡើយ។ ព្រះចៅហៀនតេក៏ទ្រង់យល់ឃើញត្រូវ **ហុកអ៊្វន**ក៏លាចេញទៅ។

ព្រះចៅ**ហៀនតេ** យកព្រះសែងចាក់ម្រាមព្រះហស្ដ ឲ្យព្រះលោហិតហូរចេញមក ហើយយកពិតជ្រលក់សរសេរលើផែនព្រៃសតាមព្រះរាជតម្រិះ ហើយបង្គាប់ព្រះអគ្គមហេសីលាក់ស៊ិកទុកក្នុងស្រទាប់ជាយអាវ ហើយទ្រង់ឲ្យហៅខ្លួន**តាំងស៊ីន**ចូលមកគាល់ មានព្រះរាជឱង្ការត្រាស់ថា “កាលពីយប់មិញ យើងនិងព្រះអគ្គមហេសីនឹកដល់អ្នក កាលគ្រានាំយើងរត់ពី**លីឈុយ, គុយគី**ទៅនោះ សេចក្ដីគាប់ប្រសើររបស់អ្នកក៏មានលើយើងច្រើនណាស់ ហេតុនេះយើងឲ្យអាវនេះដល់អ្នកជាបំណាច់យ៉ាងតិចតួច” ហើយទ្រង់ឱនខ្សិបថា បើទៅដល់ផ្ទះវិញឲ្យយកសំបុត្រក្នុងស្រទាប់អាវមើល បើបានឃើញអាការទុក្ខក្ដៅរបស់យើងយ៉ាងណា ចូរប្រញាប់គិតការនេះឲ្យសម្រេច សុំកុំឲ្យអ្នកឯណាដឹងដល់យល់សេចក្ដី។ **តាំងស៊ីន**ក៏ទទួលយកអាវដែលទ្រង់ព្រះរាជទាន ហើយក៏លើកពាក់ចំពោះព្រះភក្ត្រ រួចក៏ក្រាបថ្វាយបង្គំលាចេញចាកទ្វារព្រះបរមរាជវាំងខាងក្នុងនឹងតម្រង់ទៅផ្ទះ។

ខណៈនោះ ស្រីដែលស៊ើបការណ៍ក៏រត់ទៅជម្រាប**ចូឆ្វ**ថា ឥឡូវព្រះចៅ**ហៀនតេ**ត្រាស់ឲ្យហៅ**តាំងស៊ីន**ចូលទៅគាល់ ហើយព្រះរាជទានអាវឲ្យជារង្វាន់ ខ្ញុំ

ឃើញចម្លែកណាស់។ **ចូឆ្វ**ឮដូច្នោះក៏ស្រូតចូលទៅក្នុងព្រះបរមរាជវាំង ទទួលជួបនឹង**តាំងស៊ីន**ចេញមកដល់មាត់ទ្វារ ក៏សាកសួរថា អ្នកមកពីណា? **តាំងស៊ីន**ឆ្លើយថា មានព្រះរាជឱង្ការហៅខ្ញុំបាទឲ្យចូលទៅគាល់ ហើយទ្រង់ប្រោសព្រះរាជទានអាវនេះឲ្យខ្ញុំបាទ។ **ចូឆ្វ**សួរថា ដែលទ្រង់ប្រោសព្រះទានអាវនេះ អ្នកមានបំណាច់អ្វី? **តាំងស៊ីន**ឆ្លើយថា ទ្រង់ព្រះតម្រិះរឭកឃើញកាលគ្រាខ្ញុំបាទនាំស្ដេចរត់ចេញ ពីចំណោម**លីឈុយ, គុយគី**។ ចូឆ្វបានឮដូច្នោះក៏ពិភាល់ក្នុងចិត្ត ទើបធ្វើជានិយាយថា អ្នកមានគុណបំណាច់មែន បានជាព្រះអង្គទ្រង់ប្រោសព្រះរាជទានអាវនេះ បើដូច្នេះចូរដោះមកឲ្យយើងពាក់លមើលបន្តិច។ **តាំងស៊ីន**បានឮដូច្នោះក៏ភ័យស្លុតចិត្តសំងំស្ងៀមមិនព្រមដោះអាវនោះ។ **ចូឆ្វ**ឃើញ**តាំងស៊ីន**ធ្វើព្រងើយដូច្នោះ ក៏មានសេចក្ដីសង្ស័យ ទើបប្រើទាហានបង្ខំដោះអាវមកពិនិត្យមើល ក៏មិនបានឃើញជាប្លែក ក៏យកអាវនោះទៅពាក់ហើយធ្វើជាសើចថា អាវនេះសមគួរតែខ្លួនយើង អ្នកឲ្យយើងទៅឬអ្វី? **តាំងស៊ីន**តបថា អាវនេះជារបស់ព្រះរាជទាន ដែលខ្ញុំបាទនឹងជូនទៅលោកនោះមិនគួរ បើលោកត្រូវការប្រាថ្នានឹងយកទុក ក៏តាមចិត្តលោកចុះ។ **ចូឆ្វ**តបថា “យើងនឹងប្រាថ្នាយកមកធ្វើអ្វី អាវយ៉ាងនេះ” ហើយក៏ដោះបោះទៅឲ្យ**តាំងស៊ីន**វិញ **តាំងស៊ីន**ក៏លា**ចូឆ្វ**ទៅផ្ទះ។

លុះវេលាយប់ **តាំងស៊ីន**ចូលទៅក្នុងដំណេកម្នាក់ឯង យកអាវនោះមកពិនិត្យមើលសព្វគ្រប់ ក៏ឃើញព្រែសនៅក្នុងជាយស្រទាប់ ហែកចេញមកមើល ឃើញជាឡាយព្រះហស្តលេខានៃព្រះចៅ**ហៀនតេ** ទ្រង់លិខិតដោយលោហិតជាសេចក្ដីថា “តាំងពី**ចូឆ្វ**បានមកនៅក្នុងស្រុកក្រុងបានបួនឆ្នាំហើយ ធ្វើការអាក្រក់ផ្សេងៗបំពារលើព្រះរាជអាជ្ញា នឹងតាំងចិញ្ចឹមនាហ្មឺនខ្ញុំរាជការ ឬចុះទោសអ្នកឯណាក៏តាមអំពើ

ចិត្ត មិនមានសេចក្តីកោតក្រែងព្រះចេស្តាបារមី មិនយកសេចក្តីក្រាបទូលស្នើឱ្យទ្រង់ជ្រាប លុះតែយើងអត់ទ្រាំពុំបាន ទើបចាក់យកព្រះលោហិតក្នុងម្រាមព្រះហស្ត លិខិតជាសេចក្តីអាថ៌កំបាំងទ្រង់ព្រះរាជទានមក បើ**តាំងស៊ីន**យល់ឃើញមន្ត្រី ខ្ញុំរាជការឯណា មានសតិបញ្ញាទៀងត្រង់នឹងផែនដី ក៏បបួលមន្ត្រីនោះមកជាគូរិះគិតកម្ចាត់**ចូឆូ**ជាសត្រូវរាជសម្បត្តិឱ្យខ្ចាត់វិនាសចេញ ទើបយើងនិងអាណាប្រជានុរាស្ត្រទាំងពួងនឹងបានអស់ទុក្ខទោម្នេញ នៅជាសុខក្សេមក្សាន្តតទៅ។

ខណៈនោះ**ជូហុក**ជាមន្ត្រីខ្ញុំរាជការ ជាមិត្តភក្តិនឹង**តាំងស៊ីន**ធ្លាប់ទៅមករកគ្នាជានិរន្តរ៍ ក៏ចូលទៅឃើញព្រះសុភអក្សរនៅដៃអាវ**តាំងស៊ីន** ដែលកំពុងដេកលក់នោះ បានគល់មើលមុខមាត់ឃើញសៅហ្មងគងដៃលើដើមទ្រូង **ជូហុក**ក៏ហូតយកលិខិតនោះមកលាមើល ឃើញជាឡាយព្រះហស្តព្រះចៅ**ហៀនតេ**ទ្រង់សរសេរដោយព្រះលោហិត ដាក់សេចក្តីល្អិតក្នុងសំបុត្រនោះ គឺឱ្យ**តាំងស៊ីន**គិតសម្លាប់**ចូឆូ**ចេញ។ **ជូហុក**ក៏យកឡាយព្រះហស្តនោះមិញលាក់ស៊កក្នុងដៃអាវរបស់ខ្លួន ហើយកេះដាស់**តាំងស៊ីន**ឱ្យភ្ញាក់ឡើងនិយាយថា ហេតុម្តេចក៏មកមានសេចក្តីសប្បាយដេកលក់ដូច្នេះ? **តាំងស៊ីន**ភ្ញាក់ឡើងរាវរកឡាយព្រះហស្តមិនឃើញក្នុងដៃអាវក៏ភ័យស្រឡាំងកាំង។ **ជូហុក**ឃើញដូច្នោះក៏ក្លែងនិយាយថា អ្នកនឹងគិតប្រទូសរ៉ាយ**ចូឆូ**ឬ? យើងនឹងទៅប្រាប់**ចូឆូ**ឱ្យដឹង។ **តាំងស៊ីន**បានស្តាប់**ជូហុក**និយាយដូច្នោះ ក៏រឹតតែភ័យពន់ប្រមាណ ស្មានមើលទៅដូចនឹងរលត់ជីវិតសូន្យសោះ ហើយថា បើអ្នកនឹងទៅប្រាប់**ចូឆូ**នោះមិនមែនស្លាប់តែខ្លួនយើងមួយទេ បីដូចជាអ្នកធ្វើឱ្យក្ស័យព្រះជន្មព្រះចៅ**ហៀនតេ**ផង។ **ជូហុក**ឆ្លើយថា អ្នកកុំវិតក្កព្រួយឡើយ ខ្ញុំចង់ដឹងហើយទើបពិសោធចិត្តអ្នកមើល ខ្លួនខ្ញុំក៏ជាខ្ញុំក្រោមព្រះបាទព្រះចៅ**ហៀនតេ** សព្វថ្ងៃខ្ញុំក៏តាំងចិត្តសុចរិត

នឹងធ្វើរាជការថ្វាយស្នងព្រះគុណជាដរាប តែចោកទាបសំណាងនឹងរកនរណាជួយគិតជាចារឹកបង្គោលគ្មាន ឥឡូវបើអ្នកនៅមានគំនិតគិតនឹងរំលាងសត្រូវរាជសម្បត្តិដូចគំនិតខ្ញុំដែរ យើងទាំងពីរត្រូវខំយកអាសារផែនដីរួមសេចក្តីគិតជាមួយគ្នាតទៅ។ **តាំងស៊ីន**បានស្តាប់ក៏កើតត្រឡប់ចិត្តរីករាយសប្បាយណាស់ ទើបថា បើអ្នកតាំងចិត្តសុចរិតនឹងផែនដីមែន ខ្ញុំយល់ឃើញថាព្រះចៅ**ហៀនតេ**គង់នៅមានព្រះបារមីតេជះឈ្នះបច្ចាមិត្តជាប្រាកដ។ **ជូហុក**ថា ខ្ញុំនិងអ្នកបើនឹងចាប់គិតទំនុកបម្រុងផែនដីហើយ ត្រូវតែធ្វើសំបុត្រចុះសញ្ញាគ្នាជាសម្គាល់ ទើបនឹងបានតាំងចិត្តគិតការតទៅ។ ខណៈកាលកំពុងនិយាយគ្នានោះ មានមនុស្សចូលទៅប្រាប់**តាំងស៊ីន**ថា **តាន់អ៊ិប** និង**ង៉ោហ្វួន**មានការមកសុំជួប។ **តាំងស៊ីន**បានឮដូច្នោះមានចិត្តត្រេកអរនិយាយនឹង**ជូហុក**ថា **តាន់អ៊ិប** និង**ង៉ោហ្វួន**នេះជាភៀនសម្លាញ់ខ្ញុំដែរ បើដូច្នេះចូរអ្នកចូលទៅអែបនឹងវាំងននពីក្នុងសិនចុះ ខ្ញុំនឹងហៅគេចូលមក។ **តាំងស៊ីន**ក៏ឲ្យគេអញ្ជើញចូលមក អ្នកទាំងពីរនាក់ចូលមកហើយ ក៏គំនាប់គ្នាតាមទម្លាប់ហើយ**តាន់អ៊ិប**និយាយថា កាលព្រះចៅ**ហៀនតេ**ស្តេចទៅប្រពាតព្រៃ **ចូឆូ**វាធ្វើល្មើសនឹងព្រះចេស្តាជាការអាក្រក់ខ្លាំងណាស់ អ្នកមានចិត្តក្តៅខ្លះដែរឬទេ? **តាំងស៊ីន**ថា ខ្ញុំក៏ឃើញច្បាស់នឹងភ្នែកហើយ តែមិនដឹងនឹងធ្វើដូចម្តេច?

**ង៉ោហ្វួន**ថា ធម្មជាតិដែលកើតមកជាប្រុសហើយ ១បានមកនៅជាខ្ញុំរាជការ ទោះបីអាយុសង្ខារនឹងស្លាប់ក៏ពុំត្រូវស្តាយសោកស្តាយ ត្រូវខ្វល់ខ្វាយជួយយកអាសាផែនដីឲ្យបានសេចក្តីសុខសប្បាយ ដើម្បីទុកនាមឈ្មោះទៅមុខ។ **ជូហុក**ដែលអែបនៅក្នុងវាំងនន ឮដូច្នោះក៏ស្ទុះចេញមកនិយាយនឹង**តាំងស៊ីន**ថា អ្នកសូមធ្វើជាបន្ទាល់យើងផងចុះ ព្រោះវេលានេះ**តាន់អ៊ិប**និង**ង៉ោហ្វួន**គិតគ្នានឹងប្រទូសរ៉ាយ**ចូឆូ** ខ្ញុំនឹងនាំ

យកសេចក្ដីនេះទៅជម្រាប**ចូឆ្វ**ឲ្យដឹង។ **តាន់អ៊ិប**បានស្ដាប់ក៏នឹកខឹងឆ្លើយថា កើតមកជាខ្ញុំផែនដីត្រូវតែមានសេចក្ដីកតញ្ញូនឹងព្រះមហាក្សត្រ មិនត្រូវកោតខ្លាចក្រែងជីវិតនឹងអន្តរាយទេ។ **តាំងស៊ីន**ក៏ហាមឃាត់**តាន់អ៊ិប**ថា “អ្នកកុំអាលខឹងច្រឡោតឡើយ ការទាំងអស់នេះខ្ញុំបានគិតហើយនឹង**ជូហុក**ព្រមចិត្តគ្នាមុនអ្នកទាំងពីរទៅទៀត បានជាខ្ញុំមកឆ្លៀតប្រឹក្សានឹងអ្នកជាក្រោយ ឯ**ជូហុក**និយាយនេះ ដើម្បីពិសោធចិត្តអ្នកល្បងមើលទេ” ហើយ**តាំងស៊ីន**ក៏យកឡាយព្រហស្ដលេខាហុចឲ្យ**តាន់អ៊ិប** និង**ង៉ោហួន**មើល។ **តាន់អ៊ិប** និង**ង៉ោហួន**ឃើញច្បាស់ជាឡាយព្រះហស្ដក៏ស្រក់ទឹកភ្នែកយំយែក នឹកអាណិតព្រះចៅ**ហៀនតេ**ពន់ពេកណាស់។

**ជូហុក**និយាយថា អ្នកទាំងពីរនៅជាមួយនឹង**តាំងស៊ីន**ចុះ ខ្ញុំសុំទៅហៅ**ជូឡាន់**មកជួបទៀត។ **ជូហុក**ក៏ចេញទៅហៅ**ជូឡាន់**ចូលមក ហើយយកឡាយព្រះហស្ដបង្ហាញឲ្យមើល ទើបគិតព្រមព្រៀងគ្នាចុះឈ្មោះទុកក្នុងសេចក្ដីសញ្ញាទាំងប្រាំនាក់។ **តាំងស៊ីន**ក៏ឲ្យរៀបតុលៀងសុរា ហើយសច្ចាប្រណិធានចំពោះមុខគ្នាទៅវិញទៅមក គឺថាមិនបានយកសេចក្ដីនោះទៅបរិហារឲ្យលេចឮតទៅ។

**ម៉ាថេង**ចៅហ្វាយស្រុកសែលៀងដែលចូលមកក្នុងស្រុកក្រុង កាលព្រះចៅ**ហៀនតេ**ស្ដេចទៅប្រពាតព្រៃនោះ ក៏បានហែរស្ដេចទៅដែរ។ **ម៉ាថេង**ឃើញ**ចូឆ្វ**ធ្វើកិរិយាប្រមាថមើលងាយព្រះចេស្ដា ក៏មានសេចក្ដីឈឺចិត្តគិតទោមនស្សខ្លាំងណាស់។ មានថ្ងៃមួយ**ម៉ាថេង**ទៅរក**តាំងស៊ីន**ឯផ្ទះ។ អ្នកចាំទ្វារចូលទៅជម្រាប**តាំងស៊ីន**ថា **ម៉ាថេង**មានការមករកលោក។ **តាំងស៊ីន**កំពុងអង្គុយផឹកស្រាជាមួយនឹងមន្ត្រីបួននាក់ លុះបានឮដូច្នោះក៏ភ័យណាស់ បង្គាប់ឲ្យលើកយកតុលៀងចេញ ហើយឲ្យមន្ត្រីបួននាក់អែបលាក់ខ្លួនក្នុងឆាក រួចក៏ក្រោកចេញទៅទទួល។ **ម៉ាថេង**ក៏

គំនាប់តាមសមគួរ ក្រឡេកឃើញទឹកមុខ**តាំងស៊ីន**នៅមានឈាមស្រស់ថ្លា ក៏សម្គាល់ថា**តាំងស៊ីន**មិនមានឈឺចិត្តនឹងផែនដីក៏តូចចិត្ត ទើបថា "ខ្លួនអ្នកជាមន្ត្រីព្រះចៅ**ហៀនតេ** ទ្រង់រាប់អានជាព្រះរាជវង្ស ហេតុម្ដេចអ្នកមិនមានឈឺចិត្តនឹងការផែនដីសោះ?" ថាហើយក៏គំនាប់ប្រុងនឹងលាត្រឡប់ទៅវិញ។ **តាំងស៊ីន**ពិភាល់ក្នុងចិត្តក៏ចាប់ជាយអាវឲ្យឈប់ហើយថា ហេតុម្ដេចបានជាអ្នកថាយើងមិនឈឺចិត្តនឹងការផែនដី? **ម៉ាថេង**តបថា កាលព្រះចៅ**ហៀនតេ**ស្ដេចយាងទៅប្រពាតព្រៃ **ចូឆូ**ធ្វើកិរិយាប្រមាថមើលងាយព្រះចេស្ដា យើងជាខ្ញុំរាជការខេត្តក្រៅក៏គង់មានចិត្តឈឺចាប់ ចុះអ្នកជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ**ស្រាប់ ហេតុម្ដេចមកនៅសប្បាយដូច្នេះ មិនគិតកម្ចាត់សត្រូវរាជសម្បត្តិចេញទេឬ?

**តាំងស៊ីន**នៅមិនទាន់ទុកចិត្តជាប្រាកដ ក៏ធ្វើជាតក់ស្លុតហើយនិយាយនឹង**ម៉ាថេង**ថា ហេតុអ្វីបានជាអ្នកយកសេចក្ដីនេះមកចរចា សព្វថ្ងៃនេះ**ចូឆូ**ជាទីឧបរាជសម្រេចរាជការផែនដី ដែលអ្នកមកចរចាដូច្នេះ បើមានគេដឹងនឹងនាំសេចក្ដីទៅជម្រាប**ចូឆូ** យើងនឹងមិននាំគ្នាស្លាប់អសារទេឬ? **ម៉ាថេង**ថា អ្នកនៅរាប់អាន**ចូឆូ**ថាជាមនុស្សល្អ គឺអ្នកជាមនុស្សប្រចុបប្រចែងស្រឡាញ់ជីវិត មិនមែនមានចិត្តនឹងទំនុកបម្រុងផែនដីឲ្យបានសេចក្ដីសុខ ចូរអ្នកនៅឲ្យសប្បាយចុះ ខ្ញុំលាទៅហើយ។ **តាំងស៊ីន**ឃើញថា **ម៉ាថេង**សម្ដែងខ្លួនទៀងត្រង់ប្រាកដនឹងព្រះចៅ**ហៀនតេ**ដូច្នោះ ក៏និយាយថា "អ្នកកុំអាលខឹងសម្បារ សុំឲ្យឈប់ស្ដាប់ខ្ញុំនឹងនិយាយឲ្យស្ដាប់សិន" ហើយក៏យកឡាយព្រះហស្ដមកឲ្យ**ម៉ាថេង**មើល។ **ម៉ាថេង**ស្គាល់ច្បាស់ជាឡាយព្រះហស្ដដូច្នោះ ក៏ខឹងណាស់ ទន្ទ្រាំបាទាខាំធ្មេញទាល់តែលោហិតហូរចេញពីមាត់ ហើយនិយាយនឹង**តាំងស៊ីន**ថា អ្នកចូររិះគិតការនេះឲ្យឆាប់ចុះ ខ្ញុំនឹងត្រឡប់វិលទៅ

ស្រុកសែលៀងវិញ ដើម្បីនឹងលើកទាហានមកជួយកម្ចាត់សត្រូវរាជសម្បត្តិចេញឲ្យបាន។ **តាំងស៊ីន**ក៏ហៅមន្ត្រីទាំងបួននាក់ឲ្យចេញមកជួបនឹង**ម៉ាថេង** ហើយធ្វើសត្យបដិញ្ញាស្បថស្បាន់ចុះឈ្មោះជាមួយគ្នាទាំងប្រាំមួយនាក់។ **តាន់ស៊ីន**និយាយនឹង**ម៉ាថេង**ថា ការដែលនឹងទំនុកបម្រុងផែនដីក្នុងសម័យនេះ បើនឹងសម្រេចដូចប្រាថ្នាក៏ដោយសារតម្រិះរបស់អ្នក។

**ជូហុក, ជូឡាន់, តាន់អ៊ិប, ង៉ោហ្បួន**និយាយគ្នាថា យើងនឹងគិតប្រការម្ដេចទើបនឹងបានមនុស្សទៀងត្រង់នឹងផែនដីមកជួយរិះគិតទៀត? **តាំងស៊ីន**ឆ្លើយថា ការគ្រានេះជាទីកំបាំង បើយើងនឹងនិយាយឲ្យបែកការណ៍ក៏នឹងខូចខ្លួនអសារ។ **ម៉ាថេង**បានឮមន្ត្រីបួននាក់និង**តាំងស៊ីន**និយាយគ្នាដូច្នោះ ក៏នឹកគិតឡើងឃើញ**ឡៅពី**មួយទៀត ហើយទះដៃអស់សំណើចថា យើងបានម្នាក់ទៀតហើយ។ **តាំងស៊ីន**សួរថា អ្នកឯណា? **ម៉ាថេង**ថា **ឡៅពី**ជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** ហេតុម្ដេចអ្នកមិនយកមករួមគិតការនេះជាមួយផង? **តាំងស៊ីន**ថា **ឡៅពី**ជាពូជព្រះរាជវង្សក៏មែន តែថានៅក្នុងអំណាច**ចូឆូ** យើងនឹងទុកចិត្តជាប្រាកដមិនបានទេ។ **ម៉ាថេង**ថា កាលព្រះចៅ**ហៀនតេ**ស្ដេចទៅប្រពាតព្រៃ នាហ្មឺនទាំងពួងចូលទៅថ្វាយបង្គំ **ចូឆូ**ញាក់សេះបរទៅបាំងពីមុខព្រះភក្ត្របីដូចនឹងគំនាប់មន្ត្រីទាំងពួង **គួនអ៊ូ**ខឹងណាស់លើកដាវឡើងនឹងកាប់**ចូឆូ**, **ឡៅពី**មិចភ្នែកគ្រវីក្បាលឃាត់**គួនអ៊ូ** យើងឃើញកិរិយា**ឡៅពី**ប្រុងនឹងប្រទូសរ៉ាយ**ចូឆូ**ដែរ តែនៅក្រែងថា ទាហានដែលមានចិត្តស្រឡាញ់កោតខ្លាច**ចូឆូ**នោះច្រើន ហើយ**ឡៅពី**ខ្លាចថ្លោះការបានជាហាមឃាត់**គួនអ៊ូ** ហេតុនេះចូរអ្នករិះគិតនិយាយការនេះនឹង**ឡៅពី**ផងចុះ។ **តាំងស៊ីន**យល់ឃើញត្រូវ **ម៉ាថេង** និងមន្ត្រីទាំងបួននាក់ក៏គំនាប់លា**តាំងស៊ីន**ចេញទៅ។

លុះវេលាយប់ **តាំងស៊ីន**ក៏យកឡាយព្រះហស្តចេញទៅរក**ឡៅពី** ៗឃើញ**តាំងស៊ីន**មករកក៏ត្រេកអរណាស់ អញ្ជើញឲ្យបរិភោគអាហារ។ **តាំងស៊ីន**ជម្រាបសួរ**ឡៅពី**ថា កាលព្រះចៅ**ហៀនតេ**ទៅប្រពាតព្រៃ **គួនអ៊ូ**លើកដៃឡើងនឹងកាប់**ចូឆូ** ហេតុម្ដេចបានជាលោកហាមឃាត់? **ឡៅពី**ភ័យស្លុតចិត្តឆ្លើយថា ហេតុម្ដេចបានជាអ្នកដឹងការណ៍នេះ? **តាំងស៊ីន**ថា អ្នកឯទៀតមិនបានសង្កេតក៏មិនអាចដឹង តែខ្ញុំម្នាក់ឯងបានដឹងប្រាកដ។

**ឡៅពី**បានស្ដាប់**តាំងស៊ីន**និយាយថា ឃើញការនោះប្រាកដ ក៏គិតនឹងឆ្លើយបដិសេធ តែទាស់ចូលក្នុងសេចក្ដីវៀច ទើបឆ្លើយតបថា **គួនអ៊ូ**ឃើញមហាឧបរាជធ្វើល្មើសទ្រនង់សក្ដិនៅមុខព្រះភក្ត្រ បានជាប្អូនខ្ញុំនឹកខឹងបន្តិចទៅហើយ។ **តាំងស៊ីន**ឮ**ឡៅពី**ថាដូច្នោះ ក៏គិតដល់ព្រះចៅ**ហៀនតេ**ជាម្ចាស់ផែនដី មានសេចក្ដីឈឺចាប់ណាស់ស្រក់ទឹកភ្នែកស្រែកយំសោកថា ប្រសិនបើមន្ត្រីខ្ញុំរាជការទាំងឡាយ ជួយឈឺឆ្អាលស្រឡាញ់ម្ចាស់ផែនដីដូច**គួនអ៊ូ**ហើយ កាលណាឡើយព្រះចៅ**ហៀនតេ**នឹងព្រួយលំបាកក្នុងព្រះទ័យដល់ម្ល៉េះ។ **ឡៅពី**បានឮដូច្នោះ ក៏នៅមិនទាន់អស់សេចក្ដីសង្ស័យគិតថា ប្រហែល**ចូឆូ**ក្លែងកលឧបាយឲ្យ**តាំងស៊ីន**មកល្បងនិយាយទេដឹង? ទើបក្លែងពោលថា សព្វថ្ងៃនេះ**ចូឆូ**ជាមហាឧបរាជមានអំណាចសម្រេចរាជការជួយយកអាសាផែនដីណាស់ ហេតុម្ដេចបានជាអ្នកថាសព្វថ្ងៃព្រះចៅ**ហៀនតេ**ទ្រង់ព្រួយព្រះរាជហឫទ័យ ខ្ញុំមិនឃើញផងសោះ។ **តាំងស៊ីន**ខឹងណាស់ ក្រោកឡើងស្រែកថា ខ្លួនអ្នកជាធំ ព្រះចៅ**ហៀនតេ**ទ្រង់ប្រោសរាប់អានថាជាពូជព្រះរាជវង្ស ហេតុម្ដេចក៏អ្នកត្រឡប់ទៅលើកកម្ពស់អាមនុស្សទ្រុស្តក្បត់ផែនដីទៅវិញ? ឬអ្នកនិយាយជាឧបាយបញ្ឆោតចិត្តយើងទេ?

**ឡៅពី**ឃើញថា **តាំងស៊ីន**សម្តែងសេចក្តីសត្យត្រង់នឹងព្រះចៅ**ហៀនតេ**ប្រាកដ ទើបតបថា កាលដំបូងយើងនៅសង្ស័យ ក្រែងអ្នកដើរក្នុងកលឧបាយបញ្ឆោតយើង បានជាយើងចរចាដូច្នោះ។ **តាំងស៊ីន**ក៏ហូតយកឡាយព្រះហស្តហុចឲ្យ**ឡៅពី**មើល។ **ឡៅពី**ឃើញជាក់ជាឡាយព្រះហស្តហើយ ក៏គិតខ្លោចចិត្តអាណិតព្រះចៅ**ហៀនតេ** ជាអនេក យំយែកស្រក់ទឹកភ្នែក។ ក្នុងខណៈនោះ**តាំងស៊ីន**ក៏ហុចសំបុត្រសញ្ញាដែល គិតធ្វើការជាមួយនឹងឈ្មោះទាំងប្រាំមួយនាក់នោះ ឲ្យ**ឡៅពី**មើលទៀត។ **ឡៅពី**តប ថា ដែលអ្នករិះគិតកម្ចាត់**ចូឆូ**នោះ យើងនឹងសុំចូលធ្វើការផង។ **តាំងស៊ីន**ថា ប្រសិន បើជាអ្នកចូលគិតទំនុកបម្រុងផែនដីជាមួយនឹងយើង ក៏ឲ្យចុះនាមលេខាសញ្ញាទុក ជាសម្គាល់នឹងបានជួយគ្នាធ្វើការតទៅ។ **ឡៅពី**ក៏ចុះនាមលេខាក្នុងសញ្ញានោះទៀត រួមជាប្រាំពីរនាក់ ប្រគល់ទៅឲ្យ**តាំងស៊ីន**ហើយកំជាប់ថា ដែលនឹងធ្វើការគ្រានេះឲ្យ អ្នកគិតត្រិះរិះឲ្យល្អ តែបែកខ្ចាត់ខ្ចាយទៅកាលណា ការក៏មិនសម្រេច ខ្លួនយើងទាំង អស់គ្នាក៏បានទុក្ខព្រួយជាខ្លាំង។ **តាំងស៊ីន**ទទួលពាក្យ**ឡៅពី**ហើយក៏លាទៅផ្ទះ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

### កណ្ឌទី ១៩

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡៅពី**និង**តាំងស៊ីន**រួមគំនិតគ្នានឹងសម្លាប់**ចូឆ្វ** រហូតដល់**គួនអ៊ូ**សម្លាប់**គីម៉ៅ**, **តៀវហ៊ុយ**ស្លាប់គ្រប់គ្រូ**គីម៉ៅ**, **ឡៅពី**មានសេចក្ដីព្រួយខ្លាច**ចូឆ្វ**)។*

**ឡៅពី**ទទួលពាក្យ**តាំងស៊ីន**ហើយកាលណា នឹងធ្វើការអ្វីៗក៏ឲ្យគិតខ្លាច**ចូឆ្វ** នឹងមិនទុកចិត្ត ទើបក្លែងធ្វើបន្ទាយខ្លួនយកឈើមកច្រុះធ្វើជាសម្រាស់របងដាំសួនច្បារបន្លែបង្ការគ្រប់មុខរៀងរាល់ថ្ងៃ។ **គួនអ៊ូ, តៀវហ៊ុយ**និយាយនឹងឡៅពីថា ការណ៍ដែលត្រូវគិត ម្ដេចមិនរិះគិត? បងមកធ្វើជាមនុស្សថោកទាបដូច្នេះមិនគួរសោះ ដែលបងធ្វើដូច្នេះគឺជាប្រយោជន៍អ្វី? **ឡៅពី**តបថា ប្អូនទាំងពីរមិនបានដឹងដល់គំនិតដែលបងគិតនោះទេ កុំមកស្ដីបន្ទោសឲ្យរវល់ចិត្តគំនិតឡើយ។ **គួនអ៊ូ, តៀវហ៊ុយ**ក៏ឈប់ស្ងៀម។

ថ្ងៃមួយនោះ មានមនុស្សនាំរឿងទៅនិយាយប្រាប់**ចូឆ្វ**ថា **ឡៅពី**ធ្វើចម្ការដាំសួនខ្លួនឯងសព្វៗថ្ងៃ។ **ចូឆ្វ**ក៏ប្រើ**ខៅធូ** និង**តៀវលៀវ**ហើយនិងទាហានចំនួនម្ភៃនាក់ទៅអញ្ជើញ**ឡៅពី**។ **ខៅធូ, តៀវលៀវ**ចូលទៅក្នុងផ្ទះ**ឡៅពី** មិនឃើញ**គួនអ៊ូ, តៀវហ៊ុយ**ឃើញតែ**ឡៅពី**កំពុងដាំបន្លែក្នុងច្បារសួន ក៏ចូលទៅជម្រាប**ឡៅពី**ថា មហាឧបរាជឲ្យខ្ញុំមកអញ្ជើញលោកទៅ។ **ឡៅពី**ភ័យស្លុតក្នុងចិត្តក៏សាកសួរថា មហាឧបរាជឲ្យមកហៅខ្ញុំដោយមានការអ្វី? **ខៅធូ**ថា មានការអ្វីក៏ខ្ញុំបាទមិនអាចដឹង។ **ឡៅពី**មិនហ៊ានខាន ក៏រៀបខ្លួនទៅជាមួយ**ខៅធូ** និង**តៀវលៀវ**។ **ចូឆ្វ**ឃើញ

**ឡៅពី**ទៅដល់ក៏ចំអន់ថា អ្នកនៅផ្ទះសព្វថ្ងៃនេះធ្វើការធំមាំមួនណាស់។ **ឡៅពី**ឮ**ចូអ្នូ**ថាដូច្នោះ នឹកស្មានក្រែង**ចូអ្នូ**ដឹងសេចក្តីក៏ភ័យស្លុតក្នុងចិត្តស្ងៀមនៅ មិនឆ្លើយតបថាដូចម្តេចសោះ។ **ចូអ្នូ**ក៏ចាប់ដឹកដៃ**ឡៅពី**នាំចុះទៅក្នុងសួនច្បារខាងក្រោយផ្ទះ ហើយនិយាយថា អ្នកនៅផ្ទះរិះគិតធ្វើសួនដាំដំណាំបន្លែបង្ការ ប្រហែលសួនច្បាររបស់យើងដែរឬទេ? **ឡៅពី**ដឹងថា **ចូអ្នូ**មិនមែនដឹងដល់ក៏ធូរស្រាលក្នុងចិត្តឆ្លើយតបថា ខ្ញុំបាទមកទីពឹងជ្រកកោនបុណ្យលោកសព្វថ្ងៃនេះ មិនមានការអ្វីនឹងធ្វើឲ្យពេញកម្លាំងបានជាធ្វើសួនច្បារកែអផ្សុក តែនឹងបានធ្វើឲ្យពេញមុខដូចសួនច្បាររបស់លោកក៏ទេ។

**ចូអ្នូ**អង្គុយនិយាយលេងជាមួយនឹង**ឡៅពី** ក៏ក្រឡេកឃើញផ្លែកន្ទួតមួយដើមក៏ចង្អុលឲ្យ**ឡៅពី**មើល ហើយថា កាលយើងទៅច្បាំងនឹង***តៀវស៊ីវ*** ទាហានទាំងពួងស្រេកទឹកណាស់ យើងក៏គិតកលឧបាយបញ្ឆោតថា ឲ្យខស្បាហ៍ខំដើរបន្តិចទៅទៀតចុះ នឹងបានជួបប្រទះព្រៃកន្ទួតផ្លែច្រើនណាស់នៅឯមុខ ទាហានទាំងអស់បានឮឈ្មោះផ្លែកន្ទួតជាម្ជូរ ក៏ហូរចេញទឹកមាត់គ្រប់ៗគ្នា ណាដែលស្រេកទឹកនោះ ក៏អន់ស្រេកទៅវិញ។

**ឡៅពី**សរសើរ**ចូអ្នូ**ថា ប្រាជ្ញាឈ្លាសវៃនៃលោកនឹងរកនរណាស្មើគ្មាន។ **ចូអ្នូ**ក៏អញ្ជើញ**ឡៅពី**ឲ្យអង្គុយលើកៅអីក្នុងទីសួនត្រជាក់ ហើយសេពសុរាស៊ីផ្លែកន្ទួតនោះជាកំសាន្តសប្បាយ។

កាល**ចូអ្នូ**និង**ឡៅពី**ផឹកស្រាស៊ីផ្លែកន្ទួតជាមួយគ្នានោះ ក៏បណ្តាលខ្យល់ព្យុះសង្ឃរាមេឃងងឹតផ្គាក់ភ្លៀងរំលា ទាហាននិងមនុស្សម្នាស្រែកថា មករសម្តែងឫទ្ធិលើអាកាសបានជាកើតអស្ចារ្យដូច្នេះ។ **ចូអ្នូ**និង**ឡៅពី**បានឮមនុស្សម្នាស្រែកដូច្នោះ ក៏

ងើយមើលទៅលើអាកាស ឃើញមេឃងងឹតខ្លាំងក៏ដឹងថា ម្ករសម្ដែងឫទ្ធិ **ចូឆ្វ**ចង់ដឹងប្រាជ្ញា**ឡៅពី**ទើបក្លែងសួរថា អ្នកដឹងឬទេ គឺម្ករសម្ដែងឫទ្ធិបានជាងងឹតដូច្នេះ? រីឯម្ករនោះតើមានប៉ុន្មានយ៉ាង? **ឡៅពី**ក្លែងធ្វើជាមិនដឹងថា ម្ករសម្ដែងឫទ្ធិមានប៉ុន្មានៗ ខ្ញុំបាទមិនអាចដឹងទេ។ **ចូឆ្វ**ថា ម្ករសម្ដែងឫទ្ធិនោះ នឹងធ្វើឲ្យធំឬតូចដូចម្ដេចក៏ចេះតែបាន បើនឹងហោះឡើងទៅលើអាកាស ហើយសម្ដែងឫទ្ធិផ្សេងៗ ទោះអាកាសនោះចង្អៀតក្តី ទូលាយក្តី ក៏អាចនឹងធ្វើឲ្យទៅតាមឫទ្ធិបាន ស្ទួម្បីនឹងហោះចុះក្នុងផ្ទៃមហាសមុទ្រ ឬធ្វើឲ្យរូបកាយនោះតូចទៅចូលទៅជ្រកនៅក្រោមបាតភ្នំក៏បាន ឯកាលៈទេសៈនោះជារដូវភ្លៀងបានជាម្ករសម្ដែងឫទ្ធិដូច្នេះ ឧបមាដូចជាមនុស្សមានសតិបញ្ញាជ្រៅទូលាយ បើនឹងធ្វើការក៏គ្នេរគិតតាមសេចក្តីសមគួរ ទោះបីឃើញជាការនោះធំ ក៏ធ្វើឲ្យធំ បើការនោះតូចក៏ប្រមាណការធ្វើឲ្យតូចទៅ សព្វថ្ងៃនេះនរណាខ្លះដែលមានសតិបញ្ញាដូចម្ករសម្ដែងឫទ្ធិនោះ? ចូរអ្នកអធិប្បាយឲ្យបានច្បាស់មកចុះ។ **ឡៅពី**ក្លែងតបថា ខ្ញុំបាទមិនសូវមានបញ្ញាទេ ដែលនឹងបានបុណ្យសក្តិជាមន្ត្រីខ្ញុំរាជការប៉ុណ្ណោះ ក៏ព្រោះគុណមហាឧបរាជជួយទូលស្នើឲ្យ ខ្ញុំបាទក៏បានសេចក្តីសុខរៀងមកដែលនឹងដឹងថា អ្នកឯណាមានសតិបញ្ញាជ្រៅជ្រះទូលាយដូចម្ករសម្ដែងឫទ្ធិនោះ តម្រិះខ្ញុំបាទគិតមិនដល់ទេ។ **ចូឆ្វ**បានឮដូច្នោះក៏ឆ្លើយថា ទោះបីមិនមានសតិបញ្ញាគិតឲ្យឃើញរហូតទៅបាន ក៏គង់មានឮចាស់បុរាណនិយាយហើយដឹងថា អ្នកនេះអ្នកនោះជាមនុស្សមានសតិខ្លះទៅដែរ។ **ឡៅពី**ក្លែងថា ខ្ញុំបាទបាននឹកឃើញថាសព្វថ្ងៃនេះ**អ៊្វូនសុត**ចៅហ្វាយស្រុកឡាំយ៉ុងមានសតិបញ្ញាឆ្លៀវឆ្លាតណាស់ សេនាទាហានធំតូចក៏មានថ្វីដៃខ្លាំងពូកែច្រើន ទាំងស្បៀងអាហារក៏បរិបូរ។ **ចូឆ្វ**បានឮដូច្នោះក៏អស់សំណើចហើយតបថា **អ៊្វូនសុត**នោះមានឧបមាដូចសពនៅក្នុងរណ្ដៅ

ដែលនឹងរាប់ថាមានសតិបញ្ញានោះមិនត្រូវសោះ តែគំនិតមារយាទ**អ៊ួនសុត**នោះ ខ្ញុំមិនចង់យកមកក៏បានដោយងាយណាស់។ **ឡៅពី**ថា អាណាខេត្តនៅទិសខាងជើងខ្ញុំបានឃើញថា **អ៊ួនសៀវ**ចៅហ្វាយស្រុកគីជីវ ជាបងប្អូន**អ៊ួនសុត**នោះ ក៏មានពូជជានាហ្មឺនតៗគ្នាមកបីបួនតំណហើយ ឥឡូវ**អ៊ួនសៀវ**ក៏បរប្រមូលសេនាទាហានបានច្រើន ទាំងមានទីប្រឹក្សាក៏ច្រើននាក់ ខ្ញុំបានពិគ្រោះមើលទៅក៏ឃើញថា **អ៊ួនសៀវ**មានសតិបញ្ញាមុតមាំធំជ្រៅទូលាយ។ **ចូឆូ**ថា **អ៊ួនសៀវ**នោះជាមនុស្សឆ្កួតបុណ្យសក្តិណាស់ មានតែសេចក្តីខ្លាច គិតការអ្វីបង់ច្រើនបានតិច ដែលនឹងរាប់ថាជាមនុស្សមានសតិបញ្ញានោះមិនត្រូវ។ **ឡៅពី**ថា **ឡៅពៀវ**ចៅហ្វាយស្រុកកេងជីវមានស្រុកធំៗឡើងជាចំណុះដល់ប្រាំបួនមណ្ឌល ចិត្តថ្លើមក៏ល្អ ជាមនុស្សរួសរាយរាប់អានពួកម៉ាក មានសេនាទាហានច្រើន ខ្ញុំបាទយល់ឃើញថាជាមនុស្សមានសតិបញ្ញា បានជាធ្វើការឲ្យគេចុះចូលជាច្រើនដូច្នេះ។

**ចូឆូ**ថា **ឡៅពៀវ**នោះមានពួកម៉ាកច្រើនក៏មែន តែជាមនុស្សមិនមានសេចក្តីសត្យសុចរិត បានតែមាត់ផ្អែម នឹងរាប់ថាជាមនុស្សមានសតិបញ្ញាក៏មិនត្រូវ។ **ឡៅពី**ថា **ស៊ុនសេក**ចៅហ្វាយស្រុកកាំងតាំងនោះ នៅក្មេងកម្លោះមានកម្លាំងខ្លាំងពូកែ សេនាទាហានក៏មានច្រើន ខ្ញុំបាទឃើញថាជាមនុស្សមានគំនិតមារយាទមាំមួន ត្រូវទុកជាសេនាម្នាក់មានថ្វីដៃខ្លាំងពូកែ។ **ចូឆូ**ថា **ស៊ុនសេក**នោះមានថ្វីដៃជាប្រមាណ ដោយសារបានទាហានរបស់**ស៊ុនគៀន**ជាបិតាទុកជាកម្លាំងតមក ទើបកំរើបចិត្ត ដែលនឹងរាប់ថាជាមនុស្សមានគំនិតគិតល្អនោះ យើងមិនទាន់ឃើញផងទេ។ **ឡៅពី**ថា ខាងអាណាខេត្តទិសខាងលិចនោះ ខ្ញុំបាទឃើញ**ឡៅជៀង**ចៅហ្វាយស្រុកសែឈួនមានសតិបញ្ញា ហើយជាពូជព្រះមហាក្សត្រមកអំពីមុន។

**ចូវឆ្វ**តបថា ជាពូជព្រះមហាក្សត្រក៏មែន តែជាមនុស្សមិនចេះគិតការអ្វីសោះ ឧបមាដូចសុនខចាំទ្វារផ្ទះ ដែលនឹងរាប់ថាជាមនុស្សមានសតិបញ្ញានោះក៏មិនមែន។

**ឡៅពី**ទើបសួរថា **តៀវស៊ីវ១, តៀវឡូ១, ហាន់ស៊ុយ១** ទាំងបីនាក់នេះលោកយល់ឃើញយ៉ាងម្ដេច? ចូវឆ្វបានឮដូច្នោះក៏ទះដៃអស់សំណើច ហើយថា ឯ**តៀវស៊ីវ, តៀវឡូ, ហាន់ស៊ុយ**នោះ ជាមនុស្សមានតែឈ្មោះ នឹងលើកយកសេចក្ដីគិតការអ្វីជាប្រាកដគ្មានសោះ អ្នកយកមកនិយាយធ្វើអ្វីឲ្យរោយមាត់ ឯមនុស្សដែលមានសតិបញ្ញានោះ បើនឹងគិតការអ្វីក៏ជ្រៅទូលាយរួសរាយរាប់អានអ្នកទាំងពួង ឧបមាដូចបុគ្គលលេបកែវដ៏ជាទិព្វទុកក្នុងពោះ បើនឹងទៅទីស្ថានឯណា ទោះជាពេលយប់ងងឹតក៏លេចប្រុះឆ្លុះទៅដោយពន្លឺរស្មីកែវ បើនឹងគិតការអ្វីក៏ដឹងច្បាស់ការធ្ងន់ការស្រាលបាននិងបង់ ចេះចែករំលែកមិនឲ្យអ្នកឯណាកន្លងដឹងដល់គំនិតប្រាជ្ញា ទើបគេរាប់ហៅថាអ្នកមានសតិបញ្ញាជ្រៅទូលាយ។

**ឡៅពី**បានស្ដាប់ដូច្នោះទើបក្លែងតបថា សព្វថ្ងៃនេះនឹងរកអ្នកឯណាឲ្យមានសតិបញ្ញាដូចមហាឧបរាជថានោះគ្មានសោះ។ **ចូវឆ្វ**ថា សព្វថ្ងៃនេះយើងសម្លឹងមើលអ្នកមានសតិបញ្ញានោះសូន្យហើយ មានតែខ្លួនអ្នកនិងខ្ញុំពីរនាក់ប៉ុណ្ណោះ។ **ឡៅពី**ឮ**ចូវឆ្វ**ថាដូច្នោះ ក៏ធ្វើជាស្លុតរន្ធត់ចិត្តធ្លាក់ចង្កឹះរបូតចេញពីដៃ ទទួលឮសំឡេងរន្ទះផ្គរ **ឡៅពី**ក៏ធ្វើជាភ្ញាក់យកដៃខ្ទប់ត្រចៀក។ **ចូវឆ្វ**ឃើញដូច្នោះក៏អស់សំណើច ហើយថា កើតមកជាកូនប្រុសហេតុម្ដេចក៏ភ័យខ្លាចនឹងសំឡេងផ្គរដូច្នេះ? **ឡៅពី**ថា បុរាណដំណាលទុកមកថា បើមានផ្គររន្ទះឲ្យរវាំងរក្សាខ្លួនឲ្យណាស់។ **ចូវឆ្វ**មិនបានដឹងកលក៏អស់សង្ស័យ នឹកតែក្នុងចិត្តថា “**ឡៅពី**ជាមនុស្សខ្លាចណាស់ នឹងគិតធ្វើការធំតទៅមិនបាន”។ តាំងពីថ្ងៃនោះតមក **ចូវឆ្វ**ក៏មិនមានរអែងក្រែងខ្លាចគំនិតប្រាជ្ញា**ឡៅពី**។

ឯ**គួនអ៊ូ** និង**តៀវហ៊ុយ**ដែលទៅហាត់បាញ់ធ្នូនោះ លុះត្រឡប់មកមិនបានឃើញ**ឡៅពី**ក៏សួរមនុស្សក្នុងផ្ទះថា បងយើងទៅណា? មនុស្សបម្រើប្រាប់ថា **ចូឆូ**ឱ្យមកអញ្ជើញទៅយូរហើយ។ **គួនអ៊ូ, តៀវហ៊ុយ**ឮថាដូច្នោះ ក៏ភ័យស្លុតស្មារតីទម្លាក់ធ្នូចោលចាប់យកគ្រប៊ីររៀសរវៃទៅតាម**ឡៅពី** លុះទៅដល់ទ្វារផ្ទះ**ចូឆូ** អ្នកចាំទ្វារឃាត់មិនឱ្យចូល **គួនអ៊ូ, តៀវហ៊ុយ**ក៏មិនស្តាប់ ដើរចូលទៅក្នុងផ្ទះ**ចូឆូ** ដឹងថា**ចូឆូ**នាំ**ឡៅពី**ទៅអង្គុយក្នុងសួនច្បារ **គួនអ៊ូ, តៀវហ៊ុយ**ក៏តាមទៅ។ ឯ**ចូឆូ**កំពុងអង្គុយផឹកស្រាជាមួយនឹង**ឡៅពី** ក្រឡេកឃើញ**គួនអ៊ូ, តៀវហ៊ុយ**កាន់គ្រប៊ីដើរចូលមក ក៏សួរថា អ្នកទាំងពីរកាន់គ្រប៊ីដើរចូលមកធ្វើអ្វី? **គួនអ៊ូ, តៀវហ៊ុយ**ឆ្លើយថា ខ្ញុំបាទដឹងថាមហាឧបរាជហៅ**ឡៅពី**មកបរិភោគលេងនៅទីនេះ បានជាខ្ញុំបាទមករាំគ្រប៊ីជូនឱ្យលោកមើលកំសាន្ត។

**ចូឆូ**ថា អ្នកឯងមកធ្វើដូច្នេះ ដូចមានរឿងក្នុងចុតហ្មាយកត់ហេតុបុរាណកាលគ្រាព្រះចៅ**ឈប៉ាអង** គិតប្រទូសរ៉ាយព្រះចៅ**ឡៅបាំង**។ ព្រះចៅ**ឈប៉ាអង**អញ្ជើញព្រះចៅ**ឡៅបាំង**ទៅសោយក្រយាស្ងោយ ហើយគិតកលឧបាយឱ្យ**ហាន់ជួង**ចេញរាំគ្រប៊ី បំណងប្រទូសរ៉ាយនឹងព្រះចៅ**ឡៅបាំង**។ **ហ្សួនគុយ**ប្អូនថ្លៃព្រះចៅ**ឡៅបាំង**ឃើញ**ហាន់ជួង**រាំគ្រប៊ីចូលមកជិតក៏មិនទុកចិត្ត ទើបនិយាយថា “ឯភ្លេងគ្រប៊ីនោះ នឹងរាំតែម្នាក់ឯងមិនល្អមើលទេ យើងនឹងចេញរាំតទល់ទើបល្អ”។ ហើយ**ហ្សួនគុយ**ក៏ហូតគ្រប៊ីក្រោកឡើងរាំផង **ហាន់ជួង**លើកគ្រប៊ីឡើងនឹងកាប់ព្រះចៅ**ឡៅបាំង**, **ហ្សួនគុយ**ក៏យកគ្រប៊ីរងជាប់ បានជាព្រះចៅ**ឡៅបាំង**មិនមានសេចក្តីអន្តរាយ ឯខ្លួនយើងគ្រានេះ នឹងបានគិតប្រទូសរ៉ាយ**ឡៅពី**ឱ្យដូចព្រះចៅ**ឈប៉ាអង**គិតប៉ងប្រទូសរ៉ាយព្រះចៅ**ឡៅបាំង**ដូច្នោះក៏ទេ ដែលអ្នកនឹងមកធ្វើដូច្នេះមិនគួរ។

**គួនអ៊ូ, តៀវហ៊ុយ**ឆ្លើយថា ខ្ញុំបាទមិនមែនគិតធ្វើដូច្នេះទេ បើលោកនៅសង្ស័យហើយ ខ្ញុំបាទក៏មិនរាំ។ **ចូឆ្វ**ក៏ប្រើមនុស្សបម្រើចាក់ស្រាឲ្យ**គួនអ៊ូ, តៀវហ៊ុយ**ផឹក។ លុះពេលរសៀល **ឡៅពី, គួនអ៊ូ, តៀវហ៊ុយ**ក៏គំនាប់លា**ចូឆ្វ**ត្រឡប់ទៅផ្ទះវិញ។ **គួនអ៊ូ**និយាយនឹង**ឡៅពី**ថា ខ្ញុំត្រឡប់មកពីហាត់បាញ់ធ្នូដឹងថា **ចូឆ្វ**ហៅលោកទៅ ខ្ញុំបាទភ័យណាស់គិតសង្ស័យថា **ចូឆ្វ**នឹងធ្វើលោកយ៉ាងម្ដេចមិនដឹង ទើបនាំគ្នាស្រូតទៅតាមលោក។ **ឡៅពី**ក៏អធិប្បាយរាយរឿងឲ្យ**គួនអ៊ូ, តៀវហ៊ុយ**ស្ដាប់គ្រប់ប្រការថា **ចូឆ្វ**នាំទៅផឹកស្រាវស៊ីផ្លែកន្ធតក្នុងសួន។ **គួនអ៊ូ**ថា ដែល**ចូឆ្វ**ធ្វើដូច្នេះ បងនឹងយល់ឃើញដូចម្ដេចខ្លះ? **ឡៅពី**ថា បងគិតធ្វើសួនដាំបន្លែបង្ការ ប្រាជ្ញាដើម្បីនឹងឲ្យ**ចូឆ្វ**អស់សេចក្ដីសន្និះសង្ស័យថាយើងផុតសេចក្ដីរិះគិតការអ្វីហើយ កាល**ចូឆ្វ**បបួលបងស៊ីលៀងនិយាយសរសើរថា បងមានតម្រិះប្រាជ្ញា ទទួលឮសំឡេងផ្គររន្ទះ បងធ្វើហាក់ជាភ្ញាក់ផ្អាក់ចង្កឹះពីដៃ ហើយយកដៃខ្ទប់ត្រចៀក **ចូឆ្វ**ក៏អស់សេចក្ដីសង្ស័យ។ **គួនអ៊ូ, តៀវហ៊ុយ**ថា បងរិះគិតធ្វើឧបាយដូច្នេះល្អណាស់។

លុះកន្លងមកយូរថ្ងៃ **ចូឆ្វ**ឲ្យអញ្ជើញ**ឡៅពី**ស៊ីលៀង ទទួល**ម៉ាន់ថង**ដែល**ចូឆ្វ**ប្រើទៅស្ដាប់ការរាជការខាងស្រុក**អ៊ួនសៀវ**នោះត្រឡប់វិលមក យកសេចក្ដីជម្រាប**ចូឆ្វ**ថា ឥឡូវ**កងស៊ុនចាន**ចាញ់ដៃ**អ៊ួនសៀវ**ទៅហើយ។ **ឡៅពី**បានស្ដាប់ក៏ភ័យស្លុតរន្ធត់ចិត្ត ទើបសួរ**ម៉ាន់ថង**ថា ដែល**អ៊ួនសៀវ**ឈ្នះ**កងស៊ុនចាន**នោះ ដោយហេតុអ្វី? **ម៉ាន់ថង**ឆ្លើយថា **អ៊ួនសៀវ**លើកទ័ពទៅវាយ**កងស៊ុនចាន** ៗលើកទ័ពមកតទល់គ្នាក៏ថ្លោះការចាញ់ដៃ**អ៊ួនសៀវ**ជាច្រើនគ្រា **កងស៊ុនចាន**ក៏ឲ្យទៅសង់សើនប្រចាំគយកម្ពស់ម្ភៃព្យាម ហើយជញ្ជូនស្រូវនិងចំណីអាហារទៅទុកក្នុងស្រុកជាច្រើន គេណ្ឌសេនាទាហានឡើងរក្សានាទីសើនបន្ទាយមាំមួន ឯស្រុកចំណុះ**កងស៊ុនចាន**ទាំង

ប៉ុន្មាន ក៏បកសំបុត្រប្ដឹងចូលទៅ**កងស៊ុនចាន**ថា **អ៊្លូនសៀវ**លើកទ័ពមកវាយស្រុកតូចស្រុកធំបែកខ្ចាត់ខ្ចាយជាច្រើនតំបន់ សុំឱ្យលើកកងទ័ពទៅជួយ **កងស៊ុនចាន**ឆ្លើយតបទៅវិញថា សេនាទាហានគ្រប់ស្រុកប្រែចិត្តមិនគិតជួយច្បាំងទេ មិនដឹងកាលណានឹងបានលើកទៅជួយឡើយ នោះស្រុកចំណុះទាំងអស់ឮឃើញសំបុត្រឆ្លើយតបដូច្នោះ ទាំងអស់គ្នាក៏តូចចិត្តគិតស្រុះគ្នាចូលទៅចំណុះចុះចូលខាង**អ៊្លូនសៀវ**ទាំងអស់។ **កងស៊ុនចាន**ដឹងដូច្នោះ ក៏ធ្វើសំបុត្រចូលមកក្រាបទូលព្រះចៅ**ហៀន**តេសុំកងទ័ពលើកទៅជួយ ទាហាន**អ៊្លូនសៀវ**ចាប់បម្រើដែលកាន់សំបុត្រនោះបាន **កងស៊ុនចាន**ក៏ប្រើបម្រើឱ្យនាំសំបុត្រទៅដល់**តៀវអៀន**ទៀត ឱ្យលើកកងទ័ពទៅជួយ បើមកដល់កាលណាឱ្យអុជភ្លើងជាសម្គាល់ **កងស៊ុនចាន**នឹងលើកទាហានវាយខ្ទប់ពីក្នុងមក ទាហាន**អ៊្លូនសៀវ**ក៏ចាប់បម្រើនាំសំប្រុតនោះបានទៀត ហើយ**អ៊្លូនសៀវ**បំបែកទាហានឱ្យទៅពួនបង្កប់ជាពីរកង ទាហានកងកណ្ដាលធ្វើជាធ្លាយកំពែងចូលទៅ**អ៊្លូនសៀវ**ឱ្យអុជភ្លើងឆ្ងាយពីបន្ទាយប្រហែលសាមសិបសិន (១២០០ម៉ែត្រ)។ **កងស៊ុនចាន**ឃើញពន្លឺភ្លើងដូច្នោះក៏សម្គាល់ថា **តៀវអៀន**លើកទ័ពមកជួយ ក៏បើកទ្វារស្រុកចំហហើយលើកទ័ពចេញទៅ ទាហាន**អ៊្លូនសៀវ**កណ្ដាលក៏ធ្វើជាថយរត់ទៅ ហើយអុជផាវជាសញ្ញាឡើង កងទ័ពដែលពួនបង្កប់ទាំងសងខាងក៏លើកស្រចេញមកវាយខ្ទប់ទាំងសងខាង កាប់សម្លាប់ទាហាន**កងស៊ុនចាន**ស្លាប់ជាច្រើនណាស់ **កងស៊ុនចាន**រត់បាក់ទ័ពត្រឡប់ចូលស្រុកវិញបាន **អ៊្លូនសៀវ**ក៏ឱ្យទាហានដឹកឧម្មង្គចូលទៅទម្លុះឡើងកណ្ដាលស្រុក ហើយយកភ្លើងដុតអស់ផ្ទះសម្បែងក្នុងស្រុក **កងស៊ុនចាន**ឃើញទាល់ច្រករកផ្លូវរេះរត់ពុំរួច ក៏សម្លាប់ភរិយាបុត្ររបស់ខ្លួនស្លាប់

អស់រលីង ហើយអារ-កខ្លួនឯងស្លាប់ទៅទៀត **អ៊្លួនសៀវ**គ្រានេះបានទាហាន**កងស៊ុនចាន**ទុកជាច្រើនណាស់។

**ឡៅពី**បានឮដូច្នោះ ក៏មានសេចក្ដីអាណិត**កងស៊ុនចាន** ដោយ**កងស៊ុនចាន**មានឧបការគុណ បានទូលស្នើសរសើរគុណបំណាច់ថ្វាយព្រះចៅ**ហៀនតេ** ៗទ្រង់ប្រោសឲ្យ**ឡៅពី**បានជាចៅហ្វាយស្រុកផេងងួនគួន ហើយគិតដល់**ជូឡុង**ដោយមិនដឹងថារស់ឬស្លាប់។ **ចូឆ្វ**ក៏សួរ**ម៉ាន់ថង**ថា **អ៊្លួនសៀវ**បានស្រុកប៉ាក់ប៉េងហើយ កិត្តិស័ព្ទនឹងគិតដូចម្ដេចខ្លះ? **ម៉ាន់ថង**ឆ្លើយថា ខ្ញុំបាទទទួលដំណឹងថា **អ៊្លួនសុត**នៅស្រុកហ្វាយណាំតាំងខ្លួនជាស្ដេច ប្រព្រឹត្តទុច្ចរិតកំហែងកំចោកបោករាស្ត្រប្រជាទាំងពួងបែកខ្ចាត់ខ្ចាយទៅជាច្រើន **អ៊្លួនសុត**ឲ្យបម្រើទៅប្រាប់ដល់**អ៊្លួនសៀវ**ជាបង ថានឹងបញ្ជូនត្រាសម្រាប់រាជ្យទៅឲ្យ**អ៊្លួនសៀវ**នោះ **អ៊្លួនសៀវ**មិនទាន់ជឿបានតបថា ឲ្យ**អ៊្លួនសុត**ជាប្អូនបញ្ជូនត្រាទៅឲ្យមុន ឥឡូវ**អ៊្លួនសុត**នាំគ្រប់គ្រួនិងសារពើសម្បត្តិចេញពីស្រុកហ្វាយណាំ និងនាំត្រាសម្រាប់រាជ្យទៅឲ្យ**អ៊្លួនសៀវ**នៅឯស្រុកគីជីវ បើ**អ៊្លួនសៀវ**និង**អ៊្លួនសុត**ជួបជុំគ្នា ក៏នឹងមានកម្លាំងច្រើនឡើង សូម្បីនឹងទៅកម្ចាត់ចេញក៏កម្រក្រៃហើយណាស់ ការនេះសូមឲ្យលោករិះគិតកុំឲ្យមនុស្សពីរនាក់នេះចូលជិតគ្នាបាន។ **ចូឆ្វ**បានស្ដាប់ក៏នៅស្ងៀម។

**ឡៅពី**មកគិតតែក្នុងចិត្តថា “គ្រានេះបានការស្រួលហើយ ចាំរិះគិតប្រែប្រួលឲ្យផុតពីកណ្ដាប់ដៃ**ចូឆ្វ**ទៅជាមុន ដើម្បីនឹងគិតការតទៅ” គិតហើយ ក៏ក្រោកឡើងគំនាប់**ចូឆ្វ**ហើយថា ឥឡូវ**អ៊្លួនសុត**នាំគ្រប់គ្រួនិងសារពើទ្រព្យរបស់ទៅរក**អ៊្លួនសៀវ**ហើយ ឃើញថា**អ៊្លួនសុត**គង់នឹងលើកតម្រង់មកលើស្រុកឈីជីវ ខ្ញុំបាទនឹងសុំទាហានយកអាសាលើកទៅវាយស្ទាក់កណ្ដាលផ្លូវ ឃើញនឹងបានដោយងាយ។ **ចូឆ្វ**

ឮ**ឡៅពី**ថាដូច្នោះក៏ត្រេកអរណាស់ ហើយថា វេលានេះស្មើរពេលហើយ ចាំព្រឹកស្អែកខ្ញុំនឹងចូលទៅក្រាបថ្វាយបង្គំទូលព្រះចៅហៀនតេទ្រង់ជ្រាបជាមុន។ **ឡៅពី**លា**ចូផ្វូ**ចេញទៅផ្ទះវិញ។ លុះព្រឹកឡើង**ចូផ្វូ** និង**ឡៅពី**ក៏ចូលទៅក្រាបបង្គំគាល់។ **ចូផ្វូ**យកសេចក្តីក្រាបទូលស្នើព្រះចៅ**ហៀនតេ**ថា ឥឡូវ**អ៊ួនសុត**នឹងលើកទ័ពទៅសន្ធប់គ្នាជាមួយនឹង**អ៊ួនសៀវ** បើឈ្មោះទាំងពីរនេះចូលដល់គ្នាហើយ គង់នឹងរិះការជាធំមាំមួនណាស់ ទូលព្រះបង្គំជាខ្ញុំសូមព្រះរាជទានឲ្យ**ឡៅពី**លើកទ័ពចំនួនប្រាំម៉ឺន ចេញទៅចាំស្ទាក់វាយកណ្តាលផ្លូវដែល**អ៊ួនសុត** នឹងលើកឆ្លងទៅត្រង់ស្រុកឈីជីវនោះ។ ព្រះចៅ**ហៀនតេ** ក៏យល់ព្រម។ ហើយ**ចូផ្វូ**និង**ឡៅពី**ក៏ក្រាបបង្គំលាចេញមក ចាត់ចែងរៀបសេនាទាហានប្រគល់ឲ្យ**ឡៅពី**ចំនួនប្រាំម៉ឺន។

ព្រះចៅ**ហៀនតេ**ឃើញ**ចូផ្វូ** និងមន្ត្រីខ្ញុំរាជការឯទៀតលាចេញទៅអស់ហើយ នៅសល់តែ**ឡៅពី**ក៏ទ្រង់ព្រះកន្សែងសោកាហើយត្រាស់នឹង**ឡៅពី**ថា ខ្ញុំមិនឃើញអ្នកឯណាក្រៅនឹងនៅឈឺឆ្អាលសម្រាលទុក្ខរបស់ខ្ញុំ ឃើញតែមាម្នាក់នឹងពឹងពាក់ជាតម្រិះប្រាជ្ញាជួយគិតការតទៅ ឥឡូវមាចេញទ័ពទៅក្រៅហើយ កាលណាឡើយនឹងបានត្រឡប់វិលមកវិញ? **ឡៅពី**ក៏ក្រាបថ្វាយបង្គំលាទាំងក្រៀមក្រំ ពុំសប្បាយចិត្តនឹកអាណិតព្រះចៅ**ហៀនតេ**ពន់ប្រមាណ លុះបានទៅដល់ជួបនឹង**ចូផ្វូ** ៗក៏ប្រគល់ទាហានទាំងប្រាំម៉ឺនឲ្យ**ឡៅពី** ហើយឲ្យ**ជូឡេង**និង**ឡូជៀវ** ពីរនាក់អម**ឡៅពី**ទៅជាមួយ។ **ឡៅពី**ក៏រកឫក្សពារជាមង្គល ដល់ពេលហើយក៏លា**ចូផ្វូ**លើកទ័ពចេញទៅជាមួយនឹង**គួនអ៊ូ, តៀវហ៊ុយ** ចាកដែនក្រុងហ៊ូតោ ។ ឯ**តាំងស៊ីន**ដឹងថា **ឡៅពី**លើកកងទ័ពចេញទៅ ក៏ស្រួតទៅជួបនឹង**ឡៅពី**ធ្វើបីដូចជូនដំណើរកងទ័ព ហើយ**តាំងស៊ីន**ក៏ចូលទៅនិយាយខ្សឹបនឹង**ឡៅពី**ថា ការណ៍ដែលព្រះចៅ**ហៀនតេ**ទ្រង់ព្រះតម្រាស់ឲ្យ

យើងរួមគិតគ្នានោះកុំបីឲ្យអ្នកបំភ្លេចគេចមិនគិតឡើយ។ **ឡៅពី**តបថា "ការជាអាថ៌កំបាំងនោះខ្ញុំមិនភ្លេចទេ ខ្លួនអ្នកជាធំនៅក្នុងទីនេះជាក្រោយខ្ញុំ ចូរខំត្រិះរិះហើយនិងបិទបាំងកុំឲ្យខ្ចរខ្ចាយ បើខ្ញុំចេញទៅបានដល់កាលល្អវេលាណា នឹងផ្ញើដំណឹងមកឲ្យអ្នកជ្រាប" ហើយក៏លា**តាំងស៊ីន**ចេញទៅ ខំស្រូតលើកទ័ពទាំងថ្ងៃទាំងយប់មិនឈរឈប់សោះ។

**គួនអ៊ូ, តៀវហ៊ុយ**និយាយនឹង**ឡៅពី**ថា លោកលើកទ័ពគ្រប់គ្រូមិនដែលស្រូតរូតប្រញាប់ដូចលើកទ័ពម្តងនេះ ដែលលោកខំស្រូតប្រញាប់ដូច្នេះ តើដោយហេតុអ្វី? **ឡៅពី**តបថា "ខ្លួនយើងមកនៅក្នុងកណ្តាប់ដៃ**ចូឆូ** ឧបមាដូចជាសត្វបក្សាជាប់ក្នុងទ្រុង ពុំនោះសោតដូចជាមច្ឆាជាប់ក្នុងលប ឥឡូវគេបើកលែងឲ្យយើងរួចចេញពីទ្រុងនិងលបហើយ ក៏រែងត្រេកអរសប្បាយ ត្រូវខំទូន្មានកាយ ស្រូតប្រញាប់ឲ្យដល់ទៅទីលំនៅ" ថាហើយក៏ឲ្យ**គួនអ៊ូ, តៀវហ៊ុយ**បង្ខំទាហានឲ្យស្រូតរូតដំណើរទៅ។

ខណៈនោះ **ធៀយ៉ុក** និង**គុយកែ** ដែល**ចូឆូ**ប្រើទៅនាំស្បៀងអាហារឯស្រុកក្រៅ លុះឮដំណឹងថា **ចូឆូ**ប្រើ**ឡៅពី**ជាមេទ័ពចេញទៅដូច្នោះ ក៏ភ័យណាស់ ខំស្រូតរូតត្រឡប់ចូលទៅក្រុងហ៊ូតោ ចូលទៅជម្រាប**ចូឆូ**ថា ហេតុម្តេចបានជាលោកបើកឲ្យ**ឡៅពី**ចេញទៅធ្វើមេទ័ពដូច្នោះ។ **ចូឆូ**ថាបានជាឲ្យ**ឡៅពី**ចេញទៅនោះ ព្រោះឥឡូវនេះ**អ៊ួនសុត**នឹងលើកកងទ័ពទៅសន្ធប់រួមដៃគ្នានឹង**អ៊ួនសៀវ** ដែលឲ្យ**ឡៅពី**លើកទ័ពទៅ ប្រយោជន៍ចាំស្ទាក់ផ្លូវ**អ៊ួនសុត**កុំឲ្យឆ្លងទៅបានត្រង់ស្រុកឈីជីវ។

**ធៀយ៉ុក**ថា គ្រាដែល**ឡៅពី**គេចរត់ពី**លីប៉ោ**មកជ្រកនៅនឹងលោក ខ្ញុំបាទយល់ឃើញថា **ឡៅពី**ជាទីចម្រូងចម្រាសទៅខាងមុខ ខ្ញុំបាទក៏បានជម្រាបលោកជារឿយៗថា ឲ្យសម្លាប់**ឡៅពី**ចេញ។ លោកមិនធ្វើតាមខ្ញុំបាទ ក្រោយនោះលោកឲ្យ

**ឡៅពី**ធ្វើចៅហ្វាយស្រុកអ៊ីជីវ រួចត្រឡប់ទៅនៅស្រុកសៀវផាយ ហើយ**ឡៅពី**បែកពី**លីប៉ោ**មកទីពឹងលោកវិញ ដែលលោកជឿទុកចិត្តឲ្យ**ឡៅពី**ធ្វើជាមេទ័ពលើកចេញទៅគ្រានេះ ឧបមាដូចលែងខ្លាឲ្យទៅក្នុងព្រៃ ឬលែងក្រពើឲ្យចុះទៅក្នុងទឹកទន្លេ តំណទៅខាងមុខ**ឡៅពី**ក៏គង់នឹងមានកម្លាំងច្រើនឡើង លោកនឹងបង្ក្រាបឲ្យរាបទ័ពទៅវិញក៏កម្រណាស់។

**គុយកែ**ជម្រាប**ចូឆូ**ថា ដែលលោកមិនបានសម្លាប់**ឡៅពី**ចេញ ហើយយកទុកប្រើប្រាស់នោះគួរហើយ តែឥឡូវលោកប្រើឲ្យ**ឡៅពី**ចេញទៅធ្វើជាមេទ័ពមិនត្រូវសោះ ព្រោះបុរាណមានពោលទុកថា បើអ្នកឯណាជាមេទ័ពកាន់អាជ្ញាសិទ្ធិតែម្តង ក៏មានចិត្តកំរើបយ៉ាងធំទូលាយដូចបានធ្វើដល់មួយពាន់ដង។ ខ្ញុំបាទយល់ឃើញថា**ឡៅពី**មានកម្លាំងឡើងនឹងប្រែចិត្តចេញពីលោក តទៅមុខលោកនឹងបានសេចក្តីព្រួយលំបាកព្រោះ**ឡៅពី**ជាប្រាកដ ឲ្យលោកត្រិះរិះគិតឲ្យមាំមួនចុះ។

**ចូឆូ**បានស្តាប់**ធៀយ៉ុក** និង**គុយកែ**និយាយរៀបរាប់ដូច្នោះក៏ឲ្យភ័យក្នុងចិត្ត ទើបចាត់ប្រើ**ខៅធូ**ឲ្យលើកទាហានសេះប្រាំរយទៅតាម**ឡៅពី** បើទាន់ហើយឲ្យប្រាប់ឲ្យត្រឡប់មកវិញ។ **ខៅធូ**ក៏លើកទាហានសេះប្រាំរយបរយ៉ាងប្រញាប់ទាំងយប់ទាំងថ្ងៃ លុះទៅដល់ជិតកងទ័ព**ឡៅពី**ហើយ **ឡៅពី**ក៏ក្រឡេកមើលក្រោយឃើញផង់ធូលីដីហុយទ្រលោមឡើង ឮសន្ធឹកជើងសេះបោកប៉ះពារលើគ្នាគឹកកង ក៏និយាយនឹង**គួនអ៊ូ, តៀវហ៊ុយ**ថា "ដែលឮសន្ធឹកមកពីក្រោយនោះ មុខជា**ចូឆូ**ប្រើឲ្យលើកទ័ពមកតាមយើង ឲ្យត្រឡប់ទៅវិញជាប្រាកដហើយ" ថាហើយក៏បញ្ឈប់កងទ័ព ហើយចាត់**គួនអ៊ូ, តៀវហ៊ុយ**ឲ្យរាកងទ័ពឈប់កាន់អាវុធសងខាងផ្លូវចាំការពារអន្តរាយ។

លុះ**ខៅធូ**បរសេះមកដល់ឃើញទាហាន**ឡៅពី**ត្រៀមប្រុងខ្លួនដូច្នោះ ក៏លោតចុះពីលើសេះដើរទៅកណ្តាលកងទ័ពតែម្នាក់ឯង ហើយនិយាយនឹង**ឡៅពី**ថា ឥឡូវមហាឧបរាជប្រើខ្ញុំបាទមកតាមអញ្ជើញលោក ឲ្យលើកទ័ពត្រឡប់ទៅស្រុកហ៊្សូតោវិញ នឹងបានបញ្ជាក់សេចក្តីដល់លោកទៀត។ **ឡៅពី**ក៏ឆ្លើយតបទៅ**ខៅធូ**វិញថា កាលមហាឧបរាជនាំយើងទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ** សុំព្រះរាជទានឲ្យយើងធ្វើជាមេទ័ពលើកពលទៅស្ទាក់វាយកងទ័ព**អ៊្វនសុត** ព្រះចៅ**ហៀនតេ**ទ្រង់ព្រះរាជានុញ្ញាត យើងក៏បានក្រាបថ្វាយបង្គំលា ទាំងមហាឧបរាជឯងក៏បានចាត់ចែងប្រគល់ទាហានឲ្យយើង ហើយបង្គាប់ប្រាប់ខរាជការដល់យើងគ្រប់ប្រការ ថាយើងនឹងលើកទ័ពចេញមកតាមព្រះរាជតម្រាស់ព្រះចៅ**ហៀនតេ** ឥឡូវមហាឧបរាជត្រឡប់ឲ្យមកតាមយើងឲ្យវិលទៅវិញ បើប្រសិនយើងនឹងវិលទៅវិញវេលានេះ ក៏នឹងមានសេចក្តីខុសពីព្រះរាជតម្រាស់ព្រះចៅ**ហៀនតេ** បើដូច្នេះចូរអ្នកវិលទៅយកសេចក្តីសមគួរនឹងមហាឧបរាជចុះថា បើកាលណាយើងធ្វើសង្គ្រាមសម្រេចហើយ គង់នឹងលើកទ័ពត្រឡប់ចូលទៅក្រាបទូលព្រះចៅ**ហៀនតេ** ហើយនឹងនាំសេចក្តីពីកិច្ចរាជការប្តឹងមហាឧបរាជឲ្យជ្រាបតាមការ។

**ខៅធូ**បានស្តាប់ពាក្យ**ឡៅពី**និយាយដូច្នោះក៏គិតថា “កាល**ចូឆូ**ប្រើអញមកនោះនឹងបានដាក់កំហិតថា បើ**ឡៅពី**មិនព្រមត្រឡប់វិលទៅវិញ ឲ្យអញកំហែងបង្ខំចាប់នាំខ្លួន**ឡៅពី**ឲ្យបានយកទៅក៏ឥតអង្គីមាន ដែល**ឡៅពី**និយាយមកដូច្នេះ ក៏ត្រឹមត្រូវតាមព្រះរាជតម្រាស់ណាស់ បើដូច្នេះត្រូវតែអញត្រឡប់វិលទៅជម្រាប**ចូឆូ**វិញសិនចុះ បើ**ចូឆូ**នឹងឲ្យធ្វើប្រការម្តេច សឹមអញវិលត្រឡប់មកវិញធ្វើតាមបង្គាប់នោះជាក្រោយ” លុះគិតដូច្នោះហើយ ក៏លា**ឡៅពី**នាំទាហានទាំងអស់ ស្រូតត្រឡប់ចូល

ទៅក្រុងហ៊្វូតោវិញ ចូលទៅជម្រាប**ច្វូឆ្វូ**តាមពាក្យ**ឡៅពី**និយាយនោះគ្រប់ប្រការ។ **ច្វូឆ្វូ**បានស្តាប់ក៏ទាល់គំនិតចេះតែគិតវិតក្ក **ផៀយ៉ុក** និង**គុយកែ** ក៏និយាយជម្រាប**ច្វូឆ្វូ**ថា ដែលលោកប្រើឲ្យទៅតាម**ឡៅពី** ហើយ**ឡៅពី**មិនព្រមមកនោះ លោកឃើញច្បាស់ដូចពាក្យខ្ញុំបាទជម្រាបមែនឬទេ? **ច្វូឆ្វូ**តបថា យើងបានចេញវាចាប្រើ**ឡៅពី**ទៅហើយ បើនឹងបង្គំឲ្យត្រឡប់វិលមកវិញក៏បាន តែនឹងឃើញថា យើងចរចាមិនជាសត្យវិបត្តិពាក្យសម្តីហៅថាពាក្យពីរ សូម្បី**ឡៅពី**មានគំនិតកំរើបគិតប្រទូសរ៉ាយនឹងយើងវិញ យើងក៏មិនត្រូវខ្លាចអ្វីនឹងថ្វីដៃ**ឡៅពី**ប៉ុណ្ណោះ ប្រការមួយទៀតយើងក៏បានប្រើ**ជូឡេង** និង**ឡជៀវ**ឲ្យកាន់កាប់ទៅជាមួយផង បើ**ឡៅពី**ប្រែចិត្តចេញពីយើងយ៉ាងណា គង់តែ**ជូឡេង** និង**ឡជៀវ**មានសំបុត្រមកដល់យើងជាអាថ៌កំបាំងមិនខាន។

ឯ**ម៉ាថេង**ចៅហ្វាយស្រុកសែលៀង ដែលចូលទៅនៅក្នុងក្រុងហ៊្វូតោនោះ បានរួមគំនិតនឹង**ឡៅពី, តាំងស៊ុន** ដើម្បីនឹងរំលំាងកម្ចាត់**ច្វូឆ្វូ**ចេញតាមឡាយព្រះហស្តព្រះចៅ**ហៀនតេ**។ លុះ**ឡៅពី**លើកទ័ពចេញទៅហើយ ទទួលមានបម្រើចូលទៅប្រាប់**ម៉ាថេង**ថា ឥឡូវមានកើតសឹកក្នុងស្រុកសែលៀង។ **ម៉ាថេង**ក៏ចូលទៅក្រាបបង្គំលាព្រះចៅ**ហៀនតេ** ហើយប្រមូលកងយោធារបស់ខ្លួនលើកចេញទៅស្រុកសែលៀង។ ឯ**ឡៅពី**កាលលើកទ័ពទៅដល់ស្រុកឈីជីវ **គីម៉ៅ**ដែល**ច្វូឆ្វូ**ឲ្យទៅរាំងរក្សាស្រុកនោះដឹងថា **ឡៅពី**លើកទ័ពមកក៏ចេញទៅទទួលនាំចូលទៅក្នុងគេហដ្ឋានហើយឲ្យរៀបតុលៀងភោជនាហារ។

ឯ**ស៊ុនខៀន**និង**ប៊ិតុក**ដែលនៅរក្សាគ្រប់គ្រួភរិយាបុត្រ**ឡៅពី** លុះដឹងថា **ឡៅពី**ត្រឡប់មកក៏មានសេចក្តីត្រេកអរណាស់ នាំគ្នាទៅជួបនឹង**ឡៅពី** ហើយពណ៌នារាយ

រឿងពីសេចក្តីសុខទុក្ខគ្រប់គ្រួរបស់**ឡៅពី**ជាប្រក្រតី។ **ឡៅពី**ក៏មានសេចក្តីសោមនស្សសាទរណាស់ លា**គីម៉ៅ**ទៅកាន់ទីគ្រប់គ្រួរបស់ខ្លួន។

ខណៈនោះ មានបម្រើសេះចូលមកប្តឹងពីកិច្ចរាជការ ដល់**ឡៅពី**ថា**អ៊្វួនសុត**ធ្វើការទុច្ចរិតអាក្រក់ **លុយប៊ុត**និង**តាន់ឡាន់**ដែលជាសេនា**អ៊្វួនសុត**បានសេចក្តីក្តៅក្រហាយក៏នាំកូនទាហានរត់ទៅនៅធ្វើចោរក្នុងព្រៃ ឥឡូវ**អ៊្វួនសុត**លើកគ្រប់គ្រួ និងសារពើទ្រព្យសម្បត្តិនាំយកត្រាសម្រាប់រាជ្យនឹងទៅប្រគល់ឲ្យ**អ៊្វួនសៀវ**ជាបង បានមកដល់ព្រំដែនស្រុកឈីជីវហើយ។ **ឡៅពី**បានឮដូច្នោះ ក៏នាំពលទាហានលើកចេញពីស្រុកឈីជីវទៅ បានប្រទះនឹងកងទ័ព**គីឡេង**ជាទ័ពស្រួចនៃ**អ៊្វួនសុត**។ **តៀវហ៊ុយ**ក៏បរសេះចូលទៅច្បាំងនឹង**គីឡេង**បានដប់ភ្លែង **តៀវហ៊ុយ**ស្រែកគំហកដោយសំឡេងខ្លាំង សេះ**គីឡេង**ក៏ភ្ញាក់ស្ទុះថយក្រោយ **តៀវហ៊ុយ**បានកលការ ក៏ដេញចូលទៅយកដាវកាប់**គីឡេង**ធ្លាក់ពីលើសេះស្លាប់។ ទាហាន**គីឡេង**ក៏បែកខ្ចាត់ខ្ចាយរត់ទៅដល់**អ៊្វួនសុត** ៗដឹងថា**គីឡេង**ស្លាប់ ក៏នឹកខឹងណាស់ បង្ខំលើកទ័ពធំចូលមកតនឹងទ័ព**ឡៅពី**។

**ឡៅពី**ក៏ប្រើ**គួនអ៊ូ**, **តៀវហ៊ុយ**ជាទ័ពប៉ែកស្តាំ ឲ្យ**ជូឡេង** និង**ឡូជៀវ**ជាទ័ពប៉ែកឆ្វេង **ឡៅពី**ជាកងកណ្តាល ហើយបង្គាប់ឲ្យទ័ពប៉ែកស្តាំនិងឆ្វេងថា បើឃើញ**អ៊្វួនសុត**ច្បាំងដេញយើងមក អ្នកទាំងពីរកងចូរលើកកងទ័ពវាយខ្ទប់ទាំងសងខាងឲ្យមាំមួន។ លុះ**អ៊្វួនសុត**លើកទ័ពមកដល់ **ឡៅពី**ក៏បរសេះចេញទៅមុខទាហាន ហើយស្រែកជេរ**អ៊្វួនសុត**ថា អាក្បត់ មឹងមិនដឹងថ្ងៃនេះនឹងស្លាប់ទេឬ? មឹងបានត្រាសម្រាប់រាជ្យហើយតាំងខ្លួនជាស្តេច ឥឡូវព្រះចៅ**ហៀនតេ**ឲ្យអញលើកកងទ័ពមកបង្ក្រាប បើអាឯងស្រឡាញ់ជីវិតចូរប្រញាប់ចុះមកពីលើសេះមកគំនាប់អញ បើអា

ឯងនៅរឹងទទឹងមិនព្រមចំណុះអញទេ អាឯងព្រមទាំងញាតិសាលោហិតនឹងស្លាប់ទាំងអស់គ្នា។

**អ៊្លូនសុត**បានឮដូច្នោះខឹងណាស់ ក៏ស្រែកជេរ**ឡៅពី**ថា ខ្លួនអាឯងអួតថាកាន់ព្រះតម្រាស់ នឹងឲ្យអញចំណុះចុះចាញ់នោះ អញមិនត្រូវការទេ ថ្វីដែអាឯងយ៉ាងណាអញក៏ដឹងហើយ អាឯងធ្លាប់សម្លាប់នរណាស្លាប់ខ្លះ? ថាហើយ **អ៊្លូនសុត**ក៏បង្ខំបរពលចូលតយុទ្ធនឹងទ័ព**ឡៅពី**ជាកោលាហល។

**ឡៅពី**ក៏បរពលចូលហើយធ្វើជាថយត្រឡប់ទៅក្រោយ **អ៊្លូនសុត**ឃើញបានការ ក៏ដេញទាហានកាប់ឆ្ការចូលទៅ **ឡៅពី**ក៏បរសេះទល់គ្នាប្រចាក់ប្រកាប់ជាប់ដៃទៅវិញទៅមក។ **គួនអ៊ូ, តៀវហ៊ុយ** និង**ជូឡុង, ឡូជៀវ**ដែលជាប៉ែកឆ្វេងស្តាំ ឃើញបានការហើយ ក៏បរពលចូលវាយខ្ទប់ទាំងសងខាងជុំវិញកងទ័ព**អ៊្លូនសុត**។ ទាហាន**ឡៅពី**ដេញកាប់សម្លាប់ទាហាន**អ៊្លូនសុត**ស្លាប់ពិការជាច្រើន សាកសពដែលស្លាប់នោះគរលើគ្នាដូចជាគំនរខសឈើពាសពេញប្រថពី ឈាមហូរជេរជាសលើព្រះធរណីជាទីពន្លឹកមហិមា។ កងទ័ព**អ៊្លូនសុត**ក៏បែកខ្ចាត់ខ្ចាយរត់ព្រាត់ព្រាយពីគ្នាអស់ទៅ។

ឯ**លុយប៊ុក** និង**តាន់ឡាន់**ដែលជាសេនា**អ៊្លូនសុត**រត់ទៅធ្វើចោរព្រៃនោះ លុះឮថា**អ៊្លូនសុត**ច្បាំងគ្នានឹង**ឡៅពី** **លុយប៊ុក** និង**តាន់ឡាន់**ក៏លើកពួកចោរទៅវាយយកទ្រព្យរបស់និងស្បៀងអាហាររបស់**អ៊្លូនសុត**បានជាច្រើន។ ពេលនោះ**អ៊្លូនសុត**ដែលបែកទ័ពខូចខាតគ្រឿងសាស្ត្រាវុធនិងស្បៀងអាហារ ដឹងថាពួកចោរទាំងឡាយលើកគ្នាទៅស្ទាក់វាយដណ្តើមយកទ្រព្យរបស់ និងស្រូវអង្ករស្បៀងអាហារអស់ទៅទៀត **អ៊្លូនសុត**ក៏នាំគ្រប់គ្រួទៅឈប់នៅតំបន់កាំងតេង សល់ទាហានសុទ្ធតែមនុស្សចាស់

ជរាប្រហែលមួយពាន់ប្លាយ សល់ស្រូវភោជន៍សាលីប្រហែលសាមសិបរទេះ មនុស្សចាស់ជរាទាំងពួងក៏អត់ឃ្លានដោយដាច់ស្បៀងអាហារស្លាប់ទៅ ខ្លះដើរសុំទានអ្នកស្រុកមកបរិភោគក៏មិនឆ្អែតខ្លះ។

កាល**អ៊្លួនសុត**ទៅនៅក្នុងតំបន់កាំងតេងនោះ ជារដូវគិម្ហន្តក្តៅណាស់ ភរិយាបុត្រទាំងឡាយក៏មានចិត្តក្តៅក្លួលខឹងនឹង**អ៊្លួនសុត** ដែលធ្លាប់ធ្វើទុក្ខបុកម្នេញមកពីដើម ក៏យកស្រូវភោជន៍សាលីទាំងសំបកដាំបាយឲ្យ**អ៊្លួនសុត**បរិភោគ។ **អ៊្លួនសុត**ក៏ថា យើងលេបមិនចុះទៅក្នុងបំពង់កទេ ឲ្យរកទឹកឃ្មុំមកឲ្យយើងលាយបាយស៊ី។ អ្នកធ្វើបាយឮក៏ខឹងឆ្លើយថា នឹងទៅរកទឹកឃ្មុំឯណាបានក្នុងទីនេះ មានតែឈាមមនុស្ស។ **អ៊្លួនសុត**ឮដូច្នោះក៏មានតែសេចក្តីតូចចិត្ត ស្រែកគំហកគំរាមដោយសំឡេងខ្លាំង ក៏ក្អួតឈាមមកប្រហែលមួយនាឡិ ដួលធ្លាក់ពីលើគ្រែក៏ដាច់ខ្យល់ស្លាប់ក្នុងទីនោះ។ កាល**អ៊្លួនសុត**ស្លាប់នោះ ព្រះចៅ**ហៀនតេ**យាងទៅគង់នៅក្រុងហ៊្វូតោបានបួនឆ្នាំ ប្រាំបីខែ។

ឯ**អ៊្លួនអ៊ិន**ជាក្មួយឃើញ**អ៊្លួនសុត**ជាមាស្លាប់ ក៏លើកសពដាក់លើក្តារមឈូសហើយនាំគ្រប់គ្រួនិងត្រាសម្រាប់រាជ្យត្រឡប់ទៅស្រុកឡាំយ៉ុង។ លុះទៅដល់ស្រុកលោកាំង ឈ្មោះ**ឈីជីវប៉េង**ពួកអ្នកស្រុកលោកាំងដឹងសេចក្តី ក៏លើកបក្សពួកទៅស្កាត់វាយ**អ៊្លួនអ៊ិន**។ **ឈីជីវប៉េង**ក៏សម្លាប់**អ៊្លួនអ៊ិន**និងគ្រប់គ្រួ**អ៊្លួនសុត**ស្លាប់ទាំងអស់ ហើយយកត្រាសម្រាប់រាជ្យនោះទៅឲ្យ**ចូឆូ**ក្នុងក្រុងហ៊្វូតោ។ **ចូឆូ**បានត្រាសម្រាប់រាជ្យនោះក៏មានសេចក្តីសោមនស្សត្រេកអរណាស់ ហើយតាំង**ឈីជីវប៉េង**ជាចៅហ្វាយស្រុកកោឡេងនិងឲ្យបំណាច់រង្វាន់។

ឯ**ឡៅពី** លុះដឹងថា**អ៊្វនសុត**ស្លាប់ហើយ ក៏ធ្វើសំបុត្របកឲ្យ**ជូឡេង**និង**ឡូជៀវ**កាន់ចូលទៅក្រាបបង្គំទូលថ្វាយព្រះចៅ**ហៀនតេ** និងជូនដំណឹងខរាជការឲ្យ**ចូឆូ**ជ្រាបតាមដំណើរដែលមកច្បាំងនឹង**អ៊្វនសុត**នោះ រហូតដល់**អ៊្វនសុត**បែកទ័ពទៅនៅតំបន់កាំងតេង ឯទាហានប្រាំម៉ឺននោះ **ឡៅពី**សុំទុកនៅរក្សាស្រុកឈីជីវ។

**ជូឡេង**និង**ឡូជៀវ**ក៏ទទួលយកសំបុត្រនោះ ស្រូតរូតចូលទៅជូន**ចូឆូ**ឯក្រុងហ៊ូតោ។ **ចូឆូ**ឃើញសំបុត្រដូច្នោះក៏ខឹងណាស់ថា យើងប្រើខ្លួនទាំងពីរឲ្យកាន់កាប់កងទ័ពទៅជាមួយនឹង**ឡៅពី** ហេតុម្តេចបើខ្លួនត្រឡប់មកមិននាំយកទាហានប្រាំម៉ឺនមកផង ក៏ឲ្យនៅនឹង**ឡៅពី**ទាំងអស់ ថាហើយក៏បង្គាប់ពេជ្ឈឃាដឲ្យចាប់ខ្លួន**ជូឡេង**និង**ឡូជៀវ**ទៅនឹងប្រហារជីវិត។

**ស៊ុនហុក**ក៏ជម្រាប**ចូឆូ**ថា លោកចាត់ប្រើ**ឡៅពី**ធ្វើជាមេទ័ពកាន់អាជ្ញាសិទ្ធិទៅធ្វើការក្នុងរឿងណរង្គសង្គ្រាម ឯ**ជូឡេង**និង**ឡូជៀវ**ឲ្យធ្វើជាកូនកងទ័ពនៅក្រោមបង្គាប់**ឡៅពី** ៗយកទាហានប្រាំម៉ឺនទុក ហើយប្រើ**ជូឡេង** និង**ឡូជៀវ**ឲ្យកាន់សំបុត្រចូលមកប្តឹងខរាជការនោះ សូម្បី**ជូឡេង**និង**ឡូជៀវ**មានតម្រិះប្រាជ្ញាយ៉ាងណា ក៏មិនអាចរឹងទទឹងបង្គាប់**ឡៅពី**បាន ដែលលោកនឹងឲ្យសម្លាប់អ្នកទាំងពីរប្រាណចេញនោះ សូមឲ្យលោកត្រិះរិះមើលតាមការគួរសិនចុះ។ **ចូឆូ**បានស្តាប់ក៏យល់ថាត្រូវ ព្រមលើក**ជូឡេង**និង**ឡូជៀវ**ឲ្យរួចខ្លួន។ **ស៊ុនហុក**ជម្រាបទៀតថា គ្រានេះលោកក៏បានឃើញច្បាស់ពិតប្រាកដថា **ឡៅពី**ប្រែចិត្តចេញអំពីលោក បើនឹងស្ងៀមទុកយូរ ឃើញថា សឹកសត្រូវនេះនឹងកំរើបចិត្តប្រទូសរ៉ាយវិញពុំខាន។

**ចូឆូ**ឃើញត្រូវ ក៏ធ្វើសំបុត្រសម្ងាត់តាមពាក្យ**ស៊ុនហុក**ថា ហើយប្រើមនុស្សទំនុកទុកចិត្តឲ្យនាំទៅឲ្យ**គីម៉ៅ** ៗដឹងក្នុងសេចក្តីសំបុត្រនេះហើយ ក៏ឲ្យហៅខ្លួន

**តាន់តេង**មកប្រឹក្សា **តាន់តេង**ឆ្លើយថា ការប៉ុណ្ណេះក៏ល្អមនឹងគិតធ្វើបានព្រោះឥឡូវ**ឡៅពី**ចេញទៅតាំងបញ្ចុះបញ្ចូលមនុស្សនៅខាងក្រៅស្រុករាល់ថ្ងៃជានិច្ច។ ពេលព្រឹកនេះសុំឲ្យលោកចាត់ទាហានទៅបង្កប់ទុកសងខាងផ្លូវ បើកាលណា**ឡៅពី**នឹងវិលចូលមកក្នុងស្រុកវិញ ក៏ឲ្យទាហានដែលបង្កប់នោះចេញស្កាត់ចាប់សម្លាប់ចេញ ខ្លួនខ្ញុំបាទនឹងលើកទាហានទៅនៅលើកំពែង បើ**គួនអ៊ូ, តៀវហ៊ុយ**លើកតាមមក ខ្ញុំនឹងឲ្យទាហានបាញ់ធ្នូតទល់ទប់មិនឲ្យ**គួនអ៊ូ, តៀវហ៊ុយ**ចូលស្រុកបាន ការទាំងពួងក៏នឹងបានសម្រេចដោយងាយ។ **គីម៉ៅ**យល់ឃើញត្រូវ **តាន់តេង**ក៏លា**គីម៉ៅ**ទៅជួបនឹង**តាន់គុយ**ជាបិតា ហើយពណ៌នារាយរឿងឲ្យស្តាប់គ្រប់ប្រការ។ **តាន់គុយ**និយាយថា **ឡៅពី**នេះជាមនុស្សមានសតិបញ្ញាណាស់ ទាំងចិត្តថ្លើមក៏ល្អរួសរាយរាក់ទាក់នឹងពួកម៉ាក ហើយជាពូជព្រះរាជវង្សព្រះចៅ**ហៀនតេ** ដែល**ចូឆូ**រិះគិតនឹងធ្វើប្រទូសរ៉ាយ**ឡៅពី**នោះ ហើយយើងចូលគំនិតធ្វើអាក្រក់នឹង**ឡៅពី**ទៀតមិនគួរទេ ត្រូវតែយើងទៅប្រាប់**ឡៅពី**ឲ្យដឹងខ្លួនវិញ នោះទើបជាការប្រពៃ។

**តាន់តេង**បានឮបិតាថាដូច្នោះ ក៏ផ្លាស់ត្រឡប់ចិត្តគិតឃើញត្រូវផង **តាន់គុយ**ក៏ប្រើ**តាន់តេង**ឲ្យលបចេញទៅប្រាប់**ឡៅពី** លុះទៅដល់កណ្តាលផ្លូវប្រទះនឹង**គួនអ៊ូ, តៀវហ៊ុយ**លើកទាហានមកមុន **តាន់តេង**ក៏ថ្លែងរឿងរ៉ាវដែល**ចូឆូ**មានសំបុត្រមកឲ្យ**គីម៉ៅ**សម្លាប់**ឡៅពី**ចេញនោះឲ្យ**គួនអ៊ូ, តៀវហ៊ុយ**ស្តាប់គ្រប់ប្រការ។ **គួនអ៊ូ, តៀវហ៊ុយ**បានឮដូច្នោះខឹងណាស់។ **តៀវហ៊ុយ**ថា ដែល**គីម៉ៅ**គិតសម្លាប់បងយើងនោះ ត្រូវតែយើងនឹងធ្វើការកាប់ទម្លាយយកស្រុកនេះឲ្យបានជាមុន កុំឲ្យ**គីម៉ៅ**រិះគិតធ្វើយើងបានមុនឡើយ។ **គួនអ៊ូ**ថា **គីម៉ៅ**នៅក្នុងកំពែងប្រុងប្រៀបរៀបបម្រុងសេនាទាហានជាស្រេច យើងនឹងលើកចូលទៅច្បាំងខាងក្នុងគង់នឹងថ្លោះការ ត្រូវតែ

បង្អង់ឈប់នៅទីនេះសិន ចាំពេលយប់សឹមចាត់ការឲ្យទាហាន**ចូឆ្វ**ដែលនៅនឹងយើងនោះ ចូលទៅស្រែកហៅ**គីម៉ៅ**ថា **ចូឆ្វ**ប្រើ**តៀវលៀវ**ឲ្យមកនិយាយការជាប្រញាប់ ឲ្យអញ្ជើញ**គីម៉ៅ**ចេញមកជួបនឹងបាននិយាយការជាអាថ៌កំបាំងបន្តិច លុះ**គីម៉ៅ**ចេញមកខាងក្រៅក្រុង យើងនឹងលើកទាហានចូលកាប់សម្លាប់ចេញ។ **តាន់តេង**តបថា បើលោកចាប់**គីម៉ៅ**មិនបាន **គីម៉ៅ**មុខជានឹងត្រឡប់ចូលក្នុងក្រុងវិញ ខ្ញុំនឹងឲ្យទាហានបាញ់ធ្នូស្កាត់ ថាហើយ**តាន់តេង**ត្រឡប់មករក**តាន់គុយ**។

លុះវេលាយប់យាមពីរ **គួនអ៊ូ**ទើបឲ្យទាហានកាន់ទង់សម្គាល់របស់**ចូឆ្វ** ចូលទៅដល់ជើងកំពែង ហើយប្រាប់នាយទ្វារថាមហាឧបរាជឲ្យ**តៀវលៀវ**មករក**គីម៉ៅ**នឹងប្រាប់សេចក្តីអាថ៌កំបាំងមួយ។ នាយទ្វារក៏នាំសេចក្តីនោះទៅជម្រាប**គីម៉ៅ** ៗក៏ឲ្យហៅរក**តាន់តេង**មកប្រឹក្សាថា ឥឡូវមានទាហានមកប្រាប់ថា **ចូឆ្វ**ប្រើ**តៀវលៀវ**មកហៅយើងឲ្យចេញទៅជួប ប្រសិនបើយើងមិនចេញទៅជួបវេលានេះ បើ**ចូឆ្វ**ប្រើមកពិត **ចូឆ្វ**ក៏នឹងសង្ស័យថាយើងប្រែចិត្តចេញ បើយើងនឹងលើកទ័ពចេញទៅទាំងយប់ស្ងាត់ដូច្នេះ មិនដឹងច្បាស់ថា**តៀវលៀវ**នឹងមកមែនឬមិនមែន ជាកលឧបាយទេក៏មិនដឹង?

**តាន់តេង**ឆ្លើយថា លោកមានប្រសាសន៍នោះត្រូវហើយ ចាំខ្ញុំបាទឡើងទៅមើលលើសើនបន្ទាយសិន។ **គីម៉ៅ**ក៏នាំ**តាន់តេង**ឡើងទៅលើសើន ក្រឡេកមើលទៅឃើញទាហានជាច្រើន តែមិនស្គាល់មុខច្បាស់ ចាំបានតែទង់ជ័យសម្រាប់ទ័ព**ចូឆ្វ** **គីម៉ៅ**ស្រែកហៅទៅថា ពេលនេះយប់ជ្រៅណាស់ទៅហើយ មហាឧបរាជប្រើមកដោយហេតុការអ្វី ចាំពេលព្រឹកសឹមជួបនិយាយគ្នា។

ទាហាន**គួនអ៊ូ**ស្រែកតបទៅថា មហាឧបរាជប្រើមកជាការអាថ៌កំបាំង នឹងបង្អង់ចាំស្អែកមិនបានទេ ក្រែង**ឡៅពី**ដឹងខ្លួន ឲ្យលោកបើកទ្វារចេញមកជួបមួយរំពេច នឹងបាននិយាយគ្នាកុំឲ្យ**ឡៅពី**ដឹងការទាន់។ **គីម៉ៅ**បានឮដូច្នោះ ក៏មិនអស់សង្ស័យទេ ឯទាហានដែលនៅក្រៅកំពែងនោះក៏ចេះតែស្រែកតឿនឲ្យបើកទ្វារ **គីម៉ៅ**បានឮក៏លើកទាហានបំពានដុតគប់ភ្លើង បើកទ្វារឆ្លងស្ពានគូចេញទៅ ហើយស្រែកសួរថា **តៀវលៀវ**នៅឯណា? **គួនអ៊ូ**ឃើញបានការ ក៏បំផាយសេះចូលទៅត្រង់មុខ**គីម៉ៅ**ហើយស្រែកថា អាកំណាច! គួរឬអាឯងគប់គិតគ្នានឹង**ចូឆូ**ប្រទូសរ៉ាយបងអញ? **គីម៉ៅ**បានឮដូច្នោះក្រឡេកមើលទៅឃើញ**គួនអ៊ូ**ខឹងណាស់ ញាក់សេះបរចូលច្បាំងនឹង**គួនអ៊ូ**បានដប់ភ្លែង **គីម៉ៅ**អស់កម្លាំងញាក់សេះថយរត់ចូលស្រុកវិញ។

ឯ**តាន់តេង**ដែលនៅលើសើនបន្ទាយ ឃើញ**គីម៉ៅ**រត់ចូលមក ក៏បង្គាប់ឲ្យទាហានបិទទ្វារស្រុកជាប់ ហើយយកធ្នូបាញ់ចម្រុះទប់ពីមុខ **គីម៉ៅ**ចូលស្រុកមិនបាន ក៏បំផាយសេះទៅតាមជើងកំពែងចៀសទៅ។ **គួនអ៊ូ**ក៏បរសេះតាមទៅទាន់លើកដាវឡើងកាប់**គីម៉ៅ**ធ្លាក់ពីលើសេះស្លាប់។ **គួនអ៊ូ**ក៏កាត់យកក្បាល**គីម៉ៅ**ត្រឡប់មកស្រុកវិញ ហើយស្រែកប្រកាសប្រាប់ទាហានដែលនៅលើសើនថា **គីម៉ៅ**គិតសេចក្ដីអាក្រក់នឹងយើង ៗក៏សម្លាប់កាត់យកក្បាលមកហើយ អ្នកទាំងអស់គ្នាបើព្រមចុះចូលធ្វើការជាមួយនឹងយើង ក៏ឲ្យបបួលគ្នាចេញមករកយើងដោយល្អចុះ យើងមិនធ្វើអ្វីទេ។ ទាហានទាំងពួងបានឮដូច្នោះក៏បើកទ្វារចេញមកគំនាប់**គួនអ៊ូ** ៗ ឃើញបណ្ដាអ្នកស្រុកឈឺជីវចេញមកគំនាប់ដោយស្រួល ក៏មានសេចក្ដីត្រេកអរណាស់ ហាមប្រាមទាហានទាំងពួងមិនឲ្យធ្វើអន្តរាយអ្វីឡើយ។

លុះវេលាព្រឹក **គួនអ៊ូ**ក៏ឲ្យ**តៀវហ៊ុយ**ចូលទៅនៅរក្សាស្រុកឈីជីវ ហើយ**គួនអ៊ូ**ក៏នាំយកក្បាល**គីម៉ៅ**ត្រឡប់ឲ្យ**ឡៅពី**មើល ទទួលប្រទះនឹង**ឡៅពី**កណ្ដាលផ្លូវក៏បង្ហាញក្បាលនោះ ហើយ**គួនអ៊ូ**ពណ៌នារាយរឿងដែល**គីម៉ៅ**គិតប្រទូសរ៉ាយឲ្យបានដឹងច្បាស់ ព្រោះ**តាន់តេង**បានឲ្យដំណឹងរឿងហេតុនេះ។ **ឡៅពី**បានស្ដាប់គ្រប់ប្រការក៏មានសេចក្ដីភ័យបារម្ភណាស់ថា សេចក្ដីដែលប្អូនធ្វើដូច្នេះ ប្រសិនបើដឹងដល់**ចូឆូ**ៗមុខជានឹងលើកកងទ័ពមកធ្វើអន្តរាយដល់យើង ៗនឹងគិតប្រការម្ដេច? **គួនអ៊ូ**ឆ្លើយថា ទោះបី**ចូឆូ**នឹងលើកកងទ័ពមកធ្វើអន្តរាយដល់យើង ខ្ញុំបាទនិង**តៀវហ៊ុយ**អាចហ៊ានសុំយកអាសាតច្បាំងនឹង**ចូឆូ**ត្រាតែអស់តម្រិះប្រាជ្ញារៀងខ្លួន។ **ឡៅពី**បានឮដូច្នោះក៏មិនអស់វិតក្ក ទើបនាំ**គួនអ៊ូ**និងទាហានទាំងពួងលើកចូលទៅក្នុងស្រុកឈីជីវ។ ខណៈនោះ**តាន់តេង** និងបណ្ដាអ្នកស្រុកក៏នាំគ្នាចេញទៅទទួល**ឡៅពី**ទាំងអស់។ **តៀវហ៊ុយ**ដឹងថា **ឡៅពី**ទៅដល់ហើយ ក៏ចេញទៅទទួលហើយជម្រាប**ឡៅពី**ថា គ្រប់គ្រួភរិយាបុត្រ**គីម៉ៅ**នោះ ខ្ញុំបាទសម្លាប់ចោលទាំងអស់ទៅហើយ។ **ឡៅពី**ឮដូច្នោះ ក៏រឹតតែមានបរិវិតក្កទុក្ខព្រួយពន់ប្រមាណថា ប្អូនឯងសម្លាប់**គីម៉ៅ**និងគ្រប់គ្រួ**គីម៉ៅ**អស់សូន្យដូច្នេះ មុខជា**ចូឆូ**នឹងលើកទ័ពមកធ្វើអន្តរាយដល់យើងមិនលែងទេ។

**តាន់តេង**ជម្រាបថា ដែល**ចូឆូ**នឹងលើកកងទ័ពមកនោះ ទុកងារខ្ញុំបាទនឹងរិះគិតរកឧបាយកលធ្វើមិនឲ្យ**ចូឆូ**ប្រទូសរ៉ាយដល់លោកបានឡើយ។

**ឡៅពី**ក៏សួរ**តាន់តេង**ថា អ្នកឯងនឹងគិតធ្វើប្រការម្ដេចខ្លះ? **តាន់តេង**តបថា សព្វថ្ងៃនេះ**ចូឆូ**បារម្ភគិតតែ**អ៊ួនសៀវ**ចៅហ្វាយស្រុកគីជីវមួយទេ ព្រោះ**អ៊ួនសៀវ**មានទាហានប្រមាណមួយរយម៉ឺន មានសេនាឯកនិងទីប្រឹក្សាក៏ច្រើន ឯស្រុកសេងជីវ

ស្រុកអ៊ីវជីវ ស្រុកបេងជីវ បីតំបន់នោះជាមណ្ឌលធំ សុទ្ធតែឡើងចំណុះអ៊្ហួនសៀវទាំងអស់ បណ្ដាស្រុកតូចៗដែលឡើងដល់ស្រុកទាំងបីនោះ ជាលំដាប់ទៅទៀតក៏ច្រើន បើលោកឲ្យមានសំបុត្រទៅសុំកងទ័ព**អ៊្ហួនសៀវ**លើកមកជួយហើយ ក៏នឹងខ្លាចអ្វីដល់**ចូឆូ**នោះ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ២០

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ឡៅពី**សុំសំបុត្រ**តេហៀន** ផ្ញើទៅសុំកងទ័ព**អ៊្វីនសៀវ**ជាដន្លងឲ្យលើកមកជួយ រហូតដល់**ស៊ុនហ៊ីវ**និយាយគ្នា និងប្រើ**ខុងយ៉ុង**ឲ្យចេញទៅនិយាយបញ្ចុះបញ្ចូល**ឡៅពៀវ**)។*

**ឡៅពី**ថា គ្រានេះ**អ៊្វីនសុត**ស្លាប់ក៏ព្រោះយើងលើកកងទ័ពទៅច្បាំង ដែលនឹងមានសំបុត្រទៅសុំកងទ័ព**អ៊្វីនសៀវ**នោះ ប្រាកដជា**អ៊្វីនសៀវ**មិនលើកមកជួយទេ ព្រោះមិនមានផ្លូវមេត្រីទៅវិញទៅមកជាមួយនឹងយើង។

**តាន់តេង**ឆ្លើយថា **តេហៀន**ដែលនៅក្នុងស្រុកឈីជីវនេះ ជាដន្លងនឹង**អ៊្វីនសៀវ** ហើយក៏ត្រូវអធ្យាស្រ័យគ្នានឹងលោកមកពីដើម ខ្ញុំបាទយល់ឃើញថា បើលោកទៅគំនាប់**តេហៀន**រឿយៗហើយ បើលោកនឹងសុំសំបុត្រ**តេហៀន**ទៅឲ្យ**អ៊្វីនសៀវ** មុខជា**អ៊្វីនសៀវ**នឹងលើកមកជួយលោកតាមសំបុត្រ**តេហៀន**ជាប្រាកដ។ **ឡៅពី**បានស្តាប់ដូច្នោះក៏មានសេចក្តីត្រេកអរ ទើបនិយាយថា "**តេហៀន**នេះជាគ្រូប្រដៅអក្សរយើងមកពីដើម កាលគ្រាយើងនៅក្នុងស្រុកទុនគួន ក្រោយពីនោះមក**តេហៀន**ចូលទៅធ្វើរាជការនាហ្មឺនក្នុងរាជ្យព្រះចៅ**ហៀនតេ** លុះខន្ទីដប់នាក់ប្រព្រឹត្តទុច្ចរិតអាក្រក់ក្នុងផែនដី **តេហៀន**ក៏លាចេញពីរាជការមកនៅក្នុងស្រុកឈីជីវនេះ" ថាហើយ**ឡៅពី**ក៏ចាត់ចែងរបស់ទ្រព្យ ហើយនាំខ្លួន**តាន់តេង**ទៅរក**តេហៀន**ឯផ្ទះ។ **ឡៅពី**គំនាប់**តេហៀន** ហើយពណ៌នាសេចក្តីឲ្យ**តេហៀន**ស្តាប់គ្រប់ប្រការថា ឥឡូវនេះខ្ញុំមាន

សេចក្តីទុក្ខព្រួយពន់ពេកណាស់ សម្លឹងមើលទៅឃើញតែលោក សូមលោកអាណិតខ្ញុំសុំធ្វើជាសំបុត្ររបស់លោក ទៅសុំកងទ័ព**អ៊្វនសៀវ**ឲ្យលើកមកជួយ ដើម្បីច្បាំងនឹង**ចូវឆ្វ**។

គ្រានោះ**តេហៀន**បានស្តាប់**ឡៅពី**និយាយ ក៏មានចិត្តអាណិតមេត្តាបានសរសេរសំបុត្រតាមពាក្យ**ឡៅពី** លុះធ្វើរួចក៏ប្រគល់ឲ្យ**ឡៅពី** ៗទទួលហើយក៏លា**តេហៀន**ត្រឡប់ទៅផ្ទះវិញ ហើយប្រើ**ស៊ុនខៀន**ឲ្យកាន់សំបុត្រនោះទៅឲ្យ**អ៊្វនសៀវ**ឯស្រុកគីជីវ។ **អ៊្វនសៀវ**ឃើញសំបុត្រ**តេហៀន**ដូច្នោះ ក៏គិតតែក្នុងចិត្តថា “**ឡៅពី**ប្រទូសរ៉ាយនឹង**អ៊្វនសុត**ជាប្អូនអញ ៗក៏កំពុងគិតនឹងសងសឹក**ឡៅពី** ឥឡូវបើអញមិនលើកទ័ពទៅជួយទេ ក៏បារម្ភចិត្ត**តេហៀន**ដែលបានធ្វើសំបុត្រមកដល់ហើយ” គិតហើយក៏ឲ្យហៅទីប្រឹក្សាមកពិគ្រោះថា គ្រានេះ**ចូវឆ្វ**មានកម្លាំងជាច្រើនណាស់ ហើយធ្វើអាក្រក់នឹងព្រះចៅ**ហៀនតេ** យើងនឹងលើកទ័ពទៅកម្ចាត់**ចូវឆ្វ** តើអ្នកទាំងពួងនឹងយល់ឃើញដូចម្តេច?

**តៀនហង**ទីប្រឹក្សាឆ្លើយថា លោកបានលើកកងទ័ពទៅធ្វើសង្គ្រាមគ្រប់ឆ្នាំមិនដាច់ ណាមួយសេនាទាហានកំពុងនឿយហត់ពេកណាស់ ប្រការមួយទៀត ស្បៀងអាហារនៅក្នុងជង្រុកសោតក៏ស្តួចស្តើង នៅមិនទាន់ប្រមូលទុកគ្រប់គ្រាន់បរិបូរដែលលោកនឹងលើកទៅគ្រានេះ ខ្ញុំបាទឃើញថា ទាហានទាំងពួងនឹងបានសេចក្តីអត់ឃ្លានខ្លាំងណាស់ សុំឲ្យលោកមានសំបុត្រចូលទៅក្រាបទូលស្នើព្រះចៅ**ហៀនតេ** ឲ្យទ្រង់ត្រាស់ហាមឃាត់**ចូវឆ្វ** កុំឲ្យលើកកងទ័ពទៅធ្វើអន្តរាយដល់អាណាខេត្តទាំងពួង ឲ្យអាណាប្រជានុរាស្ត្របានសេចក្តីក្តៅក្រហាយ បើ**ចូវឆ្វ**មិនធ្វើតាមព្រះតម្រាស់ យើងនឹងលើកកងទ័ពធំទៅវាយឲ្យគ្រប់មណ្ឌលខេត្តទាំងពួង ហើយកៀរប្រមូល

យកមនុស្ស និងស្រូវអង្ករចំណីអាហារ រៀបគ្រឿងសាស្ត្រាវុធបន្ទុករទេះ និងទូកចម្បាំងទុកឲ្យព្រមយ៉ាងច្រើន ហើយធ្វើសំបុត្រចេញប្រកាសដល់នាហ្មឺនមុខមន្ត្រីក្នុងក្រុងថា **ចូឆ្វ**ជាសត្រូវរាជសម្បត្តិ បើនាហ្មឺនទាំងឡាយយល់ឃើញផង យើងក៏បានការ ត្រូវធ្វើដូច្នេះគម្រប់បីឆ្នាំ គង់នឹងសម្រេចការបានដោយងាយ។

**សឹមផោយ**បានឮ**តៀនហង**និយាយដូច្នោះក៏ឆ្លើយថា អ្នកគិតដូច្នេះមិនត្រូវសោះ ព្រោះទាហានរបស់ថៅហ្វាយយើងគ្រានេះ សុទ្ធតែមានថ្វីដៃច្រើនណាស់ បើនឹងគិតកម្ចាត់**ចូឆ្វ**នោះងាយណាស់ ឧបមាដូចជាលើកដៃផ្កាប់ចុះ ហេតុម្ដេចបានជាអ្នកគិតឲ្យយឺតវែងទៅដូច្នេះ? **ឈីស៊ីវ**បានស្ដាប់**សឹមផោយ**ថាដូច្នោះ ក៏ជម្រាបទៅ**អ៊ួនសៀវ**ថា ធម្មតាសង្គ្រាមមិនមែននឹងមានជ័យជម្នះព្រោះទាហានច្រើននិងតិចនោះទេ រមែងចាញ់ឈ្នះព្រោះឧបាយកលប្រាជ្ញារិះគិតការទៅផ្សេងៗ ឯ**ចូឆ្វ**នោះទោះបីមានសេនាទាហានតិចជាងយើងក្ដីណា តែថាគេមានសតិបញ្ញាជំនាញស្ទាញស្ទាត់ក្នុងការសង្គ្រាមជ្រៅទូលាយណាស់ ទាំងទីប្រឹក្សាក៏ឆ្លៀវឆ្លាត ដែលនឹងធ្វើបានដោយងាយ ដូចជា**កងស៊ុនចាន**មិនមែនទេ សុំឲ្យលោកធ្វើតាមពាក្យ**តៀនហង**វិញទើបសម្រេច។

**គួតៅ**ឆ្លើយជម្រាប**អ៊ួនសៀវ**ថា គ្រានេះបានកលការល្មមធ្វើហើយ ដែលនឹងរង់បង្អង់ទុកតាមពាក្យ**តៀនហង**និង**ឈីស៊ីវ**នោះ មុខជា**ចូឆ្វ**នឹងមានគំនិតច្រើនឡើងទៅខាងមុខទាហានរបស់យើងនឹងមានសេចក្ដីលំបាក ម្យ៉ាងទៀត **តេហៀន**នឹងមានសេចក្ដីតូចចិត្តប្រការមួយ **ឡៅពី**ក៏ជាពូជរាជវង្សទាំងមានចិត្តសត្យទៀងត្រង់នឹងផែនដី គួរហើយលោកនឹងលើកទ័ពទៅជួយ**ឡៅពី**ធ្វើការកម្ចាត់**ចូឆ្វ**ចេញ ដើម្បីឲ្យ

ព្រះមហាក្សត្រនិងនាហ្មឺនមុខមន្ត្រី នូវអាណាប្រជានុរាស្ត្របានសេចក្ដីសុខក្សេមក្សាន្តព្រោះគំនិតរបស់លោក។

**អ៊្លួនសៀវ**បានស្ដាប់ទីប្រឹក្សាប្អូននាក់និយាយមិនចុះសម្រុងគ្នា ក៏នៅស្ងៀមទទួលឃើញ**ខៅហ៊ីវ**និង**ស៊ុនខាម**ចូលមក **អ៊្លួនសៀវ**ក៏គិតក្នុងចិត្តថា "**ខៅហ៊ីវ** និង **ស៊ុនខាម**នេះជាមនុស្សមានសតិបញ្ញាជាងអ្នកទាំងពួង យើងនឹងប្រឹក្សាល្បងមើលគំនិតអ្នកទាំងពីរនេះ តើនឹងគិតឃើញដូចម្ដេចវិញ" **អ៊្លួនសៀវ**ក៏និយាយប្រាប់**ខៅហ៊ីវ**និង**ស៊ុនខាម**តាមដំណើរ ហើយសួរថា អ្នកនឹងឃើញដូចម្ដេច?

**ខៅហ៊ីវ**និង**ស៊ុនខាម**ឆ្លើយថា គ្រានេះទាហានរបស់លោកក៏មានច្រើនណាស់ ទាំងថ្មីដែក៏ខ្លាំងពូកែ គួរតែទៅជួយ**ឡៅពី**ជាពូជព្រះរាជវង្សដែលមានកម្លាំងតិច ដើម្បីនឹងកម្ចាត់**ចូឆ្វ**ដែលជាសត្រូវរាជសម្បត្តិចេញ ដូចជាលោកជួយទំនុកបម្រុងផែនដី សេចក្ដីគាប់ប្រសើរក៏នឹងមានដល់លោកទៅខាងមុខ។ **អ៊្លួនសៀវ**បានស្ដាប់ដូច្នោះក៏ឆ្លើយថា "គំនិតអ្នកទាំងពីរនេះត្រូវនឹងចិត្តយើងគិតទុកជាស្រេច" ថាហើយក៏តែងសំបុត្រឲ្យ**ស៊ុនខៀន**កាន់ត្រឡប់ទៅឲ្យ**តេហៀន**សេចក្ដីថា "យើងនឹងលើកកងទ័ពទៅកម្ចាត់**ចូឆ្វ** ឲ្យ**ឡៅពី**ទៅប្រសព្វគ្នានឹងទ័ពរបស់យើងចុះ"។ **ស៊ុនខៀន**ទទួលយកសំបុត្រនោះ ហើយក៏លា**អ៊្លួនសៀវ**ត្រឡប់ទៅ លុះដល់ស្រុកឃីជីវក៏យកសំបុត្រនោះទៅជូន**ឡៅពី**។

ឯ**អ៊្លួនសៀវ**ក៏តាំងតែកេណ្ឌទាហាន ឲ្យ**ង៉ាន់លៀង, ប៊ុនធីវ**លើកទាហានចេញទៅជាទ័ពមុខ ឲ្យ**សឹមផោយ**និង**អងគី**ជាបាឡាត់ទ័ពបង្គាប់ទាហានទាំងតូចទាំងធំទាំងពួង ខ្លួន**អ៊្លួនសៀវ**ជាមេទ័ពធំលើកទាហានជិះសេះដប់ប្រាំម៉ឺន បញ្ចូលគ្នាជាទាហានសាមសិបម៉ឺនឲ្យ**ទៀនហង, ខៅហ៊ីវ, ស៊ុនខាម** បីនាក់នេះជាទីប្រឹក្សា លុះ

ត្រៀមទាហានបានស្រេចវេលាណា ដល់ឫក្សល្អក៏លើកទ័ពចេញទៅ។ **គួតៅ**ជម្រាប**អ៊ួនសៀវ**ថា ដែលលោកនឹងលើកកងទ័ពទៅកម្ចាត់**ចូឆ្វ**នោះ ចូរធ្វើការកាន់យកអាណាខេត្តទាំងពួង និងបណ្ដាវាស្រ្តកុំឲ្យគេចត្រឡប់ចូលទៅខាង**ចូឆ្វ**បាន។

**អ៊ួនសៀវ**សួរថា អ្នកនឹងធ្វើយ៉ាងម៉េច? **គួតៅ**ជម្រាបថា កាលបើលោកនឹងលើកកងទ័ពចេញទៅនោះ សុំឲ្យតែងសំបុត្រទៅបិទទុកគ្រប់ទ្វារស្រុក ក្នុងអាណាខេត្តនីមួយៗពោលទោស**ចូឆ្វ**ថា **ចូឆ្វ**ធ្វើការអាក្រកក់ប្រព្រឹត្តទុច្ចរិតជាក្បត់ សត្រូវនឹងផែនដី។

**អ៊ួនសៀវ**បានស្ដាប់ដូច្នោះ ក៏មានសេចក្ដីត្រេកអរពន់ពេក ទើបនិយាយនឹង**តាន់លឹម**ដែលជាអាល័ក្សពីគ្រាព្រះចៅ**ហាន់តេ** ជាព្រះអយ្យកោព្រះចៅ**ហៀនតេ** កាល**តាំងតុះ**លើកចូលមកនៅក្នុងស្រុកឡុកអៀងនោះ **តាន់លឹម**វេះគេចមកនៅនឹង**អ៊ួនសៀវ** ៗក៏ឲ្យ**តាន់លឹម**ធ្វើសំបុត្រតាមពាក្យ**គួតៅ**ថា។

**តាន់លឹម**ទើបតែងសំបុត្រនោះដប់ប្រាំបីច្បាប់ សេចក្ដីដូចគ្នាថា “ព្រះមហាក្សត្រសោយរាជសម្បត្តិមកពីដើម ស្រុកទេសរមែងកើតអន្តរាយផ្សេងៗ ព្រោះមានអ្នកខ្លាំងពូកែប្រព្រឹត្តសេចក្ដីទុច្ចរិតអាក្រក់ប្រទូសរ៉ាយនឹងផែនដី នាហ្មឺនមុខមន្ត្រីទាំងឡាយក៏នៅក្នុងអំណាចអ្នកនោះ ប្រការមួយ ព្រះមហាក្សត្រជឿស្ដាប់ពាក្យស្ត្រីយកជាត្រីមុខ ស្រុកក៏វិនាសអន្តរាយប្រការមួយ ព្រះមហាក្សត្រជឿស្ដាប់ពាក្យមនុស្សអន្ធពាលទាំងឡាយ រាជសម្បត្តិរមែងវិនាសជាចលាចលផ្សេងៗ។ ខដែលថាអ្នកខ្លាំងពូកែប្រព្រឹត្តទុច្ចរិតអាក្រក់ នាហ្មឺនមុខមន្ត្រីទាំងឡាយនៅក្រោមអំណាចអ្នកនោះ គឺគ្រាព្រះចៅ**ជិនស៊ីអងតេ** សោយរាជសម្បត្តិតាំងពីព្រះជន្មាយុ ៧ព្រះវស្សា **តៀវកោ**ជានាហ្មឺនធំ ព្រះចៅ**ជិនស៊ីអងតេ**ទុកព្រះទ័យនឹង**តៀវកោ** ៗគិតទុច្ចរិត

អាក្រក់ក្បត់ដណ្តើមយករាជសម្បត្តិ កាន់គ្រប់ចូលគាល់ជាដរាប នាហ្មឺនមុខមន្ត្រីទាំងឡាយនៅក្រោមអំណាច**តៀវកោ**ជាច្រើន ថ្ងៃមួយ**តៀវកោ**ចង់ដឹងថា បណ្តានាហ្មឺននៅក្នុងវាំងនឹងទៀងត្រង់ច្រើន ឬជាមនុស្សប្រចុចប្រចែងច្រើនជាង ទើបឲ្យយកប្រើសពីរទៅបញ្ឈរកណ្តាលទីប្រជុំ ហើយ**តៀវកោ**និយាយនឹងនាហ្មឺនទាំងពួងថា យើងបានសេះពីរនេះមក នរណាស្គាល់ច្បាស់ឬទេ? នាហ្មឺនដែលទុច្ចរិតប្រចុបប្រចែងនោះក៏បបួលគ្នាថា លោកបានសេះពីរនេះមកពីណា ត្រូវលក្ខណៈល្អណាស់? ដែលថាសេះតាមពាក្យ**តៀវកោ**នោះប្រមាណប្រាំពីរភាគ នាហ្មឺនដែលទៀងត្រង់ប្រហែលបីភាគឆ្លើយថា ប្រើសទេ មិនមែនសេះ **តៀវកោ**បានឮដូច្នោះក៏គិតថា នាហ្មឺនទាំងពួងសឹងតែនៅក្រោមអំណាចអញប្រាំពីរទៅប្រាំបីភាគអស់ហើយ តាំងពីនោះមក**តៀវកោ**ក៏កំរើបចិត្តគិតធ្វើការអាក្រក់តាមអំណាចចិត្តគិតថា រាជសម្បត្តិនេះនៅក្នុងកណ្តាប់ដៃយើងហើយ បណ្តានាហ្មឺនដែលមិនបានចូលគំនិតផងនោះ **តៀវកោ**ក៏ក្លែងយកទោសខុសសម្លាប់ចេញបាន ដកហូតងារចេញពីតំណែងរាជការខ្លះ។

ខណៈនោះ ព្រះចៅ**ជិនស៊ីអងតេ**និងនាហ្មឺនសព្វមុខមន្ត្រីនូវអស់អាណាប្រជានុរាស្ត្រសឹងតែក្តៅក្រហាយទូទាំងផែនដី នាហ្មឺនមុខមន្ត្រីឯណាដែលសុចរិតពិតត្រង់នឹងព្រះមហាក្សត្រ ក៏គិតព្រមគ្នាចាប់**តៀវកោ**និងគណៈញាតិសម្លាប់ចេញអស់ រីសេចក្តីអាក្រក់របស់**តៀវកោ**ក៏មានប្រាកដរហូតមកដល់សព្វថ្ងៃនេះ។

ខដែលព្រះមហាក្សត្រជឿស្តាប់ពាក្យស្ត្រីនោះ គឺកាលគ្រាព្រះចៅ**ហាន់កោចោ**បានសោយរាជសម្បត្តិ មានព្រះទ័យស្រឡាញ់នាង**លីហៅ**ជាមហេសីណាស់ បើនាង**លីហៅ**នឹងពិតទូលពីរឿងអ្វី ព្រះចៅ**ហាន់កោចោ**ចេះតែជឿស្តាប់គ្រប់ប្រការ ហើយ

ព្រះចៅ**ហាន់កោចោ**តាំង**លីឆាន់**និង**លីឡុក** ដែលជាប្អូននាង**លីហៅ**ឲ្យធ្វើជានាហ្មឺនធំឆ្វេងស្តាំ ឯ**លីឆាន់**និង**លីឡុក**នោះទោះនឹងចូលទៅខាងក្នុងក៏បាន បើនឹងធ្វើការអ្វីក៏មិនបានកោតក្រែងព្រះចេស្តា ប្រើអំណាចគំរាមកំហែងរឹបយកទ្រព្យរបស់អស់បណ្តារាស្ត្រខ្លះ សម្លាប់ម្ចាស់របស់ចេញខ្លះ នាហ្មឺនក៏នៅក្នុងអំណាច**លីឆាន់** និង**លីឡុក**ទាំងអស់ បើមានមនុស្សមកប្តឹងសាទុក្ខពោលទោស**លីឆាន់**និង**លីឡុក**ថាកំហែងកំចោករោគរាស្ត្រដោយប្រការម្តេចៗ នាង**លីហៅ**ក៏ទូលទាស់ព្រះចៅ**ហាន់កោចោ** ៗក៏ជឿស្តាប់ ម្ល៉ោះហើយអាណាប្រជានុរាស្ត្រទាំងឡាយ ក៏បានសេចក្តីក្តៅក្រហាយទូទៅទាំងផែនដី លុះអំណើះតមកព្រះចៅ**ហាន់កោចោ**ទ្រង់ព្រះសុវណ្ណគត **លីឆាន់**និង**លីឡុក**កំរើបចិត្តគិតតាំងខ្លួនឡើងសោយរាជសម្បត្តិ ចំណែក**ជីវប៊ុត**និង**ឡៅជៀង**ជានាហ្មឺនធំ នៅក្នុងក្រុងដែលជាមនុស្សទៀងត្រង់នឹងផែនដី រិះគិតបបួលគ្នាចាប់ខ្លួន**លីឆាន់, លីឡុក** និងវង្សាគណៈញាតិបងប្អូនសម្លាប់ចេញអស់ ហើយក៏អញ្ជើញ**អាន់ប៊ុតតេ** ជាព្រះរាជបុត្រឡើងសោយរាជសម្បត្តិជាម្ចាស់ផែនដី ស្រុកទេសក៏ជាសុខក្សេមក្សាន្តតមក។

ខដែលជាព្រះមហាក្សត្រជឿស្តាប់ពាក្យមនុស្សអន្ធពាលនោះ គឺព្រះចៅ**ហាន់តេ**បានសោយរាជសម្បត្តិ ហើយជឿស្តាប់ពាក្យខន្ទីទាំងពួង គ្រានោះ**ចោថេង**ជាបិតា**ចូឆ្វូ**ធ្វើជានាហ្មឺន រួមគំនិតគ្នានឹងពួកខន្ទីធ្វើការទុច្ចរិតប្រព្រឹត្តអាក្រក់នឹងផែនដី ប្រទេសក៏កើតចលាចលប្រែប្រួលច្បាប់ទម្លាប់ត្រឡប់យកខុសជាត្រូវ ជាប់ជាលំដាប់តមកដល់សម័យនេះ លុះព្រះចៅ**ហៀនតេ**បានសោយរាជ្យ ក៏មានសេចក្តីក្តៅក្រហាយក្នុងព្រះរាជហឫទ័យមកជាច្រើនគ្រា គ្រានេះ**ចូឆ្វូ**មានសេនាទាហានជាច្រើន ហើយមានចិត្តកំរើបនឹងធ្វើការអ្វីៗ ក៏ប្រើទៅតាមអំណាចអំពើចិត្ត ឥតកោត

ក្រែងព្រះចេស្ដាព្រះមហាក្សត្រ ប៉ងនឹងដណ្ដើមយករាជសម្បត្តិដើម្បីខ្លួន សូន្យអស់ទំនៀមទម្លាប់ ច្បាប់ដែលល្អក្នុងព្រះនគរជាវរវឹកពន្លឹកណាស់ ព្រះចៅ**ហៀនតេ**សព្វថ្ងៃនេះ ក៏មានព្រះរាជហឫទ័យរំជួលក្ដៅនៅជានិច្ចតិចបានសុខ។

យើងឈ្មោះ**អ៊្លួនសៀវ**ចៅហ្វាយស្រុកគីជីវ ជាពូជនាហ្មឺនតមកពីដើម មានចិត្តថ្លើមទៀងត្រង់នឹងផែនដី គិតឃើញថា **ចូឆ្វ**ជាពូជអប្រិយទុច្ចរិតអាក្រក់ខ្លាំងប្រុងនឹងធ្វើសេចក្ដីប្រទូសរ៉ាយដល់ព្រះមហាក្សត្រ យើងក៏រៀបចាត់លើកកងទ័ពទៅនឹងកម្ចាត់**ចូឆ្វ**ដែលជាខ្មាំងសត្រូវនឹងផែនដីនោះឲ្យសាបសូន្យ ដើម្បីជាទីតបស្នងឆ្លងព្រះតេជៈព្រះគុណព្រះចៅ**ហៀនតេ**ជាអម្ចាស់ បើចៅហ្វាយខេត្តទាំងដប់ប្រាំបីមណ្ឌលយល់ឃើញសំបុត្រយើង ដែលនាំមកដល់បិទទុកនៅទ្វារស្រុកនេះកាលណាក៏ត្រូវឲ្យមានចិត្តគិតកតញ្ញូដល់ព្រះចៅ**ហៀនតេ** និងព្រះមហាក្សត្រអំពីបុរាណផងកុំឲ្យចៅហ្វាយខេត្តទាំងឡាយនិងបណ្ដារាស្ត្រនានា ប្រែចិត្តទុច្ចរិតទៅចូលគំនិតខាង**ចូឆ្វ**ជាដាច់ខាត”។

លុះ**តាន់លឹម**តែងសំបុត្រដូច្នេះរួចហើយ **អ៊្លួនសៀវ**ក៏ប្រើទាហានស្រួតរូតយកសំបុត្រនោះទៅបិទនៅទ្វារស្រុកទាំងដប់ប្រាំបីមណ្ឌល។ លុះដល់ថ្ងៃបានឫក្សល្អ **អ៊្លួនសៀវ**ក៏នាំ**តាន់លឹម**និងសេនាទាហានលើកជាក្បួនទ័ព ទៅដល់តំបន់ស្រុកលីមយ៉ុងចុងដែនស្រុកហ៊្វូតោ ហើយឲ្យបញ្ឈប់កងទ័ពតាំងបន្ទាយនៅទីនោះ។

ខណៈនោះទាហាន**ចូឆ្វ** លុះឃើញសំបុត្រដែល**អ៊្លួនសៀវ**ឲ្យបម្រើទៅបិទតាមទ្វារស្រុកដូច្នោះ ក៏ចម្លងតាមរឿងសេចក្ដីហើយនាំយកទៅឲ្យ**ចោហាង**នៅក្នុងស្រុកហ៊្វូតោ។ **ចោហាង**ក៏យកសំបុត្រនោះទៅបង្ហាញ**ចូឆ្វ**។ ពេលនោះ**ចូឆ្វ**កំពុងមានជំងឺឈឺដេកនៅខាងក្នុង លុះបានទទួលសំបុត្រនោះមើលដឹងសេចក្ដីហើយ ក៏បង្កើត

ទោសៈពេញក្នុងហឫទ័យវត្ថុ មានទោសោហូរចេញមកគ្រប់សរសៃលោមា ទើបក្រោកឡើងសួរ**ចោហាង**ថា សំបុត្រនេះនរណាអាចដឹងថាឈ្មោះណាតែង? **ចោហាង**ជម្រាបថា ខ្ញុំបាទបានដឹងដំណឹងថា សំបុត្រនេះគឺ**តាន់លឹម**ជាអ្នកតែង។

**ចូឆូ**បានស្តាប់ដូច្នោះក៏និយាយថា **អ៊ួនសៀវ**គិតធ្វើការធំដូច្នេះព្រោះមានអ្នកមានសតិបញ្ញា តែថាសេនាទាហានដែលមានថ្វីដៃខ្លាំងពូកែនោះគ្មាន បើប្រសិនជាមានព្រមគ្នាទាំងពីរយ៉ាង ឃើញថា**អ៊ួនសៀវ**នឹងធ្វើការនោះសម្រេចបាន គួរស្តាយ**តាន់លឹម**ដែលជាមនុស្សមានសតិបញ្ញា ហើយទៅនៅនឹង**អ៊ួនសៀវ**ជាការឥតប្រយោជន៍សោះ។ វេលានោះ**ចូឆូ**ក៏ហៅទីប្រឹក្សាទាំងពួងមកពិគ្រោះថា គ្រានេះ**អ៊ួនសៀវ**លើកទ័ពមក យើងនឹងគិតចេញតតាំងច្បាំង ឬប្រការម្តេច?

**ខុងយ៉ុង**ឆ្លើយថា **អ៊ួនសៀវ**លើកកងទ័ពមកពេលនេះធំពន្លឹកណាស់ ឃើញថាកម្លាំងយើងនឹងតស៊ូមិនបានទេ សុំឲ្យលោកប្រើមនុស្សទៅនិយាយបញ្ចុះបញ្ចូលជាផ្លូវចងស្ពានមេត្រីនឹង**អ៊ួនសៀវ**ឲ្យល្អ មុខជា**អ៊ួនសៀវ**នឹងលើកទ័ពត្រឡប់ទៅវិញ។

**ស៊ុនហុក**បានឮដូច្នោះក៏ឆ្លើយតបនឹង**ខុងយ៉ុង**ថា **អ៊ួនសៀវ**នឹងមានប្រាជ្ញាចេះគិត ឬនឹងមានថ្វីដៃច្បាំងរាំងជល់ខ្លាំងពូកែក៏ទេៗ គ្រាន់តែមានទាហានច្រើនប៉ុណ្ណោះ ដែលនឹងឲ្យទៅនិយាយសម្រួលជាផ្លូវមេត្រីវិញនោះមិនគួរសោះ។ **ខុងយ៉ុង**ឆ្លើយថា **អ៊ួនសៀវ**គ្មានសតិបញ្ញា គ្មានថ្វីដៃខ្លាំងពូកែក៏មែនហើយ តែមានស្រុកចំណុះជាច្រើន តំបន់ទាំងស្បៀងអាហារក៏បរិបូរព្រម មួយទៀតបាន**សឹមផោយ, ខៅហ៊ីវ, គួតៅ, ហងគី** ទាំងបួននាក់នេះសុទ្ធតែមានសតិបញ្ញាជាទីប្រឹក្សារបស់**អ៊ួនសៀវ** ឯទាហានឯកដែលមានថ្វីដៃនោះគឺ **តៀនហង, ឈីស៊ីវ, ង៉ាន់លៀង, ប៊ុនធីវ, កោឡាំ, តៀវខាប់, អ៊ីខេង** មនុស្សទាំងនេះសុទ្ធតែមានតម្រិះប្រាជ្ញានិងថ្វីដៃខ្លាំងពូកែទៀង

ត្រង់នឹង**អ៊្វិនសៀវ** ព្រមទាំងកូនទាហានក៏មានយ៉ាងច្រើន ហេតុម្តេចអ្នកទៅប្រមាថមើលងាយ**អ៊្វិនសៀវ**ដូច្នេះ?

**ស៊ុនហុក**បានស្តាប់ដូច្នោះក៏អស់សំណើចហើយតបថា សេនាឯក**អ៊្វិនសៀវ** ដែលមានប្រាជ្ញានិងថ្វីដៃខ្លាំងពូកែនោះ នឹងរាប់ទុកជាចំណានមិនបានទេ ដ្បិត**តៀនហង**នោះជាមនុស្សអាក្រក់កាចសាហាវ **ខៅហ៊ីវ**នោះមានបញ្ញាក៏មែន តែជាមនុស្សល្មោភ ធ្វើការអ្វីច្រើនតែខូចការនោះ **សឹមផោយ**ជាមនុស្សអួតចេះ ទោះបីនរណានិយាយត្រូវក៏ប្រកាន់ថា ខុស **ហងគី**នោះជាមនុស្សជាងសម្តី វោហារយកជាការមិនបាន ទាំងបួននាក់ដែលជាទីប្រឹក្សា**អ៊្វិនសៀវ**នោះសុទ្ធតែមនុស្សមានទិដ្ឋិមានះដណ្តើមគ្នាយកត្រូវទៅដោយខ្លួនៗ ឯសេនាឯកដែលមានថ្វីដៃទាំងប្រាំពីរនាក់នោះមិនស្គាល់ច្បាស់ទីបង់ទីបាន បើបានធ្វើសឹកធំគ្រានេះឃើញថានឹងចាប់ខ្លួនបានជាប្រាកដ ឯកូនទាហានដែលមានច្រើនប៉ុន្មាន គ្រាន់តែបណ្តោយចាញ់បណ្តោយឈ្នះប៉ុណ្ណោះ។ **ខុងយ៉ុង**បានស្តាប់ដូច្នោះក៏នៅស្ងៀម។

**ចូឆូ**បានឃើញ**ខុងយ៉ុង**នៅស្ងៀមដូច្នោះ ក៏អស់សំណើច ហើយថា "**ស៊ុនហុក**នេះធ្លាប់ប្រមាណការអ្វីមិនចេះខុសសោះ គួរជឿគំនិតដែលគិតការម្តងនេះត្រូវដូចគំនិតរបស់យើង" ថាហើយក៏ចាត់**ឡៅតាយ**និង**អងតុង**ឲ្យលើកទាហានប្រាំម៉ឺនយកទង់សម្រាប់**ចូឆូ**ទៅផង នឹងឲ្យលើកទៅវាយយកស្រុកឈីជីវ។ **ធៀយ៉ុក**ឆ្លើយថាដែលលោកនឹងប្រើ**ឡៅតាយ**និង**អងតុង**លើកកងទ័ពចេញទៅនោះ ខ្ញុំបាទយល់ឃើញថា អ្នកទាំងពីរតស៊ូថ្វីដៃ**ឡៅពី**មិនបានទេ។ **ចូឆូ**តបថា "អ្នកនិយាយនេះត្រូវហើយដែលយើងប្រើ**ឡៅតាយ**និង**អងតុង**ទៅគ្រានេះ បីដូចជាឲ្យទៅទល់កងទ័ព**ឡៅពី**ទុកប៉ុណ្ណោះទេ គឺមិនឲ្យកងទ័ព**ឡៅពី**ចូលដល់គ្នានឹងកងទ័ព**អ៊្វិនសៀវ**" ថាហើយ **ចូឆូ**ក៏

បង្គាប់**ឡៅតាយ**និង**អងតុង**ថា ដែលអ្នកនឹងលើកកងទ័ពទៅនោះ កុំអាលចូលទៅច្បាំងកាច់យកក្រុងឈើជីវឡើយ ឱ្យតាំងទ័ពរាទុកជាទីការពារប៉ុណ្ណោះ បើកងទ័ពយើងច្បាំងនឹង**អ៊្វនសៀវ**ខាងនេះមានជ័យជម្នះវេលាណា គង់នឹងលើកទៅសន្ធប់ខ្ទប់គ្នាវាយយកស្រុកឈើជីវតែម្ដង។ **ឡៅតាយ**និង**អងតុង**ក៏គំនាប់លា**ចូឆ្វ** ទទួលនាំយកទាហានប្រាំម៉ឺនលើកចេញទៅតាមបង្គាប់**ចូឆ្វ** ៗក៏ចាត់ចែងទាហានលើកចេញទៅប្រមាណម្ភៃម៉ឺនទៅដល់តំបន់គួរត ក៏ឱ្យបញ្ឈប់កងទ័ពតាំងបន្ទាយនៅទីនោះ ចម្ងាយផ្លូវទៅដល់បន្ទាយ**អ៊្វនសៀវ**ប្រមាណប្រាំបីរយសិន(៣២ គ.ម)។

**អ៊្វនសៀវ**ដឹងថា កងទ័ព**ចូឆ្វ**លើកមកតាំងនៅដូច្នោះ ក៏ប្រឹក្សានឹងសេនាទាហានទាំងពួងថា យើងនឹងលើកចេញទៅតច្បាំងនឹងកងទ័ព**ចូឆ្វ**ឬប្រការម្ដេច? ការប្រឹក្សាគ្នានេះមិនបានដាច់ស្រេច ព្រោះហេតុ**ខៅហ៊ីវ**មានសេចក្ដីតូចចិត្តថា **សឹមផោយ**បានជាបាឡាត់ទ័ពបង្គាប់បញ្ជាលើសេនាទាហានទាំងពួង **ឈីស៊ីវ**ក៏តូចចិត្តនឹង**អ៊្វនសៀវ**ថា ខ្លួននឹងប្រឹក្សាការរាជការអ្វីនឹង**អ៊្វនសៀវ**មិនយល់ឃើញផង **អ៊្វនសៀវ**ទើបមិនបានចេញច្បាំងនឹង**ចូឆ្វ** ទ័ព**អ៊្វនសៀវ**នៅត្រៀមទុកតាំងពីខែភទ្របទលុះដល់ខែកត្តិក។

**ចូឆ្វ**ឃើញថា**អ៊្វនសៀវ**មិនបានលើកទ័ពចេញច្បាំង ក៏ក្រែងថា **អ៊្វនសៀវ**នឹងធ្វើកលតែងទ័ពលើកទៅខ្ទប់វាយយកក្រុងហ៊្វតោ ទើបប្រើ**ចុងប៉ា**ជាសេនា**លីប៉ោ** ឱ្យលើកទាហានទៅចាំស្កាត់ផ្លូវត្រង់ប្រទល់ដែនស្រុកឈើជីវ កុំឱ្យទាហាន**អ៊្វនសៀវ**និងទាហាន**ឡៅពី**ដើរទៅមករកគ្នាបាន ប្រើ**អ៊ីគឹម** និង**លីតៀន**លើកទាហានជាកងមុខទៅចាំស្ទាក់ផ្លូវទន្លេហងហោ ព្រំដែនស្រុកហ៊្វតោ កុំឱ្យទាហាន**អ៊្វនសៀវ**និងទាហាន**ឡៅពី**ដើរទៅមករកគ្នាបាន ប្រើ**ចោយិន**លើកកងទ័ពធំទៅតាំងនៅតំបន់គួរត

ខ្លួន**ចូឆ្វ**ក៏លើកត្រឡប់ចូលទៅក្នុងក្រុងហ៊ូតោវិញ ហើយធ្វើសំបុត្រចាត់បម្រើសេះឲ្យកាន់ទៅដល់**ឡៀតាយ**និង**អងតុង** ឲ្យបង្ខំលើកទ័ពចូលវាយទម្លាយយកស្រុកឈីជីវឲ្យបាន។

ឯ**ឡៀពី**ដែលនៅក្នុងក្រុងឈីជីវ លុះដឹងថា កងទ័ពលើកទៅបោះនៅជិតក្រុងចម្ងាយពីព្រំដែនប្រហែលប្រាំបីរយសិន (៣២ គ.ម) ក៏នៅមិនទាន់ច្បាស់ជាទាហាន**ចូឆ្វ**នោះ នរណាជាមេទ័ព? **ឡៀពី**ក៏មិនបានចេញច្បាំង គ្រាន់តែត្រៀមសេនាទាហានឲ្យឡើងរក្សាសើនបន្ទាយវាយយាមល្បាតខាត់ក្រវែលជាយ៉ាងមាំមួន ហើយចាំស្តាប់ដំណឹង**អ៊ួនសៀវ** ដែលលើកមកច្បាំងនឹង**ចូឆ្វ**នោះ នឹងឈ្នះឬចាញ់ប្រការម្តេចក៏មិនបានជាក់ច្បាស់សោះ។

បម្រើសេះនាំសំបុត្រ**ចូឆ្វ**នោះទៅប្រគល់ឲ្យ**ឡៀតាយ** និង**អងតុង**ក្នុងបន្ទាយ។ **ឡៀតាយ**និង**អងតុង**ដឹងសេចក្តីហើយ ទើបប្រឹក្សាគ្នាថា នរណានឹងលើកចេញទៅវាយយកស្រុកឈីជីវជាមុន? **ឡៀតាយ**និយាយនឹង**អងតុង**ថា មហាឧបរាជប្រើយើងជាមេទ័ពមក ត្រូវអ្នកលើកទ័ពទៅវាយយកស្រុកឈីជីវមុនយើងចុះ។ **អងតុង**តបថា មហាឧបរាជឲ្យយើងលើកទ័ពមកនោះ នឹងបានបង្គាប់ចំពោះឲ្យអ្នកធ្វើមេទ័ពតែឯងក៏ទេ គឺបង្គាប់ឲ្យខ្ញុំនិងអ្នកលើកទាហានប្រាំម៉ឺនមកជាមួយគ្នា បើអ្នកនឹងតាំងខ្លួនជាមេទ័ពតែឯងនោះខ្ញុំមិនព្រមផងទេ។ **ឡៀតាយ**តបថា អ្នកនិងខ្ញុំប្រឹក្សាគ្នាមិនចុះរុះសោះ បើដូច្នេះត្រូវសរសេរអក្សរពីរតួ មួយថាមុន មួយថាក្រោយ ហើយឲ្យលូកចាប់ដោយផ្សង បើនរណាបានតួអក្សរមុនឲ្យលើកទ័ពទៅច្បាំងមុន បើនរណាបានតួអក្សរក្រោយ ឲ្យលើកទៅច្បាំងក្រោយ។ **អងតុង**យល់ឃើញត្រូវ ក៏សរសេរអក្សរជាពីរតួតាមសម្តីហើយផ្សងចាប់ **អងតុង**ចាប់បានអក្សរមុន **ឡៀតាយ**

ចាប់បានអក្សរក្រោយ ទើបបែងទាហានពាក់កណ្ដាលឲ្យ**អងតុង**លើកទៅវាយយកស្រុកឈីជីវ។

**ឡៅពី**លុះឃើញកងទ័ពលើកមកពីចម្ងាយ ក្រឡេកឃើញទង់ជ័យសម្រាប់ទ័ព**ចូវឆ្វ**ក៏សម្គាល់ថា **ចូវឆ្វ**លើកមកខ្លួនឯង។ បម្រើសេះល្បាតមកប្រាប់**ឡៅពី**ថា កងទ័ព**អ៊ួនសៀវ**ប្រឹក្សាមិនចុះរុះគ្នា នៅវេរង់មិនបានចេញច្បាំងនឹង**ចូវឆ្វ**ទេ មួយទៀតកងទ័ព**ចូវឆ្វ**នោះនឹងបានឃើញទង់ជ័យសម្រាប់ទ័ព**ចូវឆ្វ**ក៏ឥតអង្គីមាន កាលខ្ញុំបាទត្រឡប់មកប្រទះនឹងកងទ័ពលើកមកជិតស្រុកនេះហើយ ឃើញទង់ជ័យសម្រាប់ទ័ព**ចូវឆ្វ**ដោតពីមុខ តែខ្លួន**ចូវឆ្វ**នឹងនៅក្នុងកងទ័ពនេះ ឬកងទ័ពខាងនោះមិនច្បាស់ប្រាកដ។

**ឡៅពី**បានស្ដាប់ដូច្នោះ ក៏ប្រឹក្សានឹង**តាន់តេង**តាមពាក្យបម្រើសេះ ហើយថា យើងមានសេចក្ដីសង្ស័យមិនដឹងជា**ចូវឆ្វ**នៅខាងកងទ័ពណា។ **តាន់តេង**ឆ្លើយថា កលឧបាយ**ចូវឆ្វ**នោះមានច្រើនប្រការណាស់ កម្រមនុស្សណានឹងដឹងដល់ ដែលកងទ័ពនៅវារង់បម្រុងនឹងច្បាំង**អ៊ួនសៀវ**នោះ គ្មានទង់ជ័យសម្រាប់ទ័ព**ចូវឆ្វ**សោះ ខ្ញុំបាទយល់ថា **ចូវឆ្វ**មុខជានៅក្នុងកងទ័ពនោះជាប្រាកដ ឯកងទ័ពដែលលើកមកខាងស្រុកយើងនេះទាហានក៏តិច តែទង់ជ័យសម្រាប់**ចូវឆ្វ**មកផង ដែល**ចូវឆ្វ**គិតធ្វើការគ្រានេះប្រាថ្នានឹងឲ្យលោកបារម្ភក្រែងថា ខ្លួន**ចូវឆ្វ**មកក្នុងកងទ័ពនេះ។

**ឡៅពី**បានស្ដាប់ដូច្នោះ ក៏ងាកទៅសួរ**គួនអ៊ូ, តៀវហ៊ុយ**ថា ប្អូនទាំងពីរនាក់តើនរណានឹងយកអាសាចេញទៅធ្វើការ ឲ្យដឹងច្បាស់ហេតុផលជា**ចូវឆ្វ**មកឬមិនមក? **តៀវហ៊ុយ**ឆ្លើយទទួលថា ខ្ញុំបាទសុំយកអាសាចេញទៅធ្វើការឲ្យដឹងហេតុ បើជួបនឹង**ចូវឆ្វ**ខ្ញុំបាទនឹងចាប់ខ្លួន**ចូវឆ្វ**មកឲ្យបាន។ **ឡៅពី**និយាយតបទៅ**តៀវហ៊ុយ**វិញថា ប្អូនឯងនៅក្មេងសេចក្ដីខ្ចីគំនិតណាស់ ទាំងចិត្តថ្លើមក៏រួសរហ័ស នឹងឲ្យទៅមិន

បានទេ។ **គួនអ៊ូ**ថា ខ្ញុំបាទសុំយកអាសាចេញទៅធ្វើការ។ **ឡៅពី**ថា បើ**គួនអ៊ូ**ចេញទៅយើងល្មមទុកចិត្តបាន។ **គួនអ៊ូ**ក៏លា**ឡៅពី**លើកទាហានសេះបីពាន់ចេញទៅ ពេលនោះទេសកាលជារដូវរងាទឹកសន្សើមចុះខ្លាំងណាស់ ទាហានទាំងពួងក៏រងាត្រជាក់ពន់ពេក **គួនអ៊ូ**ឧស្សាហ៍នាំទាហានចូលទៅដល់មុខបន្ទាយអងតុង ហើយ**គួនអ៊ូ**បរសេះចេញទៅឈរមុខទាហានស្រែកថា នរណាជាមេទ័ព ចូរប្រញាប់ចេញមកយើងនឹងសាកសួរ។

**អងតុង**បានឮ**គួនអ៊ូ**ស្រែកសួរដូច្នោះ ក៏ជិះសេះចេញមកឈរនៅមុខបន្ទាយហើយស្រែកប្រាប់ថា មហាឧបរាជលើកមកដល់ទីនេះហើយ ហេតុម្តេចខ្លួនទើបនឹងចូលមកគំនាប់? **គួនអ៊ូ**តបថា បើមហាឧបរាជមកមែន ឲ្យអញ្ជើញចេញមក យើងនឹងថ្លែងសេចក្តីជម្រាបលោក។ **អងតុង**តបថា ខ្លួនជាអ្នកតូចទាបគួរឬនឹងឲ្យមហាឧបរាជចេញមកជួប? **គួនអ៊ូ**ខឹងណាស់ ក៏បរសេះរំដារចូលទៅ។ **អងតុង**ក៏បរសេះរាំលំពែងចេញមកតច្បាំងនឹង**គួនអ៊ូ**បានប្រាំភ្លែង។ **គួនអ៊ូ**ធ្វើជាញាក់សេះថយរត់ទៅក្រោយ។ **អងតុង**មិនដឹងកលក៏ដេញបណ្តោយតាមដល់ជើងភ្នំ **គួនអ៊ូ**វាមកតទល់ដល់ជិតគ្នា ទើបលើកដាវឡើងកាប់ឲ្យ**អងតុង**គេចចុះ ហើយ**គួនអ៊ូ**ក៏ស្ទុះទៅរួបចាប់យកខ្លួន**អងតុង**បាន ដាក់លើសេះពីក្រោយនាំចូលទៅឲ្យ**ឡៅពី** ហើយពណ៌នាឲ្យ**ឡៅពី**ស្តាប់គ្រប់ប្រការ។ **ឡៅពី**ក៏មានចិត្តសោមនស្សប្រីតា តែមិនបានស្គាល់កិរិយា**អងតុង**ច្បាស់ក៏សាកសួរថា អ្នកឯងជានាហ្មឺន**ចូឆូ**តំណែងអ្វី? ហេតុម្តេចមកធ្វើកលឧបាយក្លែងថា **ចូឆូ**មកនៅក្នុងកងទ័ពនេះ? **អងតុង**ឆ្លើយថា ខ្ញុំបាទឈ្មោះ**អងតុង**ជាទីសេនាទោរបស់**ចូឆូ** ឯខ្លួន**ចូឆូ**មិនបានមកក្នុងកងទ័ពនេះទេ ឲ្យខ្ញុំបាទនិង**ឡៅតាយ**លើកទ័ពមក គំនិតខ្ញុំបាទនឹងបានគិតធ្វើកលសឹកខ្លួនឯងក៏ទេ ដែលយកទង់ជ័យ

សម្រាប់ទ័ព**ចូឆ្វ**លើកមកក្នុងកងទ័ពនេះ ព្រោះ**ចូឆ្វ**បង្គាប់ប្រើ ខ្ញុំបាទខ្លាចអាជ្ញាក៏ធ្វើតាមបង្គាប់**ចូឆ្វ**។ **ឡៅពី**បានស្តាប់ ក៏យកគ្រឿងសម្លៀកបំពាក់មួយប្រដាប់មកឲ្យ**អងតុង** ហើយរៀបតុលៀងភោជនាហារឲ្យ**អងតុង**បរិភោគ រួចឲ្យទាហានយកខ្លួន**អងតុង**ទៅឃុំទុក បើចាប់**ឡៅតាយ**បានវេលាណា នឹងបានគិតការតទៅទៀត។

**គួនអ៊ូ**និយាយនឹង**ឡៅពី**ថា ខ្ញុំបាទប្រមាណចិត្តលោកឃើញថា លោកនៅបារម្ភខ្លាចចិត្ត**ចូឆ្វ** បានជាមិនសម្លាប់**អងតុង**ចេញ បើដឹងដូច្នេះខ្ញុំបាទមិនចាប់ទាំងរស់មកជូនលោកទេ។ **ឡៅពី**តបថា ដែលយើងមិនប្រើ**តៀវហ៊ុយ**ឲ្យចេញទៅនោះ ព្រោះគិតឃើញថាចិត្ត**តៀវហ៊ុយ**រួសរហ័សណាស់ បើចាប់មេទ័ពបានមុខជានឹងសម្លាប់មិនខាន ដែលយើងបានខ្លួន**អងតុង**មកទុកដូច្នេះ ទោះ**ចូឆ្វ**នឹងថាប្រការម្តេចក៏មានផ្លូវនឹងដោះស្រាយកែខៃទៅបានដោយងាយ។

**តៀវហ៊ុយ**ក៏ជម្រាប**ឡៅពី**ថា **គួនអ៊ូ**ទៅចាប់ខ្លួន**អងតុង**បានមកហើយ ខ្ញុំបាទនឹងសុំយកអាសាចេញទៅចាប់ខ្លួន**ឡៅតាយ**មកជូនលោកទៀត។ **ឡៅពី**តបថា ឯ**ឡៅតាយ**នោះជាចៅហ្វាយស្រុកគុយជីវ កាលចៅហ្វាយខេត្តទាំងដប់ប្រាំបីមណ្ឌលលើកទៅកម្ចាត់**តាំងតុះ**គ្រាមុននោះ **ឡៅតាយ**ក៏លើកពលទៅធ្វើជាមួយផង គ្រានោះ**ចូឆ្វ**ឃើញ**ឡៅតាយ**មានតម្រិះប្រាជ្ញា បានជាប្រើឲ្យធ្វើមេទ័ពលើកមក ដែលប្អូនឯងនឹងលើកទាហានចេញទៅចាប់ខ្លួន**ឡៅតាយ**នោះ បងយល់ឃើញថាមិនមែនបានតាមបំណងគិតទេ។ **តៀវហ៊ុយ**ឆ្លើយតបថា នឹងរាប់ទុកជាពូកែដូចម្តេចថ្វីដៃ**ឡៅតាយ**ប៉ុណ្ណោះ ខ្ញុំបាទនឹងចាប់យកមកឲ្យបាន។ **ឡៅពី**ថា បងក្រែងប្អូនឯងចេញទៅច្បាំងនឹងធ្វើអន្តរាយដល់ជីវិត**ឡៅតាយ**តែម្តង មិនបានខ្លួនទាំងរស់មកដូច**គួនអ៊ូ**។ **តៀវហ៊ុយ**ថា ខនេះលោកកុំវិតក្កឡើយ បើខ្ញុំបាទសម្លាប់**ឡៅតាយ**ក្តី ឬចាប់ខ្លួនមិនបានមកទាំង

រស់ក្តី ឲ្យលោកកាត់ក្បាលខ្ញុំបាទចេញ។ **ឡៅពី**បានឮដូច្នោះក៏ពេញចិត្តណាស់ ទើបចាត់ទាហានសេះបីពាន់ឲ្យ**តៀវហ៊ុយ** ៗក៏លា**ឡៅពី**លើកចេញទៅ។

ឯ**ឡៅតាយ**កាលដឹងថា **គួនអ៊ូ**ចាប់ខ្លួន**អងតុង**ទៅបាន រួចឃើញ**តៀវហ៊ុយ**លើកទ័ពមកទៀត **ឡៅតាយ**ក៏នឹកញញើតដៃ**តៀវហ៊ុយ**មិនហ៊ានចេញច្បាំង ប្រុងតែរក្សាបន្ទាយវាយកងទ័ពយាមល្បាតពីក្នុងបន្ទាយ។ ឯ**តៀវហ៊ុយ**នោះ លុះមិនឃើញ**ឡៅតាយ**ចេញមកច្បាំងសោះ ក៏លើកទាហានចូលទៅដល់មុខបន្ទាយ**ឡៅតាយ** ហើយឲ្យទាហានស្រែកជេរជាពាក្យអាស្រូវភាសផ្សេងៗ។ **ឡៅតាយ**ក៏សំងំស្ងៀម មិនបានលើកទ័ពចេញច្បាំង ដែលរារង់ដូច្នេះគ្រប់ប្រាំថ្ងៃ។ **តៀវហ៊ុយ**ក៏គិតកលឧបាយបង្គាប់ទាហានទាំងពួងថា កណ្តាលយប់ស្ងាត់ក្នុងថ្ងៃនេះ ពេលយាមបីប្លាយ យើងនឹងលើកចូលទៅប្លន់យកបន្ទាយ**ឡៅតាយ**ឲ្យបាន ឲ្យទាហានទាំងអស់ត្រៀមខ្លួនជាស្រេច។ **តៀវហ៊ុយ**ផឹកស្រាហើយធ្វើកិរិយាបែបស្រវឹងមិនដឹងខ្លួន ក៏រករឿងយកទោសទាហានម្នាក់ ឲ្យវាយប្រហែលសាមសិបរំពាត់ ហើយនិយាយជាមួយទាហានដែលមានទោសនោះថា ពេលយាមបីប្លាយក្នុងយប់នេះ យើងនឹងកាត់ក្បាលឯងសែនទង់ជ័យ ហើយលើកពលចូលទៅវាយបន្ទាយ**ឡៅតាយ** ហើយបង្គាប់ឲ្យចងទាហាននោះទុក។ លុះពេលយាមមួយប្លាយ **តៀវហ៊ុយ**ក៏លបប្រើមនុស្សឲ្យចូលទៅស្រាយចំណងទាហានមានទោសនោះចេញ ទាហាននោះក៏លបរត់ទៅដោយមានចិត្តក្តៅខឹងនិងខ្លាចសេចក្តីស្លាប់ ក៏គេចចូលទៅក្នុងបន្ទាយ**ឡៅតាយ** ហើយនាំយករឿងដែល**តៀវហ៊ុយ**គិតនោះប្រាប់**ឡៅតាយ**គ្រប់ប្រការ។ **ឡៅតាយ**បានស្តាប់ហើយឃើញរបួសស្លាកស្នាមទាហាននោះជាបន្ទាល់ ក៏គ្មានពិភាល់សង្ស័យ សម្គាល់ថាពិត

ទើបកេណ្ឌទាហានឲ្យចេញទៅពួនបង្កប់ក្រៅបន្ទាយជាពីរកង ក្នុងបន្ទាយនោះគ្មានមនុស្សនៅសោះ។

**តៀវហ៊ុយ**ដឹងថា ទាហានដែលមានទោសត្រូវវាយនោះរត់ទៅហើយក៏គិតថា ហេតុល្អអាក្រក់ទាហាននោះវាគង់រត់ទៅប្រាប់ឲ្យ**ឡៅតាយ**ដឹង មុខជា**ឡៅតាយ**នឹងចោលបន្ទាយឲ្យទាហានចេញពួនបង្កប់មិនខាន អញនឹងរិះគិតអានត្រូតកលចាប់ខ្លួន**ឡៅតាយ**ឲ្យបាន។ លុះដល់ពេលយាមបីប្លាយ **តៀវហ៊ុយ**ក៏លើកទាហានញែកគ្នាទៅពួនបង្កប់ជាពីរកងសងខាង ខ្លួន**តៀវហ៊ុយ**ជាកងកណ្ដាលប្រចាំជូន ហើយបង្គាប់ទាហានសាមសិបនាក់ជាកងមុខ ឲ្យចូលទៅប្លន់អុជភ្លើងឲ្យឆេះបន្ទាយឲ្យបាន។ ទាហានសាមសិបនាក់ក៏លើកចូលទៅប្លន់បន្ទាយ ហើយដុតភ្លើងឆេះឡើង។

ឯទាហាន**ឡៅតាយ**ដែលពួនបង្កប់ទាំងពីរកង លុះឃើញដូច្នោះក៏លើកវាយខ្ទប់ទាំងសងខាង។ ទាហាន**តៀវហ៊ុយ**ដែលបង្កប់នៅពីក្រៅនិងខ្លួន**តៀវហ៊ុយ** លុះឃើញពន្លឺភ្លើងឆេះឡើងក្នុងបន្ទាយនៃ**ឡៅតាយ** ក៏លើកសម្រុកចូលទៅវាយខ្ទប់ជាបីផ្លូវ។ ចំណែកទាហាន**ឡៅតាយ**ដែលបានឃើញទាហាន**តៀវហ៊ុយ**វាយខ្ទប់ពីក្រោយ ហើយចាក់កាប់សម្លាប់ខ្លះរបួសខ្លះពិការ ទាហានទាំងនោះក៏បែកខ្ចាត់ខ្ចាយទៅខ្លះ។ **តៀវហ៊ុយ**ក៏បរពលចូលប្រយុទ្ធនឹង**ឡៅតាយ**បានមួយស្របក់ **តៀវហ៊ុយ**ក៏ចាប់ខ្លួន**ឡៅតាយ**បានហើយឲ្យទាហានចងទុក។ បណ្ដាទាហានដែលបែកខ្ញែកទៅនោះ ក៏ត្រឡប់មកចំណុះចុះចូល**តៀវហ៊ុយ**ជាច្រើន **តៀវហ៊ុយ**ក៏ឲ្យទាហានស្រូតទៅជម្រាប**ឡៅពី** ៗបានស្ដាប់ក៏មានសេចក្ដីត្រេកអរ ហើយនិយាយនឹង**គួនអ៊ូ**ថា **តៀវហ៊ុយ**ជាមនុស្សចិត្តស្រាលរហ័សកាចសាហាវណាស់ គ្រានេះគិតកលឧបាយចាប់ខ្លួន**ឡៅតាយ**

បាន ដែល**តៀវហ៊ុយ**មានសតិបញ្ញាគិតឃើញបានការដូច្នេះ ដោយបុណ្យសំណាងរបស់យើង ៗមានសេចក្តីសប្បាយចិត្តណាស់។

លុះវេលាព្រឹកឡើង **ឡៅពី**ក៏នាំ**គួនអ៊ូ**ចេញទៅទទួលដល់ក្រៅកំពែងស្រុក **តៀវហ៊ុយ**ឃើញ**ឡៅពី**, **គួនអ៊ូ**ទៅដល់ក៏ចូលមកគំនាប់ ហើយនិយាយថា បងតិះដៀលថា ខ្ញុំបាទជាមនុស្សចិត្តស្រាលរហ័ស ឥឡូវខ្ញុំបាទរិះគិតឧបាយកលចាប់ខ្លួន**ឡៅតាយ**បាន បងបានឃើញតម្រិះប្រាជ្ញាខ្ញុំហើយឬ? **ឡៅពី**តបថា បើបងមិនសង្កត់សង្កិនប្អូនឯងយ៉ាងនេះទេ បញ្អូនឯងក៏ភ្លើនចិត្ត ណាឡើយនឹងរិះគិតចាប់ខ្លួន**ឡៅតាយ**បាន។ **តៀវហ៊ុយ**ក៏អស់សំណើច ទើប**ឡៅពី**ចុះពីលើសេះចូលទៅស្រាយចំណង**ឡៅតាយ**ចេញ ហើយនិយាយថា ដែលប្អូនយើងបានទៅធ្វើអ្នកដល់ទីនោះ ចូរអ្នកអភ័យទោសចុះ កុំបីប្រកាន់ឡើយ និយាយហើយ**ឡៅពី**ក៏នាំ**ឡៅតាយ**ចូលទៅក្នុងស្រុក ហើយឲ្យរៀបតុលៀងភោជនាហារ ប្រើបម្រើឲ្យទៅនាំខ្លួន**អងតុង**ពីក្នុងឃុំ មកបរិភោគជាមួយនឹង**ឡៅតាយ**។

**ឡៅពី**និយាយនឹង**ឡៅតាយ**, **អងតុង**ថា ការដែលយើងលើកទ័ពមកនេះ នឹងបានគិតប្រទូសរ៉ាយដល់មហាឧបរាជក៏ទេ ប្រយោជន៍ធ្វើការតបស្នងសងគុណមហាឧបរាជតែគ្រប់វេលាមិនដាច់ ក្រោយនោះ**គីម៉ៅ**ចិត្តអាក្រក់ គិតប្រទូសរ៉ាយដល់យើងឲ្យអស់ជីវិត បានជាយើងសម្លាប់ជីវិត**គីម៉ៅ**វិញ មហាឧបរាជមិនដឹងថា**គីម៉ៅ**ប្រទូសរ៉ាយនឹងយើងមុន បានជាអ្នកឯងទាំងពីរនេះលើកកងទ័ពមកចាប់យើង ធម្មតាកើតមកជាមនុស្សក្តី សត្វក្តី រមែងស្រឡាញ់ជីវិតដូចគ្នាទាំងអស់ បើមានគេមកបៀតបៀនវេលាណា តែងតែការពារអន្តរាយដោយក្តីស្រឡាញ់ខ្លួន ដែល**គួនអ៊ូ**, **តៀវហ៊ុយ**បានធ្វើទុក្ខដល់អ្នកទាំងពីរនោះកុំបីមានអាឃាតព្យាបាទតទៅឡើយ ឥឡូវ

យើងអនុគ្រោះដោះឲ្យអ្នកទាំងពីររួចអាយុជីវិត ឲ្យអ្នករិះគិតវិលត្រឡប់ទៅវិញចុះ ដើម្បីនឹងឲ្យដំណឹងដល់មហាឧបរាជជ្រាបសេចក្តី ហើយអ្នកត្រូវជួយនិយាយឲ្យឃើញសេចក្តីពិតសុចរិតរបស់យើង ៗក៏សុំចងមេត្រីដល់អ្នកទាំងពីរតទៅ។

**ឡៅតាយ**និង**អងតុង**បានស្តាប់**ឡៅពី**អធិប្បាយដូច្នោះ ក៏មានសេចក្តីត្រេកអរណាស់ឆ្លើយថា ដែលលោកប្រោសករុណាទុកអាយុជីវិតខ្ញុំបាទ ព្រះតេជៈព្រះគុណធ្ងន់នឹងរកអ្វីប្រៀបផ្ទឹមពុំស្មើដល់ ខ្ញុំបាទនឹងវិលត្រឡប់ទៅប្តឹងផ្តល់ពីខរាជការដល់មហាឧបរាជថាលោកមានចិត្តសត្យទៀងត្រង់ មិនបានគិតប្រទូសរ៉ាយដល់មហាឧបរាជឡើយ ដែលបានជាធ្វើការហួសទៅហើយទាំងម្ល៉េះ ពីព្រោះសេចក្តីទាល់លើទាល់ បើមហាឧបរាជមិនជឿខ្ញុំបាទនឹងយកបុត្រភរិយាទុកជាចំណាំ បើអំណើះតទៅមុខ លោកប្រែចិត្តគិតប្រទូសរ៉ាយប្រការម្តេច សុំឲ្យសម្លាប់បុត្រភរិយាខ្ញុំបាទទាំងអស់ចុះ។ **ឡៅពី**បានស្តាប់ដូច្នោះក៏អស់សង្ស័យគំនាប់**ឡៅតាយ**និង**អងតុង**តាមគួរសមហើយថា ដែលអ្នកទទួលធុរៈយើងដូច្នោះ យើងអរគុណណាស់ ហើយ**ឡៅពី**ក៏ប្រមូលទាហានដែលបានមកនោះ បង្វិលឲ្យទៅ**ឡៅតាយ, អងតុង**វិញ។ **ឡៅតាយ, អងតុង**ក៏គំនាប់លា**ឡៅពី** នាំទាហានទាំងពួងចេញពីស្រុក**ឈីជីវ** ចេញទៅប្រហែលចម្ងាយប្រាំរយសិន (២០ គ.ម)។

ខណៈកាល**ឡៅពី**និយាយលើកទោស**ឡៅតាយ**និង**អងតុង**នោះ **តៀវហ៊ុយ**ក៏ក្តៅក្តួលឆ្លួលក្នុងចិត្តគិតលើកទាហានលបចេញទៅស្ទាក់កណ្តាលផ្លូវ។ **គួនអ៊ូ**ឃើញ**តៀវហ៊ុយ**លើកទាហានទៅក៏សង្ស័យ ទើបឡើងសេះនាំទាហានបួនប្រាំនាក់តាមស្ទាមជើង**តៀវហ៊ុយ**ទៅ។ ឯតៀវហ៊ុយកាលក្រឡេកឃើញ**ឡៅតាយ, អងតុង**លើកទាហានមក **តៀវហ៊ុយ**ក៏វាំទូនទៅឈរស្ទាក់ពីមុខ ហើយស្រែកំហកដោយសំឡេង

ខ្លាំងថា ឯងនិយាយភូតកុហកបញ្ឆោតបងអញដូមម្ដេចខ្លះ បានជាបងអញលែងឯងទាំងពីរនាក់មក? **ឡៅតាយ, អងតុង**បានឮតៀវហ៊ុយស្រែកគំហកដូច្នោះ ក៏ភ័យស្លុតចិត្តញ័ររន្ធត់អស់ទាំងខ្លួន មិនបានតបថាប្រការម្ដេចសោះ ទទួល**គួនអ៊ូ**តាមទៅទាន់ឃើញ**តៀវហ៊ុយ**នៅស្ទាក់ពីមុខដូច្នោះ ក៏ស្រែកថា **តៀវហ៊ុយ**កុំអាលធ្វើវីវរ បងយើងលែងឲ្យគេទៅហើយ។ **តៀវហ៊ុយ**ឆ្លើយថា បើលែងអាពីរនាក់នេះទៅហើយគង់តែវានឹងត្រឡប់មកធ្វើអន្តរាយដល់យើងវិញជាប្រាកដ។ **គួនអ៊ូ**តបថា បើគេមិនដឹងគុណយើងនឹងត្រឡប់មកប្រទូសរ៉ាយយើងវិញ សឹមយើងចាប់សម្លាប់ចេញ គ្មានសេចក្ដីនិន្ទាទេ។

**ឡៅតាយ, អងតុង**បានស្ដាប់ដូច្នោះក៏ឆ្លើយថា ពេលនេះ**ឡៅពី**មានគុណដល់យើងជាទម្ងន់ណាស់ ប្រសិនបើមហាឧបរាជប្រើយើងឲ្យលើកទ័ពមកទៀត យើងក៏មិនមកជាដាច់ខាត សូម្បីមហាឧបរាជនឹងសម្លាប់បុត្រភរិយាយើងទាំងអស់ក៏តាមចិត្តចុះ សូមអ្នកទាំងពីរបើកលែងយើងទៅតាមស្រួល កុំបីបៀតបៀនយើងឡើយ។ **តៀវហ៊ុយ**ថា ក្បាលឯងទាំងពីរនាក់នេះ អញលើកទុកឲ្យនៅជាប់នឹងខ្លួនហើយ បើប្រសិនឯងទៅញុះញង់**ចូឆូ**ប្រការម្ដេច **ចូឆូ**នឹងលើកទ័ពមក អញនឹងកាប់ឯងព្រមទាំងទាហានឯងមិនឲ្យសល់ម្នាក់។ **ឡៅតាយ**និង**អងតុង**បានស្ដាប់ទាំងខ្លាច ទាំងមានចិត្តត្រេកអរ ក៏បង្ខំបរសេះនាំទាហានស្រូតរូតទៅ។

**គួនអ៊ូ, តៀវហ៊ុយ**ក៏វិលត្រឡប់ទៅស្រុកឈីជីវវិញ ហើយជម្រាប**ឡៅពី**ថា ដែលលោកបើកលែង**ឡៅតាយ**និង**អងតុង**ទៅនោះ ខ្ញុំបាទយល់ឃើញថា **ចូឆូ**នឹងលើកកងទ័ពមកធ្វើអន្តរាយលោកវិញពុំខាន។ **ស៊ុនខៀន**បានឮ**គួនអ៊ូ, តៀវហ៊ុយ**ថាដូច្នោះ ក៏និយាយនឹង**ឡៅពី**ថា ដែលប្អូនលោកថានេះក៏ត្រូវមែនហើយ បើ**ចូឆូ**លើក

ទ័ពមក លោកនឹងតាំងទ័ពនៅតែក្នុងស្រុកឈីជីវនេះ គង់នឹងថ្លោះការព្រោះ**ចូឆូ**ជាប្រាកដ សូមឲ្យលោករំលែកពលទាហានទៅតាំងនៅស្រុកសៀវផាយមួយ ស្រុកហែហ្វីមួយកង នឹងបានជួយច្បាំងជាទ័ពសន្ទប់ពីក្រៅ។ **ឡៅពី**បានស្ដាប់យល់ឃើញត្រូវ ទើបប្រើ**គួនអ៊ូ**ឲ្យលើកកងទ័ពនាំនាង**កាំហ៊ូយិន**និងនាង**ប៊ីហ៊ូយិន**ដែលជាភរិយា**ឡៅពី**ទៅរក្សាទុកឯស្រុកហែហ្វី ប្រើ**ស៊ុនខៀន**និង**តាន់យ៉ុង, ប៊ីតុក, ប៊ីហាង** បួននាក់ទៅរក្សាស្រុកឈីជីវ ឯ**ឡៅពី**និង**តៀវហ៊ុយ**ក៏លើកពលទាហានទៅរក្សាស្រុកសៀវផាយ។

កាល**ឡៅតាយ**និង**អងតុង**ទៅដល់ក្រុងហ៊ូតោ ក៏ចូលទៅជម្រាប**ចូឆូ**តាមរឿងដែលបានទៅធ្វើសង្គ្រាមនឹង**គួនអ៊ូ, តៀវហ៊ុយ**នោះគ្រប់ប្រការហើយថា **ឡៅពី**មានចិត្តសុចរិតគិតដល់គុណូបការឧបរាជមិនដែលដាច់ មិនបានក្បត់ចិត្តគិតប្រទូសរ៉ាយដល់មហាឧបរាជទេ ដែលឲ្យ**គួនអ៊ូ, តៀវហ៊ុយ**ចេញមកច្បាំងនឹងខ្ញុំបាទនោះ ជាធម្មតាការពារជីវិតទេ ឥឡូវ**ឡៅពី**បើកលែងខ្លួនខ្ញុំបាទទាំងពីរនាក់ ឲ្យចូលមកសារពិភក្តិដល់មហាឧបរាជតាមផ្លូវរាជការជាសុចរិត។

**ចូឆូ**បានស្ដាប់ដូច្នោះក៏ខឹងណាស់ថា “អាទាហានឆើបពីស្លាប់យ៉ាងនេះ នឹងចិញ្ចឹមរក្សាទុកមិនបានទេ!” ថាហើយក៏បង្គាប់ពេជ្ឈឃាតឲ្យចាប់ខ្លួន**ឡៅតាយ** និង**អងតុង**ប្រុងនឹងឲ្យនាំទៅសម្លាប់។ **ខុងយ៉ុង**ឃើញដូច្នោះក៏ចូលទៅឃាត់ហាម**ចូឆូ**ថា ឯថ្វីដៃ**ឡៅតាយ**និង**អងតុង**នោះ នឹងទៅតទល់នឹងថ្វីដៃសេចក្ដីរិះគិតរបស់**ឡៅពី**នោះមិនបានទេ ដែលលោកនឹងយកខ្លួនអ្នកទាំងពីរទៅប្រហារជីវិតចេញនោះ ទាហានទាំងឡាយនឹងធ្វើការទៅក៏គង់តែមានសេចក្ដីតូចចិត្ត។ **ចូឆូ**បានស្ដាប់ក៏យល់ឃើញត្រូវដូចពាក្យ**ខុងយ៉ុង**ថា ទើបបង្គាប់ពេជ្ឈឃាតថាកុំឲ្យសម្លាប់វាចុះ តែត្រូវឲ្យដក

ហូតងារចេញពីនាយទាហាន យកខ្លួនទៅទុកប្រើជារាស្ត្រសុទ្ធសាធ។ រួច**ចូឆូ**ក៏កេណ្ឌប្រមូលសេនាទាហាននឹងលើកទៅតច្បាំងនឹង**ឡៅពី**។ **ខុងយ៉ុង**និយាយថា "ដែលមហាឧបរាជនឹងលើកទ័ពទៅនោះ វេលានេះជាទេសកាលរងាររពន់ពេក ទាហានទាំងពួងនឹងបានសេចក្ដីលំបាកតោកយ៉ាក សុំឲ្យលោកចាត់ប្រើបម្រើដែលមានសតិបញ្ញា ទៅនិយាយបញ្ចុះបញ្ចូល**ឡៅពៀវ** និង**តៀវស៊ីវ**ឲ្យឡើងមកស្ដាប់**បង្គាប់**លោកសិន ទោះបីលោកនឹងលើកទ័ពទៅធ្វើការទីណាក៏មិនមានកង្វល់ក្រោយឯស្រុកឈីជីវនោះបីដូចជានៅក្នុងកណ្ដាប់ដៃលោក ៗនឹងគិតយកពេលណាក៏គង់នឹងបានដោយងាយ។

**ចូឆូ**យល់ឃើញត្រូវផង ទើបប្រើ**ឡៅហ៊ូ**ដែលជាមានសតិបញ្ញាឲ្យទៅបញ្ចុះបញ្ចូល**តៀវស៊ីវ**។ **ឡៅហ៊ូ**ក៏លា**ចូឆូ**ទៅស្រុកឆេងអៀង ហើយចូលទៅគំនាប់**កាសៀង**ដែលជាទីប្រឹក្សា**តៀវស៊ីវ** ហើយនិយាយថា គ្រានេះ**ចូឆូ**បានជាទីមហាឧបរាជមានចិត្តធូរទូលាយរួសរាយរាប់អានសេនាទាហានទាំងឡាយទាំងពួងល្អណាស់ បានជាប្រើខ្ញុំឲ្យមកនិយាយនឹង**តៀវស៊ីវ**ដែលបានធ្វើសង្គ្រាមនឹងគ្នាមកពីមុននោះ កុំបីឲ្យមានចិត្តគិតអាឃាតព្យាបាទគ្នាតទៅមុខទៀត ចូរគិតគូររួមគំនិតចិត្តមួយនឹងគ្នាដើម្បីនឹងទំនុកបម្រុងផែនដី។ **កាសៀង**បានស្ដាប់ដូច្នោះឆ្លើយថា ថ្ងៃនេះជូនពេលក៏យប់ទៅហើយ ព្រឹកស្អែកខ្ញុំនឹងនាំអ្នកទៅជួបនឹង**តៀវស៊ីវ**។ **កាសៀង**ក៏ឲ្យរៀបតុលៀងភោជនាហារឲ្យ**ឡៅហ៊ូ**បរិភោគ។ លុះព្រឹកឡើង**កាសៀង**ក៏ឲ្យ**ឡៅហ៊ូ**នៅផ្ទះសិន ខ្លួន**កាសៀង**ក៏ចូលទៅជម្រាប**តៀវស៊ីវ**គ្រប់ប្រការ។ **តៀវស៊ីវ**នៅមិនទាន់ឆ្លើយតបថាដូចម្ដេច ស្រាប់តែមានទាហាន**អ៊ួនសៀវ**យកសំបុត្រទៅឲ្យ**តៀវស៊ីវ** ៗក៏ទទួលមកលាមើលនៅមុខ**កាសៀង** ក្នុងសំបុត្រនោះមានសេចក្ដីថា "**អ៊ួនសៀវ**

ចៅហ្វាយស្រុកគីជីវមកដល់**តៀវស៊ីវ**ជ្រាប ដ្បិតវេលានេះ**ចូឆូ**បានជាមហាឧបរាជនៅក្រុងហ៊ូតោ ធ្វើការអាក្រក់ក្បត់ផែនដី ព្រះចៅ**ហៀនតេ** និងបណ្ដានាហ្មឺនសព្វមុខមន្ត្រីនូវអស់អាណាប្រជានុរាស្ត្រទាំងពួងបានសេចក្ដីក្ដៅក្រហាយណាស់ បានជាយើងឲ្យសំបុត្រនេះអញ្ជើញអ្នក ដើម្បីឲ្យទៅជួយគិតការរាជការនឹងកម្ចាត់**ចូឆូ**ចេញជាទីទំនុកបម្រុងព្រះមហាក្សត្រ ឲ្យបានគង់ជាសុខក្សេមក្សាន្តក្នុងរាជសម្បត្តិ”។ **កាសៀង**បានឮសំបុត្រនោះច្បាស់ហើយ ក៏ទាញយកពីដៃ**តៀវស៊ីវ**មកកាន់ ហើយសួរបម្រើនោះថា កាលពីខែភទ្របទយើងបានឮដំណឹងថា **អ៊ួនសៀវ**ចៅហ្វាយស្រុកអ្នកឯងលើកកងទ័ពទៅច្បាំងនឹង**ចូឆូ**មិនដឹងចាញ់ឬឈ្នះ? បម្រើនោះឆ្លើយថា ចៅហ្វាយខ្ញុំបាទលើកកងទ័ពទៅដល់តំបន់ឡេយ៉ុងចុងដែនស្រុកហ៊ូតោ **ចូឆូ**ក៏លើកកងទ័ពមកតាំងបន្ទាយចម្ងាយពីគ្នាប្រហែលប្រាំបីរយសិន (៣២ គ.ម) ទទួលទេសកាលចូលរដូវរងា **អ៊ួនសៀវ**ឲ្យទាហានរង់បង្អង់ទុកមិនទាន់ចេញច្បាំងនឹង**ចូឆូ**ទេ ខ្លួន**ចូឆូ** និង**អ៊ួនសៀវ**ទាំងសងខាងក៏លើកទ័ពត្រឡប់ទៅស្រុកវិញរៀងខ្លួន។

**កាសៀង**បានស្ដាប់ដូច្នោះខឹងណាស់ យកសំបុត្រឈ្លីចោលហើយស្ដីថា “កាលគ្រា**អ៊ួនសុត**ជាប្អូនចៅហ្វាយអ្នកឯង ក៏មិនបានប្រក្រតីយកចិត្តគ្នានឹង**អ៊ួនសៀវ**ជាបង ឥឡូវមកលួងលោមអ្នកដទៃ មិនមែនសាច់សាលោហិតទៅរួមគំនិតគិតការជាមួយផង ដូច្នេះធ្វើម្ដេចនឹងយកជាការបាន” ថាហើយក៏បណ្ដេញបម្រើដែលកាន់សំបុត្រឲ្យដើរចេញមួយរំពេច។ **តៀវស៊ីវ**ឃើញ**កាសៀង**ធ្វើដូច្នោះក៏ភ័យណាស់ទើបថា ហេតុម្ដេចបានជាអ្នកធ្វើផ្ដេសផ្ដាស ហែកសំបុត្រ**អ៊ួនសៀវ**ចោលដូច្នោះ ព្រោះវេលានេះ**អ៊ួនសៀវ**មានថ្វីដៃខ្លាំងពូកែ ហើយសេនាទាហានក៏មានច្រើន បើ**អ៊ួនសៀវ**

ដឹងការណ៍ហើយ សូម្បីនឹងលើកកងទ័ពមកធ្វើអន្តរាយស្រុកយើង តើអ្នកនឹងគិតយ៉ាងម្តេចទៅវិញ?

**កាសៀង**តបថា បើលោកបារម្ភខ្លាចដូច្នោះ ខ្ញុំនឹងនាំលោកចូលទៅនៅធ្វើការនឹង**ចូឆ្វ**វិញ ទោះបី**អ៊្វនសៀវ**នឹងលើកទ័ពមកធ្វើអន្តរាយដល់លោក **ចូឆ្វ**នឹងបានជួយ។ **តៀវស៊ីវ**តបថា សព្វថ្ងៃនេះ**ចូឆ្វ**បានជាមហាឧបរាជក៏មែន តែសេនាទាហានតិចជាង**អ៊្វនសៀវ**ប្រការមួយ **ចូឆ្វ**បានធ្វើសង្គ្រាមនឹងយើងមកពីមុន គង់មានចិត្តអាឃាតព្យាបាទនឹងយើងមិនភ្លេច។ **កាសៀង**ឆ្លើយថា បើខ្លាច**ចូឆ្វ**ព្យាបាទនោះ ខ្ញុំសុំកុំឲ្យលោកព្រួយជាទុក្ខឡើយ បើយើងទៅចូលខាង**ចូឆ្វ**ហើយឃើញត្រូវបីប្រការ៖ ប្រការមួយ **ចូឆ្វ**បានជាមហាឧបរាជ ទោះបីនឹងធ្វើការអ្វីៗ ក៏កាន់យកព្រះតម្រាស់ព្រះចៅ**ហៀនតេ**ជាប្រមាណ នាហ្មឺនមុខមន្ត្រីក្នុងស្រុកក្រុងនិងខេត្តក្រៅទាំងអស់រមែងកោតខ្លាចអំណាច**ចូឆ្វ**ជាច្រើន ប្រការមួយ ទោះបី**ចូឆ្វ**មានទាហានតិចក្តីណា តែមានតម្រិះប្រាជ្ញាជ្រៅទូលាយណាស់ នឹងធ្វើការសង្គ្រាមនៅទីណារមែងមានជ័យជម្នះច្រើនជាងចាញ់ ដែលលោកគិតខ្លាច**អ៊្វនសៀវ**ប្រុងនឹងចូលទៅខាង**អ៊្វនសៀវ**ដែលមានទាហានច្រើននោះ ឧបមាដូចមនុស្សមានទ្រព្យសម្បត្តិច្រើន ហើយមានគេយកទ្រព្យរបស់ទៅឲ្យ ក៏មិនសូវត្រេកអរប៉ុន្មាន ឯ**ចូឆ្វ**នោះដូចជាមនុស្សខ្សត់ទ្រព្យសម្បត្តិ បើមានគេយកទ្រព្យរបស់តែបន្តិចបន្តួចទៅឲ្យក៏មានសេចក្តីត្រេកអរណាស់ ប្រការមួយទៀត **ចូឆ្វ**ធ្វើការគ្រានេះមានចិត្តធូរទូលាយរួសរាយរាប់អានសេនាទាហានទាំងពួង ទោះបីនរណាធ្វើខុសក៏ធ្វើតាមខុស នរណាធ្វើត្រូវក៏ឲ្យបំណាច់រង្វាន់គុណគាប់គ្រប់គ្នា មិនដែលមានសេចក្តីព្យាបាទដល់អ្នកឯណា គិតតែយករាជការជាប្រមាណ។ ខ្ញុំបាទយល់ឃើញហេតុទាំងបីប្រការដូច្នេះ ទើបថាឲ្យលោកទៅចូល

ខាង**ចូឆ្វ**ល្អជាង**អ៊្វនសៀវ**។ **តៀវស៊ីវ**ក៏យល់ព្រមផង **កាសៀង**ក៏ត្រឡប់ទៅផ្ទះវិញ ហើយនិយាយប្រាប់**ឡៅហ៊្វ**គ្រប់ប្រការ។ **ឡៅហ៊្វ**បានស្ដាប់វាចា**កាសៀង**គ្រប់ប្រការ ក៏មានសេចក្ដីត្រេកអរពន់ពេក ឲ្យ**កាសៀង**នាំខ្លួនទៅជួបនឹង**តៀវស៊ីវ** ដល់ហើយក៏ឱនគំនាប់តាមសមគួរហើយនិយាយថា លោកកុំបីសន្ទិះសង្ស័យនឹងមហាឧបរាជនោះឡើយ បើជាមានចិត្តព្យាបាទទៅហើយ ក៏នឹងលើកទ័ពមកច្បាំងនឹងលោកយកជ័យជម្នះឲ្យត្រាតែបាន នេះអស់សេចក្ដីព្យាបាទហើយទើបប្រើខ្ញុំបាទមក អញ្ជើញឲ្យលោកទៅជួយគិតការទំនុកបម្រុងផែនដី។ **តៀវស៊ីវ**បានឮសម្ដី**ឡៅហ៊្វ**និយាយដូច្នោះ ក៏មានចិត្តត្រេកអរណាស់ តាំងចាប់ផ្ដើមកេណ្ឌប្រមូលសេនាទាហានបានគ្រប់គ្រាន់ ហើយក៏នាំ**កាសៀង**និង**ឡៅហ៊្វ**លើកទ័ពទៅក្រុងហ៊្វតោ។

**ឡៅហ៊្វ**ក៏នាំ**តៀវស៊ីវ**និង**កាសៀង**ចូលទៅគំនាប់**ចូឆ្វ**។ **តៀវស៊ីវ**និង**កាសៀង**ក៏លុតជង្គង់គំនាប់**ចូឆ្វ**ហើយអង្គុយនៅទីទាប។ **ចូឆ្វ**ឃើញ**តៀវស៊ីវ**និង**កាសៀង**ទៅដល់ ក៏មានចិត្តសោមនស្សណាស់ ចុះទៅទាញដៃ**តៀវស៊ីវ**ឲ្យក្រោកឡើងមកអង្គុយលើកៅអីដោយសមគួរ ហើយនិយាយថា "ពីដើមយើងបានប្រមាថធ្វើមោះមិនគាប់ ត្រឡប់ចងទោសដល់គ្នានឹងគ្នា សុំឲ្យអ្នកអភ័យទោសដល់យើងចុះ កុំបីមានអាឃាតព្យាបាទតទៅឡើយ" និយាយហើយ**ចូឆ្វ**ក៏តាំង**តៀវស៊ីវ**ឲ្យធ្វើជាទីអៀងប៊្វចុងគុន គឺនាយទាហានធំ ឲ្យ**កាសៀង**ជាទីគិមជិមង៉ គឺទីប្រឹក្សា ហើយ**ចូឆ្វ**និយាយនឹង**តៀវស៊ីវ, កាសៀង**ថា ឲ្យតែងសំបុត្រទៅបញ្ចុះបញ្ចូល**ឡៅពៀវ**ចៅហ្វាយស្រុកកេងជីវទៀត។

**កាសៀង**ឆ្លើយថា **ឡៅពៀវ**នោះជាមនុស្សរមែងគប់ប្រសព្វនឹងអ្នកមានសតិបញ្ញា បើនឹងឲ្យទៅបញ្ចុះបញ្ចូលវេលាណា ត្រូវចាត់ប្រើអ្នកមានប្រាជ្ញាស្មារតីចេះសម្ដីនិយាយដោះស្រាយឲ្យទៅនិយាយទើបបាន។

**ចូឆ្ងូ**ក៏សួរ**ស៊ុនហ៊ីវ**ថា អ្នកយល់ឃើញនរណាមានប្រាជ្ញាវាងវៃ ដែលនឹងប្រើឱ្យទៅស្រដីល្បួងលួងលោម**ឡៅពៀវ**បាន? **ស៊ុនហ៊ីវ**ឆ្លើយតបថា ដែលនឹងប្រើទៅបញ្ចុះបញ្ចូល**ឡៅពៀវ**នោះ ខ្ញុំបាទយល់ឃើញតែ**ខុងយ៉ុង**មួយនេះ គួរនឹងប្រើឱ្យទៅបាន។ **ចូឆ្ងូ**ក៏យល់ព្រមផង ពេលនោះទីប្រឹក្សានិងសេនាទាហានទាំងពួងក៏លា**ចូឆ្ងូ**ទៅផ្ទះរៀងខ្លួន។

**ស៊ុនហ៊ីវ**ក៏ចូលទៅរក**ខុងយ៉ុង**ឯផ្ទះហើយនិយាយថា ឥឡូវនេះ**ចូឆ្ងូ**រើសរកអ្នកមានសតិបញ្ញានឹងប្រើឱ្យទៅនិយាយការដើម្បីនឹងបញ្ចុះបញ្ចូល**ឡៅពៀវ** ខ្ញុំឆ្លើយថាឃើញតែអ្នកម្នាក់ឯងទេ ទើបអាចទៅបញ្ចុះបញ្ចូល**ឡៅពៀវ**បាន។ **ខុងយ៉ុង**បានឮដូច្នោះក៏ឆ្លើយថា ខ្ញុំជាអ្នកចេះដឹងតិច ហេតុម្តេចបានជាអ្នកទៅនិយាយដូច្នេះ? ប្រសិនបើខ្ញុំទៅនិយាយមិនសម្រេចការរបស់**ចូឆ្ងូ** អ្នកនិងខ្ញុំគង់មិនរួចអំពីទោសខុសឡើយ។

**ស៊ុនហ៊ីវ**សួរថា អ្នកឃើញនរណាដែលមានតម្រិះប្រាជ្ញាជាងអ្នកទៅទៀត? **ខុងយ៉ុង**ឆ្លើយតបថា សម្លាញ់របស់ខ្ញុំម្នាក់ឈ្មោះ**យីអេង** មានសតិបញ្ញាយ៉ាងជ្រៅលើសប្រាជ្ញាខ្ញុំដប់ភាគ កុំថាឡើយតែប្រើទៅនិយាយបញ្ចុះបញ្ចូល**ឡៅពៀវ**ប៉ុណ្ណោះ ទោះនឹងឱ្យធ្វើនាហ្មឺនធំក្នុងរាជការព្រះចៅ**ហៀនតេ**ក៏បាន ខ្ញុំគិតនឹងធ្វើរឿងរ៉ាវក្រាបបង្គំទូលព្រះចៅ**ហៀនតេ** ឱ្យទ្រង់ប្រោសតាំង**យីអេង**ជានាហ្មឺនមានយសសក្តិ រួចសឹមទៅនិយាយបញ្ចុះបញ្ចូល**ឡៅពៀវ**។ **ស៊ុនហ៊ីវ**ក៏យល់ព្រមផង ទើប**ខុងយ៉ុង**តែងរឿងរ៉ាវមានសេចក្តីថា ទូលព្រះបង្គំជាខ្ញុំ**ខុងយ៉ុង** សូមក្រាបបង្គំទូលថ្វាយ សូមទ្រង់ជ្រាបក្រោមល្អងធូលីព្រះបាទ ដ្បិត**យីអេង**នេះអាយុម្ភៃឆ្នាំនៅក្នុងស្រុកឡ មានសតិបញ្ញាឆ្លៀវឆ្លាតច្រើន ភ្នែកក្រឡេកមើលទៅឃើញរបស់អ្វី ត្រចៀកបានឮសំឡេងអ្វី

ចិត្តនោះក៏គិតផ្តុះផ្តាយរហូតមិនទើសទាល់ ប្រមាណការអ្វីក៏ត្រូវគ្រប់ប្រការ សូមឲ្យទ្រង់យក**យីអេង**មកប្រើជាខ្ញុំព្រះរាជការ ហើយចាត់ឲ្យទៅនិយាយបញ្ចុះបញ្ចូល**ឡៅពៀរ**ឃើញនឹងបានដោយងាយ។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ២១

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ខុងយ៉ុង**នាំរឿងទៅក្រាបទូលព្រះចៅ**ហៀនតេ** រហូតដល់**ចូឆូ**គិតលើកទ័ពទៅចាប់**ម៉ាន់ថង**និង**ឡៅពី** ដែលសមគំនិតគ្នានឹង**តាំងស៊ីន**)។*

**លុះ**វេលាព្រឹកឡើង នាហ្មឺនសព្វមុខមន្ត្រីទាំងពួងចូលក្រាបបង្គំគាល់ព្រះរាជាព្រមគ្នា **ខុងយ៉ុង**ក៏នាំរឿងរ៉ាវនោះទៅក្រាបបង្គំទូលព្រះចៅ**ហៀនតេ** ៗទ្រង់ទតហើយមិនបានត្រាស់ថាប្រការម្ដេច ទើបយកសំបុត្រនោះទៅឲ្យ**ចូឆូ**ហើយត្រាស់ថាការទាំងនេះតាមតែមហាឧបរាជនឹងរិះគិតចាត់ចែងចុះ។ **ចូឆូ**បានទទួលព្រះតម្រាស់ហើយ លុះត្រឡប់មកផ្ទះក៏ឲ្យបម្រើទៅហៅ**យីអេង** ៗចូលមកដល់ក៏គំនាប់**ចូឆូ** ៗមិនបានទទួលគួរសម មិនបានប្រាស្រ័យតាមយ៉ាងទំនៀមធម្មតា។ **យីអេង**មានសេចក្ដីតូចចិត្តណាស់ក៏នៅស្ងៀមហើយដកដង្ហើមធំ ទើបនិយាយដោយកម្លាំងរោហារថា ផែនដីនេះធំទូលាយណាស់ ប្រសិនបើខាតបង់មនុស្សម្នាក់ចេញទៅ មិនជាការអ្វីណាស់ណាទេ។

**ចូឆូ**បានឮ**យីអេង**និយាយប្រៀបធៀបដូច្នោះ មិនទាន់ដឹងប្រាកដក៏សង្កេតខុសទៅ ទើបសួរថា ផែនដីយើងនេះ ទីប្រឹក្សានិងសេនាទាហានដែលមានថ្វីដៃក៏ច្រើន ហេតុម្ដេចខ្លួនក៏ថាមិនមានមនុស្សល្អ? **យីអេង**បានស្ដាប់ដូច្នោះ ឃើញថា**ចូឆូ**ដឹងមិនដល់ ទើបតបថា មហាឧបរាជអួតថាមានទីប្រឹក្សានិងទាហានដែលមានថ្វីដៃនោះគឺនរណាខ្លះ? ខ្ញុំបាទមិនស្គាល់ច្បាស់។ **ចូឆូ**ថា **ស៊ុនហុក, ស៊ុនហ៊ីវ, គុយកែ, ធៀយ៉ុក**

ទីប្រឹក្សារបស់យើងបួននាក់នេះ សុទ្ធតែមានតម្រិះប្រាជ្ញាយ៉ាងជ្រៅទូលាយ សូម្បី **សៀវហោ**និង**តាន់ផេង** ដែលជាអ្នកប្រាជ្ញរបស់ព្រះចៅ**ហាន់កោចោ**ពីបុរាណក៏មិនបានស្មើដល់នឹងទីប្រឹក្សារបស់យើង ឯទាហានឯករបស់យើងដែលមានថ្វីដៃនោះ គឺ **តៀវលៀវ, ខៅធូ, លីទៀន, ង៉ាក់ជិន** បួននាក់នេះសុទ្ធតែមានថ្វីដៃខ្លាំងពូកែ ជំនាញស្ទាញស្ទាត់ក្នុងការរឿណរង្គសង្គ្រាមលើសជាង**ង៉ៀមង៉ែ** និង**ម៉ាប៊ូ**ដែលជាសេនាព្រះចៅ**ហាន់កងប៊ូ**ទៅទៀត ឯ**លីយ៉យ**និង**ម៉ាន់ថង** ពីរនាក់នេះជាទីប្រឹក្សារបស់យើង **ហែហ៊ួទុន, អ៊ីគីម, ស៊ីឡុង** ជាសេនាយ៉ាងនេះក៏រាប់រយនាក់ ហេតុម្តេចខ្លួនថា ផែនដីនេះនឹងរកអ្នកមានសតិបញ្ញានិងថ្វីដៃខ្លាំងពូកែមិនបានសោះ?

**យីអេង**បានឮដូច្នោះ ក៏អស់សំណើចហើយតបថា លោកមានប្រសាសន៍នេះខ្ញុំមិនយល់ឃើញផងទេ មនុស្សទាំងនេះខ្ញុំក៏បានដឹងយល់ស្គាល់គំនិតមារយាទ និងតម្រិះប្រាជ្ញា ហើយនិងថ្វីដៃអស់ហើយ ឯ**ស៊ុនហុក**នោះមុខបីដូចជាគេយំ គួរតែប្រើទៅសួរជំងឺ ឬសំក្ការសព **ស៊ុនហ៊ីវ**នោះសមតែធ្វើអ្នកភ្ជុករក្សាសព **ធៀយ៉ុក**នោះសមតែប្រើឲ្យអង្គុយចាំជើងក្រាន **គុយកែ**នោះសមតែតែងឃ្លោងនិងឲ្យមើលបទសាស្ត្រា **តៀវលៀវ**នោះសមតែវាយស្គរនិងរគាំង **ខៅធូ**នោះសមតែឃ្វាលគោនិងសេះ **លីទៀន**នោះសមតែឲ្យមើលពាក្យក្តី **ងាក់ជិន**នោះសមតែប្រើឲ្យដើរចែកសំបុត្រ **លីយ៉យ**សមតែប្រើឲ្យដុសខាត់គ្រឿងអាវុធ **ម៉ាន់ថង**នោះសមតែប្រើឲ្យផឹកស្រាទំពារឆ្អឹងជ្រូក **អ៊ីគីម**នោះសមតែប្រើឲ្យរែកក្តារទៅធ្វើបន្ទាយ **ស៊ីឡុង**នោះសមតែប្រើឲ្យកាប់ជ្រូកលក់ **ហែហ៊ួទុន**នោះសមតែប្រើឲ្យចាំរក្សាខ្លួន កុំឲ្យសត្រូវកាត់ក្បាលនឹងជើងឆ្វេងស្តាំទៅបាន ឯទីប្រឹក្សានិងសេនាទាហានក្រៅអំពីនេះសមតែប្រើឲ្យរែក

ស្បៀងជូនកងទ័ព ដែលលោកនឹងរាប់ថាមានតម្រិះប្រាជ្ញាខ្លាំងពូកែនោះ ខ្ញុំមិនឃើញផងសោះ។

**ចូឆូ**បានស្តាប់ដូច្នោះក៏ខឹងខ្លាំងណាស់ ទើបសួរថា ខ្លួនមកតិះដៀលទីប្រឹក្សា និងសេនាទាហានរបស់យើងដូច្នេះ ខ្លួនចេះដឹងអ្វីខ្លះលើសគេ? **យីអេង**តបថា ខ្ញុំចេះមើលផ្កាយលើអាកាស មើលផ្ទុះរហូតទៅក្រោមផែនដី ខ្ញុំចំណានស្ទាត់មើលដឹងយល់ស្គាល់ភូមិលំនៅល្អនិងអាក្រក់ មួយវិញទៀត ខ្ញុំប៉ានពិតទូលព្រះមហាក្សត្រឲ្យតាំងនៅក្នុងយុត្តិធម៌ ដូចព្រះចៅ**ងៀវស៊ុន**នោះក៏បាន ប្រការមួយខ្ញុំនឹងបញ្ចុះបញ្ចូលទូន្មានប្រដៅអាណាប្រជានុរាស្ត្រទាំងពួងឲ្យទៀងត្រង់ក៏បាន ដែលខ្ញុំសន្ទនានឹងលោកគ្រានេះ ឧបមាដូចជានិយាយនឹងមនុស្សឆ្កួតដែលមិនចេះភាសាមនុស្ស។

**តៀវលៀវ**បានឮដូច្នោះខឹងណាស់ ហូតគ្រប៉ីចេញនឹងកាប់**យីអេង**។ **ចូឆូ**ក៏ហាមឃាត់ថា កុំអាលធ្វើវីវរឡើយ ព្រោះសព្វថ្ងៃនេះ យើងនៅខ្វះមនុស្សម្នាក់សម្រាប់វាយស្គរទទួលភ្ញៀវ បើទៅសម្លាប់**យីអេង**នេះចេញក៏ឃើញថាស្លាប់ទៅទទេ ត្រូវតែយកវាទៅប្រើឲ្យវាយស្គរទទួលភ្ញៀវល្អជាង។ **តៀវលៀវ**ក៏ស្តាប់ពាក្យ**ចូឆូ** ៗក៏ប្រើ**យីអេង**ឲ្យទៅចាំវាយស្គរទទួលភ្ញៀវ។ **តៀវលៀវ**ថា **យីអេង**នេះនិយាយពាក្យចាក់ដោតដល់លោកច្រើនណាស់ ហេតុម្តេចបានជាលោកអត់ធន់មិនសម្លាប់វាចេញ? **ចូឆូ**តបថា យើងបានឮដំណឹងរឿយៗថា **យីអេង**នេះជាមនុស្សមានសតិបញ្ញាក្លាហាន គ្មានកោតញញើតនរណាសោះ ដែលវាមកនិយាយទ្រគោះឲ្យយើងនោះ បើយើងទៅសម្លាប់វាចេញ មនុស្សទាំងពួងនឹងគរហានិន្ទាថា មានមនុស្សចេះដឹងល្អហើយសម្លាប់ចោលជាអសារ ប្រការមួយអ្នកមានសតិបញ្ញាឯណាប្រាថ្នាចូល

មកនៅនឹងយើង ក៏ឲ្យរួញរាញញើតថាយើងមិនបានទំនុកបម្រុងមនុស្សល្អ ឯ**យីអេង**នេះជាមនុស្សអួតចេះ យើងត្រូវយកខ្លួនវាទុកវាយស្គរ។

លុះថ្ងៃមួយ **ចូឆូ**ឲ្យអញ្ជើញនាហ្មឺនសព្វមុខមន្ត្រីមកស៊ីលៀង **យីអេង**ពាក់អាវកណ្ដាចចេញមកវាយស្គរទទួលភ្ញៀវ នាហ្មឺនទាំងពួងបានឮសំឡេងស្គរដែល**យីអេង**វាយនោះ ក៏ពីរោះចាប់ចិត្តបង្កើតភិស្សវង់ ទាហានដែលបម្រើភ្ញៀវឃើញ**យីអេង**សម្ដែងអាកប្បកិរិយាមិនសមគួរ ក៏និយាយថា ថ្ងៃនេះមហាឧបរាជទទួលភ្ញៀវធំ ហេតុម្ដេចខ្លួនមកពាក់អាវកណ្ដាចដូច្នេះ? **យីអេង**បានឮទាហានស្រែកថាដូច្នោះ ក៏ដោះអាវនិងស្បែកជើងចេញអស់ ក្លែងវាយស្គរនៅតែខ្លួនទទេ។ នាហ្មឺនទាំងពួងឃើញដូច្នោះ ក៏នឹកអៀនខ្មាសយកដៃខ្ទប់មុខទាំងអស់គ្នា។ **ចូឆូ**ឃើញ**យីអេង**ធ្វើដូច្នោះក៏ខឹងណាស់ស្រែកថា ឯងធ្វើផ្ដេសផ្ដាសដូច្នេះប្រាថ្នានឹងឲ្យអញលក់ឈ្មោះឬ? **យីអេង**ឆ្លើយតបថា អញដោះអាវនិងស្បែកជើងចេញនៅតែខ្លួនទទេដូច្នេះ ដោយយល់ថា ជាការចេញមុខ ព្រោះកាយនេះជាទីស្អាត មាតាបិតាអញឲ្យអញកើតមក។ **ចូឆូ**ថា ឯងឃើញថារូបកាយនរណាស្មោកគ្រោកនោះ? **យីអេង**តបថា ខ្លួនមិនចូលចិត្តឬ? យើងនឹងអធិប្បាយរូបកាយស្មោកគ្រោករបស់ខ្លួនឲ្យស្ដាប់៖ ប្រការមួយ ខ្លួនមិនស្គាល់ច្បាស់មនុស្សល្អនិងអាក្រក់ ភ្នែករបស់ខ្លួននោះជាទីស្មោកគ្រោក ប្រការមួយ ដែលនរណាមានចិត្តសុចរិតទៀងត្រង់យល់ឃើញថា ខ្លួនធ្វើការអាក្រក់ក៏រំឮកហាមប្រាមខ្លួនដោយសុចរិត ខ្លួនមិនបានស្ដាប់ ត្រចៀករបស់ខ្លួនជាទីស្មោកគ្រោក ប្រការមួយ ខ្លួនមិនបានចិត្តធូរទូលាយរួសរាយរាប់អាននាហ្មឺនសព្វមុខមន្ត្រី និងចៅហ្វាយខេត្តទាំងពួង ហើយខ្លួនគិតក្បត់ចិត្តប្រទូសរ៉ាយ ឲ្យព្រះចៅ**ហៀនតេ**ព្រួយព្រះរាជហឫទ័យបានសេចក្ដីក្ដៅក្រហាយ ចិត្តរបស់ខ្លួនក៏ជាទីស្មោកគ្រោក សព្វថ្ងៃ

នេះ មនុស្សក្នុងផែនដីរាប់អានថាយើងមានតម្រិះប្រាជ្ញា ហើយខ្លួនមកប្រមាថមើលងាយឲ្យយើងជាអ្នកវាយស្គរ ព្រោះមិនបានស្គាល់យើងជាមនុស្សល្អ ពេលនេះខ្លួនគិតការដ៏ធំពន្លឹក មិនគួរខ្លួនមិនរាប់អានយើងជាអ្នកមានសតិបញ្ញាសោះ។

**ខុងយ៉ុង**បានឮ**យីអេង**ថាដូច្នោះ ខ្លាច**ចូឆ្វ**មិនអត់នឹងក្រោធខឹងឲ្យសម្លាប់**យីអេង**នោះ **ខុងយ៉ុង**ក៏គំនាប់**ចូឆ្វ**ហើយថា កាលពីដើមខ្ញុំបាទឃើញថា **យីអេង**ជាមនុស្សមានសតិបញ្ញាទើបបបួលមកដើម្បីនឹងឲ្យទៅបញ្ចុះបញ្ចូល**ឡៅពៀវ** ឥឡូវ**យីអេង**និយាយទ្រគោះមើលងាយលោកជាច្រើនហួសពេក ទោសនោះដល់ស្លាប់ ខ្ញុំបាទសុំជីវិតទុកម្តងចុះ។ **ចូឆ្វ**បានស្តាប់**ខុងយ៉ុង**និយាយក៏សួរទៅ**យីអេង**ថា ទោសដែលខ្លួនបានពោលប្រមាថមើលងាយដល់យើងនោះ យើងលើកលែងចោលហើយ តែខ្លួន**អួតអាង**ថាមានតម្រិះប្រាជ្ញាល្អនោះ យើងនឹងប្រើឲ្យទៅនិយាយបញ្ចុះបញ្ចូល**ឡៅពៀវ**ចៅហ្វាយស្រុកកេងជីវ បើបានការនឹងឲ្យបំណាច់រង្វាន់ ហើយនឹងតាំងខ្លួនឲ្យធ្វើនាហ្មឺនធំ។ **យីអេង**មិនព្រមទទួលពាក្យ**ចូឆ្វ**ប្រើ **ចូឆ្វ**ឃើញ**យីអេង**ធ្វើព្រងើយកន្តើយ ក៏ថយខ្លួនទៅខ្សឹបប្រាប់**ស៊ុនហុក**និងនាហ្មឺនទាំងពួងថា ឲ្យទៅរៀបតុតាំងនៅទ្វារទិសខាងកើតឲ្យស្រេច បើឃើញ**យីអេង**ចេញទៅដល់ទ្វារស្រុកកាលណា ត្រូវនាំគ្នាសែនបញ្ជូនឲ្យចេញទៅផុតដែនស្រុកទៅចុះ។

**ស៊ុនហុក** និងនាហ្មឺទាំងពួងក៏ត្រូវទៅរៀបតុតាំងពលិការទុកជាស្រេចតាមពាក្យ**ចូឆ្វ**បង្គាប់ ហើយ**ស៊ុនហុក**និយាយនឹងនាហ្មឺនទាំងពួងថា បើយើងសែនបញ្ជូនហើយ អ្នកទាំងឡាយកុំបីនិយាយសាកសួរ**យីអេង**ថាប្រការម្តេចឡើយ។

**ចូឆ្វ**ក៏និយាយនឹង**យីអេង**ទៀតថា បើខ្លួនមិនព្រមទៅ យើងត្រូវសម្លាប់ភរិយាបុត្ររបស់ខ្លួនឲ្យអស់។ ពេលនោះ**យីអេង**ក៏ព្រមទទួលពាក្យថានឹងចេញទៅបញ្ចុះ

បញ្ជូល**ឡៅពៀវ**។ **ចូឆូ**ក៏បង្គាប់ឲ្យយកសេះមួយមកឲ្យ**យីអេង**ជិះ ហើយឲ្យទាហានពីរនាក់កាន់កាប់ទៅជាមួយនឹង**យីអេង**ផង។ ឯ**យីអេង**និងទាហានពីរនាក់ក៏ជិះសេះនាំគ្នាទៅដល់ទ្វារស្រុកទិសខាងកើត មិនបានឃើញនាហ្មឺនទាំងពួងចំអកជំទយដូចម្តេច **យីអេង**ចុះពីលើសេះចូលទៅឈរកណ្តាលទីប្រជុំនាហ្មឺនទាំងពួង ហើយ**យីអេង**ក៏ធ្វើជាយំ។ **ស៊ុនហុក**មិនបានដឹងកល**យីអេង**ក៏សួរថា មហាឧបរាជប្រើខ្លួនឲ្យទៅជារាជការ ហេតុម្តេចបានជាឈរយំស្រែកដូច្នេះ? **យីអេង**ឆ្លើយតបថា យើងយល់ឃើញអ្នកទាំងអស់គ្នា ឧបមាបីដូចជាសាកអសុភ យើងដើរចូលមក ដូចជានៅកណ្តាលអសុភ ទើបមានសេចក្តីអាណិតយំស្រក់ទឹកភ្នែកដូច្នេះ។

**ស៊ុនហុក**និងមន្ត្រីទាំងពួង លុះបានឮ**យីអេង**និយាយដូច្នោះក៏ឆ្លើយតបថា ដែលថាខ្លួននឹងជាអសុភនោះ ខ្លួនអ្នកឯងក៏ជាខ្មោចឥតក្បាលដែរ។ មន្ត្រីទាំងនោះក៏នាំគ្នាខឹងច្រឡោត ហូតគ្រប៊ីប្រុងនឹងកាប់**យីអេង**។ **ស៊ុនហុក**ក៏ហាមឃាត់ថា **យីអេង**នេះឧបមាដូចជាសត្វតិរច្ឆានទៅហើយ អ្នករាល់គ្នានឹងមកប្រកាន់ទោសសម្លាប់វាចេញនោះ គ្មានប្រយោជន៍អ្វីសោះ នាំឈាមប្រឡាក់គ្រប៊ីទេ។ **យីអេង**ឆ្លើយថា ខ្លួនយើងមានសេចក្តីខឹងនិងមិនខឹងគង់នៅចេះនិយាយត្រឹមត្រូវ ហេតុម្តេចអ្នកឯងដំណាលថាយើងជាសត្វតិរច្ឆាន? ឯអ្នករាល់គ្នាឧបមាដូចសត្វមមាចមិនខ្លាចគំនរភ្លើងនាំគ្នាហើរចូលទៅក្នុងភ្លើងនោះ ក៏នឹងដល់នូវសេចក្តីស្លាប់។ នាហ្មឺនទាំងអស់ស្តាប់ហើយក៏ខឹងខ្លាំងណាស់ តែហាមប្រាមគ្នាឲ្យនៅស្ងៀម ហើយតាំងអុជទៀនធូបសែនបណ្តេញ**យីអេង**ឲ្យចេញទៅ ហើយក៏នាំគ្នាត្រឡប់មកផ្ទះវិញ។

**យីអេង**និងទាហានពីរនាក់ ក៏នាំគ្នាទៅដល់ស្រុកកេងជីវ ទើបចូលទៅនិយាយនឹង**ឡៅពៀវ** តាមដែល**ចូឆូ**ឲ្យទៅនិយាយបញ្ចុះបញ្ចូល ហើយ**យីអេង**

និយាយអួតចេះដឹងលើកខ្លួនបន្ទាបគេ ធ្វើកិរិយាមើលងាយ**ឡៅពៀវ**ថា ជាមនុស្សល្ងង់មិនមានតម្រិះប្រាជ្ញា។ **ឡៅពៀវ**ឃើញកិរិយា**យីអេង**ចរចាមើលងាយដូច្នេះក៏ខឹងណាស់ តែគិតទប់ចិត្តបាន ព្រោះចិត្ត**ឡៅពៀវ**នោះ ជាមនុស្សធូរទូលាយរួសរាយរាប់អានអ្នកទាំងពួង ហើយនិយាយនឹង**យីអេង**ថា ដែល**ចូឆូ**ប្រើឲ្យអ្នកឯងមកនិយាយបញ្ចុះបញ្ចូលយើង ៗនៅមិនទាន់ចុះចិត្តទេ បើកាលណាអ្នកឯងទៅនិយាយបញ្ចុះបញ្ចូល**ហាងច**ចៅហ្វាយស្រុកកាំងហែ ព្រមល្មមចុះចូលទៅនឹង**ចូឆូ**ហើយ យើងនឹងចុះចូលព្រមផង។ **យីអេង**ក៏លា**ឡៅពៀវ**ទៅស្រុកកាំងហែទៀត។

ឯទីប្រឹក្សាទាំងពួងនិយាយនឹង**ឡៅពៀវ**ថា **យីអេង**ពោលទ្រគោះមើលងាយលោកខ្លាំងណាស់ ហេតុម្តេចបានជាលោកមិនសម្លាប់ចេញ? **ឡៅពៀវ**តបថា យើងដឹងដំណឹងថា **យីអេង**នេះមានតម្រិះប្រាជ្ញា តែជាមនុស្សគ្មានអធ្យាស្រ័យសោះ កាលនៅក្រុងហ៊ូតោនោះ ក៏បានពោលទ្រគោះមើលងាយ**ចូឆូ**ជាច្រើនលើក **ចូឆូ**ឧស្សាហ៍អត់ទ្រាំសង្កត់ចិត្តមិនបានសម្លាប់**យីអេង** ព្រោះវអែងខ្លាចមនុស្សទាំងពួងនឹងគរហានិន្ទា ប្រការមួយទៀត បើមានអ្នកឯណាចូលមកយកអាសាធ្វើការជាមួយផង ក៏រមែងស្ទើរចិត្តដ្បិតឃើញសម្លាប់មនុស្សល្អ បានជា**ចូឆូ**ក្លែងប្រើ**យីអេង**មកបញ្ចុះបញ្ចូលយើង ៗត្រូវក្លែងឲ្យ**យីអេង**ទៅបញ្ចុះបញ្ចូល**ហាងច** ព្រោះ**ហាងច**ចិត្តស្រាលរហ័សគ្មានអ្វីទប់ បើ**យីអេង**ទៅនិយាយទ្រគោះបោះបោកឲ្យ**ហាងច**ប្រការម្តេច **ហាងច**ក៏នឹងសម្លាប់**យីអេង**មិនខាន បើដំណឹងនេះដឹងទៅដល់**ចូឆូ**កាលណា ឃើញថា **ចូឆូ**នឹងកោតខ្លាចគំនិតយើងថា យើងដឹងដល់គំនិត**ចូឆូ**។

ទីប្រឹក្សាទាំងពួងក៏សរសើរ**ឡៅពៀវ**ថា មានប្រាជ្ញាឈ្លាសវៃស្រដីថា លោកគិតនេះត្រូវល្អណាស់។ ខណៈនោះ មានបម្រើ**អ៊ួនសៀវ**កាន់សំបុត្រមកឲ្យ**ឡៅពៀវ**

សេចក្ដីថា “ឲ្យ**ឡៅពៀវ**ជួយគិតការទំនុកបម្រុងផែនដី”។ **ឡៅពៀវ**ក៏ប្រឹក្សានឹងសេនាទាហានទាំងពួងថា **ចូឆូ**និង**អ៊ួនសៀវ**ជាសត្រូវនឹងគ្នា ឥឡូវ**ចូឆូ**និង**អ៊ួនសៀវ**ឲ្យមកបញ្ចុះបញ្ចូលយើងទាំងសងខាង តើអ្នកទាំងពួងនឹងយល់ឃើញប្រការម្ដេច?

**ហាន់សុង**ឆ្លើយថា **ចូឆូ**និង**អ៊ួនសៀវ**គ្រានេះជាទោសទាស់ធ្វើសង្គ្រាមនឹងគ្នា បើលោកមិនចូលទៅខាងណា នឹងគិតឲ្យជាប្រយោជន៍ចូរមើលកលការ បើឃើញខាងណាភ្លាត់ចំណាប់ ត្រូវយើងលើកកងទ័ពទៅព្រួតវាយខាងនោះយកស្រុកឲ្យបាន តែខ្ញុំបាទខ្លាចក្រែងនៅខមួយថា **ចូឆូ**នេះមានសតិបញ្ញាច្រើនណាស់ ឈ្លាសយល់ទាំងក្បួនពិជ័យសង្គ្រាមស្ទាញស្ទាត់ជាង**អ៊ួនសៀវ** ហើយចេះចិញ្ចឹមមនុស្សរក្សាល្អមានលក្ខណៈតាមវិជ្ជានិងថ្វីដៃមនុស្សទាំងពួងក្នុងផែនដី ក៏ចុះចូលទៅនៅនឹង**ចូឆូ**ជាច្រើនមិនដាច់សោះ ខ្ញុំបាទយល់ឃើញថា**ចូឆូ**នោះនឹងធ្វើការសឹកសង្គ្រាមគង់មានជ័យជម្នះ**អ៊ួនសៀវ**មិនខាន បើ**ចូឆូ**បានស្រុកគីជីវហើយ មុខជាលើកកងទ័ពទៅវាយស្រុកធំៗខាងទិសខាងកើត រហូតដល់ស្រុកកាំងតាំង ទោះយ៉ាងណាក៏តទល់នឹង**ចូឆូ**មិនបាន សូមឲ្យលោកស្ម័គ្ររាប់អានចូលទៅខាង**ចូឆូ**ចុះ មុខជា**ចូឆូ**នឹងទំនុកបម្រុងលោកជាប្រក្រតីតទៅ។

**ឡៅពៀវ**ឆ្លើយថា បើដូច្នោះចូរអ្នកចេញទៅស៊ើបស័ព្ទស្ដាប់ការណ៍ក្នុងស្រុកហ៊ូតោចុះ បើដឹងការណ៍យ៉ាងណាហើយ ចូរអ្នកវិលត្រឡប់មកប្រាប់យើង ៗនឹងបានត្រិះរិះគិតការណ៍នេះតទៅទៀត។ **ហាន់សុង**ជម្រាបថា ដែលលោកនឹងប្រើឲ្យទៅយ៉ាងម្ដេច ខ្ញុំបាទមិនទទឹងនឹងប្រសាសន៍ទេ ខ្លាចតែព្រះចៅ**ហៀនតេ**នឹងជប់លៀងឲ្យខ្ញុំធ្វើជានាហ្មឺនខាងក្នុង នឹងមិនបានត្រឡប់មកជាភឿនស្លាប់រស់ជាមួយនឹងលោក មុខជាលោកមានសេចក្ដីសង្ស័យនឹងខ្ញុំបាទ។ **ឡៅពៀវ**តបថា ដែលអ្នក

និយាយដូច្នេះគួរហើយ តែថាទោះបីយើងនឹងនៅឆ្ងាយពីគ្នាយ៉ាងណា ក៏ត្រូវតែមានចិត្តស្រឡាញ់គ្នាយ៉ាងជិតស្និទ្ធដូចជីវិតមួយ ដែលអ្នកនឹងទៅនោះ បើបានដឹងកិច្ចរាជការអ្វីៗខ្លួនមិនបានមក ក៏ត្រូវផ្ញើសំបុត្រលិខិតមកដល់យើងឲ្យដឹង ដើម្បីនឹងបានគិតការតទៅ។

**ហាន់សុង**ក៏លា**ឡៅពៀវ**ទៅស្រុកក្រុង លុះដល់ហើយក៏ចូលទៅគំនាប់**ចូឆ្វ** ៗ ឃើញ**ហាន់សុង**ទៅដល់ក៏ទទួលដោយអំណរគួរសមណាស់ សាកសួរសុខទុក្ខយ៉ាងស្និទ្ធស្នាល ហើយតាំងឲ្យធ្វើជានាហ្មឺនខ្ញុំរាជការក្នុងព្រះចៅ**ហៀនតេ** ហើយឲ្យស្រុកឡេងឡេឡើងស្ដាប់បង្គាប់**ហាន់សុង**។ **ស៊ុនហុក**ទើបចូលមកខ្សឹបសួរ**ចូឆ្វ**ថា ខ្ញុំបាទឃើញថា**ឡៅពៀវ**ប្រើ**ហាន់សុង**ឲ្យមកស៊ើបស្ដាប់ការងារសម្ងាត់ ខ្លួន**ហាន់សុង**មិនទាន់មានគុណបំណាច់អ្វីនឹងលោកសោះ ហេតុម្ដេចបានជាលោកតាំង**ហាន់សុង**ឲ្យធ្វើនាហ្មឺនបានខេត្តឡេងឡេងឡើងស្ដាប់បង្គាប់? ប្រការមួយ**យីអេង**ដែលទៅបញ្ចុះបញ្ចូល**ឡៅពៀវ**នោះ ក៏នៅមិនទាន់បានសេចក្ដីអ្វីមកដល់លោក ៗមិនបានសួរការណ៍នេះដល់**ហាន់សុង**សោះ។

**ចូឆ្វ**តបថា "**យីអេង**នោះអាក្រក់ជួជាតិប្រមាថមើលងាយយើងជាច្រើន យើងមានចិត្តខឹងក្ដៅនៅដរាប បើនឹងសម្លាប់វាចេញមនុស្សទាំងពួងក៏គរហានិន្ទាថា យើងមានវាសនាធ្វើកំហែងអ្នកតូច បានជាយើងប្រើឲ្យទៅបញ្ចុះបញ្ចូល**ឡៅពៀវ** ប្រាថ្នានឹងខ្ចីដៃ**ឡៅពៀវ**សម្លាប់**យីអេង**ចេញ ដែលនឹងសួរដំណឹងនោះ ក៏មិនជាការប្រយោជន៍អ្វី" ហើយ**ចូឆ្វ**ក៏បង្គាប់**ហាន់សុង**ឲ្យវិលទៅស្រុកកេងជីវវិញ ឲ្យបញ្ចុះបញ្ចូល**ឡៅពៀវ**មកចូលធ្វើរាជការនឹងយើងឲ្យបាន។

**ហាន់សុង**ទទួលពាក្យ**ចូឆ្វូ**ហើយ ក៏លាត្រឡប់ទៅស្រុកកេងជីវ លុះទៅដល់ហើយក៏អធិប្បាយរឿងដែល**ចូឆ្វូ**និយាយ នឹងតាំងខ្លួនឲ្យធ្វើនាហ្មឺននោះឲ្យ**ឡៅពៀវ**ស្តាប់គ្រប់ប្រការហើយថា **ចូឆ្វូ**នោះមានចិត្តធូរទូលាយរួសរាយរាប់អានមនុស្សទាំងពួង គួរណាស់លោកនឹងចូលទៅធ្វើរាជការជាមួយផង សូមឲ្យលោកចាត់យកសំបុត្ររបស់លោកចូលទៅថ្វាយជាខ្ញុំព្រះចៅ**ហៀនតេ** នឹងបានធ្វើរាជការជានាហ្មឺនតទៅ។ **ឡៅពៀវ**បានឮដូច្នោះក៏ខឹងណាស់និយាយថា "ខ្លួនមិនយកសេចក្តីអាថ៌កំបាំងរបស់យើងទៅប្រាប់**ចូឆ្វូ**ហើយឬ? បានជា**ចូឆ្វូ**តាំងឲ្យខ្លួនធ្វើជានាហ្មឺន ដែលខ្លួនគិតធ្វើការយ៉ាងនេះ ក៏យើងថាទុរយសនឹងយើង" ហើយបង្គាប់ឲ្យចាប់ខ្លួន**ហាន់សុង**ទៅសម្លាប់។ ហាន់សុងឆ្លើយថា ខ្ញុំបាទនឹងគិតប្រទូសរ៉ាយចំពោះលោកក៏ទេ នឹងបានលះបង់ចោលលោកក៏ទេ ហេតុម្តេចលោកត្រឡប់លះបង់ចោលខ្ញុំបាទវិញ?

**កេងលៀង**បានឮដូច្នោះក៏និយាយនឹង**ឡៅពៀវ**ថា កាលលោកប្រើ**ហាន់សុង**ឲ្យទៅនោះ **ហាន់សុង**ក៏បានឆ្លើយជម្រាបលោកទុកថា ដែលលោកឲ្យចូលទៅស្រុកក្រុងក្រែងលោកនៅមានសេចក្តីសង្ស័យ លោកក៏បានថាមិនមានសង្ស័យអ្វីទេ បានជា**ហាន់សុង**ទៅ ឥឡូវ**ហាន់សុង**ត្រឡប់មកវិញ ជូនដំណឹងកិច្ចរាជការឲ្យលោកជ្រាបតាមពិត ដែលលោកមកប្រើឲ្យគេសម្លាប់**ហាន់សុង**ចេញ មិនគួរសោះ។ **ឡៅពៀវ**យល់ថាខ្លួនគិតខុស ក៏ព្រមលើកទោស**ហាន់សុង**។ ខណៈនោះ ទទួលបម្រើសេះមកប្រាប់**ឡៅពៀវ**ថា **យីអេង**ដែលទៅបញ្ចុះបញ្ចូល**ហាងច**ចៅហ្វាយស្រុកកាំងហែនោះ **ហាងច**រៀបតុលៀងអាហារឲ្យ**យីអេង**តាមទំនៀម លុះសេពសុរាស្រវឹងផងគ្នា **ហាងច**ក៏សួរ**យីអេង**ថា ក្នុងក្រុងហ៊ូតោនោះ អ្នកបានឃើញនាហ្មឺនណា

មានសតិបញ្ញាជ្រៅទូលាយខ្លះ? **យីអេង**ប្រាប់ថា **ខុងយ៉ុង**និង**អៀវពីវ** ពីរនាក់នេះ សុទ្ធតែមានតម្រិះចេះគិតគូរគ្រាន់បើ ក្រៅពីនេះមិនឃើញមាននរណាសោះ។ **ហាងច**ថាតម្រិះ**ខុងយ៉ុង**និង**អៀវពីវ**ហើយនិងតម្រិះយើងនេះ អ្នកឯងឃើញជាយ៉ាងម្ដេចពីគ្នាខ្លះ? **យីអេង**ថា តម្រិះអ្នកឯងនេះឧបមាដូចជាដុំថ្មនៅក្នុងខ្ទមទេពារ័ក្ស ទោះបីមានគេមកសែនព្រេនថាប្រការម្ដេច ដុំថ្មនោះក៏មិនចេះឆ្លើយតនឹងអ្នកដែលបួងសួងនោះឡើយ ឧបមាដូចសំណាកមួយកំណាត់។ **ហាងច**បានឮដូច្នោះក៏ខឹងខ្លាំងណាស់ ហូតគ្រប៊ីចេញមកក៏លើកកាប់**យីអេង** ៗជេរប្រទេច**ហាងច**ទាល់តែដាច់ខ្យល់ស្លាប់។ **ឡៅពៀវ**បានស្ដាប់ដូច្នោះក៏មានចិត្តអាណិត**យីអេង**ណាស់ ចេញបង្គាប់ឲ្យទៅរៀងសង្ការសពកប់**យីអេង** ទុកនៅតំបន់អើងប៊ូជីវ ឯ**ឡៅពៀវ**នោះក៏មិនបានគិតនឹងចូលទៅខាង**ចូឆូ**ទេ។

កាល**ចូឆូ**ឮដំណឹងថា**យីអេង**ស្លាប់ ក៏អស់សំណើចហើយនិយាយថា **យីអេង**នេះជាមនុស្សអាក្រក់ណាស់ មាត់របស់វាជាអាវុធសម្លាប់ខ្លួនឯង។ ខណៈនោះ**ចូឆូ**នៅចាំស្ដាប់ដំណឹង**ឡៅពៀវ** តែមិនបានជាប្រការម្ដេចសោះ ទើបប្រមូលសេនាទាហានទាំងពួងនឹងចេញទៅវាយយកស្រុកកេងជីវ។ **ស៊ុនហុក**ក៏ហាមឃាត់**ចូឆូ**ថា **អ៊ួនសៀវ**មានកម្លាំងច្រើនណាស់ ទាំង**ឡៅពី**ក៏ប្រែគំនិតចិត្តចេញពីលោកទៅបានជាចូលគំនិតគ្នានឹង**អ៊ួនសៀវ** ត្រូវតែគិតបង្ក្រាប**អ៊ួនសៀវ**និង**ឡៅពី**ឲ្យរាបទាបសិន សឹមលើកទ័ពទៅប្រាបប្រាម**ឡៅពៀវ**ក៏នឹងបានដោយងាយ។ **ចូឆូ**យល់ឃើញត្រូវ ក៏គិតថា នឹងលើកកងទ័ពទៅច្បាំងនឹង**អ៊ួនសៀវ, ឡៅពី** តែសេចក្ដីនេះ**ចូឆូ**មិនទាន់ប្រឹក្សានឹងព្រះចៅ**ហៀនតេ** ក៏បង្អង់នៅស្ងៀម។ លុះព្រះចៅ**ហៀនតេ**ស្ដេចទៅគង់ក្នុងក្រុងហ៊ូតោបានប្រាំព្រះវស្សាហើយ ខណៈនោះជាទេសកាលខែមាឃចូលឆ្នាំថ្មី សេនា

ទាហាននិងនាហ្មឺនមុខមន្ត្រីទាំងខ្ញុំរាជការទាំងឡាយ គាត់តែងធូបទាន មានគ្រឿងប្រដាប់ចូលទៅក្រាបបង្គំគាល់ព្រះចៅហៀនតេតាមប្រវេណី នាហ្មឺននិងមន្ត្រីទាំងពួងឃើញ**ចូឆូ**ធ្វើឫកពារមិនកោតខ្លាច មិនចង់ថ្វាយដល់ព្រះចៅ**ហៀនតេ** នាហ្មឺនដែលមានចិត្តសុចរិតទៀងត្រង់នឹងផែនដី ក៏ខឹងក្តៅនឹង**ចូឆូ**ជាច្រើន លុះព្រះចៅ**ហៀនតេ**ស្តេចយាងចូលក្នុងដំណាក់វិញ **ចូឆូ**និងបណ្តាខ្ញុំរាជការតូចធំក៏នាំគ្នាត្រឡប់ទៅផ្ទះ។ ឯ**តាំងស៊ីន** តាំងពីក្រោយ**ឡៅពី**លើកទ័ពចេញទៅ ទាំង**ម៉ាថេង**ក៏លើកកងទ័ពទៅក្រុងសែលៀងទៀត **តាំងស៊ីន**និង**ជូហុក, ជូឡាន់, តាំងអ៊ិប** ក៏តាំងលបគិតគ្នារាល់ៗថ្ងៃ ដើម្បីនឹងរំលាយបំផ្លាញ**ចូឆូ** តែមិនសមតាមសេចក្តីប្រាថ្នា ទាំងអស់គ្នាក៏មានបរិវិតក្កទុក្ខទោមនស្សមិនដេក មិនស៊ី គិតតែអង្គុយ **តាំងស៊ីន**នោះក៏បណ្តាលជំងឺក្តៅក្រហាយដេកឈឺក្នុងផ្ទះ។ ព្រះចៅ**ហៀនតេ**ទ្រង់ជ្រាបថា **តាំងស៊ីន**មានជំងឺឈឺ ក៏ត្រាស់ប្រើ**កៀតប៉ឹង**ជាពេទ្យហ្លួងឲ្យទៅព្យាបាលអាការរោគ**តាំងស៊ីន**។ **កៀតប៉ឹង**ព្យាបាលទាំងពេលយប់ពេលថ្ងៃ ឃើញ**តាំងស៊ីន**ដេកដកដង្ហើមធំ ក៏ដឹងថាមិនមែនជំងឺធម្មតាគឺរោគឈឺចិត្ត **កៀតប៉ឹង**មិនអាចសួរថាប្រការម្តេច លុះព្រឹកឡើងថ្ងៃមួយនោះ **កៀតប៉ឹង**ក៏និយាយនឹង**តាំងស៊ីន**ថា ថ្ងៃនេះខ្ញុំបាទសូមលាលោកទៅស្អែកសឹមត្រឡប់មកវិញ។ **តាំងស៊ីន**និយាយឃាត់ថា ថ្ងៃនេះអ្នកកុំអាលទៅឡើយនៅដេកនឹងយើងមួយយប់សិន **តាំងស៊ីន**ក៏ឲ្យរៀបតុលៀងអាហារ ហើយអញ្ជើញផឹកស្រាជាមួយគ្នា។ **តាំងស៊ីន**បរិភោគកាលណា ក៏គិតពីក្តីដែលគិតទុកនោះឲ្យព្រួយរំខានពន់ប្រមាណណាស់ ធ្វេសតែខ្លួនលក់លើកៅអីភាំងទៅ យល់សប្តិឃើញថា**ជូហុក, ជូឡាន់, តាំងអ៊ិប, ង៉ោហ្លួន** បួននាក់នេះនាំគ្នាមករក**តាំងស៊ីន**ឯផ្ទះ ហើយប្រាប់ថា ឥឡូវ**អ៊ួនសៀវ** និង**ឡៅពី**លើកទាហានដប់ម៉ឺនចូលមកពីខាងទិសខាងត្បូង

**ម៉ាថេងនិងហាន់ស៊ុយ**លើកទាហានចិតសិបពីរម៉ឺនចូលមកពីទិសខាងជើង នឹងមកវាយយកស្រុកហ៊្វូតោ ឯ**ចូឆ្វូ**ក៏លើកទាហានចេញទៅតទល់ខាងក្រៅកំពែងស្រុកទាំងពីរតំបន់ ក្នុងស្រុកនោះនៅតែ**ចូឆ្វូ**និងកូនទាហានប្រមាណប្រាំបួនទៅដប់នាក់ **តាំងស៊ីន**និងមន្ត្រីបួននាយក៏ពាក់ក្រើសជិះសេះកាន់អាវុធគ្រប់ដៃ ហើយលើកទាហានទៅដល់មុខផ្ទះនោះ ឃើញ**ចូឆ្វូ**កំពុងអង្គុយផឹកស្រា **តាំងស៊ីន**ក៏បរសេះតម្រង់ចូលទៅយកគ្រប៊ីកាប់ក្បាល**ចូឆ្វូ** ដាច់ធ្លាក់ពីលើស្មាស្លាប់ ហើយ**តាំងស៊ីន**ជេរ**ចូឆ្វូ**អាក្បត់។ ខណៈនោះ**តាំងស៊ីន**ក៏មានចិត្តត្រេកអរសប្បាយ ភ្ញាក់ដឹងខ្លួនហើយក៏នៅជេរ**ចូឆ្វូ**មិនឈប់មាត់។

**កៀតប៉ឹង**បានឃើញ**តាំងស៊ីន**មមើរជេរ**ចូឆ្វូ**ដូច្នោះ ក៏ដឹងថា **តាំងស៊ីន**មានចិត្តស្អប់**ចូឆ្វូ**ប្រុងនឹងប្រទូសរ៉ាយ**ចូឆ្វូ**។ **កៀតប៉ឹង**ក៏ជជីកសួរ**តាំងស៊ីន**ថា លោកប្រុងនឹងធ្វើអន្តរាយមហាឧបរាជឬ? ខ្ញុំនឹងនាំយកសេចក្ដីនេះទៅប្ដឹងឲ្យមហាឧបរាជជ្រាប។ **តាំងស៊ីន**បានឮ**កៀតប៉ឹង**ថាដូច្នោះ ក៏ភ័យស្លុតស្មារតីមិនឆ្លើយតបថាអ្វីសោះ។ **កៀតប៉ឹង**ឃើញ**តាំងស៊ីន**ភ័យខ្លាចដូច្នោះក៏និយាយថា លោកកុំភ័យខ្លាច ខ្ញុំបាទថាដូច្នោះព្រោះចង់ពិសោធន៍ចិត្តលោកទេ សព្វថ្ងៃនេះខ្ញុំបាទគ្រាន់តែធ្វើពេទ្យ តែដួងចិត្តគិតនឹងតបស្នងគុណព្រះចៅ**ហៀនតេ**ជាដរាប ដែលខ្ញុំបាទមកនៅព្យាបាលរោគលោកយូរថ្ងៃ ហើយមិនបានដឹងប្រាកដថា រោគលោកនេះកើតអំពីអ្វី ឃើញលោកចេះតែដកដង្ហើមធំរឿយៗ ខ្ញុំបាទក៏មិនអាចហ៊ានសួរ ឥឡូវខ្ញុំបាទបានឃើញលោកមមើជេរ**ចូឆ្វូ** ក៏ត្រូវគ្នានឹងដកដង្ហើមធំ ឯការដែលលោកគិតទុកប្រការម្ដេចនោះ ចូរលោកកុំលាក់ឡើយ ប្រាប់ខ្ញុំបាទឲ្យត្រង់មកចុះ បើល្មមខ្ញុំបាទនឹងទទួលធ្វើបាន ខ្ញុំបាទក៏ទទួលយកអាសា។

**តាំងស៊ីន**បានឮ**កៀតប៊ីង**និយាយដូច្នោះក៏យំហើយថា យើងបារម្ភតែចិត្តអ្នកនឹងមិនដូចមាត់និយាយ ការដែលយើងគិតទុកនឹងខូចអសារទៅ។ **កៀតប៊ីង**ឆ្លើយថា "បើលោកសង្ស័យខ្ញុំបាទនឹងធ្វើឲ្យជាបន្ទាល់ច្បាស់" និយាយហើយ**កៀតប៊ីង**ក៏យកគ្រប៊ីកាត់ម្រាមដៃ ឲ្យលោហិតហូរចេញមកដាក់លាយនឹងស្រាក្នុងពែង ហើយលើកឡើងស្បថសច្ចាថា "ខ្ញុំបាទមានចិត្តសុចរិតត្រង់នឹងផែនដី បើមានសេចក្តីវៀចក្តែងបញ្ឆោតលោក ក៏សូមឲ្យជីវិតខ្ញុំបាទអន្តរាយដោយអាវុធផ្សេងៗចុះ" លុះសច្ចាហើយ **កៀតប៊ីង**ក៏ផឹកអស់ទៅ **តាំងស៊ីន**បានឃើញ**កៀតប៊ីង**ស្បថសច្ចាជាទីអស្ចារ្យដូច្នោះក៏អស់សង្ស័យ ទើបយកឡាយព្រះហស្តមកបង្ហាញឲ្យ**កៀតប៊ីង**មើល ហើយថា "ដែលយើងរួមគំនិតគិតគ្នានឹងកម្ចាត់**ចូឆូ**ចេញនោះ ប្រាំពីរនាក់ទាំងខ្លួនយើង ឥឡូវ**ឡៀ**ពីនិង**ម៉ាថេង**ក៏ចេញពីស្រុកក្រុងអស់ទៅហើយ នៅតែយើងនិងមន្ត្រីមានឈ្មោះបួននាក់បានជាគិតការមិនផ្តុះផ្តោយ យើងក៏ទៅជាឈឺព្រោះហេតុនេះ។ **កៀតប៊ីង**ឃើញឡាយព្រះហស្តព្រះចៅ**ហៀនតេ** ហើយស្តាប់ពាក្យ**តាំងស៊ីន**និយាយដូច្នោះ ក៏ឆ្លើយតបថា ការដែលគិតនឹងធ្វើអន្តរាយ**ចូឆូ**នោះ ទុកជាកិច្ចធុរៈលើខ្លួនខ្ញុំបាទចុះនឹងទទួលយកអាសា។

**តាំងស៊ីន**សួរថា អ្នកនឹងគិតធ្វើយ៉ាងណា? **កៀតប៊ីង**ក៏ឆ្លើយថា **ចូឆូ**នោះរមែងមានរោគឈឺក្បាល ហៅខ្ញុំបាទទៅមើលជានិច្ច បើ**ចូឆូ**ឈឺទៀតវេលាណា ខ្ញុំបាទនឹងទៅព្យាបាលប្រកបថ្នាំឲ្យផឹកដាក់ថ្នាំបំពុលបញ្ចូលផង បើ**ចូឆូ**ផឹកហើយគង់នឹងស្លាប់ ការណ៍ដែលខ្ញុំបាទគិតនេះឃើញថាមិនលំបាកដល់សេនាទាហាន។ **តាំងស៊ីន**បានឮដូច្នោះ ក៏សោមនស្សក្នុងចិត្តទើបឆ្លើយថា អ្នកមានសេចក្តីសត្យកតញ្ញូនឹងម្ចាស់

ផែនដីប្រាកដ រាជសម្បត្តិនេះនឹងមិនអន្តរាយឡើយ គុណគាប់ដ៏ប្រសើរនឹងមានដល់ខ្លួនអ្នកទៅឯមុខ។ លុះវេលាព្រឹក **កៀតប៊ុង**ក៏លា**តាំងស៊ីន**ត្រឡប់ទៅផ្ទះវិញ។

ខណៈនោះ**តាំងស៊ីន**មានសេចក្តីសប្បាយរីករាយចិត្តណាស់ **ជំងឺ**ឈឺថ្កាត់ទាំងប៉ុន្មានក៏រលាយបាត់សូន្យអស់ទៅ ទើបដើរចុះទៅមើលសួនផ្កា ក្រឡេកឃើញ**ខេងតង**ជាបាវស្និទ្ធអង្គុយនិយាយគ្នានឹងនាង**អ៊ិនអេង** ដែលជាភរិយាបន្ទាប់របស់**តាំងស៊ីន**ក្នុងទីស្ងាត់ **តាំងស៊ីន**ខឹងណាស់ ហៅមនុស្សបម្រើឲ្យចាប់ខ្លួន**ខេងតង**បាន ហើយហូតគ្រប៊ីគិតនឹងកាប់**ខេងតង**ឲ្យស្លាប់។ ភរិយាធំ**តាំងស៊ីន**ឃើញវីវរឡើង ក៏ចុះទៅឃាត់សុំជីវិត**ខេងតង**។ **តាំងស៊ីន**ក៏ឲ្យវាយ**ខេងតង**យ៉ាងទម្ងន់ហើយដាក់ច្រវាក់ទុក។ លុះវេលាពាក់កណ្តាលអាធ្រាត្រ **ខេងតង**ក៏កាច់សោរត់រួចចូលទៅនៅនឹង**ចូឆ្វ** យកសេចក្តីអាថ៌កំបាំងដែល**តាំងស៊ីន**គប់គិតគ្នានឹងអ្នកប្រាំនាក់នោះប្រាប់**ចូឆ្វ**គ្រប់ប្រការ។ **ចូឆ្វ**បានស្តាប់ច្បាស់ក៏ឲ្យយកខ្លួន**ខេងតង**ទៅលាក់បំពួនទុកក្នុងផ្ទះ។ ឯ**តាំងស៊ីន**នោះ លុះព្រឹកឡើងដឹងថា**ខេងតង**រត់បាត់ គិតថា ប្រហែលវារត់ទៅនៅខេត្តក្រៅ មិនបាននឹងគិតឲ្យស៊ើបសួរតាមរក។ លុះថ្ងៃមួយ **ចូឆ្វ**ក៏គិតកលឧបាយធ្វើជាឈឺក្បាល ទើបប្រើបម្រើឲ្យទៅហៅ**កៀតប៊ុង**ពេទ្យហ្លួងមករក្សារោគ បម្រើក៏ទៅហៅ**កៀតប៊ុង** ៗក៏គិតថា "អាសត្រូវរាជសម្បត្តិនឹងស្លាប់ក្នុងគ្រានេះហើយ" **កៀតប៊ុង**ចូលទៅក្នុងផ្ទះ យកថ្នាំពិសពុលលាក់ទៅជាមួយ។ **ចូឆ្វ**ឃើញ**កៀតប៊ុង**ទៅដល់ក៏គន់មើល ម្រាមដៃឃើញកំបុតមួយ សមដូចពាក្យ**ខេងតង**ប្រាប់ ក៏មិនបានសាកសួរថាម្តេច។

**ចូឆ្វ**និយាយនឹង**កៀតប៊ុង**ថា ឥឡូវយើងឈឺក្បាលខ្លាំងណាស់ ចូរអ្នកប្រកបថ្នាំកែឲ្យរសាយរោគយើងចុះ យើងនឹងឲ្យបំណាច់រង្វាន់។ **កៀតប៊ុង**ថា "លោកឈឺ

គ្រានេះ ខ្ញុំបាទនឹងប្រកបថ្នាំតែមួយយ៉ាងជូនលោកពិសា រោគលោកក៏នឹងរសាយស្រឡះ” ហើយ**កៀតប៊ុង**ក៏យកថ្នាំដាក់ក្នុងពែងដាំឲ្យរីងបន្តិច លុះឃើញ**ចូឆ្វូ**ងាកមុខចេញ ក៏យកថ្នាំពិសពុលនោះដាក់បញ្ចូល ហើយចាក់ចេញល្មមបានកន្លះពែងទើបលើកហុចទៅឲ្យ**ចូឆ្វូ**ផឹក។ **ចូឆ្វូ**ដឹងកល**កៀតប៊ុង**ក៏ធ្វើជាព្រងើយមិនបានទទួលថ្នាំនោះ។ **កៀតប៊ុង**ថា មហាឧបរាជពិសាថ្នាំនេះទៅចុះ ទាន់នៅក្តៅដើម្បីឲ្យបែកញើសខ្លះ រោគលោកក៏នឹងសះជា។ **ចូឆ្វូ**តបថា ខ្លួនអ្នកជាពេទ្យហ្លួង រមែងដឹងទម្លាប់ទំនៀមគ្រប់សព្វហើយ បើព្រះមហាក្សត្រទ្រង់ប្រឈួន ពេទ្យថ្វាយឱសថវេលាណា ត្រូវឲ្យពេទ្យនោះឬនាហ្មឺនរក្សាព្រះអង្គផៀបថ្នាំជាមុន បើមាតាបិតាឈឺ ពេទ្យប្រកបថ្នាំឲ្យផឹក ត្រូវឲ្យកូនភ្លក្សល្បងថ្នាំជាមុន ឥឡូវខ្លួនយើងជាមហាឧបរាជ ខ្លួនអ្នកជាពេទ្យធ្លាប់រាប់អានស្និទ្ធស្នាលនឹងយើង អ្នកប្រកបថ្នាំឲ្យយើងផឹក អ្នកត្រូវផឹកល្បងឲ្យយើងឃើញជាមុនសិន ទើបយើងផឹកជាក្រោយ។

**កៀតប៊ុង**តបថា ប្រសាសន៍លោកថាដូច្នេះក៏គួរណាស់ហើយ តែខ្ញុំបាទយល់ថាលោកធ្លាប់ទុកចិត្តខ្ញុំបាទពីដើម ឥឡូវលោកឈឺ ខ្ញុំបាទប្រកបថ្នាំជូនលោកពិសា លោកនឹងឲ្យខ្ញុំបាទដែលមិនឈឺទទួលទានជាមុននោះថ្នាំនេះតិចណាស់ នឹងអស់ទៅរោគលោកក៏មិនសះជា។ **ចូឆ្វូ**ក៏ធ្វើព្រងើយកន្តើយមិនព្រមទទួលផឹក។ **កៀតប៊ុង**ឃើញ**ចូឆ្វូ**រង្កៀសសង្ស័យមិនទទួលផឹកថ្នាំដូចរាល់ដង ក៏សម្គាល់ក្នុងចិត្តថា **ចូឆ្វូ**ដឹងដល់គំនិតដែលខ្លួនគិតទុក ទើបចាក់ស្ពឹកត្រចៀក**ចូឆ្វូ**ជាប់ ហើយយកពែងលើកឡើងច្រកឲ្យ**ចូឆ្វូ**ផឹក។ **ចូឆ្វូ**យកដៃទាត់ពែងធ្លាក់ពីដៃទៅ បែកកំពប់ថ្នាំទៅលើឥដ្ឋ ដោយអំណាចថ្នាំពិសនោះឥដ្ឋក៏បែកខ្មេច។ មនុស្សបម្រើទាំងពួងឃើញដូច្នោះ ក៏បបួលគ្នាចោមចូលចាប់ខ្លួន**កៀតប៊ុង**ចងជាប់។ **ចូឆ្វូ**បានចំណាប់ឃើញច្បាស់ថា **កៀតប៊ុង**

ដាក់ថ្នាំពិស ក៏និយាយថា "អញមិនមែនឈឺអ្វីទេ អញពិសោធន៍ឯងចង់ដឹងទេតើ ឥឡូវអញឃើញថាឯងប្រទូសរ៉ាយអញជាប្រាកដ" ទើបបង្គាប់ទាហានម្ភៃនាក់ឲ្យនាំខ្លួន**កៀតប៊ឹង**ទៅឯសួនច្បារ ហើយចងស្នឹងវាយ**កៀតប៊ឹង**យ៉ាងរហ័សសួរពិចារណាថា ខ្លួនឯងជាពេទ្យដែលគិតការទាំងនេះ អញក៏ឃើញថាលើសគំនិតប្រាជ្ញាឯង តើនរណាប្រើឯងឲ្យធ្វើដូច្នេះ ចូរឯងឆ្លើយប្រាប់ឈ្មោះឲ្យច្បាស់តាមត្រង់ អញនឹងលើកទោសឯង។

**កៀតប៊ឹង**ត្រូវវាយឈឺជាទម្ងន់ណាស់ ក៏មិនបានខ្លាចសេចក្តីស្លាប់ស្រែកគំហកតបថា ខ្លួនឯងធ្វើល្មើសជាខ្មាំងសត្រូវរាជសម្បត្តិ បានជាអញគិតធ្វើការដូច្នេះ មិនមែននរណាមកបង្គាប់ប្រាប់អញធ្វើទេ ព្រោះហេតុថាផែនដីសព្វថ្ងៃក្តៅគ្រប់ដើមស្មៅវល្លិឈើព្រៃទាំងពួង បានជាអញគិតសម្លាប់ឯងចេញ ទោះនរណាៗគេក៏ប្រុងតែនឹងប្រហារជីវិតឯងដូចអញដែរ តែមិនទាន់បានឱកាសនឹងធ្វើបាន ជីវិតអញនឹងស្លាប់ហើយឯងមិនត្រូវមកសួរធ្វើអ្វីឡើយ។ **ចូឆ្វ**បានឮដូច្នោះក៏ខឹងណាស់ក៏វាយ**កៀតប៊ឹង**តាំងពីព្រឹកដល់ថ្ងៃត្រង់ ទាល់តែខ្នងនោះបែករលួយហូរឈាមស្រោចអស់ទាំងខ្លួន **កៀតប៊ឹង**ក៏មិនឆ្លើយដាក់គូកន។ **ចូឆ្វ**បារម្ភក្រែង**កៀតប៊ឹង**នឹងស្លាប់សាបសូន្យរឿងរ៉ាវ ក៏ឲ្យយកខ្លួន**កៀតប៊ឹង**ទៅឃុំទុកជាមាំមួន។ លុះវេលាព្រឹកឡើង**ចូឆ្វ**ក៏បង្គាប់ឲ្យរៀបតុលៀងអាហារ ឲ្យអញ្ជើញនាហ្មឺនសព្វមុខមន្ត្រីតូចធំទៅជួបជុំបរិភោក្តា។ ឯ**ជូហុក, ជូឡាន់, តាន់អ៊ិប, ងោហ្លួន** បួននាក់នេះក៏គិតព្រមគ្នាថា បើយើងមិនទៅ**ចូឆ្វ**នឹងសង្ស័យ នាហ្មឺនទាំងបួននាក់ក៏ទៅព្រមគ្នានឹងនាហ្មឺនទាំងពួង តែ**តាំងស៊ីន**នោះឲ្យដំណឹងថាឈឺទៅមិនរួច។

ខណៈកាលនាហ្មឺនមុខមន្ត្រីទាំងពួងកំពុងបរិភោគអាហារ **ចូឆ្វ**ក៏និយាយថា “អស់លោកផឹកស្រាមិនសូវរួសរាយ យើងមានមនុស្សម្នាក់ប្លែក នឹងយកមកឲ្យអស់លោកមើលលេង” ថាហើយ ក៏ប្រើទាហានឲ្យឃុំនាំយកខ្លួន**កៀតប៊ុង**ចេញមក **ចូឆ្វ**ក៏និយាយនឹងនាហ្មឺនទាំងពួងថា “មានពួកក្បត់គប់គិតគ្នានឹងអាកំណាចម្នាក់នេះ នឹងធ្វើអន្តរាយដល់ព្រះចៅ**ហៀនតេ** ហើយធ្វើប្រទូសរ៉ាយដល់យើងផង ឥឡូវទេពតាមិនបានចូលទៅខាងមនុស្សអាក្រក់ បណ្ដាលឲ្យយើងចាប់ខ្លួនបាន យើងនឹងសួរពិចារណាវាឲ្យអស់លោកចាំស្ដាប់ចុះ” **ចូឆ្វ**ក៏ឲ្យវាយ**កៀតប៊ុង**ទៀតទាល់តែសន្លប់ ហើយឲ្យរឹតរួតធ្វើឲ្យទាល់តែដឹងខ្លួនឡើងវិញ។ **កៀតប៊ុង**នៅមិនបានញញើតខាំធ្មេញញេញញមុខសម្លក់ ហើយជេរ**ចូឆ្វ**ជាពាក្យអាស្រូវភាសផ្សេងៗ ហើយថា “ហេតុម្ដេចឯងមិនសម្លាប់អញទៅ ទុកអញធ្វើអ្វីទៀត?” **ចូឆ្វ**ថា ពីដើមវាគប់គិតគ្នានឹងពួកប្រាំមួយនាក់ ឯក្រោយឯងទៅចូលរួមគំនិតទៀត ទើបត្រូវជាប្រាំពីរនាក់ ដើមគំនិតនោះគឺឈ្មោះអ្វី? បានជាឯងមិនចង្អុរឲ្យច្បាស់។ **កៀតប៊ុង**ក៏មិនឆ្លើយតបសោះ **ចូឆ្វ**ខឹងណាស់ឲ្យវាយទៀតទើបពិចារណាសួរ **កៀតប៊ុង**រឹងតែមិនឆ្លើយដាក់ដល់ណា។

ឯ**ជូហុក**, **ជូឡាន់**, **តាន់អ៊ិប**, **ងោហួន** អង្គុយបរិភោគអាហារ ឃើញ**ចូឆ្វ**វាយពិចារណា**កៀតប៊ុង**ដូច្នោះ អ្នកទាំងបួនក៏មិនបានជាសុខ ឧបមាដូចជាគេអង្គុយលើចម្រូងបន្លាឬលើភ្លើងគុក ទាំងទឹកមុខក៏ស្លឹតស្លាំងគ្មានឈាមសោះ ចេះតែសម្លឹងមើលមុខគ្នាទៅវិញទៅមក។ **ចូឆ្វ**ឃើញ**កៀតប៊ុង**មិនឆ្លើយដាក់ដល់គូកនដូច្នោះ ក៏បង្គាប់ឲ្យយកខ្លួនទៅដាក់គុកដូចដើម។

នាហ្មឺនមុខមន្ត្រីទាំងឡាយនោះ លុះបរិភោគរួចហើយទាំងអស់គ្នាក៏លា**ចូឆ្វ**ទៅ។ **ចូឆ្វ**ទើបថា អ្នកទាំងពួងនឹងទៅក៏ទៅចុះ តែ**ជូហុក**, **ជូឡាន់**, **តាន់អ៊ិប**, **ងោហួន**

ប្អូននាក់នេះត្រូវបង្អង់នៅសិន យើងនឹងប្រឹក្សាការរាជការផង។ នាហ្មឺនទាំងប្អូនបានឮដូច្នោះក៏ស្លុតរន្ធត់ចិត្តបាត់ព្រលឹងពីក្នុងខ្លួន ចាំចិត្តនៅអង្គុយដោយខ្លាចអាជ្ញា**ចូឆូ** ៗ ក៏សួរនាហ្មឺនទាំងប្អូននាក់ថា អ្នកប្រឹក្សាការអ្វីខ្លះនៅផ្ទះ**តាំងស៊ីន**? នាហ្មឺនទាំងប្អូនឆ្លើយថា ខ្ញុំបាទនឹងបានទៅប្រឹក្សាការអ្វីនៅផ្ទះ**តាំងស៊ីន**ក៏ទេ។

**ចូឆូ**ជជីកសួរថា បើខ្លួនមិនបានទៅប្រឹក្សាគ្នានៅផ្ទះ**តាំងស៊ីន**ទេ ចុះស៊ែ្រស ដែលសរសេរអក្សរនឹងឈាមនោះ សេចក្ដីដូចម្ដេចខ្លះ? នាហ្មឺនទាំងប្អូននាក់ឆ្លើយថា ស៊ែ្រសដែលសរសេរសេចក្ដីដូចម្ដេចខ្លះនោះខ្ញុំបាទមិនបានដឹងឃើញទេ។ **ចូឆូ**ក៏បង្គាប់ឲ្យយកខ្លួន**ខេងតង** ដែលជាបាវ**តាំងស៊ីន**នោះចេញមកប្រទល់មុខគ្នា **ខេងតង**ក៏ឆ្លើយថា នាហ្មឺនទាំងប្អូននាក់នេះហើយ ដែលបានទៅរួមគំនិតគិតគ្នាលើផ្ទះ**តាំងស៊ីន**។ នាហ្មឺនទាំងប្អូនមិនទទួល **ខេងតង**ឆ្លើយថា ដើមដំបូង**ជូហុក**ទៅរក**តាំងស៊ីន** លុះ**ជូឡាន់, តាន់អ៊ិប, ងោហ្វួន, ម៉ាថេង**ឡើងទៅក្រោយ **ជូហុក**ខ្លាចក៏ស្ទុះចូលទៅពួនក្នុងរាំងនន រួច**តាំងស៊ីន**យកឡាយព្រះហស្តដែលសរសេរនឹងស៊ែ្រសនោះមកឲ្យមើល ហើយនិយាយគ្នាព្រមរួមគំនិតគិតការនោះថា នឹងធ្វើអន្តរាយដល់មហាឧបរាជ **ជូហុក**ទើបចេញមកនិយាយជាមួយគ្នាទៀត **តាំងស៊ីន**និងនាហ្មឺនទាំងប្រាំនាក់ ក៏ធ្វើសំបុត្រចុះនាមទុកជាមួយគ្នា ហេតុម្ដេចអ្នកទាំងប្អូននាក់មិនទទួល? **ជូហុក**ជម្រាប**ចូឆូ**ថា **ខេងតង**នេះលបសាហាយនឹងភរិយាតូច**តាំងស៊ីន** លុះ**តាំងស៊ីន**ចាប់បាន បានឲ្យវាយផ្ចាលរួចដាក់ច្រវាក់ទុក **ខេងតង**មានចិត្តអាឃាតព្យាបាទប្រទូសរ៉ាយមហាឧបរាជ សូមកុំឲ្យមហាឧបរាជស្ដាប់ពាក្យវាជាមនុស្សអាក្រក់។

**ចូឆូ**ថា ព្រោះខ្លួនវាមិនបានចូលគំនិតគិតជាមួយនឹងខ្លួនរាល់គ្នា បានជាខ្លួនថាវាជាមនុស្សអាក្រក់ ឯត្រង់**តាំងស៊ីន**គិតឲ្យ**កៀតប៉ឹង**យកថ្នាំពិសមកឲ្យយើងផឹក

នោះខ្លួនទាំងបួននាក់ដឹងឬឃើញដែរឬទេ? នាហ្មឺនទាំងបួនក៏ឆ្លើយថា ខ្ញុំបាទមិនបានដឹងទេ។ **ចូឆ្ន**ថា “រឿងទាំងអស់នេះ ខ្លួនមិនទទួលដឹងសោះ បើដូច្នោះយើងនឹងស៊ើបសួរតទៅទៀត បើបានសេចក្ដីដូចយើងដឹង យើងនឹងប្រហារជីវិតខ្លួនទាំងបួននាក់ចេញ” ថាហើយក៏បង្គាប់ទាហានថា វេលាយប់នេះ ឲ្យយកនាហ្មឺនបួននាក់ទៅដាក់គុកទុកឲ្យខ្ជាប់ខ្ជួន។ ទាហានក៏ចាប់ខ្លួននាហ្មឺនទាំងបួនទៅធ្វើទោសតាមបង្គាប់ចូឆ្ន។

លុះព្រឹកឡើង **ចូឆ្ន**ក៏នាំទាហានទៅសួរ**តាំងស៊ីន**នៅឯផ្ទះ **តាំងស៊ុន**ដឹងក៏ចេញមកទទួល**ចូឆ្ន**ឡើងទៅអង្គុយទីសមគួរ។ **ចូឆ្ន**ក៏សួរ**តាំងស៊ីន**ថា ពីម្សិលមិញយើងឲ្យមកអញ្ជើញអ្នកទៅ**ស៊ីលៀង** ហេតុម្ដេចបានជាអ្នកមិនទៅ? **តាំងស៊ុន**ឆ្លើយតបថា ខ្ញុំបាទឈឺមិនទាន់ជា បើនឹងទៅក្រែងរោគបណ្ដាលឡើងវិញ។ **ចូឆ្ន**សួរថា ដែលអ្នកឯងថាឈឺនោះយើងក៏ដឹងអស់ហើយ មិនមែនឈឺដោយរោគអ្វីក៏ទេ គឺអ្នកឯងឈឺចិត្តដ្បិតគិតការមិនសម្រេចដូចប្រាថ្នា។ **តាំងស៊ុន**បានស្ដាប់ដូច្នោះ ក៏ភ័យស្លុតស្មារតីមិនឆ្លើយថាដូចម្ដេចសោះ។ **ចូឆ្ន**ក៏សួរតាំងស៊ុនថា សេចក្ដីដែល**កៀតប៊ឹង**គិតធ្វើប្រទូសរ៉ាយដល់យើងនោះ អ្នកឯងដឹងឬទេ? **តាំងស៊ុន**ឆ្លើយថា ខ្ញុំបានមិនដឹងសោះ។ **ចូឆ្ន**អស់សំណើចហើយថា ខ្លួនមិនដឹងក៏ជាហើយ។ **ចូឆ្ន**ក៏ប្រើទាហានឲ្យទៅនាំខ្លួន**កៀតប៊ឹង**មកឯផ្ទះ**តាំងស៊ុន**។ កាល**កៀតប៊ឹង**មកដល់ក្រឡោកឃើញ**ចូឆ្ន**ក៏ស្រែកជេរថា អាសត្រូវរាជសម្បត្តិ អាឯងឲ្យនាំអញមកនិយាយការអ្វីទៀត?

**ចូឆ្ន**និយាយនឹង**តាំងស៊ុន**ថា ពួកម៉ាកផងខ្លួនដែលរួមគំនិតគិតការជាមួយគ្នានឹងធ្វើប្រទូសរ៉ាយយើងនោះប្រាំនាក់ ឥឡូវចាប់បានបួននាក់ហើយ យើងដាក់គុកទុកតែម្នាក់ទៀតនៅមិនទាន់បានខ្លួន។ **តាំងស៊ុន**ថា ខ្ញុំបាទនឹងបានគប់គិតនឹងអ្នកឯណាក៏ទេ។ **ចូឆ្ន**ក៏សួរ**កៀតប៊ឹង**ថា នរណាប្រើឯងឲ្យយកថ្នាំពិសទៅដាក់ឲ្យអញផឹក?

**កៀតប៊ឹង**ថា នរណានឹងបានប្រើអញក៏ទេ។ **ចូឆ្វ**ខឹងណាស់ឲ្យវាយ**កៀតប៊ឹង**ម្តងទៀតយ៉ាងខ្លាំង។ **តាំងស៊ីន**ឃើញ**ចូឆ្វ**ឲ្យវាយ**កៀតប៊ឹង**ដូច្នោះ ក៏បង្កើតឲ្យក្តៅក្នុងចិត្តដូចអង្គុយលើគំនរភ្លើង។ **ចូឆ្វ**ក៏សួរ**កៀតប៊ឹង**ទៀតថា ពីដើមម្រាមដៃឯងគ្រប់ដប់ ហេតុម្តេចនៅសល់តែប្រាំបួន? **កៀតប៊ឹង**ថា អញកាត់ម្រាមដៃអញមួយចេញ សច្ចាស្បថថានឹងសម្លាប់អាឯងឲ្យបាន។

**ចូឆ្វ**ខឹងណាស់ ទើបបង្គាប់ឲ្យទាហានកាត់ម្រាមដៃ**កៀតប៊ឹង**អស់ទាំងប្រាំបួន និយាយថា ឯងកាត់ម្រាមដៃអស់មួយ ឯងនៅធ្វើអញមិនបាន ឥឡូវអញឲ្យកាត់ម្រាមដៃឯងអស់ប្រាំបួនទៀត ឯងត្រូវខំគិតធ្វើអញឲ្យបានតាមគំនិតឯងចុះ។ **កៀតប៊ឹង**ថា មាត់អញនៅមានអណ្តាតអញក៏នៅល្មនឹងជេរម៉ែអាឯងបានទៀត។ **ចូឆ្វ**ក៏បង្គាប់ទាហានឲ្យកាត់អណ្តាត**កៀតប៊ឹង** ៗក៏ស្រែកថា អាឯងកុំធ្វើឲ្យអញលំបាកពេកឡើយ ស្រាយអញចេញចុះអញនឹងបញ្ចេញសេចក្តីទាំងអស់ឲ្យដឹង។ **ចូឆ្វ**បានស្តាប់ ក៏ហាមឃាត់ទាហាន ហើយបង្គាប់ឲ្យស្រាយចំណងចេញ។ **កៀតប៊ឹង**ក្រោកឡើងបែរមុខទៅរកព្រះបរមរាជវាំង ហើយក៏ក្រាបថ្វាយបង្គំព្រះមហាក្សត្រថា ខ្លួនទូលបង្គំជាខ្ញុំផែនដី ឥឡូវមានអាខ្មាំងសត្រូវវាធ្វើឲ្យចលាចលដល់រាជសម្បត្តិ ទូលព្រះបង្គំជាខ្ញុំគិតនឹងទំនុកបម្រុងផែនដី ដើម្បីបំផ្លាញរំលាយអាខ្មាំងឲ្យបាន តែមិនសមតាមសេចក្តីប្រាថ្នា។ ថាហើយក៏បោកក្បាលនឹងសសរសិលាបែកស្លាប់នៅទីនោះ។ **ចូឆ្វ**ឃើញដូច្នោះ ក៏ឲ្យទាហានពន្លះសាច់**កៀតប៊ឹង**ចេញជាដុំៗ ហើយកាត់ក្បាលយកទៅដោតផ្គាលកណ្តាលផ្លូវជាទីប្រជុំជន។

ហើយ**ចូឆ្វ**ក៏ប្រើទាហានទៅយកខ្លួន**ខេងតង**មក ហើយសួរ**តាំងស៊ីន**ថា អ្នកឯងស្គាល់ឈ្មោះអានេះឬទេ? **តាំងស៊ីន**ឃើញ**ខេងតង**ច្បាស់ក៏នឹកខឹងណាស់ ទើប

ប្រាប់**ចូវឆូ**ថា “អានេះជាបាវខ្ញុំបាទជាមនុស្សទុរជន គិតប្រទូសរ៉ាយលួចប្រពន្ធខ្ញុំបាទ ៗនឹងទុកវាមិនបាន” ហើយ**តាំងស៊ីន**ក៏ហូតគ្របីលើកឡើងនឹងកាប់**ខេងតង**។ **ចូវឆូ**ក៏ឲ្យទាហានដណ្ដើមយកគ្របីបាន ហើយនិយាយថា **ខេងតង**នេះជាដើមចោទទៅពោលទោសថា ខ្លួននឹងនាហ្មឺនមានឈ្មោះប្រាំនាក់នោះ រួមគំនិតគិតគប់គ្នានឹងប្រទូសរ៉ាយយើង ឯនាហ្មឺនដែលនៅក្នុងក្រុងបួននាក់នោះ យើងចាប់ខ្លួនបានហើយ បានពិចារណាសួរក៏ឆ្លើយទទួលតាមពាក្យសត្យ ដែលខ្លួនមកធ្វើជាខឹងគិតសម្លាប់ដើមចោទផងខ្លួននោះ ខ្លួនគិតបំបាត់ភស្តុតាងសូន្យទៅឬ? **តាំងស៊ីន**ថា ខ្ញុំបាទនឹងបានគប់គិតនឹងអ្នកឯងណាប៉ងប្រទូសរ៉ាយលោក៏ទេ។

**ចូវឆូ**ក៏បង្គាប់ទាហានឲ្យឡើងទៅលើផ្ទះតាំងស៊ីន បានសំបុត្រដែលសរសេរចុះព្រះនាមដោយលោហិតនឹងព្រែស ហើយនិងសំបុត្រដែលចុះឈ្មោះសញ្ញាសច្ចាស្បថនឹងគ្នានោះ នាំមកឲ្យ**ចូវឆូ** ៗទទួលយកមកមើលសំបុត្រទាំងពីរច្បាប់ ក៏ដឹងច្បាស់ជាសំបុត្រចុះឈ្មោះនោះមានឈ្មោះ**ឡៅពី**ផង ហើយ**ចូវឆូ**ថា “អាពួកនេះឧបមាដូចជាសត្វតិរច្ឆាន គួរឬគិតមកប្រទូសរ៉ាយអញ!” ទើបឲ្យទាហានរឹបយករបស់ទ្រព្យ**តាំងស៊ីន**អស់ពីផ្ទះ ហើយឲ្យចាប់យកខ្លួន**តាំងស៊ីន**និងភរិយាបុត្រស្ត្រីគ្របក្សពួកទាំងប៉ុន្មាន នាំទៅដល់ផ្ទះ**ចូវឆូ** ៗក៏យកសំបុត្រទាំងពីរច្បាប់នោះបង្ហាញឲ្យទីប្រឹក្សាទាំងពួងមើល ហើយថា ព្រះចៅ**ហៀនតេ**គិតឲ្យធ្វើប្រទូសរ៉ាយយើងជាអ្នកមានគុណបំណាច់ ឥឡូវយើងត្រូវនិរទេសចេញពីរាជសម្បត្តិ ចាត់យកពូជព្រះរាជវង្សដែលមានសតិបញ្ញាមកតាំងជាម្ចាស់ផែនដីជំនួសវិញ តើអ្នកទាំងអស់គ្នានឹងយល់ឃើញប្រការម្ដេច?

**ផៀយ៉ុក**ឆ្លើយថា សព្វថ្ងៃនេះរាជការក្នុងទីក្រុងនិងអាណាខេត្តខាងក្រៅទាំងពួងក៏ជាកម្មសិទ្ធិនៃលោក ព្រោះលោកធ្វើការអ្វីក៏កាន់យកព្រះរាជតម្រាស់ព្រះចៅ**ហៀនតេ**ជាប្រមាណ នាហ្មឺនសព្វមុខមន្ត្រីក្នុងក្រុងនិងខេត្តក្រៅ ក៏នៅកោតក្រែងបង្គាប់បញ្ជាលោកទាំងអស់ គ្រានេះផែនដីក៏មិនទាន់រាបទាប ដែលលោកនឹងឲ្យនិរទេសព្រះចៅ**ហៀនតេ**ចាករាជសម្បត្តិនោះ បើដឹងទៅដល់អាណាខេត្តខាងក្រៅហើយ ក៏គង់នឹងលើកកងទ័ពចូលមកខ្ទប់ប្រសព្វគ្នា ធ្វើអន្តរាយដល់លោក ៗក៏នឹងមានសេចក្ដីលំបាក ដែលខ្ញុំបាទជម្រាបលោកដូច្នេះ សូមឲ្យលោកត្រិះរិះមើលតាមការណ៍គួរចុះ។

**ចូឆ្វ**យល់ត្រូវផង ក៏បង្គាប់ទាហានទាំងពួងឲ្យទៅចាប់ភរិយាបុត្រនិងបក្សពួកនាហ្មឺនបួននាក់នោះមាំមក ហើយឲ្យយកខ្លួន**តាំងស៊ីន**និងនាហ្មឺនបួននាក់ នូវភរិយាបុត្រស្នំគ្របក្សពួកប្រហែលប្រាំពីររយប្លាយនាក់ ទៅប្រហារជីវិតក្រៅកំពែងក្រុងហ៊ូតោ។ នាហ្មឺនមុខមន្ត្រីនូវអាណាប្រជានុរាស្ត្រទាំងឡាយឃើញដូច្នោះ ក៏មានសេចក្ដីអាណិតអាណាថយំយែកស្រក់ទឹកភ្នែករាល់គ្នា។ ខណៈកាល**ចូឆ្វ**សម្លាប់**តាំងស៊ីន**និងបក្សពួកចេញអស់ហើយ ក៏នៅមិនអស់កំហឹង ទើបសៀតគ្រប៊ីចូលទៅក្នុងព្រះបរមរាជវាំង ប្រាថ្នាដើម្បីនឹងសម្លាប់នាង**តាំងគុយហ៊ុយ**ជាប្អូន**តាំងស៊ីន**ដែលជាព្រះស្នំព្រះចៅ**ហៀនតេ**។

ចំណែកព្រះចៅ**ហៀនតេ**ត្រាស់ប្រឹក្សានឹងព្រះនាង**ហុកហៅ** ជាព្រះអគ្គមហេសីនិងនាង**តាំងគុយហ៊ុយ**ថា "យើងឲ្យសំបុត្រទៅ**តាំងស៊ីន**ជាយូរខែហើយ នៅមិនទាន់បានសេចក្ដីថាយ៉ាងម្ដេចសោះ" ទទួលក្រឡេកទៅឃើញ**ចូឆ្វ**សៀត គ្រប៊ីដើរចូលមក ព្រះចៅ**ហៀនតេ**ស្លុតព្រះទ័យភ័យណាស់ មិនបានត្រាស់ថាប្រការម្ដេច។

**ចូឆ្វ**មិនបានថ្វាយបង្គំតាមសមគួរ ក៏និយាយទូលព្រះចៅ**ហៀនតេ**ថា **តាំងស៊ីន**គិតប្រទូសរ៉ាយទូលព្រះបង្គំជាខ្ញុំ ព្រះអង្គទ្រង់ជ្រាបឬទេ? ព្រះចៅ**ហៀនតេ**បានស្តាប់**ចូឆ្វ**សួរដូច្នោះ ទើបក្លែងត្រាស់ថា **តាំងតុះ**ធ្វើអាក្រក់នឹងផែនដី គេបបួលគ្នាសម្លាប់ចេញហើយ ហេតុម្តេចមហាឧបរាជមកថា**តាំងតុះ**គិតប្រទូសរ៉ាយទៀត? **ចូឆ្វ**ទើបស្រែកខ្លាំងៗថា ទូលព្រះបង្គំទូលថា **តាំងស៊ីន**គិតប្រទូសរ៉ាយដល់ទូលព្រះបង្គំជាខ្ញុំ ហេតុម្តេចត្រង់យករឿង**តាំងតុះ** ដែលស្លាប់ទៅហើយនោះមកប្រារព្វវិញដូច្នេះ? ព្រះចៅ**ហៀនតេ**បានឮ**ចូឆ្វ**ស្រែកដូច្នោះ ក៏ស្តុតព្រះទ័យហើយត្រាស់ថា **តាំងស៊ីន**គិតប្រទូសរ៉ាយប្រការម្តេចនោះយើងមិនបានដឹងទេ។ **ចូឆ្វ**ថា ព្រះអង្គសរសេរអក្សរដោយលោហិតឲ្យទៅ**តាំងស៊ីន**នោះ ភ្លេចអស់ហើយឬ? ព្រះចៅ**ហៀនតេ**ក៏មិនត្រាស់តបថាប្រការម្តេច។

**ចូឆ្វ**ក៏បង្គាប់ពេជ្ឈឃាដឲ្យចាប់នាង**តាំងគុយហ៊ុយ** ដែលជាប្អូន**តាំងស៊ីន**យកទៅសម្លាប់ ព្រះចៅ**ហៀនតេ**ត្រាស់ថា នាង**តាំងគុយហ៊ុយ**មានគភ៌បានប្រាំខែហើយ មហាឧបរាជចូរល្មេងយល់មកដល់យើង កុំបីសម្លាប់នាងនោះឡើយ។ **ចូឆ្វ**ថា ព្រះអង្គឲ្យ**តាំងស៊ីន**គិតប្រទូសរ៉ាយទូលព្រះបង្គំជាខ្ញុំ ដោយសារមានទេពតាជួយទូលព្រះបង្គំជាខ្ញុំ ទើបបានដឹងការណ៍ទាំងពួងមិនឲ្យទូលព្រះបង្គំជាខ្ញុំដល់នូវសេចក្តីស្លាប់ ប្រសិនព្រះអង្គនឹងយកស្រីម្នាក់នេះទុកតទៅមុខ គង់នឹងមានអន្តរាយដល់ទូលព្រះបង្គំជាខ្ញុំពុំខាន។ ព្រះនាង**ហុកហៅ**អគ្គមហេសីមានព្រះសវនីយ៍នឹង**ចូឆ្វ**ថា មហាឧបរាជអាណិតទៅចុះកុំអាលសម្លាប់នាង**តាំងគុយហ៊ុយ**ឡើយ ចូរយកទៅដាក់គុកទុកក្នុងផ្ទះត្រជាក់សិន បើប្រសិនប្រសូតបុត្ររួចកាលណាសឹមសម្លាប់ចេញចុះ។ **ចូឆ្វ**តបថា នឹងយកឈាមសរសៃវាទុកធ្វើអ្វី បើបុត្រវាធំឡើងវាក៏មិនលែងធ្វើបាប

ព្យាបាទប្រទូសរ៉ាយដល់ទូលព្រះបង្គំឡើយ។ នាង**តាំងគុយហ៊ុយ**ក៏អង្វរករ**ចូឆ្វ**ថា បើមហាឧបរាជមិនទុកជីវិតខ្ញុំទេ សុំកុំឲ្យកាប់ខ្ញុំនឹងអាវុធឲ្យលំបាកឡើយ ចូរយកព្រៃសមកចងរឹតកឲ្យស្លាប់តាមប្រក្រតីចុះ។ **ចូឆ្វ**ក៏យកព្រៃសមកធ្វើតាមពាក្យនាងថា។ ព្រះចៅ**ហៀនតេ**ក៏ទ្រង់ព្រះកន្សែងសោកា ហើយត្រាស់នឹងនាង**តាន់គុយហ៊ុយ**ថា ខ្លួននាងនឹងស្លាប់ទៅហើយក៏កុំបីមានកំហឹងខឹងគុំគួននឹងយើងឡើយ ព្រះចៅ**ហៀនតេ**និងព្រះនាង**ហុកហៅ** នាង**តាំងគុយហ៊ុយ**សោកាពិលាប អាឡោះអាល័យគ្នាទៅវិញទៅមក។ **ចូឆ្វ**ឃើញដូច្នោះក៏ស្រែកគំហកថា “គប់គិតគ្នានឹងធ្វើប្រទូសរ៉ាយគេ លុះគេចាប់បានមកធ្វើជាយំយែកអាឡោះអាល័យគ្នា” ហើយ**ចូឆ្វ**ក៏បង្គាប់ពេជ្ឈឃាដឲ្យឃុំនាំខ្លួននាង**តាំងគុយហ៊ុយ**ចេញទៅ ដល់ក្រៅទ្វារព្រះបរមរាជវាំង ក៏យកព្រៃសចងរឹងបំពង់កទាល់តែដាច់ខ្យល់ស្លាប់។ **ចូឆ្វ**បង្គាប់នាហ្មឺនសព្វមុខមន្ត្រីខាងក្រុមវាំងនិងខន្ទីថា “ចាប់តាំងពីត្រឹមនេះតទៅ កុំឲ្យពួកព្រះរាជវង្សចេញចូលមខាងក្នុងព្រះបរមរាជវាំង បើអ្នកណាចង់ចេញចូលឲ្យយកសេចក្ដីប្ដឹងយើងជាមុន បើយើងយល់ព្រមទើបចេញចូលបាន បើភ្នាក់ងារណាមិនហាមប្រាមដូច្នេះទេ យើងនឹងឲ្យចុះទោសប្រហារជីវិត” ហើយបង្គាប់**ចោហាង**ឲ្យប្រជុំទាហានបីពាន់ កាន់កាប់រក្សាព្រះបរមរាជវាំងនិងទ្វារ កុំឲ្យព្រះរាជវង្សចូលទៅខាងក្នុងបាន។

**ចូឆ្វ**ក៏ចេញមកផ្ទះហើយប្រឹក្សានឹង**ផៀយ៉ុក**ថា **តាំងស៊ីន**និងពួកប្រាំនាក់ដែលគិតប្រទូសរ៉ាយយើងនោះ យើងក៏សម្លាប់ចេញអស់ហើយ នៅតែ**ឡៅពី**និង**ម៉ាថេង** យើងនឹងគិតធ្វើប្រការម្ដេច ទើបនឹងបានខ្លួនមកសម្លាប់ចេញ? **ផៀយ៉ុក**ឆ្លើយថា **ម៉ាថេង**ដែលទៅនៅស្រុកសែលៀងនោះមានទាហានច្រើនណាស់ បើលោកនឹងលើកទ័ពទៅវាយយកវេលានេះ ស្រុកយើងក៏ជាកង្វល់ឯក្រោយ សូមឲ្យលោកចាត់រកអ្នក

មានតម្រិះប្រាជ្ញាទៅបញ្ចុះបញ្ចូល**ម៉ាថេង**ឲ្យត្រឡប់ចូលមកស្រុកវិញ កុំឲ្យដឹងខ្លួនទាន់ថាលោកសម្លាប់**តាំងស៊ីន**និងគូកននោះឡើយ បើគិតដូច្នេះហើយខ្ញុំបាទយល់ឃើញថា **ម៉ាថេង**មិនទាន់ដឹងការណ៍ក៏នឹងចូលមកមិនខាន រួចសឹមលោកឲ្យចាប់ខ្លួនសម្លាប់ចេញនឹងបានដោយងាយ ឯ**ឡៅពី**នោះទៅនៅស្រុកឈីជីវប្រមូលសេនាទាហាននិងចាំទទួលកងទ័ពលោក ឥឡូវទាហាន**អ៊្វនសៀវ**និងទាហានយើងក៏នៅតាំងរាំងរាគ្នានៅតំបន់គួរត មុខជា**ឡៅពី**នឹងឲ្យមានសំបុត្រទៅគិតនឹង**អ៊្វនសៀវ**ឲ្យជាពួកជាមួយគ្នា បើលោកលើកកងទ័ពទៅច្បាំងនឹង**ឡៅពី**វេលាណា គង់**អ៊្វនសៀវ**នឹងលើកមកវាយយកស្រុកហ៊ូតោជាប្រាកដ នរណានឹងតទល់នឹង**អ៊្វនសៀវ**ក៏កម្រក្រៃណាស់។ **ចូឆ្វូ**តបថា **ឡៅពី**នោះជាមនុស្សមានសតិបញ្ញា បើនឹងបង្អង់ឲ្យយូរការក៏នឹងមានកម្លាំងច្រើនឡើង ឧបមាដូចកូនសត្វបក្សីកំពុងតែដុះក្រាស មិនទាន់មានស្លាបនឹងហើរ បើយើងនៅស្ងៀមទុកឲ្យនៅក្នុងសំបុកដូច្នេះ កាលណាដុះរោមនិងស្លាបព្រមហើយក៏នឹងហើរទៅផ្លូវឆ្ងាយបាន ទោះនឹងប្រាថ្នាចាប់ខ្លួនក៏កម្រណាស់ **អ៊្វនសៀវ**នោះមានទាហានច្រើនក៏មែន តែតម្រិះប្រាជ្ញាតិច ទោះនឹងគិតការអ្វីយើងមិនត្រូវខ្លាច។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ២២

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូឆូ**ពិគ្រោះគ្នានឹង**គុយកែ**ទីប្រឹក្សា នឹងលើកទ័ពទៅវាយ**ឡៅពី**ចៅហ្វាយស្រុកឈីជីវ រហូតដល់**ចូឆូ**ឲ្យសេះសឹកចៅទៅ**គួនអ៊ូ**ជាជំនិះ សេះនេះដើរផ្លូវមួយថ្ងៃមួយម៉ឺនសិន “៤០០ គ.ម”)*

**ខណៈ**នោះ ទទួល**គុយកែ**ចូលមក។ **ចូឆូ**ក៏ពិគ្រោះសួរថា យើងនឹងលើកកងទ័ពទៅច្បាំងនឹង**ឡៅពី**នៅស្រុកឈីជីវខាងទិសឯកើត តែបារម្ភក្រែងខាងទិសឯជើងខ្លាច**អ៊ួនសៀវ**ដឹង នឹងលើកទ័ពមកសន្ទប់វាយយកក្រុងហ៊ូតោ តើអ្នកនឹងយល់ឃើញប្រការម្តេច? **គុយកែ**ឆ្លើយថា ឯតម្រិះប្រាជ្ញានិងគំនិត**អ៊ួនសៀវ**នោះ បើនឹងធ្វើការអ្វីក៏រួសរាន់ណាស់ បើនឹងប្រើនរណា**អ៊ួនសៀវ**ក៏រមែងសង្ស័យ មិនចុះចិត្តជឿអ្នកនោះប្រការមួយទៀត សេនាទាហាន**អ៊ួនសៀវ**ក៏បែកខ្ញែក ចិត្តគំនិតពីគ្នា បើប្រសិនណានឹងលើកទ័ពមកវាយក្រុងហ៊ូតោមែន ក៏គង់នឹងសម្រេចតាមគំនិត ឯ**ឡៅពី**សោតក៏ទើបតែប្រឡប់ទៅនៅស្រុកឈីជីវ ហើយទាហានដែលជាប់តាមទៅក៏សុទ្ធតែទាហានរបស់យើង ដែលនឹងគិតការធ្វើសឹកសង្គ្រាមនោះ មុខជាទាហានទាំងពួងមិនស្រុះចិត្តជាមួយគ្នាទេ បើយើងរង់បង្អង់ទុកឲ្យយូរទៅទៀត ឃើញថាទាហានទាំងនោះនឹងរួមគំនិតចូលគ្នា ហេតុនេះសុំឲ្យលោកបង្ខំលើកកងទ័ពទៅវាយស្រុកឈីជីវជាប្រញាប់។ **ចូឆូ**បានស្តាប់ក៏ត្រេកអរណាស់ ឆ្លើយតបទៅ**គុយកែ**វិញថា “ដែលយើងសួរនេះ គឺក្លែងសួរចង់ដឹងតម្រិះប្រាជ្ញានិងគំនិតរបស់អ្នកទេ ឥឡូវនេះ អ្នកឆ្លើយមកក៏ដូចគំនិតរបស់យើងដែលគិតទុកដែរ” ហើយ**ចូឆូ**ក៏ភ្ជុំពលទាហានបានប្រមាណម្ភៃម៉ឺន លើកចេញចាកក្រុងហ៊ូតោ។

ពេលនោះ មានបម្រើសេះស៊ើបការណ៍ដឹងថា**ចូឆ្វូ**លើកទ័ពមក ក៏ស្រូតរូតចូលទៅជម្រាប**ស៊ុនខៀន**ក្នុងស្រុកឈីជីវថា ឥឡូវ**ចូឆ្វូ**លើកកងទ័ពមកហើយ។ **ស៊ុនខៀន**ដឹងដូច្នោះក៏ទៅប្រាប់**គួនអ៊្វូ**នៅស្រុកហែហ្វឺតាមដំណឹងនេះ ហើយឲ្យរៀបចំត្រៀមសេនាទាហានទុកជាព្រម រួច**ស៊ុនខៀន**ក៏ហួសទៅស្រុកសៀវផាយទៀត ដើម្បីនឹងឲ្យដំណឹង**ឡៅពី** ។ដឹងដូច្នោះក៏និយាយថា "យើងនឹងឲ្យមានសំបុត្រទៅដល់**អ៊្វួនសៀវ**ទៀត ឲ្យលើកកងទ័ពមកជួយទើបនឹងទប់ទល់តនឹង**ចូឆ្វូ**បាន" គិតហើយក៏សរសេរសំបុត្រចាត់**ស៊ុនខៀន**ឲ្យនាំយកទៅឲ្យ**អ៊្វួនសៀវ**។ **ស៊ុនខៀន**ក៏ទទួលនាំសំបុត្រទៅដល់ស្រុកគីជីវ ក៏ចូលទៅរក**ទៀនហង**អធិប្បាយរឿងឲ្យ**ទៀនហង**ស្តាប់គ្រប់ប្រការ ហើយថាចូរអ្នកជួយនាំខ្ញុំទៅជួបនឹង**អ៊្វួនសៀវ**។ **ទៀនហង**បានស្តាប់ដូច្នោះក៏នាំ**ស៊ុនខៀន**ចូលទៅដល់**អ៊្វួនសៀវ**។ **ស៊ុនខៀន**គំនាប់ហើយ ក៏ជូនសំបុត្រទៅឲ្យ**អ៊្វួនសៀវ** ។មើលដឹងសេចក្តីហើយ ក៏មិនមានថាអ្វីសោះ ក្តែងធ្វើជាទុក្ខសញ្ចប់សញ្ជឹង។ **ទៀនហង**ឃើញមុខ**អ៊្វួនសៀវ**សៅហ្មងក៏សួរថា សព្វថ្ងៃខ្ញុំឃើញមុខលោកមិនសប្បាយ តើលោកវិតក្កពីអ្វី? **អ៊្វួនសៀវ**ឆ្លើយថា យើងជិតនឹងស្លាប់ហើយ ទើបមិនមានសេចក្តីសប្បាយសោះ។ **ទៀនហង**ថាហេតុម្តេចលោកចរចាជាពាក្យអពមង្គល? **អ៊្វួនសៀវ**ថា ជីវិតយើងនឹងដល់នូវសេចក្តីស្លាប់ក្នុងថ្ងៃនេះ ឬថ្ងៃស្អែកក៏មិនដឹងឡើយ យើងវិតក្កនឹងបុត្រទាំងប្រាំនាក់ ឃើញថាបុត្រពៅបង្អស់នោះមានតម្រិះប្រាជ្ញាគ្រាន់បើ តែអាយុនៅក្មេងណាស់ ឥឡូវក៏មានជំងឺឈឺផង ហេតុនេះទើបយើងមិនមានសេចក្តីសប្បាយនឹងគិតការអ្វីក៏មិនបាន។ **ទៀនហង**តបថា មនុស្សទាំងអស់ក៏បានដឹងឮគ្រប់គ្នាថា តែលោកជាធំបំផុតក្នុងអាណាខេត្តទិសឧត្តរ ហេតុម្តេចលោកមកគិតរួញរា ញញើត ហើយវាយខ្លួនឯងឲ្យស្លាប់មុនឈឺដូច្នោះ មិនគួរសោះ **ចូឆ្វូ**ឥឡូវលើកទ័ពមកវាយស្រុកឈីជីវហើយ ឯស្រុកហ៊្វិតោនោះមិនមាននរណានៅត្រួតត្រារក្សាជាមាំមួន **ឡៅពី**ក៏មានសំបុត្រមកសុំកងទ័ពលោកលើកទៅជួយ បើលោកលើកកងទ័ពទៅវាយស្រុកហ៊្វិតោគ្រានេះមុខជានឹងបានដោយងាយ

ណាស់។ **អ៊ួនសៀវ**តបថា “យើងក៏ដឹងអស់ហើយថា គ្រានេះនឹងបានបំណាច់ធ្វើការសឹក តែចិត្តរបស់យើងធុរៈនឹងបុត្រ បើបុត្រយើងមានសេចក្ដីអន្តរាយជាខាងក្រោយហើយ ជីវិតយើងក៏នឹងស្លាប់ជាមួយ ប្រការមួយទៀតប្រសិនបើលើកទ័ពទៅ គង់មិនមានជ័យជម្នះព្រោះហេតុមិនសប្បាយនោះឯង” រួច**អ៊ួនសៀវ**ក៏បង្គាប់**ស៊ុនខៀន**ថា គ្រានេះយើងមិនលើកទ័ពទៅទេ ឲ្យទៅប្រាប់**ឡៅពី**ចុះ បើ**ឡៅពី**អាប់ចុនវេលាណា ក៏រត់មករកយើង ៗនឹងជួយទំនុកបម្រុងមិនឲ្យព្រួយលំបាកឡើយ។

**ទៀនហង**បានឮ**អ៊ួនសៀវ**និយាយដូច្នោះក៏ខឹងណាស់ ទើបថា “ស្ដាយគ្រានេះបានចំណាប់ល្អហើយ គួរឬមកគិតជាធុរៈរវល់នឹងកូនតូចតាចដូច្នេះមិនគួរសោះ” **ទៀនហង**ដកដង្ហើមធំហើយដើរចេញទៅ។ **ស៊ុនខៀន**ក៏លា**អ៊ួនសៀវ**ត្រឡប់ទៅស្រុកសៀវផាយវិញ ហើយអធិប្បាយរាយរឿងឲ្យ**ឡៅពី**ស្ដាប់គ្រប់ប្រការ។ **ឡៅពី**បានស្ដាប់ក៏នឹកតូចចិត្តរឹតតែព្រួយបារម្ភខ្លាំងណាស់ ប្រឹក្សានឹង**ស៊ុនខៀន**ថា **ចូឆូ**លើកកងទ័ពមកគ្រានេះ យើងរិះគិតចេញច្បាំងយ៉ាងម្ដេចក៏បាន?

**តៀវហ៊ុយ**ឆ្លើយជម្រាប**ឡៅពី**ថា ទ័ព**ចូឆូ**លើកមកគ្រានេះបើយើងនឹងបង្អង់ទុកឲ្យយូរ**ចូឆូ**នឹងតាំងជាមាំមួនបានរឹតតែមានកម្លាំងធ្វើការសឹក យើងក៏លំបាកព្រោះវេលានេះ**ចូឆូ**លើកចូលមកជិតស្រុកយើងហើយ ពេលយប់នេះ ខ្ញុំបាទសុំយកអាសាលើកទាហានចេញទៅព័ទ្ធវាយកងទ័ព**ចូឆូ** កុំឲ្យតាំងបន្ទាយជាមាំមួនឲ្យបានមុខជា**ចូឆូ**នឹងផ្ដោះការផងយើង។ **ឡៅពី**បានស្ដាប់ក៏ថា “ប្អូនឯងពីដើមមក បងយល់ថាមិនចេះគិតអ្វីសោះ មានតែថ្វីដៃច្បាំងខ្លាំងពូកែតែម្យ៉ាង បងទើបនឹងបានឃើញតម្រិះម្ដងកាលប្អូនធ្វើកលឧបាយចាប់ខ្លួន**ឡៅតាយ**បាន ឥឡូវប្អូននឹងលើកពលទៅព័ទ្ធវាយកងទ័ព**ចូឆូ**មិនឲ្យតាំងជាមាំមួននោះ បងត្រូវចិត្តណាស់” ហើយ**ឡៅពី**ក៏បែងរំលែកពលយោធាត្រៀមទុកសម្រាប់ខ្លួនឯងមួយកង ចាត់ឲ្យ**តៀវហ៊ុយ**មួយកង។

ចំណែក**ចូឆ្វ**កាលលើកទ័ពមកជិតស្រុកសៀវផាយហើយ ទទួលកើតខ្យល់ព្យុះបក់បោកខ្លាំងណាស់ ដងទង់ជ័យ**ចូឆ្វ**ដែលដោតលើរទេះក៏បាក់ចុះ **ចូឆ្វ**ឃើញវិបរិតប្លែកក៏បញ្ឈប់កងទ័ពតាំងបន្ទាយនៅទីនោះ ហើយសួរទីប្រឹក្សាថា "ដែលមានខ្យល់ព្យុះបក់មករលំបាក់ដងទង់ជ័យយើងដូច្នេះ ជាអាភេទល្អឬអាក្រក់ប្រការម្ដេច?" **ស៊ុនហុក**ឆ្លើយថា ថ្ងៃនេះកាចណាស់ មុខជា**ឡៅពី**នឹងលើកទ័ពមកប្លន់បន្ទាយយើងជាប្រាកដហើយ។ ទទួល**ម៉ាកាយ**ចូលមកដល់ទៀតជម្រាប**ចូឆ្វ**ថា ខ្យល់ពីទិសឯកើតបក់មកត្រូវដងទង់ជ័យបាក់នោះ ខ្ញុំបាទយល់ថា កណ្ដាលយប់នេះនឹងមានគេមកលុកបន្ទាយហើយ។ **ចូឆ្វ**បានស្ដាប់**ស៊ុនហុក**និង**ម៉ាកាយ**និយាយដូច្នោះ ក៏យល់ថាសម្ដីអ្នកទាំងពីរត្រូវពាក្យគ្នាទើបឆ្លើយថា ដែលបណ្ដាលឲ្យកើតខ្យល់ព្យុះដូច្នេះ គឺទេពតាសម្ដែងហេតុឲ្យដឹង ព្រោះយើងមានបុណ្យវាសនា។ **ចូឆ្វ**ក៏ចាត់ចែងកងទ័ពជាដប់មួយកង។ កងមួយឲ្យនៅរក្សាបន្ទាយ ប្រាំបីកងឲ្យនាយទាហានឯកលើកញែកចេញទៅពួនបង្កប់នៅក្រៅបន្ទាយទាំងប្រាំបីទិស បើឃើញកងទ័ពខ្មាំងលើកមកប្លន់បន្ទាយវេលាណា ក៏ឲ្យទាហានទាំងប្រាំបីកងនោះវាយប្រសព្វព័ទ្ធចូលមក ពីរកងទៀតញែកគ្នាលើកទៅស្ទាក់នៅមាត់ផ្លូវដែលនឹងទៅស្រុកឈើជីវមួយកងទៅស្រុកហែហ្វីមួយកង។

លុះពេលយាមពីរ **ឡៅពី**និង**តៀវហ៊ុយ**ក៏លើកទាហានចេញទៅពីស្រុកសៀវផាយ។ **តៀវហ៊ុយ**ក៏កំរើបចិត្តគិតថា គ្រាមុនអញបានធ្វើកលឧបាយចាប់**ឡៅតាយ**បាន គ្រានេះ**ឡៅពី**ក៏សរសើរតម្រិះប្រាជ្ញានិងគំនិតប្រាជ្ញារបស់អញច្រើនណាស់ **តៀវហ៊ុយ**ក៏ជិះសេះលើកទាហានជាកងមុខ ចូលទៅវាយប្លន់យកបន្ទាយ**ចូឆ្វ**។ **តៀវហ៊ុយ**ឃើញមនុស្សក្នុងបន្ទាយនោះតិច ហើយបានឮសំឡេងទាហានខាងក្រោយបន្ទាយស្រែកហ៊ោអឺងកង ភ្លើងក៏ឆេះឡើងភ្លឺពេញបន្ទាយ ទើបគិតថា គ្រានេះប្រហែល**ចូឆ្វ**គិតកលឧបាយទេដឹង ក៏នាំទាហានត្រឡប់ចេញមករក**ឡៅពី** ទទួលជួបនឹង**តៀវលៀវ, ខៅធូ, អ៊ីគឹម, លីទៀន, ស៊ីឡុង, ង៉ាក់ជិន, ហែហ៊្វអៀន** លើក

ទាហានវាយប្រសព្វខ្ទប់ទាំងសងខាងចូលមកគ្រប់ទាំងទិស តាំងតែច្បាំងកាប់សម្លាប់គ្នាជាកោលាហល ឯទាហានដែល**តៀវហ៊ុយ**លើកមកនោះ សុទ្ធតែទាហានដើម**ចូឆូ** ក៏បែកចូលទៅរកនាយរបស់វាទាំងប្រាំបីកង សល់នៅតែទាហានស្និទ្ធខាងខ្លួនប្រហែលសែសិបនាក់ប្លាយ **តៀវហ៊ុយ**ច្បាំងទម្លាយពេញកម្លាំងទាំងសងខាង ហើយទាហានទាំងសែសិបប្លាយនោះដែកចេញទៅបាន ទើបគិតតែក្នុងចិត្តថា “នឹងទៅរក**ឡៅពី**ឬទៅស្រុកឈីជីវ? ឯស្រុកហែហ្វីវេលានោះក៏ទៅមិនបាន មុខជាទាហាន**ចូឆូ**នឹងនៅចាំស្ទាក់គ្រប់ផ្លូវ” ទើបនាំទាហានទាំងនោះឡើងទៅនៅលើកំពូលភ្នំបងអៀង។

ឯ**ឡៅពី**នោះជិះសេះនាំទាហានលើកណ្ហូនតាម**តៀវហ៊ុយ**ទៅ លុះបានឮសំឡេងទាហានស្រែកហ៊ោអឺងកងព័ទ្ធបន្ទាយ**ចូឆូ**ចូលមក ឡៅពីក៏ស្មានថា **តៀវហ៊ុយ**ចូលទៅប្លន់បន្ទាយនោះ តែនៅរិះគិតថា មុខជា**ចូឆូ**នឹងធ្វើកលឲ្យអន្តរាយមិនខាន ទទួលក្រឡេកឃើញ**ហែហ្ហ៊ូទុន**បរពលចូលមក កាត់យកទាហាន**ឡៅពី**ប្រហែលពាក់កណ្ដាល **ឡៅពី**ឃើញដូច្នោះក៏នឹកខឹងណាស់ ញាក់សេះបរចូលទៅតយុទ្ធនឹង**ហែហ្ហ៊ូទុន** ទទួល**ហែហ្ហ៊ូអៀន**លើកទាហានវាយប្រសព្វចូលមកទៀត **ឡៅពី**ក៏បរសេះចូលតាំងច្បាំងដោះខ្លួន ទាហាន**ឡៅពី**ក៏របួសស្លាប់ទៅខ្លះ វិលទៅខាងកងទ័ព**ចូឆូ**ខ្លះ សល់នៅទាហានដែលស្និទ្ធប្រហែលសាមសិបប្លាយ **ឡៅពី**ក៏បរពលចូលតយុទ្ធដែកចេញទៅបាន គិតនឹងត្រឡប់ទៅស្រុកសៀវផាយ ក៏ក្រឡេកទៅឃើញពន្លឺភ្លើងក្នុងស្រុកនោះឆេះសន្ធោឡើង **ឡៅពី**ក៏ដឹងថា កងទ័ព**ចូឆូ**ចូលទៅវាយយកស្រុកនោះបាន ទើបត្រឡប់សេះនាំទាហានរត់ទៅស្រុកឈីជីវ ឃើញផ្លូវដែលបែកទៅស្រុកហែហ្វីមានទាហាន**ចូឆូ**នៅស្ទាក់ទទឹងផ្លូវជាច្រើន **ឡៅពី**ក៏គិតថា គ្រានេះ**ចូឆូ**លើកទ័ពមកច្បាំងជាច្រើនណាស់ ខ្លួនអញនឹង**តៀវហ៊ុយ** ក៏បែកព្រាត់គ្នាទៅដោយខ្លួនហើយ នៅតែ**គួនអ៊ូ**ដែលរក្សាគ្រប់គ្រងក្នុងស្រុកហែហ្វីនោះ មិនដឹងជាសុខទុក្ខយ៉ាងណា **ឡៅពី**ត្រិះរិះឃើញថា**អ៊ួនសៀវ**បានផ្ដាំនឹង**ស៊ុនខៀន**ថា បើអាប់ចុនវេលា

ណាក៏ឲ្យចូលទៅចុះនឹងជួយទុក្ខធុរៈនោះ គ្រានេះខ្លួនអញថ្កោះការជាទម្ងន់ហើយ គួររត់ទៅអាស្រ័យនៅនឹង**អ៊ួនសៀវ**សិនចុះ ដើម្បីនឹងបានសម្រាកខ្លួនគិតការតទៅទៀត លុះត្រិះរិះហើយ**ឡៅពី**ក៏នាំទាហានសេះទាំងសាមសិបប្លាយនោះ បរស្រូតរូតតាមផ្លូវតម្រង់ទៅស្រុកគីជីវ ទទួលប្រទះនឹង**លីទៀន**លើកទាហានស្កាត់ទទឹងពីមុខ **ឡៅពី**ភ័យស្លុតមិនបានគិតប្រយុទ្ធនឹងតតាំង ក៏រលះរលាំងគេចដោះតែខ្លួនមួយរត់រួចទៅ ចោលទាហានទាំងអស់នៅក្នុងចំណោម ទ័ព**លីទៀន**ក៏ចូលទៅព័ទ្ធចាប់ទាហាន**ឡៅពី**ទាំងអស់បាន។

ខណៈកាល**ឡៅពី**បំផាយសេះរត់ទៅនោះ ចេះតែស្រូតទាំងយប់ទាំងថ្ងៃ ចម្ងាយផ្លូវប្រហែលមួយពាន់សិន (៤០ គ.ម) លុះទៅដល់ស្រុកឆៀងជីវ ក៏ចូលទៅប្រាប់អ្នកចាំទ្វារថា យើងសុំចូលទៅជួបនឹង**អ៊ួនថាំ** ចៅហ្វាយស្រុកដែលជាកូន**អ៊ួនសៀវ**។ នាយទ្វារក៏នាំសេចក្ដីទៅជម្រាប**អ៊ួនថាំ** ៗមានសេចក្ដីត្រេកអរណាស់ក៏ចេញមកគំនាប់ ហើយនាំខ្លួន**ឡៅពី**ចូលទៅ។ **ឡៅពី**ក៏នាំរឿងរ៉ាវអធិប្បាយឲ្យ**អ៊ួនថាំ**ស្ដាប់គ្រប់ប្រការ ហើយថា យើងនឹងទៅអាស្រ័យនៅនឹង**អ៊ួនសៀវ**ជាបិតាអ្នក នឹងបានរិះគិតកម្ចាត់**ចូឆូ**ជារាជសម្បត្តិឲ្យបាន។ **អ៊ួនថាំ**បានស្ដាប់សព្វសេចក្ដីពីរឿង**ឡៅពី**បែកទ័ពរត់មក ក៏ឲ្យមានចិត្តវិប្បយោគទុក្ខនឹកអាណិត**ឡៅពី**ពន់ប្រមាណ ទើបឲ្យរៀបតុបាយទឹកជូន**ឡៅពី**បរិភោគរួចក៏រៀបចំទីកន្លែងឲ្យ**ឡៅពី**និទ្រា រួច**អ៊ួនថាំ**តែងសំបុត្រទៅដល់បិតា តាមសម្ដីដែល**ឡៅពី**និយាយឲ្យបម្រើនាំសំបុត្រនោះទៅមុន ហើយចាត់ទាហានជូនខ្លួន**ឡៅពី**ទៅជាក្រោយ។ បម្រើសេះក៏បានទៅដល់ស្រុកគីជីវយកសំបុត្រនោះចូលទៅឲ្យ**អ៊ួនសៀវ** ៗមើលដឹងសេចក្ដីហើយក៏មានចិត្តសោមនស្សណាស់ នាំពលយោធាចេញមកចាំទទួល**ឡៅពី**ក្រៅស្រុក លុះឃើញ**ឡៅពី**ទៅដល់ **អ៊ួនសៀវ**ចូលទៅដឹកដៃ**ឡៅពី**មក អ្នកទាំងពីរក៏គំនាប់គ្នាតាមទំនៀម ហើយនាំ**ឡៅពី**ចូលទៅដល់ទីគេហដ្ឋាន។ **អ៊ួនសៀវ**និយាយនឹង**ឡៅពី**ថា អ្នកបានប្រើ**ស៊ុនខៀន**មកសុំកងទ័ពខ្ញុំ ទទួលបុត្ររបស់ខ្ញុំមានជំងឺបានជាខ្ញុំមិនបានលើកទ័ពទៅ

ជួយអ្នក ៗកុំគប្បីតូចចិត្តនឹងខ្ញុំឡើយ ខ្ញុំមានសេចក្តីវិតក្កគិតដល់អ្នកជាដរាប ឥឡូវអ្នកខូចស្រុកនឹង**ចូឆ្លូ**ទៅហើយក៏ជាការអភ័ព្វ ខ្លួនអ្នកមិនស្លាប់បានមកឃើញមុខគ្នានឹងខ្ញុំវេលានេះជាភ័ព្វអ្នកភ័ព្វខ្ញុំ ៗមានសេចក្តីត្រេកអរពាន់ប្រមាណណាស់។

**ឡៅពី**ឆ្លើយថា គ្រានេះខ្លួនខ្ញុំកំព្រាអនាថា ដែលអ្នកកមានមេត្តារាប់អានខ្លួនខ្ញុំ ៗក៏មានសេចក្តីត្រេកអរ សូមទទួលគុណអ្នកទុក តទៅមុខខ្ញុំនឹងបានតបស្នងសងគុណអ្នកវិញ កាលពីដើមខ្ញុំក៏បានដឹងច្បាស់ថា ចិត្តថ្លើមរបស់អ្នកមានធម៌សប្បុរសរួសរាយរាប់អាន តែងឧបត្ថម្ភសេនាទាហានមិនឲ្យអនាទរខ្ញុំក៏គិតថា នឹងមកជ្រកកោនពឹងបុណ្យអ្នក ឲ្យអ្នកប្រើដើម្បីនឹងរិះគិតកម្ចាត់**ចូឆ្លូ**ចេញ។ ឥឡូវខ្ញុំបរាជ័យនឹង**ចូឆ្លូ**រត់មកតែខ្លួន សូម្បីប្អូនរបស់ខ្ញុំទាំងពីរនាក់និងគ្រប់គ្រួក៏មិនបានដឹងជារស់ឬស្លាប់យ៉ាងណា ដែលខ្ញុំថ្លោះការរត់មករកអ្នកតែម្នាក់ឯងដូច្នេះ មានសេចក្តីអាប់យសខ្មាសគេខ្លាំងណាស់ វេលានេះ ខ្ញុំក៏សុំផឹកទឹកពិភទ្ទសច្ចាសុំនៅធ្វើការនឹងអ្នកត្រាតែសម្រេចកិច្ចការ។ **អ៊ួនសៀវ**បានស្តាប់វាចា**ឡៅពី**ក៏ឲ្យមានចិត្តអាណិតនិងស្រឡាញ់ពន់ពេក ទើបចាត់ចែងគ្រឿងបរិភោគនិងឧបភោគឲ្យជាច្រើន ហើយក៏តែងតែឧបត្ថម្ភទំនុកបម្រុង**ឡៅពី**ឲ្យនៅក្នុងស្រុកគីជីវ។

ឯ**ចូឆ្លូ**កាលលើកទ័ពទៅកណ្តាលយប់នោះ ក៏ដេញទាហានចូលវាយស្រុកសៀវផាយបាន រួចលើកទៅវាយស្រុកឈីជីវទៀត ឯ**ប៊ីតុក, ប៊ីហង, កាន់យ៉ុង** ដែល**ឡៅពី**ឲ្យនៅរក្សាស្រុកនោះក៏គិតគ្នាថា “ទ័ព**ចូឆ្លូ**លើកមកគ្រានេះធំពន្លឹកណាស់ មុខជាយើងតទល់មិនបានទេ” គិតហើយក៏នាំគ្នារត់ចេញពីស្រុកនោះទៅ នៅតែ**តាន់តេង**ទាល់ច្រកនឹងរកផ្លូវរត់ទៅពុំរួច ក៏បើទ្វារស្រុកចេញទៅទទួល**ចូឆ្លូ**ដើម្បីឲ្យបានសេចក្តីគាប់ប្រសើរ។ **ចូឆ្លូ**ឃើញដូច្នោះក៏មានចិត្តត្រេកអរលើកទាហានចូលទៅទើបដាក់កំហិតហាមថា “កុំឲ្យនរណាធ្វើផ្តេសផ្តាសដល់ប្រជាជន ដែលនៅក្នុងស្រុក ឲ្យបានសេចក្តីទុក្ខក្តៅឡើយ” ហើយប្រឹក្សានឹងសេនាទាហានទាំងពួងថា

“យើងនឹងលើកកងទ័ពទៅវាយយកស្រុកហែហ្វីទៀត តើអ្នកទាំងឡាយនឹងយល់ឃើញដូចម្ដេច?”។

**ស៊ុនហុក**ឆ្លើយថា ខ្ញុំបាទឮដំណឹងថា**ឡៅពី**ឲ្យ**គួនអ៊ូ**នៅរក្សាគ្រួសារក្នុងស្រុកហែហ្វី ដែលលោកនឹងលើកទ័ពទៅវាយនោះគួរណាស់ បើបង្អង់ហើយ **អ៊ួនសៀវ**គង់នឹងលើកទ័ពមកជួយ ហើយនឹងនាំយកគ្រប់គ្រួ**ឡៅពី**ទៅបាន។ **ចូឆូ**តបថា **គួនអ៊ូ**នោះមានថ្វីដៃខ្លាំងពូកែណាស់ ហើយឈ្លាសវៃក្នុងការសឹកសង្គ្រាម យើងចង់បានខ្លួន**គួនអ៊ូ**មកចិញ្ចឹមទុកជាសេនាឯកតទៅ ឥឡូវនេះយើងនឹងប្រើបម្រើឲ្យទៅនិយាយបញ្ចុះបញ្ចូល**គួនអ៊ូ**ទើបបាន។ **គុយកែ**ឆ្លើយថា ឯចិត្ត**គួនអ៊ូ**នោះទៀងត្រង់នឹង**ឡៅពី**ណាស់ ដែលនឹងប្រើបម្រើទៅនិយាយបញ្ចុះបញ្ចូលនោះ ខ្ញុំបាទយល់ថា **គួនអ៊ូ**មុខជាមិនចុះចិត្តផងទេ បើនរណាដែលទៅបញ្ចុះបញ្ចូលនោះ គង់តែ**គួនអ៊ូ**សម្លាប់ចោល។

**តៀវលៀវ**ឆ្លើយថា ខ្ញុំបាទនិង**គួនអ៊ូ**ធ្លាប់ស្គាល់រាប់អានគ្នាមក គ្រានេះខ្ញុំសុំយកអាសាទៅនិយាយបញ្ចុះបញ្ចូល**គួនអ៊ូ**ឲ្យបាន។ **ធៀយ៉ុក**ថា ដែល**តៀវលៀវ**នឹងទទួលយកអាសាទៅបញ្ចុះបញ្ចូល**គួនអ៊ូ**នោះ មុខជា**គួនអ៊ូ**នោះមិនមកទេ ខ្ញុំបាទសូមយកអាសាទៅបញ្ឆោតឲ្យ**គួនអ៊ូ**ចេញពីស្រុកហែហ្វី ហើយបើឃើញ**គួនអ៊ូ**អស់តម្រិះវេលាណា សឹមឲ្យ**តៀវលៀវ**ទៅនិយាយបញ្ចុះបញ្ចូលជាក្រោយទើបបាន។

**ចូឆូ**ក៏សួរ**ធៀយ៉ុក**ថា អ្នកនឹងគិតទៅបញ្ឆោតដូចម្ដេចខ្លះ? **ធៀយ៉ុក**ឆ្លើយថា លោកចាប់ទាហាន**ឡៅពី**ទុកបានជាច្រើន ត្រូវឲ្យបំណាច់រង្វាន់ឲ្យពេញចិត្ត ហើយបង្គាប់ឲ្យធ្វើតាមពាក្យយើង គឺលែងខ្លួនឲ្យវិលចូលទៅក្នុងស្រុកវិញ ហើយប្រាប់ថាខ្លួនវាទាំងនោះសុទ្ធតែរត់រួចមក បើយើងនឹងធ្វើការសង្គ្រាមវេលាណា ក៏ឲ្យពួកវាចាំធ្វើកលខាងក្នុង ហើយឲ្យចាត់ទាហានទៅច្បាំងបញ្ឆោត បើ**គួនអ៊ូ**ដេញចេញមកដល់ក្រៅស្រុកហើយ ត្រូវឲ្យទាហានដែលពួនបង្កប់ទាំងសងខាងផ្លូវនោះ ព័ទ្ធទុកឲ្យជាប់ រួចសឹមប្រើអ្នកមានតម្រិះប្រាជ្ញាទៅនិយាយបញ្ចុះបញ្ចូល ឃើញថា**គួនអ៊ូ**នឹងព្រមចំណុះយើងដោយងាយ។ **ចូឆូ**យល់ត្រូវដូចគំនិតខ្លួន ក៏ឲ្យហៅរកទាហាន**ឡៅពី**ដែល

ចាប់ទុកបានប្រហែលសែសិបនាក់នោះមកដល់**ចូឆូ** ៗក៏ឲ្យបំណាច់រង្វាន់គ្រប់គ្នាជាច្រើន រួចបង្គាប់បញ្ជាតាមពាក្យ**ជៀយ៉ុក**ថាគ្រប់ប្រការ។ ទាហានទាំងនោះក៏ចូលទៅរក**គួនអ៊ូ**ក្នុងស្រុកហែហ្វី ហើយប្រាប់**គួនអ៊ូ**ថា យើងទាំងអស់គ្នាបានរត់រួចមកពីក្នុងកងទ័ព**ចូឆូ**។ **គួនអ៊ូ**ឮហើយក៏គ្មានចិត្តគិតសង្ស័យ យកទាហានទាំងនោះប្រើប្រាស់តាមត្រូវការ។

លុះវេលាយប់យាមបី **ចូឆូ**ប្រើ**ហែហ៊្លទុន**លើកទាហានប្រាំពាន់ ជាកងពួនបង្កប់ ហើយបង្គាប់**ស៊ីឡុង**និង**ខៅធូ**ថា បើ**គួនអ៊ូ**ដេញ**ហែហ៊្លទុន**ចេញមក ឲ្យអ្នកឯងរាល់គ្នាលើកទាហានចាំស្កាត់**គួនអ៊ូ**កុំឲ្យវិលទៅក្រោយបាន ត្រូវឲ្យតច្បាំងការពារឲ្យល្មមតែកម្លាំងទាំងសងខាង ហើយកុំធ្វើឲ្យ**គួនអ៊ូ**មានសេចក្ដីអន្តរាយឡើយ។ ទាហានទាំងបីនាយទទួលបង្គាប់ហើយ ក៏លើកទ័ពតម្រង់ទៅស្រុកហែហ្វីទាំងយប់នោះ។ **ចូឆូ**ក៏លើកទាហានតាមទៅតាំងនៅពីចម្ងាយ **ហែហ៊្លទុន**ក៏លើកទាហានចូលទៅជិតកំពែងស្រុកហែហ្វី។ **គួនអ៊ូ**ក្រឡេកឃើញទ័ពមកតាំងនៅភ្ជាប់កំពែងដូច្នោះ ក៏សំងំមិនបានចេញតតាំង គ្រាន់តែប្រើទាហានឲ្យឡើងរក្សាសើនបន្ទាយជុំវិញ។ **ហែហ៊្លទុន**មិនឃើញ**គួនអ៊ូ**ចេញមកច្បាំង ក៏ប្រើកូនទាហានទៅស្រែកជេរ**គួនអ៊ូ**ជាពាក្យទ្រគោះអសុរសផ្សេងៗ **គួនអ៊ូ**ឮដូច្នោះក៏ខឹងខ្លាំងណាស់ទើបប្រមូលទាហានបានបីពាន់ បើកទ្វារស្រុកចេញតច្បាំងនឹង**ហែហ៊្លទុន**បានដប់ភ្លែង។ **ហែហ៊្លទុន**ក្លែងធ្វើជាញាក់សេះថយរត់ **គួនអ៊ូ**មិនដឹងកលឧបាយក៏បំផាយសេះដេញតាមទៅចម្ងាយប្រហាលែពីររយសិន (៨ គ.ម) **គួនអ៊ូ**ក៏ត្រឡប់ចិត្តគិតឃើញថា មុខជាទាហាន**ចូឆូ**នឹងលើកចូលទៅក្នុងស្រុក**ហែហ្វី** ក៏នាំទាហានត្រឡប់ទៅក្រោយវិញ។ ទទួលឮសំឡេងផាវពីសងខាងផ្លូវ **គួនអ៊ូ**ក្រឡេកមើលទៅឃើញ**ខៅធូ** និង**ស៊ីឡុង**លើកទាហានចេញមកស្ទាក់ពីមុខទាំងខាងមុខ ទាំងខាងស្ដាំ។ **គួនអ៊ូ**ក៏បរសេះចូលតយុទ្ធជាពន្លឹក **ខៅធូ**និង**ស៊ីឡុង**ក៏ទទួលតទល់ទាំងសងខាង **គួនអ៊ូ**គេចត្រឡប់តម្រង់ចូលទៅក្នុងស្រុក ប្រទះនឹង**ហែហ៊្លទុន**លើកទាហានមកស្ទាក់ពីមុខ **ស៊ីឡុង**និង**ខៅធូ**ក៏

ដេញកិតពីក្រោយ **គួនអ៊ូ**ងាកមកឃើញក៏រាតទាំងមុខនិងក្រោយជុំវិញខ្លួន ព្រួញធ្នូបាញ់ចម្រុះចំពោះទៅលើខ្លួន**គួនអ៊ូ** ៗក៏យកដាវកាប់ការព្រួញមិនឲ្យរត់ចូលដល់ខ្លួនបាន នឹងងាកទៅចូលស្រុកក៏មិនរួច ងាកគេចទៅខាងឆ្វេងខាងស្តាំក៏មិនបាន ទាហាន**ចូឆ្វ**ចេះតែព្រួតថែមចូលមកទៀតជុំវិញខ្លួន គិតតែច្បាំងតគ្នានៅទីនោះតាំងពីព្រលឹមរហូតដល់ព្រលប់ **គួនអ៊ូ**អស់កម្លាំងណាស់ ក៏នាំទាហានពារទម្លាយកងទ័ព**ចូឆ្វ**រត់ទៅដល់ជើងភ្នំមួយ ក៏ឡើងទៅឈប់សម្រាបនៅលើភ្នំនោះ។ **ហៃហ្វ៊ូទុន, ស៊ីឡុង, ខៅឆូ** ក៏លើកទាហានដេញតាមទៅសំដៅដល់ជើងភ្នំ ហើយរាយទាហានឡោមព័ទ្ធជុំវិញភ្នំនោះ។ ឯទាហាន**ឡៅពី**ដែលចូលទៅរក**គួនអ៊ូ**នោះលុះដល់ពេលព្រលប់មិនបានឃើញ**គួនអ៊ូ**វិលត្រឡប់ចូលទៅស្រុកវិញ ក៏នាំគ្នាបើកទ្វារចេញបំណងនឹងទទួល**ចូឆ្វ**។ បម្រើសេះឃើញដូច្នោះ ក៏នាំយកសេចក្តីទៅជម្រាប**ចូឆ្វ** ៗបានដឹងដូច្នោះហើយ ក៏មានសេចក្តីត្រេកអរណាស់ លើកពលយោធាចូលទៅក្នុងស្រុកហៃហ្វី ហើយឲ្យយកភ្លើងដុតស្រុកនោះឆេះឡើង ប្រាថ្នាដើម្បីនឹងឲ្យ**គួនអ៊ូ**តូចចិត្ត ទើបបង្គាប់ពលទាហានដែលស្និទ្ធឲ្យទៅរាំងរក្សាគ្រួសាររបស់**ឡៅពី**ទុកឲ្យល្អ ហើយ**ចូឆ្វ**ក៏ត្រឡប់មកលើកទាហានណែនចូលទៅចោមព័ទ្ធ**គួនអ៊ូ**ថែមទៀត។ **គួនអ៊ូ**ឃើញពន្លឺភ្លើងឆេះឡើងកណ្តាលស្រុក ក៏នឹកតក់ស្លុតរន្ធត់ចិត្តគិតដល់ភរិយាបុត្រ**ឡៅពី** ទើបលើកទាហានចុះទៅដល់ជើងភ្នំ។ ទាហាន**ចូឆ្វ**ក៏រាស្ទាក់ពីមុខណែនណាន់នឹងចេញមកមិនបាន។ **គួនអ៊ូ**ក៏វិលត្រឡប់ឡើងទៅលើភ្នំរួចចុះមកវិញជាច្រើនសា។ លុះព្រឹកឡើង**គួនអ៊ូ**ក៏ជិះសេះនាំទាហានចុះទៅម្តងទៀត ទទួលក្រឡេកទៅឃើញ**តៀវលៀវ**ជិះសេះកាន់ទួនឡើងមក **គួនអ៊ូ**ក៏ស្រែកសួថា អ្នកឯងមកច្បាំងនឹងយើងឬ? **តៀវលៀវ**តបថា “ខ្ញុំមិនមែនមកច្បាំងនឹងអ្នកទេ ដែលខ្ញុំឡើងមកនេះប្រាថ្នានឹងតបស្នងសងគុណអ្នក” ហើយ**តៀវលៀវ**ក៏លោតចុះពីលើសេះបោះលំពែងចេញពីដៃចូលទៅគំនាប់**គួនអ៊ូ** ៗឃើញដូច្នោះក៏ចុះពីលើសេះមកគំនាប់**តៀវលៀវ**វិញ ហើយសួរសាក**តៀវលៀវ**ថា **ចូឆ្វ**ប្រើអ្នកឯងមកល្បួងលួងលោមយើងឬ? **តៀវលៀវ**តប

ថា "កាលគ្រាមុនអ្នកបានជួយដោះទុក្ខឲ្យខ្ញុំរួចអាយុជីវិតម្តងហើយ គ្រានេះឃើញថាអ្នកមានទុក្ខជាពន្លឹកវិញ ខ្ញុំក៏ខំឧស្សាហ៍ឡើងមកជួប ដើម្បីនឹងជួយដោះទុក្ខអ្នកជាផ្លូវកតវេទិស្នងសងគុណអ្នក"។ **គួនអ៊ូ**សួរថា បើអ្នកឯងគិតដល់គុណូបការៈរបស់យើង ហើយឡើងមកជួយជាកម្លាំងយើង ៗក៏ទទួលអរគុណណាស់។ **តៀវលៀវ**ថា មិនមែនដូច្នោះទេ។ **គួនអ៊ូ**ថា អ្នកឯងថាមិនមែនមកល្បួងលួងលោម ហើយថា នឹងមកជួយកម្លាំងក៏មិនមែនទៀត តើដែលឡើងមកនេះដើម្បីប្រយោជន៍អ្វី? **តៀវលៀវ**តបថា ខ្លួនអ្នកនិង**ឡៅពី, តៀវហ៊ុយ** បែកនិវាសគ្នាទៅហើយ អ្នកក៏មិនដឹងដំណឹងជារស់ឬស្លាប់ កាលពីយប់មិញមហាឧបរាជលើកកងទ័ពទៅវាយស្រុកហែហ្វីបានហើយបានទាំងចាត់ប្រើទាហានឲ្យទៅពិភក្តិរក្សាគ្រួសារ**ឡៅពី** មិនឲ្យនរណាទៅបៀតបៀន ហាមមិនឲ្យធ្វើទុក្ខបុកម្នេញអាណាប្រជានុរាស្ត្រក្នុងស្រុក ឲ្យនៅជាសុខក្សេមក្សាន្ត ខ្ញុំយល់ឃើញថា មហាឧបរាជមានចិត្តមេត្តាចងស្ពានមេត្រីនឹងអ្នកដល់ទីនេះ បានជាខ្ញុំនាំហេតុដូច្នេះមកជម្រាបអ្នកឲ្យជ្រាប។

**គួនអ៊ូ**បានស្តាប់ក៏ខឹងណាស់ និយាយនឹង**តៀវលៀវ**ថា ពីដើមអ្នកឯងប្រាប់យើងថា ខ្លួនមិនមែនមកនិយាយល្បួងលួងលោមយើងទេ ឥឡូវហេតុម្តេចបានជាខ្លួនមកនិយាយដូច្នេះ? បើមិនមែនជាពាក្យល្បួងលួងលោមទេ តើសម្តីនេះនឹងប្រាថ្នាប្រយោជន៍អ្វី? ឯខ្លួនយើងដែលធ្លាក់មកនៅទីនេះជាទីទាល់ចង្អៀតពិតហើយ តែយើងនឹងងាកមុខទៅចូលនឹងនរណាក្រៅពី**ឡៅពី**នោះ អ្នកកុំបីសង្ស័យឡើយ ខ្លួនយើងមិនមែនស្រឡាញ់ជីវិតប៉ុន្មានទេ ព្រោះសេចក្តីស្លាប់ឧបមាដូចគេដេកលក់ ហេតុនេះចូរអ្នកវិលត្រឡប់ទៅប្រាប់**ចូឆូ**ចុះថា ឲ្យត្រៀមពលទាហានទុកឲ្យព្រមចុះ វេលានេះយើងចុះទៅច្បាំងត្រាតែអស់កម្លាំងស្លាប់កណ្តាលរើណរង្គ។

**តៀវលៀវ**បានស្តាប់ក៏អស់សំណើច ហើយនិយាយថា ដែលអ្នកមានប្រសាសន៍ដូច្នេះ ទោសនឹងមានដល់ខ្លួនអ្នកបីប្រការ មនុស្សនានានឹងគរហានិន្ទាអ្នកបាន។ **គួនអ៊ូ**ថា ខ្លួនយើងកាន់សេចក្តីសត្យានុសត្យពិតត្រង់ បានបង់ពាក្យទុកមក

ហើយថា ទោះបីដល់នូវសេចក្ដីស្លាប់ ក៏មិនត្រឡប់ចូលទៅនៅនឹងនរណាក្រៅពីរូប **ឡៅពី**តែមួយ ដែលអ្នកឯងថាយើងនឹងមានទោសបីប្រការនោះ ដោយហេតុអ្វីខ្លះ? **តៀវលៀវ**ឆ្លើយថា "ពីដើមខ្លួនអ្នកនិង**ឡៅពី, តៀវហ៊ុយ** បានចូលស្បថស្បាន់រួមចិត្តជីវិតមួយនឹងគ្នាជាបងប្អូន ថាបើនរណាស្លាប់ ក៏ត្រូវស្លាប់ជាមួយគ្នា គ្រានេះ**ឡៅពី**និង**តៀវហ៊ុយ**បែកនិរាសគ្នាទៅហើយ អ្នកក៏មិនបានដឹងជារស់ឬស្លាប់ ឥឡូវទាហានរបស់អ្នកក៏តិចណាស់ ដែលនឹងនាំចុះទៅតតាំងច្បាំងគ្នានោះ បើអ្នកអន្តរាយជីវិតហើយ ខាង**ឡៅពី, តៀវហ៊ុយ** ក៏នឹងស្លាប់តាមទៅផង នោះពាក្យដែលអ្នកបានសច្ចាស្បថស្បាន់នឹងគ្នា មិនបង់អសារសត្យទៅទេឬ? មនុស្សទាំងឡាយបានដឹងក៏នឹងដៀលថា អ្នកគិតខុសព្រោះឥតប្រាជ្ញា ប្រការមួយ។

ប្រការមួយទៀត **ឡៅពី**ទុកចិត្តលើអ្នកថា អ្នកជាមនុស្សល្អបរិសុទ្ធ បានជាប្រគល់ភរិយាបុត្រឲ្យអ្នកពិភក្តិរក្សា បើអ្នកធ្វើឲ្យអាត្មាឯងស្លាប់ទៅហើយ មាននរណាឡើយនឹងទំនុកបម្រុងភរិយាបុត្រ**ឡៅពី**ទាំងពីរឲ្យដូចខ្លួន សូម្បីបុត្រភរិយា**ឡៅពី**នោះសោតក៏មានរំពឹងតែលើខ្លួនអ្នក ហាក់បីដូចជាដៃជើងសម្រាប់ខ្លួន បើអស់ពីអ្នកទៅហើយ អន្តរាយផ្សេងៗក៏គង់នឹងមាន ការដែល**ឡៅពី**សន្និដ្ឋានទុកចិត្តអ្នកនោះ ក៏នឹងមិនបង់អសារទៅឬ? ខ្ញុំយល់ឃើញមិនសមគួរ នេះជាខប្រការទីពីរ។

ប្រការទីបី ខ្លួនអ្នកល្បីថ្វីដៃខ្លាំងពូកែ ទាំងចេះដឹងទំនៀមទម្លាប់បុរាណមកក៏ច្រើន ហេតុម្ដេចអ្នកមិនរក្សាជីវិតរបស់ខ្លួនទុកចាំ**ឡៅពី** នឹងបានជួបគ្នាគិតការទំនុកបម្រុងផែនដីឲ្យបានសេចក្ដីសុខក្សេមក្សាន្តទៅឯមុខ ទោះបីខ្លួនអ្នកមកធ្លាក់លើសេចក្ដីព្រួយលំបាកប៉ុន្មានក៏ជាគ្រោះកាចរាល់ប្រាណ ឧបមាដូចជាដើរលុយឆ្លងលើគំនរភ្លើងដែលកំពុងឆេះ ពុំនោះសោតឧបមាដូចគេហែលឆ្លងមហាសមុទ្រដ៏ធំជ្រៅពន្លឹក ត្រូវតែគិតនិងរកឧបាយនឹងឆ្លងទៅឲ្យរួចបាន ដើម្បីឲ្យមានកេរ្តិ៍ឈ្មោះថាជាមនុស្សមានប្រាជ្ញាចេះរក្សាជីវិតឲ្យគង់នៅ ទើបពេញត្រូវជាជាតិទាហានមានចិត្តសុចរិតត្រង់នឹងផែនដី ដែលអ្នកស្រដីកាន់យកមានះ ហើយចុះទៅច្បាំងតតាំងនឹង

ពលទាហាន**ចូឆ្វ**ដ៏ច្រើនលើសលុប អ្នកត្រូវដឹងថាមានតែបរាជ័យ ទោះបីជីវិតអ្នកមិនស្លាប់គ្រានេះ ក៏នឹងសូន្យឈ្មោះមិនល្បីឮតទៅថា ជាអ្នកគិតត្រូវនោះឡើយ។ ខ្ញុំយល់ឃើញដូច្នោះហើយទើបថា អ្នកនឹងមានទោសបីប្រការយ៉ាងនេះ។

**គួនអ៊ូ**បានស្ដាប់ក៏ត្រិះរិះយូរណាស់ លុះយល់ឃើញត្រូវក៏ឆ្លើយថា អ្នកនិយាយនោះគួរហើយ ឯទោសដែលមានបីប្រការលើខ្លួនខ្ញុំនោះ អ្នកនឹងឲ្យខ្ញុំធ្វើយ៉ាងម៉េច? **តៀវលៀវ**ឆ្លើយថា “មហាឧបរាជឲ្យទាហានឡោមព័ទ្ធអ្នកជាច្រើនតម្រួតណាស់ បើអ្នកមិនស្ម័គ្រចូលទៅផងទេ ឃើញថាជីវិតអ្នកនឹងអន្តរាយក្នុងគ្រានេះជាអសារឥតប្រយោជន៍ សុំឲ្យអ្នកទៅនៅនឹងមហាឧបរាជសិនចុះ អ្នកនឹងបានប្រយោជន៍បីប្រការ៖

ប្រការមួយ ដែលអ្នកបានស្បថស្បាន់ទុកនឹង**ឡៅពី, តៀវហ៊ុយ**ថានឹងជួយទំនុកបម្រុងផែនដី សេចក្ដីសត្យក្នុងខនេះ ក៏នឹងបានគង់នៅឋិតថេរចេរកាលតទៅ។

ប្រការពីរ ខ្លួនអ្នកក៏នឹងបានទៅពិភក្តិរក្សាបងថ្លៃទាំងពីរនាក់ មិនឲ្យមានសេចក្ដីអន្តរាយដោយហេតុផ្សេងៗ។

ប្រការបី ខ្លួនអ្នកក៏មានថ្វីដៃទាំងមានសតិបញ្ញា នឹងបានគិតការទំនុកបម្រុងព្រះចៅ**ហៀនតេ**ឲ្យសោយរាជសម្បត្តិតទៅ។ ខ្ញុំឃើញមានប្រយោជន៍បីប្រការដូច្នេះទើបមករំឭកសតិអ្នក ចូរអ្នកត្រិះរិះតាមគួរចុះ”។

**គួនអ៊ូ**ឆ្លើយតបថា ដែលអ្នកថាមានប្រយោជន៍ដល់ខ្លួនយើងបីប្រការនោះក៏មែនពិតហើយ តែយើងសុំប្ដេជ្ញាទុកបីប្រការ បើមហាឧបរាជយល់ព្រម យើងនឹងសុំដោះគ្រឹសចេញ ហើយនឹងចុះទៅគំនាប់មហាឧបរាជ តែថាបើសេចក្ដីដែលយើងសុំប្ដេជ្ញានោះខ្វះតែខណាទីមួយ យើងក៏ស៊ូស្លាប់ក្នុងគ្រានេះ ទោះបីនរណាគរហានិន្ទាដូចម្ដេច យើងក៏អស់គិតហើយ តាមចិត្តចុះ។

**តៀវលៀវ**ប្រាប់ថា មហាឧបរាជនោះចិត្តជាអ្នកធូរទូលាយរួសរាយនឹងមនុស្សទាំងពួងណាស់ រមែងគប់សមាគមនឹងអ្នកមានតម្រិះប្រាជ្ញា បើអ្នកនឹង

និយាយប្រការម្តេចមុខជាមហាឧបរាជនឹងព្រម តើខប្តេជ្ញារបស់អ្នកបីប្រការនោះគឺអ្វីខ្លះ?

**គួនអ៊ូ**ឆ្លើយតបថា “ពីដើមយើងបានស្បថស្បាន់គ្នាជាមួយនឹង**ឡៅពី, តៀវហ៊ុយ**ថានឹងជួយទំនុកបម្រុងព្រះចៅ**ហៀនតេ** នូវអាណាប្រជានុរាស្ត្រឲ្យបាននៅជាសុខក្សេមក្សាន្តតទៅ ឥឡូវបើយើងនឹងទៅនៅធ្វើការជាមួយនឹងមហាឧបរាជនោះ យើងត្រូវសុំឲ្យខ្លួនយើងនឹងនៅជាខ្ញុំព្រះចៅ**ហៀនតេ**ដដែល ប្រការមួយ។

មួយទៀត យើងសុំប្រណិប័ត្ររក្សាបងថ្លៃយើងទាំងពីរនាក់ នឹងកុំឲ្យអ្នកឯណាចូលចេញជាទីមើលងាយឲ្យដល់មាត់ទ្វារទីលំនៅបាន យើងនឹងសុំបៀវត្សរបស់**ឡៅពី**ដែលធ្លាប់បានព្រះរាជទាននោះ មកឲ្យបងថ្លៃយើងទាំងពីរតទៅ នេះជាប្រការទីពីរ។

ប្រការបី បើយើងបានដឹងឮថា **ឡៅពី**ទៅនៅទីឯណា ទោះបីយើងមិនបានជួបលោកមហាឧបរាជក្តីណា យើងក៏សុំទៅរក**ឡៅពី**វេលានោះ សូម្បីមហាឧបរាជនឹងឃាត់ហាមយើង ៗក៏ពុំព្រមស្តាប់ឈប់ខានឡើយ។

រីសេចក្តីសម្រេចបីប្រការនេះ ចូរអ្នកនាំទៅជម្រាបស្នើនឹងមហាឧបរាជចុះ បើយល់ព្រមតាមខប្តេជ្ញានេះហើយ យើងនឹងរៀបខ្លួនទៅនៅផងក្នុងវេលានេះ”។

**តៀវលៀវ**ក៏លា**គួនអ៊ូ**ឡើងសេះចុះទៅជួបនឹង**ចូឆូ** ហើយពណ៌នារឿងរ៉ាវដែលបាននិយាយនឹង**គួនអ៊ូ**នោះស្តាប់គ្រប់ប្រការ។

**ចូឆូ**បានស្តាប់គ្រប់ប្រការក៏អស់សំណើច ហើយនិយាយនឹង**តៀវលៀវ**ថាដែល**គួនអ៊ូ**មិនព្រមនៅនឹងយើងនោះ ព្រោះយើងគ្រាន់តែជាទីមហាឧបរាជ **គួនអ៊ូ**ព្រមជាខ្ញុំព្រះចៅ**ហៀនតេ**ក៏ដូចជាបារយើងដែរ បើយើងបង្គាប់បញ្ជាការអ្វីជាផ្លូវរាជការ **គួនអ៊ូ**ក៏មិនត្រូវទទឹងទាស់បាន ខដែល**គួនអ៊ូ**ថា នឹងសុំប្រណិប័តន៍រក្សាបងថ្លៃទាំងពីរ មិនឲ្យអ្នកឯណាប្លែកប្លុំមចូលទៅដល់ទ្វារទីលំនៅនោះយើងក៏ព្រម សព្វថ្ងៃនេះកុំថាតែភរិយា**ឡៅពី**ឡើយ សូម្បីភរិយាតូចចុះទៅ យើងក៏មិនត្រូវចូលចិត្តឲ្យ

ធ្វើផ្តេសផ្តាសសោះ ដែល**គួនអ៊ូ**សុំបៀវត្ស**ឡៅពី**មកឲ្យបងថ្លៃចាយវាយប្រើប្រាស់នោះ យើងនឹងឲ្យទ្វេឡើងទៀត តែខដែល**គួនអ៊ូ**ដឹងថា **ឡៅពី**នៅទីណាតំបន់ណា ហើយ**គួនអ៊ូ**នឹងទៅរកគ្នាមិនបាច់លាយើងនោះ (**ចូឆ្វ**គ្រវីក្បាល) យើងមិនយល់ព្រមសោះ បើ**គួនអ៊ូ**សុំប្តេជ្ញាយ៉ាងនេះហើយ យើងយកមកចិញ្ចឹមរក្សាទុកឲ្យមានកម្លាំងនឹងបានជាប្រយោជន៍អ្វី។

**តៀវលៀវ**ឆ្លើយថា "មហាឧបរាជមិនជ្រាបទេឬ ក្នុងនិទាន**អ៊ីយៀង**ដែលមានមកពីបុរាណថា ពីដើម**អ៊ីយៀង**នៅនឹង**តុងហាង**ចៅហ្វាយស្រុក **តុងហាង**ចិញ្ចឹមរក្សា**អ៊ីយៀង**ជាជំនួសខ្លួនប្រើប្រាស់ លុះនៅមកមានឈ្មោះ**យីប៉េក**ចៅហ្វាយស្រុកមួយនោះ លើកកងទ័ពទៅសម្លាប់**តុងហាង**ស្លាប់ **យីប៉េក**ក៏បាន**អ៊ីយៀង**ទៅចិញ្ចឹមរក្សា ហើយតាំង**អ៊ីយៀង**ឲ្យធ្វើនាហ្មឺនទីប្រឹក្សា **អ៊ីយៀង**ក៏មានសេចក្តីសុខជាយូរតមក ក្រោយនោះ**សៀងជូ**ចៅហ្វាយស្រុក**ហាន់កុក** លើកទ័ពទៅច្បាំងសម្លាប់**យីប៉េក**ស្លាប់ **អ៊ីយៀង**មានកំហឹងចងអាឃាតព្យាបាទនឹង**សៀងជូ** ក៏ទៅដល់ស្រុក**ហាន់កុក** ហើយចូលទៅលាក់ខ្លួនពួនក្នុងទីកំបាំង ប្រាថ្នាដើម្បីនឹងធ្វើ**សៀងជូ**ឲ្យដល់នូវសេចក្តីស្លាប់ **សៀងជូ**ចាប់បាន**អ៊ីយៀង**ដល់ពីរគ្រាមិនបានយកទោស ឲ្យលែង**អ៊ីយៀង**ទៅវិញ លុះខាងក្រោយមក**អ៊ីយៀង**ក៏លបចូលទៅលាក់ខ្លួនដល់ទីខាងក្នុងប្រាថ្នានឹងសម្លាប់**សៀងជូ**ឲ្យបាន **សៀងជូ**ក៏ចាប់ខ្លួនបានទៀត ទើបសួរចម្លើយ**អ៊ីយៀង**ថា អ្នកឯងមកធ្វើប្រទូសរ៉ាយយើង ៗចាប់បានដល់ពីរគ្រាហើយ យើងមិនបានយកទោស លែងខ្លួនទៅវិញ ខ្លួនមិនបានចូលក្នុងគុកឬបានជាមកធ្វើយើងទៀត? យើងក៏ចាប់បាន ដែលខ្លួនមកចងចិត្តគិតព្យាបាទយើងទាំងម្ល៉េះ ពីព្រោះហេតុអ្វី? **អ៊ីយៀង**ឆ្លើយថា ពីមុនខ្ញុំបាទនៅទីពឹង**តុងហាង** ៗចិញ្ចឹមខ្ញុំបាទជាជំនួសប្រើប្រាស់ លុះ**យីប៉េក**លើកទ័ពទៅសម្លាប់**តុងហាង** **យីប៉េក**ក៏យកខ្ញុំបាទទៅតាំងជានាហ្មឺនទីប្រឹក្សា បានសេចក្តីសុខជាអង្វែងតមក គ្រានេះលោកលើកទ័ពទៅសម្លាប់**យីប៉េក**ជាចៅហ្វាយមានគុណលើខ្ញុំ បានជាខ្ញុំចាំចិត្តគិតខឹងនឹងលោក ខំរិះរកទំនង

នឹងប្រទូសរ៉ាយលោកឲ្យបាន ប្រយោជន៍នឹងតបស្នងសងគុណ**ឃីប៉េក**ចៅហ្វាយខ្ញុំ ដែលលោកចាប់ខ្លួនខ្ញុំបានពីរដងហើយលែងទៅវិញ ខ្ញុំក៏មិនអស់សេចក្ដីក្ដៅ បានជាលបចូលមកនៅចាំធ្វើអន្តរាយលោកទៀត លោកក៏ចាប់បាន ខ្ញុំក៏ដឹងថាទោសខ្ញុំដល់ស្លាប់ហើយ តាមតែលោកនឹងប្រោសមេត្តាចុះ។ **សៀងជួ**ថា បើយើងនឹងលែងខ្លួនឲ្យរួចទៅវិញវេលានេះ ខ្លួននឹងនៅធ្វើយើងទៀតឬទេ? **អ៊ុយៀង**ថា បើលោកលែងខ្ញុំទៅទៀត ខ្ញុំក៏នៅចាំចិត្តនឹងគិតធ្វើលោកត្រាតែសម្រេចទើបខ្ញុំបាត់ខឹង បើលោកអាណិតខ្ញុំ ៗសុំអាវលោកដែលពាក់នៅខ្លួននោះឲ្យទានចុះ ទើបខ្ញុំអស់កំហឹងនឹងមិនធ្វើលោកទៀតឡើយ។ **សៀងជួ**បានស្ដាប់ដូច្នោះហើយក៏គិតថា **អ៊ុយៀង**នេះមានសេចក្ដីសត្យកតញ្ញូ ក៏ចង់បាន**អ៊ុយៀង**ទុក ទើបដោះអាវឲ្យ**អ៊ុយៀង** ៗក៏គំនាប់ទទួលយកអាវមក ហើយហូតគ្រប៊ីចេញរួចក៏កាប់អាវនោះដាច់ជាបីកំណាត់ ហើយជម្រាប**សៀងជួ**ថា ខ្ញុំបាទបានតបគុណ**ឃីប៉េក**រួចហើយ **អ៊ុយៀង**ក៏យកគ្រប៊ីនោះអារកខ្លួនឯងស្លាប់នៅទីនោះ។ ឯចិត្ត**គួនអ៊ូ**នោះ បើអ្នកឯណាមានគុណហើយ ក៏មានកតញ្ញូនឹងអ្នកនោះដូចចិត្ត**អ៊ុយៀង** ឯ**ឡៅពី**និង**គួនអ៊ូ**នោះមិនមែនបងប្អូនបង្កើតនឹងគ្នាក៏មែន តែមានសេចក្ដីរាប់អានស្រឡាញ់គ្នាដូចបងប្អូនរួមឧទរជាមួយ ព្រោះបានស្បថស្បាន់នឹងគ្នា គ្រានេះ**ឡៅពី**ក៏នៅជាអ្នកតូចចិញ្ចឹម**គួនអ៊ូ**មិនពេញខ្នាត **គួនអ៊ូ**នៅមានកតញ្ញូនឹង**ឡៅពី**បានជាជាប់ចិត្តជិតដោយមិនបោះបង់ចោល ដូចយ៉ាងមហាឧបរាជមានវាសនាជាជាង**ឡៅពី**ជាច្រើន បើបាន**គួនអ៊ូ**មកទុកទំនុកបម្រុងឲ្យដល់ខ្នាត មុខជា**គួនអ៊ូ**នឹងមានចិត្តកតញ្ញូដល់លោកជាច្រើនឡើងទៀត។

**ចូឆូ**និយាយនឹង**តៀវលៀវ**ថា ដែលអ្នកនាំសេចក្ដីមកប្រៀបធៀបដូច្នេះត្រូវណាស់ ចូរអ្នកស្រូតប្រញាប់ទៅប្រាប់**គួនអ៊ូ**ចុះ ថាដែលសុំប្ដេជ្ញាទាំងបីប្រការនោះយើងព្រមតាមហើយ អ្នកចូរនាំយកខ្លួន**គួនអ៊ូ**ចុះមកជួបនឹងយើងជាប្រញាប់។ **តៀវលៀវ**ក៏លា**ចូឆូ**ឡើងទៅប្រាប់**គួនអ៊ូ** ៗឆ្លើយថា បើមហាឧបរាជយល់ព្រមដូច្នោះហើយ ចូរអ្នកវិលទៅប្រាប់កងទ័ពដែលឡោមព័ទ្ធយើងទុកនោះ ឲ្យថយទៅវិញឲ្យ

អស់ យើងនឹងចុះទៅឲ្យដំណឹងបងថ្លៃយើងទាំងពីរនាក់សិន បើមិនមានសេចក្ដីអន្តរាយទេ សឹមចូលទៅគំនាប់មហាឧបរាជជាក្រោយ។ **តៀវលៀវ**ក៏ចុះទៅជម្រាប**ចូឆូ**តាមសម្ដី**គួនអ៊ូ**។ **ចូឆូ**បានស្ដាប់ដូច្នោះក៏ប្រើបម្រើសេះទៅបង្គាប់ទាហានដែលឡោមព័ទ្ធ**គួនអ៊ូ**នោះឲ្យលើកកងទ័ពថយមកវិញ។

**ស៊ុនហុក**ជម្រាបថា ដែល**គួនអ៊ូ**ព្រមទទួលប្ដេជ្ញានឹងលោកគ្រានេះ ខ្លាចជាកលឧបាយទេដឹង? **ចូឆូ**តបថា **គួនអ៊ូ**ជាមនុស្សមានសេចក្ដីសត្យសុចរិតត្រង់ណាស់ ទោះបីយ៉ាងណា ក៏មិនមែនគិតជាកលឧបាយបញ្ឆោតយើងទេ។

ខណៈកាលកងទ័ព**ចូឆូ**ថយអស់ទៅ **គួនអ៊ូ**ក៏នាំទាហានរបស់ខ្លួនចូលទៅក្នុងស្រែកហែហ្វី ឃើញប្រជារាស្ត្រទាំងឡាយនៅជាប្រក្រតី ក៏ចូលទៅគំនាប់បងថ្លៃទាំងពីរហើយថា ខ្ញុំបាទថ្លោះការគ្រានេះ ធ្វើឲ្យបងទាំងពីរភិតភ័យបានសេចក្ដីព្រួយរំខាននោះ ទោសខ្ញុំបាទខុសជាទម្ងន់ណាស់។

បងថ្លៃទាំងពីរក៏សួរថា បងបានឮដំណឹងថា បងប្រុសអ្នកខ្ចាត់ភ្លាត់ទៅនៅឯណា? **គួនអ៊ូ**ឆ្លើយថា ខ្ញុំបាទមិនបានដឹងឮសោះឡើយ។ បងថ្លៃក៏សួរថា **ចូឆូ**បានស្រុកហៃហ្វីហើយ ប្អូននឹងរិះគិតយ៉ាងម៉េច? **គួនអ៊ូ**ក៏អធិប្បាយសេចក្ដីឲ្យបងថ្លៃទាំងពីរស្ដាប់គ្រប់ប្រការ ហើយថាឥឡូវនេះខ្ញុំបាទចូលមកប្រឹក្សាផងតើបងទាំងពីរនឹងយល់ឃើញដូចម្ដេច? នាង**កាំហ៊ូយិន**ឆ្លើយថា កាលពីយប់មិញ**ចូឆូ**ចូលមកក្នុងស្រុកបាន បងក៏នឹកភ័យខ្លាចក្រែងនឹងមានអន្តរាយផ្សេងៗ តែថាតេជៈបុណ្យវាសនារបស់យើង បណ្ដាលឲ្យ**ចូឆូ**មានចិត្តឈឺឆ្អាលកំជាប់សេនាទាហាន មិនឲ្យចេញចូលមកប្លែប្លុំមដល់មាត់ទ្វារបាន គ្រានេះបងនិងប្អូនក៏នៅក្នុងកណ្ដាប់ដៃ**ចូឆូ**ហើយ បើប្អូននឹងព្រមចូលទៅនៅនឹងគេក៏នៅចុះតែដោយសេចក្ដីទាល់ ប៉ុន្តែបារម្ភខមួយ ថាបើយើងដឹងថាបងអ្នកនៅទីណា យើងនឹងនាំគ្នាទៅរកបង ខ្លាច**ចូឆូ**មិនព្រមបើកឲ្យទៅ។

**គួនអ៊ូ**តបថា “ខនេះកុំឲ្យបងទាំងពីរព្រួយបារម្ភឡើយ បើប្រសិនជាយើងដឹងថា **ឡៅពី**ជាបងនៅទីឯណា យើងក៏ត្រូវនាំគ្នាទៅរក ទោះបី**ចូឆូ**នឹងឃាត់ឃាំងទទឹងទាស់យ៉ាងម្ដេច ខ្ញុំបាទនឹងខំរិះគិតកែខៃឲ្យគ្រាតែបាន” ហើយ**គួនអ៊ូ**ក៏លាបងថ្លៃទាំងពីរនាំទាហានប្រហែលសាមសិបនាក់ចេញទៅដល់មុខបន្ទាយ**ចូឆូ** ៗឃើញ**គួនអ៊ូ**មកដល់ ក៏មានសេចក្ដីត្រេកអរណាស់ ចេញទៅទទួល**គួនអ៊ូ**ចូលមក **គួនអ៊ូ**ក៏គំនាប់**ចូឆូ**ហើយថា ខ្ញុំបាទជាឈ្លើយលោក ៗមិនសម្លាប់ជីវិត ហើយចេញទៅទទួលខ្ញុំបាទដល់ក្រៅបន្ទាយទៀត ព្រះតេជៈព្រះគុណនឹងរកទីបំផុតគ្មាន។

**ចូឆូ**បានស្ដាប់ដូច្នោះក៏និយាយនឹង**គួនអ៊ូ**ថា យើងក៏បានដឹងច្បាស់ថា អ្នកជាមនុស្សមានសេចក្ដីសត្យកតញ្ញូប្រសើរណាស់ ឥឡូវយើងនិងអ្នកបានមកឃើញមុខគ្នា យើងក៏មានសេចក្ដីត្រេកអរ។ **គួនអ៊ូ**តបថា **តៀវលៀវ**ទៅប្រាប់ខ្ញុំបាទថា មហាឧបរាជទទួលបដិញ្ញាណទាំងបីប្រការហើយ ខ្ញុំបាទក៏ទទួលត្រេកអរជាទីបំផុត ព្រោះថា អំណឺះយូរទៅ មហាឧបរាជក៏មិនភ្លេចពាក្យសម្ដី។

**ចូឆូ**តបថា ខប្ដេជ្ញារបស់អ្នកនោះ យើងបានចេញវាចាទទួលព្រមហើយ ទោះបីយ៉ាងណាយើងក៏មិនឲ្យបង់វាចា។ **គួនអ៊ូ**បានស្ដាប់ហើយក៏មានសេចក្ដីត្រេកអរណាស់ ហើយថា បើខ្ញុំបាទឮដំណឹងថា **ឡៅពី**នៅទីឯណា ទោះជាផ្លូវដាច់ស្រយាលត្រូវហែលឆ្លងមហាសមុទ្រឬលុយភ្លើងក្ដី ខ្ញុំបាទនឹងព្យាយាមតាមទៅរក**ឡៅពី**ឲ្យឃើញ ទោះបីខ្ញុំបាទមិនទាន់លាមហាឧបរាជក្ដី ក៏សុំឲ្យមហាឧបរាជអភ័យទោសខ្ញុំបាទ កុំមានសេចក្ដីប្រកួតប្រកាន់ត្រង់ខនេះឡើយ។ **ចូឆូ**ថា “បើអ្នកដឹងដំណឹង**ឡៅពី**ហើយនឹងទៅរកក៏ទៅចុះ តែត្រូវឲ្យត្រិះរិះមើលឲ្យឃើញកលការគួរទៅសឹមទៅ”។ និយាយហើយ**ចូឆូ**ក៏ឲ្យរៀបតុលៀងអាហារឲ្យ**គួនអ៊ូ**បរិភោគ ហើយថា ព្រឹកនេះយើងនឹងលើកកងទ័ពទៅក្រុងហ៊្វៃតោវិញ។

**គួនអ៊ូ**ចូលទៅជម្រាបបងថ្លៃទាំងពីរហើយ ក៏រៀបចំរបស់ទ្រព្យបម្រុងការជាស្រេចហើយ ត្រឡប់មកវិញ។ លុះពេលព្រឹកព្រហាម **ចូឆូ**ក៏លើកទ័ពចេញទៅ

**គួនអ៊ូ**ក៏រៀបចំឲ្យបងថ្លៃទាំងពីរ ឡើងជិះរថតាមកងទ័ព**ចូឆ្វ**ទៅ វេលាយប់បានទៅដល់ឈប់នៅទីសំណាក់តំបន់ណា **ចូឆ្វ**ក៏ឲ្យ**គួនអ៊ូ**និងភរិយា**ឡៅពី**ទាំងពីរនោះ ដេកនៅក្នុងផ្ទះសំណាក់ជាមួយគ្នា ប្រាថ្នានឹងឲ្យ**គួនអ៊ូ**ធ្វើអាក្រក់នឹងបងថ្លៃ ដើម្បីឲ្យប្រែចិត្តលែងគិតអាណិត**ឡៅពី** នឹងបានជាទីកម្មសិទ្ធិដល់ខ្លួន។

ឯ**គួនអ៊ូ**ឲ្យបងថ្លៃទាំងពីរដេកល្វែងខាងក្នុង ខ្លួនអង្គុយដុតទៀនមើលសំបុត្ររវាំងរក្សាបងថ្លៃនៅពីក្រៅទ្វារទាល់តែភ្លឺ មិនមានធ្វេសប្រមាថដល់មួយវេលាឡើយ។ លុះទៅដល់ក្រុងហ៊ូតោ **ចូឆ្វ**ដឹងដូច្នោះក៏ខ្លាចចិត្ត**គួនអ៊ូ**ថា មានសេចក្ដីសត្យកតញ្ញូដល់**ឡៅពី**ជាប្រាកដណាស់។ **ចូឆ្វ**ក៏ចាត់ឲ្យ**គួនអ៊ូ**និងភរិយា**ឡៅពី**ទៅនៅលើផ្ទះតិកពីរខ្នងមានស្ពានដើរឆ្លងកណ្ដាល។ **គួនអ៊ូ**ក៏រៀបចំឲ្យបងថ្លៃទាំងពីរនៅក្នុងតិកមួយ ហើយឲ្យទាហានដែលចាស់ជរានៅយាមរក្សាប្រហែលដប់នាក់ ខ្លួន**គួនអ៊ូ**នៅតិកមួយ រវាំងរក្សាបងថ្លៃទាំងពីរ។

លុះមកនៅក្នុងថ្ងៃមួយនោះ **ចូឆ្វ**ក៏នាំ**គួនអ៊ូ**ចូលទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ**ហើយយកសេចក្ដីក្រាបបង្គំទូលស្នើសរសើរថា **គួនអ៊ូ**នេះមានថ្វីដៃខ្លាំងពូកែល្មមសមគួរនឹងឲ្យធ្វើជានាយទាហានបាន។ ព្រះចៅ**ហៀនតេ**ក៏មានព្រះរាជហឫទ័យសោមនស្សត្រាស់តាំង**គួនអ៊ូ**ជានាយទាហាន។ **ចូឆ្វ**និង**គួនអ៊ូ**ថ្វាយបង្គំលាត្រឡប់មកទីលំនៅរៀងខ្លួន រួច**ចូឆ្វ**ក៏ឲ្យអញ្ជើញ**គួនអ៊ូ**ទៅបរិភោគអាហារ ចាត់ចែងទីអង្គុយឲ្យ**គួនអ៊ូ**អង្គុយខ្ពស់ជាងមន្ត្រីទាំងពួង ហើយឲ្យបំណាច់ជាគ្រឿងមាសនិងគ្រឿងប្រាក់និងព្រៃយ៉ាងល្អដល់**គួនអ៊ូ**ជាច្រើន។ **គួនអ៊ូ**ទទួលយករបស់ទាំងនោះ ហើយ ក៏លា**ចូឆ្វ**ត្រឡប់មកកាន់ទីគេហដ្ឋាន បាននាំសេចក្ដីនោះទៅលាស្រាយរឿងប្រាប់បងថ្លៃស្ដាប់ ហើយប្រគល់របស់ទ្រព្យទាំងអស់ឲ្យទៅបងថ្លៃ។

ឯ**ចូឆ្វ**ទំនុកបម្រុង**គួនអ៊ូ**មិនឲ្យអនាទរ បីថ្ងៃរៀបអាហារភោជនយកទៅឲ្យ**គួនអ៊ូ**ម្ដង ប្រាំថ្ងៃឲ្យម្ដង ហើយចាត់ស្រីក្រមុំរូបល្អស្អាតដប់នាក់ ឲ្យទៅនៅបដិបត្តិបម្រើ**គួនអ៊ូ** ប្រាថ្នានឹងចងចិត្តគិតឲ្យ**គួនអ៊ូ**វង្វេងដោយកាមគុណ។ **គួនអ៊ូ**ក៏នាំស្រីទាំង

ដប់នាក់ទៅប្រគល់ឲ្យបងថ្លៃប្រើប្រាស់ លុះគម្រប់បីថ្ងៃទើប**គួនអ៊ី**ទៅសួរសុខទុក្ខម្តងអង្គុយពីក្រៅមាត់ទ្វារហើយសួរថា បងបានសេចក្តីសុខសប្បាយជាទេ ឬប្រការម្តេច? បងថ្លៃថា សុខសប្បាយជាទេ ចុះប្អូនបានឮដំណឹង**ឡៅពី**បងអ្នកឯងនៅឯណា? **គួនអ៊ី**ថា មិនដឹងទេ ហើយក៏គំនាប់បងថ្លៃវិលមកវិញ។ **ចូឆ្វ**ឮដំណឹងថា **គួនអ៊ី**ប្រតិបត្តិបងថ្លៃដោយសុចរិតដូច្នោះក៏សរសើរ**គួនអ៊ី**ថា មានសេចក្តីសត្យពិតត្រង់នឹងរកនរណាស្មើគ្មាន។

ថ្ងៃមួយ **ចូឆ្វ**ឲ្យអញ្ជើញ**គួនអ៊ី**ទៅបរិភោគអាហារ ឃើញ**គួនអ៊ី**ពាក់អាវរហែក **ចូឆ្វ**ក៏យកអាវមួយយ៉ាងល្អមកឲ្យ**គួនអ៊ី** ៗទទួលយកអាវនោះមកពាក់ពីក្នុងអាវចាស់ ផ្លាស់យកអាវចាស់ពាក់ពីលើ។ **ចូឆ្វ**ឃើញដូច្នោះក៏អស់សំណើច ហើយសួរថា ហេតុម្តេចបានជាយកអាវថ្មីទៅពាក់ពីក្នុង ឬខ្លាចអាវថ្មីឆាប់ចាស់? **គួនអ៊ី**ជម្រាបថា អាវចាស់នេះជារបស់**ឡៅពី**ឲ្យ ឥឡូវ**ឡៅពី**ខ្ចាត់ខ្ចាត់មិនដឹងជាទៅទីណាខ្ញុំបាទមិនដឹងសោះ បានជាពាក់អាវនេះពីក្រៅដើម្បីនឹងមើលជំនួសខ្លួន**ឡៅពី** បើនឹងយកអាវថ្មីពាក់លុបពីក្រៅ មនុស្សទាំងពួងនឹងគរហានិន្ទាថាបានថ្មីចោលចាស់។ **ចូឆ្វ**បានឮដូច្នោះក៏សរសើរ**គួនអ៊ី**ថា មានសេចក្តីកតញ្ញូណាស់ តែនឹកតូចចិត្តនឹងខ្លួនឯង។ **គួនអ៊ី**លាត្រឡប់ទៅផ្ទះវិញ។

លុះនៅមកថ្ងៃមួយ ស្រីបម្រើមកប្រាប់**គួនអ៊ី**ថា ឥឡូវបងថ្លៃទាំងពីរកំពុងតែយំសោកស្រណោះគ្នា ដោយហេតុអ្វីមិនបានដឹងច្បាស់។ **គួនអ៊ី**ភ័យណាស់ក៏ស្ទុះទៅសួរពីក្រៅទ្វារថា បងទាំងពីរយំសោកដោយហេតុអ្វី? នាង**កាំហ៊ូយិន**ឆ្លើយតបថា ពីយប់មិញបងយល់សប្តិឃើញ**ឡៅពី**ធ្លាក់អន្លង់ដួលចុះ លុះភ្ញាក់ឡើងក៏ភ័យស្លុតចិត្តទើបដាស់នាង**ប៊ីហ៊ូយិន**ឲ្យជួយស្រាយនិមិត្តនោះ ក៏យល់ព្រមគ្នាថា**ឡៅពី**ស្លាប់ហើយ បានជាបងយំសោក។ **គួនអ៊ី**បានស្តាប់ដូច្នោះ ក៏ពិគ្រោះឃើញថាយល់សប្តិនោះប្លែក ក៏សម្គាល់ថា **ឡៅពី**នឹងអន្តរាយជាប្រាកដ ក៏យំសោកជាមួយគ្នា ហើយ**គួនអ៊ី**ក៏គិតឧបាយនិយាយប្រាប់បងថ្លៃទាំងពីរ ដើម្បីរសាយសេចក្តីទុក្ខសោក ទើប

ថានិមិត្តនោះសម្គាល់ជាប្រាកដមិនបាន ព្រោះបងទាំងពីរមានចិត្តនឹកគិតដល់**ឡៅពី**មិនភ្លេច ទើបបណ្ដាលឲ្យនិមិត្តមិនល្អដូច្នេះ មិនមែន**ឡៅពី**នឹងអន្តរាយដូចយល់សប្តិដូច្នោះទេ បងទាំងពីរកុំសុបសៅជាទុក្ខពេកឡើយ។ ទទួលមានបម្រើ**ចូឆ្វ**មកប្រាប់**គួនអ៊ូ**ថា មហាឧបរាជប្រើខ្ញុំឲ្យអញ្ជើញលោកទៅ។ **គួនអ៊ូ**ក៏លាបងថ្លៃទៅរក**ចូឆ្វ** ៗ ឃើញ**គួនអ៊ូ**មានទឹកមុខសៅហ្មង ក៏សួរថា ថ្ងៃនេះយើងឃើញអ្នកមិនសប្បាយ តើអ្នកមានព្រួយពីហេតុអ្វី? **គួនអ៊ូ**ជម្រាបថា បងថ្លៃខ្ញុំបាទទាំងពីរនឹករឭកដល់**ឡៅពី**ព្រោះមិនបានដឹងថាជាស្លាប់ឬរស់ បបួលគ្នាយំ ខ្ញុំបាទក៏អត់ទ្រាំពុំបានស្រក់ទឹកភ្នែកតាមទៅ។ **ចូឆ្វ**ឮដូច្នោះក៏និយាយលួងលោម**គួនអ៊ូ** ហើយបបួលបរិភោគអាហារប្រាថ្នានឹងឲ្យរសាយទុក្ខសោក។ **គួនអ៊ូ**ផឹកស្រាស្រវឹងមិនសូវកោតខ្លាច**ចូឆ្វ** យកដៃចាប់ច្បូតពុកមាត់របស់ខ្លួនហើយថា កើតមកជាប្រុសមិនបានទំនុកបម្រុងផែនដី សូម្បី**ឡៅពី**ជាបងក៏មានគុណូបការៈជាទម្ងន់ បើនឹងប្រែចិត្តគិតក្បត់ទៅវិញក្នុងគ្រានេះ ក៏អស់មាននរណានឹងរាប់អានថាជាប្រុសតទៅ។ **ចូឆ្វ**បានស្ដាប់ក៏គិតថា “**គួនអ៊ូ**នៅមានចិត្តសុចរិតពិតត្រង់នឹង**ឡៅពី**ណាស់” **ចូឆ្វ**ធ្វើជាមិនឮហើយក្លែងសួរ**គួនអ៊ូ**ថា ពុកមាត់របស់អ្នកប្រហែលប៉ុន្មានសរសៃ? **គួនអ៊ូ**ថា ពុកមាត់ខ្ញុំបាទប្រហែលបីរយសរសៃ តែដល់រដូវរងារក៏ជ្រុះទៅខ្លះ ខ្ញុំបាទក៏មានធ្វើថង់ដាក់។ **ចូឆ្វ**បានស្ដាប់ក៏ចូលទៅយកព្រែសយ៉ាងល្អឲ្យធ្វើថង់ ហើយយកមកឲ្យគួនអ៊ូដាក់រងពុកមាត់។ **គួនអ៊ូ**ទទួលយកថង់មកហើយ ក៏លា**ចូឆ្វ**ត្រឡប់ទៅផ្ទះវិញ។

លុះវេលាព្រឹក **គួនអ៊ូ**ចូលទៅក្រាបបង្គំគាល់ព្រះចៅ**ហៀនតេ** ៗទ្រង់ទតព្រះនេត្រឃើញ**គួនអ៊ូ**ព្យួរថង់រងពុកមាត់ដូច្នោះ ក៏ត្រាស់សួរថា ថង់ដាក់របស់អ្វីព្យួរនៅកនោះ?

**គួនអ៊ូ**ក្រាបទូលថា “ថង់នេះមហាឧបរាជឲ្យទូលព្រះបង្គំជាខ្ញុំសម្រាប់ដាក់រងពុកមាត់” ហើយ**គួនអ៊ូ**ក៏ដោះថ្វាយ។ ព្រះចៅ**ហៀនតេ**ទតឃើញពុកមាត់**គួនអ៊ូ**វែងដល់ដើមទ្រូងសរសៃល្អិតល្អស្មើគ្នា ក៏ត្រាស់សរសើរថា “អ្នកឯងមានពុកមាត់ល្អ

ណាស់” ទើបព្រះរាជទានឈ្មោះហៅថា “**ប៊ីយៀងកុង**” ប្រែថា “អ្នកពុកមាត់ល្អ” ប្រែថា “អ្នកពុកមាត់ល្អ” ហើយស្ដេចយាងចូលទៅវិញ។

**ចូឆ្វូ**និងនាហ្មឺនមុខមន្ត្រីនូវ**គួនអ៊ូ** ក៏ចេញចាកទីគំនាល់មកដល់ទ្វារព្រះបរមរាជវាំង **គួនអ៊ូ**ក៏ឡើងសេះជិះតាម**ចូឆ្វូ**ទៅ លុះទៅដល់មុខផ្ទះ **គួនអ៊ូ**ក៏លា**ចូឆ្វូ**ទៅផ្ទះរបស់ខ្លួន។ **ចូឆ្វូ**ឃើញសេះ**គួនអ៊ូ**ស្គមក៏សួរថា ហេតុម្ដេចបានជាសេះនេះស្គមម្ល៉េះ? មិនសមនឹងខ្លួនអ្នកជិះសោះ។ **គួនអ៊ូ**ឆ្លើយតបថា សេះនេះខ្សោយធន់នឹងកម្លាំងខ្ញុំមិនបាន បានជាស្គម។ **ចូឆ្វូ**បានស្ដាប់ក៏ប្រើទាហានទៅនាំយកសេះសឹកថៅមក ហើយសួរ**គួនអ៊ូ**ថា សេះនេះរបស់អ្នកណា អ្នកឯងស្គាល់ឬទេ? **គួនអ៊ូ**ថា សេះនេះរបស់**លីប៉ោ** ខ្ញុំបាទបានស្គាល់ច្បាស់។

**ចូឆ្វូ**ក៏រៀបចងគ្រឿងប្រដាប់សព្វគ្រប់ រួចប្រគល់ឲ្យ**គួនអ៊ូ** ៗត្រេកអរណាស់ ចុះពីលើខ្នងសេះលុតជង្គង់គំនាប់ចុះហើយថា ដែលមហាឧបរាជឲ្យទានសេះនេះមកខ្ញុំបាទនោះ ព្រះតេជៈគុណធ្ងន់រកអ្វីប្រៀបមិនបាន។ **ចូឆ្វូ**បានស្ដាប់ដូច្នោះក៏នឹកឆ្ងល់ក្នុងចិត្តហើយសួរថា យើងឲ្យមាសប្រាក់និងរបស់ទ្រព្យដល់អ្នកជាច្រើនណាស់ហើយ អ្នកក៏មិនដែលទទួលអរគុណដូចជាយើងឲ្យសេះម្ដងនេះសោះ ដោយហេតុអ្វីបានជាសត្វតិរច្ឆាន លើសជាងទ្រព្យរបស់មាសប្រាក់ទៅវិញ។ **គួនអ៊ូ**ឆ្លើយថា ខ្ញុំបាទដឹងថាសេះសឹកថៅនេះមានកម្លាំងច្រើន ដើរផ្លូវមួយថ្ងៃបានមួយម៉ឺនសិន (៤00 គ.ម) ប្រសិនបើខ្ញុំបាទដឹងដំណឹង**ឡៅពី**នៅឯណា ទោះបីផ្លូវឆ្ងាយប៉ុន្មានក៏ទៅបានដោយឆាប់រហ័ស ហេតុដូច្នេះទើបខ្ញុំបាទមានសេចក្ដីត្រេកអរចំពោះគុណមហាឧបរាជជាច្រើន ជាងឲ្យទានរបស់ទ្រព្យមាសប្រាក់ទាំងពួង។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

### កណ្ឌទី ២៣

**ចារឹករឿងទាញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ចូឆូ**នឹកតូចចិត្ត ដ្បិតបានទំនុកបម្រុង**គួនអ៊ូ**ដល់ខ្នាត ហើយ**គួនអ៊ូ**មិនប្រែចិត្តពី**ឡៅពី**សោះ រហូតដល់**គួនអ៊ូ**បានទទួលសំបុត្រ**ឡៅពី**ពីគាត់ជិនជាបម្រើ ក្នុងសេចក្ដីសំបុត្រនោះនិយាយរំឭកនិងពីការអន់ចិត្តនឹង**គួនអ៊ូ**)*

**ចូឆូ**បានស្ដាប់ដូច្នោះក៏រឹតតែមានសេចក្ដីតូចចិត្ត ហើយគិតថា យើងបង់គំនិតដែលតាំងចិត្តនឹងទំនុកបម្រុង**គួនអ៊ូ**ដោយយសសក្តិស្រីង្គារបរិវារ **គួនអ៊ូ**ក៏នៅតែរឭកអាល័យ**ឡៅពី**មិនភ្លេច។ **គួនអ៊ូ**លា**ចូឆូ**ទៅកាន់គេហដ្ឋាន។ **ចូឆូ**ក៏សួរ**តៀវលៀវ**ថា យើងបានចិញ្ចឹមរក្សា**គួនអ៊ូ**ដល់ខ្នាតប៉ុណ្ណេះហើយ **គួនអ៊ូ**នៅតែមានចិត្តគិតអាឡោះអាល័យ**ឡៅពី**ដរាបមិនភ្លេច យើងនឹងរិះគិតប្រការម្ដេចទើប**គួនអ៊ូ**នឹងប្រែចិត្តចេញពី**ឡៅពី**? **តៀវលៀវ**ឆ្លើយថា សុំឲ្យលោកបង្អង់ឈប់គិតការណ៍មួយពេលពីរពេលសិនចុះ ចាំខ្ញុំបាទទៅល្បួងនិយាយមើលកល**គួនអ៊ូ**ឲ្យដឹងថា នឹងមានសុចរិតពិតត្រង់នឹង**ឡៅពី**ទៀងទាត់ឬគិតកែប្រែប្រការម្ដេចខ្លះ។

លុះវេលាព្រឹកថ្ងៃមួយ **តៀវលៀវ**ទៅសួរ**គួនអ៊ូ** អ្នកទាំងពីរក៏គំនាប់គ្នាទៅវិញទៅមក។ **តៀវលៀវ**និយាយនឹង**គួនអ៊ូ**ថា តាំងពីមហាឧបរាជបានអ្នកមកទុកជាកម្លាំង លោកក៏មានសេចក្ដីសោមនុស្សត្រេកអរបានទំនុកបម្រុងអ្នកជាច្រើន ពីព្រោះមានមេត្តាដល់អ្នក។ **គួនអ៊ូ**ក៏ថា សព្វថ្ងៃនេះមហាឧបរាជបានជប់លៀងខ្ញុំ បានជាខ្ញុំមានសេចក្ដីសុខរៀងដរាបមក គុណមហាឧបរាជក៏មានលើខ្លួនខ្ញុំច្រើនណាស់ តែខ្ញុំនឹងបានភ្លេច**ឡៅពី**ក៏ទេ។ **តៀវលៀវ**តបថា ធម្មតាកើតមកជាប្រុសឲ្យដឹងច្បាស់ការធ្ងន់និងស្រាល បើអ្នកឯណាមិនដឹងមិនស្គាល់ហើយ មនុស្សទាំងពួងក៏រមែងត្មះតិះដៀលថា អ្នកនោះជាមនុស្សល្ងង់អប្បឥតប្រាជ្ញា ឯមហាឧបរាជនេះក៏មានចិត្ត

អាណិតមេត្តាអ្នក បានទំនុកបម្រុងលើសជាង**ឡៅពី**ទៅទៀត ហេតុម្តេចអ្នកក៏នៅតែគិតដល់**ឡៅពី**មិនដាច់?

**គួនអ៊ូ**ឆ្លើយថា ដែលមហាឧបរាជមានព្រះគុណនឹងខ្ញុំនោះក៏មែនហើយ តែនឹងប្រៀបផ្ទៀបឲ្យស្មើ**ឡៅពី**មិនបានទេ ព្រោះ**ឡៅពី**មានគុណនឹងខ្ញុំមុន ប្រការមួយខ្ញុំបានស្បថស្បាន់ទុកជាបន្ទាល់គឺយកគ្នាជាបងប្អូន បានជាខ្ញុំតាំងចិត្តរក្សាសេចក្តីសត្យកតញ្ញូនៅក្នុងចិត្តសព្វថ្ងៃ ខ្ញុំក៏មានគិតតបគុណមហាឧបរាជសិនទើបបានចេញទៅ ដើម្បីទុកកេរ្តិ៍ឈ្មោះជាមនុស្សកតវេទី។ **តៀវលៀវ**បានស្តាប់ដូច្នោះក៏សួរ**គួនអ៊ូ**ថា បើ**ឡៅពី**ដល់នូវសេចក្តីមរណភាពហើយ អ្នកនឹងនៅជាប់នឹងមហាឧបរាជឬ ៗ នឹងគិតប្រការម្តេច? **គួនអ៊ូ**តបថា ខ្លួនខ្ញុំកើតមកជាប្រុសរក្សាសេចក្តីសត្យពិតត្រង់មិនបង់វាចា ប្រសិនបើ**ឡៅពី**ក្ស័យជន្មាមែន ខ្ញុំក៏ត្រូវស្លាប់តាមគ្នាដោយវាចាដែលបានស្បថស្បាន់ទុកនោះជាប្រាកដ។

**តៀវលៀវ** ឃើញ**គួនអ៊ូ**មានសេចក្តីសត្យពិតត្រង់នឹង**ឡៅពី**ពិតប្រាកដដូច្នោះក៏លាចុះទៅវិញ ទើបនាំយកសេចក្តីទាំងពួងថ្លែងឲ្យ**ចូវឆ្វ**ស្តាប់គ្រប់ប្រការ។ **ចូវឆ្វ**បានស្តាប់ហើយក៏ដកដង្ហើមធំមានតែសេចក្តីវិតក្ក ព្រោះនឹងយក**គួនអ៊ូ**ទុកឲ្យដាច់ពី**ឡៅពី**មិនបានដូចប្រាថ្នា ហើយសរសើរ**គួនអ៊ូ** ថាជាមនុស្សមានសេចក្តីសត្យពិតត្រង់ល្អមែន។ **ស៊ុនហុក**ជម្រាប**ចូវឆ្វ**ថា ឯគំនិតនិងចិត្ត**គួនអ៊ូ**នោះ ប្រុងនឹងតបស្នងសងគុណមហាឧបរាជឲ្យរួចទើបត្រឡប់ទៅវិញ បើដូច្នោះកាលណាមានសឹកសង្គ្រាមក៏កុំអាលឲ្យ**គួនអ៊ូ**ចេញយកអាសា បើ**គួនអ៊ូ**មិនទាន់ធ្វើការឲ្យមានបំណាច់គាប់ប្រសើរទេ ក៏គង់នឹងនៅដោយសារមហាឧបរាជតទៅទៀត។ **ចូវឆ្វ**បានស្តាប់ក៏ចាប់ចិត្តគិតយល់ឃើញត្រូវផង។

ឯ**ឡៅពី**នោះ កាលទៅនៅអាស្រ័យក្នុងស្រុកគីជីវនោះ ក៏ចេះតែគិតនឹករឭកដល់**គួនអ៊ូ, តៀវហ៊ុយ** នឹងគ្រប់គ្រូដែលខ្ចាត់ភ្លាត់ព្រាត់ពីគ្នាមិនបានដឹងថាជារស់ឬស្លាប់ប្រការម្តេច តែងតែជាទុក្ខពុំសុខសប្បាយ មានកាយនោះស្គមថមថយកម្លាំង

ទាំងបរិភោគអាហារនិងនិទ្រាក៏ពុំសូវបានដូចប្រក្រតី។ **អ៊្លូនសៀវ**ឃើញមុខ**ឡៅពី**សៅហ្មងក៏សួរថា អ្នកមានបើព្រួយវិតក្កពីរឿងអ្វី? **ឡៅពី**ឆ្លើយថា ខ្លួនខ្ញុំបាទបែកមកនៅនឹងលោក បានទីពឹងលោកក៏ឥតអំពីភ័យអស់ហើយ តែនៅគិតដល់បុត្រភរិយា និងប្អូនទាំងពីរ ដែលព្រាត់និរាសគ្នាទៅនោះ មិនបានដឹងថាជារស់ ឬស្លាប់ប្រការម្ដេច ប្រការមួយ ខ្ញុំបានកើតមកជាកូនប្រុសហើយគិតនឹងជួយទំនុកបម្រុងផែនដីឲ្យបានសេចក្ដីសុខ ការដែលគិតទុកនោះក៏មិនបានសម្រេច ព្រួយនឹងការកើតមកបានធ្វើជាខ្ញុំស្ដេចហើយ តែឥតប្រយោជន៍នឹងផែនដីសោះ ហេតុដូច្នោះបានជាខ្ញុំបាទមិនសប្បាយ។

**អ៊្លូនសៀវ**បានស្ដាប់ដូច្នោះក៏ឆ្លើយថា **ចូឆ្វូ**ធ្វើការទុច្ចរិតអាក្រក់នឹងផែនដី យើងលើកកងទ័ពទៅដល់តំបន់លីយ៉ុងប៉ងនឹងកម្ចាត់**ចូឆ្វូ**ចេញ ទទួលកាលៈទេសៈវងាបានជា**ង៉ាន់លៀង**នាំពលទាហានទៅតាំងបន្ទាយនៅចុងដែនស្រុកហ៊ូតោ ខ្ញុំក៏លើកកងទ័ពត្រឡប់មកវិញ គ្រានេះជារដូវក្ដៅ អ្នកកុំបរិវិតក្កឡើយ យើងនឹងលើកកងទ័ពទៅច្បាំងម្ដងទៀត វាយយកស្រុកហ៊ូតោឲ្យបាន ឯភរិយាបុត្រនិងប្អូនអ្នកទាំងពីរនោះ ទោះបីស្លាប់រស់ប្រការម្ដេចក៏គង់តែដឹងដំណឹងពុំខាន។

**ទៀនហង**បានឮ**អ៊្លូនសៀវ**ថាដូច្នោះក៏ថា កាល**ចូឆ្វូ**លើកទ័ពទៅវាយស្រុកឈីជីវនោះ ខ្ញុំបាទបានជម្រាបលោកឲ្យលើកកងទ័ពទៅវាយស្រុកហ៊ូតោ លោកមិនយល់ព្រមសោះ ឥឡូវនេះ **ចូឆ្វូ**បានស្រុកឈីជីវហើយ ក៏លើកកងទ័ពទៅរក្សាស្រុកហ៊ូតោវិញ ដែលលោកនឹងលើកទ័ពទៅកម្ចាត់**ចូឆ្វូ**គ្រានេះ ខ្ញុំបាទយល់ថាមុខជាមិនបាន ព្រោះសេនាទាហានរបស់គេព្រមមូលទាំងអស់ សុំឲ្យលោកពិគ្រោះរង់ចាំស្ដាប់ដំណឹងសិន បើឮថា**ចូឆ្វូ**លើកទ័ពទៅញីញក់ស្រុកណា សឹមលើកកងទ័ពទៅខ្ទប់វាយយកស្រុកហ៊ូតោឲ្យបានដោយងាយ។

**អ៊្លូនសៀវ**បានស្ដាប់ក៏និយាយនឹង**ឡៅពី**ថា ពាក្យ**ទៀនហង**ខ្មាស់ឃាត់ទុកដូច្នេះ អ្នកនឹងយល់ឃើញប្រការម្ដេច? **ឡៅពី**តបថា **ចូឆ្វូ**ធ្វើការទុច្ចរិតអាក្រក់មិន

មានកោតខ្លាចអំណាចព្រះចេស្ដាព្រះចៅ**ហៀនតេ**សោះ បណ្ដាមនុស្សក្នុងស្រុកហ៊ូតោនិងអាណាខេត្តក្រៅក៏បានសេចក្ដីឈឺក្ដៅពន់ប្រមាណ បណ្ដារាស្ត្រសព្វទីឋានក៏បានដឹងថា លោកមានសេចក្ដីសត្យកតញ្ញូនឹងផែនដី វេលានេះលោកក៏បានជ្រាបសេចក្ដីអស់ហើយ នឹងនៅព្រងើយកន្ដើយមិនគិតកម្ចាត់អាសត្រូវរាជសម្បត្តិជាប្រញាប់ចេញនោះ មិនគួរសោះ ប្រការមួយទៀត **ចូឆ្វ**នោះក៏មានចិត្តគុំគួនក្លាឡើង ព្រះចៅ**ហៀនតេ**ក៏បានសេចក្ដីព្រួយព្រះទ័យណាស់ សុំឲ្យលោកត្រិះរិះមើលតាមការគួរ។ **អ៊្វូនសៀវ**បានស្ដាប់**ឡៅពី**ក៏យល់ឃើញភ្លាមតាម ទើបឲ្យត្រៀមទាហានទុកព្រម បើបានឫក្សជោគជ័យវេលាណានឹងលើកពលយោធាចេញទៅ។ **ទៀនហង**ក៏ហាមឃាត់**អ៊្វូនសៀវ**ទៀតថា គ្រានេះលោកកុំអាលលើកទៅ លោកចូរស្ដាប់ពាក្យខ្ញុំបាទចុះ។

**អ៊្វូនសៀវ**បានឮដូច្នោះក៏ខឹងណាស់ ឆ្លើយតបទៅ**ទៀនហង**ថា យើងគិតនឹងទំនុកបម្រុងផែនដី ហេតុម្ដេចបានជាមកហាមឃាត់យើងដូច្នេះ ឬខ្លួនមិនចង់ឲ្យព្រះចៅ**ហៀនតេ**បានរួចសេចក្ដីអន្តរាយ? **ទៀនហង**ឃើញ**អ៊្វូនសៀវ**ខឹងក៏តាំងតែភិតភ័យ ទើបលុតជង្គង់ចុះហើយជម្រាបថា ខ្ញុំបាទឃាត់ហាមលោកដោយគំនិតយល់ឃើញតាមសុចរិត មិនមែននឹងគិតឲ្យអន្តរាយដល់ព្រះចៅ**ហៀនតេ**ទេ បើលោកខំមានះលើកកងទ័ពទៅ មុខជានឹងច្លោះការដោយដៃ**ចូឆ្វ**ជាប្រាកដ។ **អ៊្វូនសៀវ**បានឮ**ទៀនហង**ថែមថាដូច្នោះក៏រឹតតែខឹងខ្លាំងឡើង ស្ទុះទាញគ្រប៊ីចេញទៅប្រុងនឹងកាប់**ទៀនហង**។ **ឡៅពី**ក៏ឃាត់ហាម**អ៊្វូនសៀវ**ថា លោកនឹងលើកកងទ័ពទៅធ្វើការរឿណរង្គសង្គ្រាម នឹងមកធ្វើអន្តរាយទីប្រឹក្សាចេញនោះមិនគួរ។ **អ៊្វូនសៀវ**ក៏ស្រោកខឹងព្រោះស្ដាប់**ឡៅពី** ទើបឲ្យយកខ្លួន**ទៀនហង**ទៅដាក់គុកទុក។ **ចស៊ីវ**ឃើញ**អ៊្វូនសៀវ**យក**ទៀនហង**ទៅដាក់គុកដូច្នោះ ក៏នឹកតូចចិត្តពន់ពេកហើយថា **អ៊្វូនសៀវ**នឹងលើកទ័ពទៅគ្រានេះ ទោះបីមានជ័យជម្នះក៏មិនមែននឹងឲ្យបំណាច់រង្វាន់ដល់យើងឡើយ បើទៅធ្វើការសង្គ្រាមនោះច្លោះការនឹង**ចូឆ្វ** ឃើញថាជីវិតយើងនឹងមិន

រួចវិលមកវិញបាន អ្នកទាំងឡាយចូរនៅឲ្យសុខសប្បាយចុះ។ ភរិយានិងគណៈញាតិបងប្អូនឮដូច្នោះ ក៏មានចិត្តគិតអាឡោះអាល័យ**ចស៊ីវ**ពន់ប្រមាណ។

**អ៊្លួនសៀវ**មានសំបុត្រទៅដល់**ង៉ាន់លៀង** ដែលតាំងទ័ពនៅតំបន់លីយ៉ុងនោះ ឲ្យលើកជាកងហ្លួងខាងមុខ លើកចូលទៅលុកក្រុងហ៊ូតោ។ **ចស៊ីវ**ក៏ឃាត់ហាម **អ៊្លួនសៀវ**ថា ដែលលោកនឹងឲ្យ**ង៉ាន់លៀង**លើកទាហានជាកងមុខទៅតែម្នាក់ឯងនោះ ខ្ញុំបាទឃើញថាមិនគួរសោះ ព្រោះ**ង៉ាន់លៀង**លើកទាហានជាមនុស្សម្នោម្នះ មិនដឹងច្បាស់ទីបង់ទីបាន។ **អ៊្លួនសៀវ**ឮដូច្នោះក៏ខឹងណាស់ ឆ្លើយតបទៅ**ចស៊ីវ**ថា **ង៉ាន់លៀង**នោះជាសេនាឯករបស់យើង ហេតុម្តេចអ្នកឯងមកដំនៀលដូច្នេះ? **ចស៊ីវ** មិនឆ្លើយតបសោះ **អ៊្លួនសៀវ**ក៏ចាត់បម្រើសេះឲ្យយកសំបុត្រទៅឲ្យ**ង៉ាន់លៀង** ៗ ទទួលមើលដឹងការណ៍ហើយ ក៏លើកកងទ័ពវាយកន្លងហួសចូលទៅក្នុងដែនស្រុកហ៊ូតោ ដល់តំបន់ប៉ែះប៉ែ ក៏ឲ្យតាំងបន្ទាយនៅទីនោះ។ **អ៊្លួនសៀវ**ក៏នាំ**ឡៅពី**លើកទាហានណូនទៅទៀត។

ខណៈនោះ **ឡៅអៀន**ចៅហ្វាយស្រុកតងគុន ដឹងថាកងទ័ព**អ៊្លួនសៀវ**លើកមកដល់តំបន់ប៉ែះប៉ែ ក៏ធ្វើសំបុត្រចាត់បម្រើឲ្យនាំចូលទៅជម្រាប**ចូឆូ** ៗដឹងសេចក្តីក៏ឃ្លាតខ្មីឲ្យលើកទាហានចេញទៅ។ **គួនអ៊ូ**ឮដំណឹងក៏ចូលទៅជួបនឹង**ចូឆូ**ហើយថា គ្រានេះលោកនឹងលើកទ័ពទៅច្បាំងនឹង**អ៊្លួនសៀវ** ខ្ញុំបាទនឹងសុំអាសាលើកទាហានចេញទៅជាទ័ពស្រួច។ **ចូឆូ**ថា ការសឹកបន្តិចបន្តួចប៉ុណ្ណេះមិនល្មមនឹងក្តៅដល់អ្នកទេ បើសិនណាយើងទៅធ្វើសង្គ្រាមនឹង**អ៊្លួនសៀវ**ហើយទុញទាល់ប្រការម្តេច សឹមឲ្យអញ្ជើញអ្នកទៅជួយជាក្រោយ។ **គួនអ៊ូ**បានឮដូច្នោះក៏លា**ចូឆូ**ត្រឡប់មកផ្ទះវិញ។

**ចូឆូ**ចាត់ការឲ្យប្រមូលកេណ្ឌទាហានបានដប់ប្រាំម៉ឺន ញែកចេញជាបីកង ហើយលើកចេញចាកក្រុងហ៊ូតោ ទៅដល់កណ្តាលផ្លូវទទួលបម្រើសេះនាំព័ត៌មានមកប្រាប់ថា ឥឡូវកងទ័ពមុខ**អ៊្លួនសៀវ**លើកចូលមកដល់តំបន់ប៉ែះប៉ែហើយ។ **ចូឆូ**ឮដូច្នោះក៏បង្គាប់ទ័ពពីរកងនោះថា ឲ្យស្រូតកាត់តម្រង់ផ្លូវលើកចុះទៅតទល់នឹងទ័ព

**អ៊្ហួនសៀវ**ទុក កុំឲ្យលើកឆ្លងចូលមកទៀត យើងនឹងលើកទ័ពណ្ហូនទៅតទល់ជាក្រោយ ហើយ**ចូឆ្វ**ក៏លើកពលទាហានប្រាំម៉ឺនស្រូតរូតទៅដល់តំបន់ប៉ែះប៉ែ ក៏តាំងបន្ទាយព័ទ្ធជុំវិញជាប់ជិតនឹងកងទ័ព**ង៉ាន់លៀង** ចម្ងាយពីគ្នាប្រហែលហាសិបសិន (២ គ.ម) រួច**ចូឆ្វ**ក៏ឡើងទៅលើភ្នំសម្លឹងមើលទៅឃើញទាហាន**ង៉ាន់លៀង**ប្រហែលដប់ម៉ឺនប្លាយតាំងបន្ទាយយ៉ាងមាំ **ចូឆ្វ**និយាយនឹង**សុងហៀន**ថា កាលអ្នកឯងនៅជាមួយនឹង**លីប៉ោ**នោះ យើងបានឮដំណឹងថាដៃខ្លាំងពូកែណាស់ ឥឡូវត្រូវអ្នកឯងលើកទាហានទៅច្បាំងនឹង**ង៉ាន់លៀង**។

**សុងហៀន**ក៏ទទួលបង្គាប់**ចូឆ្វ**ឡើងសេះកាន់ទួន លើកទាហានចុះទៅដល់មុខបន្ទាយ**ង៉ាន់លៀង** ៗក្រឡេកឃើញ ក៏លើកទាហានចេញមកតច្បាំងនឹង**សុងហៀន**បានបីភ្លែង **ង៉ាន់លៀង**យកដាវកាប់**សុងហៀន**ធ្លាក់ពីលើសេះស្លាប់។ **ចូឆ្វ**ឃើញដូច្នោះក៏ភ័យណាស់ថា សេនា**អ៊្ហួនសៀវ**ម្នាក់នេះមានថ្វីដៃខ្លាំងពូកែមែន។ **ងុយសុក**ឆ្លើយថា **ង៉ាន់លៀង**សម្លាប់សម្លាញ់ខ្ញុំបាទស្លាប់ហើយ ខ្ញុំបាទសុំយកអាសាលោកទៅសម្លាប់**ង៉ាន់លៀង**ឲ្យបានវិញទើបអស់កំហឹង។ **ចូឆ្វ**ក៏យល់ព្រមប្រគល់ទាហានឲ្យ**ងុយសុក** លើកចេញទៅតនឹង**ង៉ាន់លៀង** បានមួយស្របក់ **ង៉ាន់លៀង**យកដាវកាប់**ងុយសុក**ដាច់ពាក់កណ្ដាលខ្លួនជាពីរកំណាត់ស្លាប់។ ទាហាន**ងុយសុក**ក៏បែកខ្ចាត់ខ្ចាយរត់ត្រឡប់មកវិញ។ **ចូឆ្វ**ឃើញសេនាទាហានរបស់ខ្លួនបរាជ័យទាំងពីរលើក ក៏នឹកតូចចិត្តណាស់ ពិគ្រោះនឹងនាយកងនាយទ័ពថា **ង៉ាន់លៀង**នេះមានថ្វីដៃក្លាហានខ្លាំងពូកែណាស់ សម្លាប់**សុងហៀន**និង**ងុយសុក**ស្លាប់ហើយ នរណានឹងយកអាសាទៅចាប់ខ្លួន**ង៉ាន់លៀង**បាន?

**ស៊ីឡុង**ឆ្លើយតបថា ខ្ញុំបាទនឹងសុំយកអាសាទៅចាប់ខ្លួន**ង៉ាន់លៀង**ឲ្យបាន។ **ចូឆ្វ** ប្រគល់ទាហានឲ្យ**ស៊ីឡុង**លើកចេញទៅតតាំងច្បាំងនឹង**ង៉ាន់លៀង**បានម្ភៃភ្លែង **ស៊ីឡុង**ធន់កម្លាំង**ង៉ាន់លៀង**មិនបាន ក៏ថយត្រឡប់មកចូលបន្ទាយវិញ។ បណ្ដាទាហានឃើញដូច្នោះក៏តូចចិត្តគ្រប់គ្នា ទទួលពេលព្រលប់យប់ងងឹតទ័ពទាំងសង

ខាងក៏ប្រុងរក្សាបន្ទាយរៀងខ្លួន។ **ចូឆ្វ**ប្រឹក្សានឹងសេនាទាហានទាំងពួងថា នរណានឹងអាចតទល់កម្លាំងនឹង**ង៉ាន់លៀង**បាន? **ស៊ីឡុង**ថា ខ្ញុំបាទយល់ឃើញតែ**គួនអ៊ូ** មានកម្លាំងខ្លាំងពូកែអាចតច្បាំងនឹង**ង៉ាន់លៀង**បាន។ **ចូឆ្វ**ថា បើយើងនឹងឲ្យទៅហៅ**គួនអ៊ូ**មកធ្វើការគ្រានេះ បើ**គួនអ៊ូ**ច្បាំងមានជ័យក៏នឹងដោះដៃទៅពីយើងអសារ។ **ស៊ីឡុង**ឆ្លើយថា ខ្ញុំបាទយល់ឃើញថា **ឡៅពី**ទៅអាស្រ័យនៅនឹង**អ៊ួនសៀវ** បើប្រសិន**គួនអ៊ូ**សម្លាប់សេនាទាហាន**អ៊ួនសៀវ**ម្នាក់នេះបាន **អ៊ួនសៀវ**ដឹងក៏នឹងសម្លាប់**ឡៅពី**ជាប្រាកដ បើ**ឡៅពី**អស់ជីវិតកាលណា**គួនអ៊ូ**ក៏អស់ប្រាថ្នានឹងទៅរក មុខជាបានមកធ្វើកម្លាំងនៅនឹងយើងតទៅ។ **ចូឆ្វ**យល់ឃើញត្រូវ ក៏ប្រើទាហានទៅហៅ**គួនអ៊ូ**ជាប្រញាប់ ទាហានក៏ចូលទៅប្រាប់**គួនអ៊ូ**ថា មហាឧបរាជអញ្ជើញលោកទៅឯកងទ័ព។ **គួនអ៊ូ**បានស្តាប់ក៏រៀបខ្លួនចូលទៅដល់មាត់ទ្វារគំនាប់បងថ្លៃទាំងពីរថា ឥឡូវមហាឧបរាជឲ្យមកហៅខ្ញុំបាទទៅធ្វើការសឹកសង្គ្រាម។ បងថ្លៃទាំងពីរក៏ឆ្លើយតបភ្លាមថា ប្អូនទៅធ្វើការឲ្យមានជ័យជម្នះឈ្នះសត្រូវចុះ តែឲ្យខំស្តាប់ដំណឹងជាបងប្រុសអ្នកនៅឯណា។ **គួនអ៊ូ**ក៏គំនាប់លាបងថ្លៃចេញមក យកសេះសឹកថៅជាជំនិះ។ **គួនអ៊ូ**ក៏ឡើងជិះសេះកាន់ដាវនាំទាហានប្រហែលដប់នាក់ចេញមកក្រៅ បរស្រូតទៅដល់បន្ទាយ**ចូឆ្វ** ៗក្រឡេកឃើញ**គួនអ៊ូ**មកដល់ ក៏មានសេចក្តីត្រេកអរណាស់និយាយថា **ង៉ាន់លៀង**សេនា**អ៊ួនសៀវ**មានថ្វីដៃខ្លាំងពូកែ សម្លាប់**សុងហៀន**និង**ង៉ុយសុក**ស្លាប់ទៅហើយ យើងទើបឲ្យទៅរកអ្នក ប្រាថ្នាដើម្បីនឹងឲ្យជួយលៃលកចូលច្បាំងនឹង**ង៉ាន់លៀង**សងសឹកវិញ។ **គួនអ៊ូ**ឆ្លើយថា ខ្ញុំបាទនឹងសុំចេញទៅមើលកលការសិន។ **ចូឆ្វ**ក៏នាំ**គួនអ៊ូ**ឡើងទៅលើភ្នំទទួលក្រឡេកឃើញ**ង៉ាន់លៀង**លើកទាហានចេញមកជិតមុខបន្ទាយ **ចូឆ្វ**ក៏និយាយប្រាប់**គួនអ៊ូ**ថា អ្នកមើលទៅចុះ ដែលជិះសេះបាំងឆ័ត្ររំភាយនោះឈ្មោះ**ង៉ាន់លៀង**ជានាយទាហានទ័ពមុខ។ **គួនអ៊ូ**ថា **ង៉ាន់លៀង**នោះខ្ញុំបាទនឹងតស៊ូបាន លោកកុំវិតក្កឡើយ ខ្ញុំបាទនឹងកាត់ក្បាល**ង៉ាន់លៀង**មកជូនលោកឲ្យបាន។ **ចូឆ្វ**ក៏និយាយនឹង**គួនអ៊ូ**ថា អ្នកកុំអាលប្រមាថមើលងាយ**ង៉ាន់លៀង**

នោះឡើយ។ **គួនអ៊ូ**ថា ខ្ញុំបាទក៏មានថ្វីដៃខ្លះដែរ បានជាហ៊ានសុំយកអាសាទៅកាត់ក្បាល**ង៉ាន់លៀង**មកជូនលោក ព្រោះឃើញថាមិនជាការក្រលំបាកប៉ុន្មាន ឧបមាដូចយកចង្កឹះចាប់ដុំសាច់បរិភោគ។

**តៀវលៀវ**បានស្ដាប់ក៏និយាយតបទៅ**គួនអ៊ូ**ថា ឯធម្មតាការសឹកសង្គ្រាមនោះ បើនឹងនិយាយការអ្វីដល់មេទ័ពមេកង ចូរប្រមាណការនោះឲ្យទៀងទាត់ប្រាកដសិនសឹមនិយាយ។ **គួនអ៊ូ**ថា “អ្នកកុំព្រួបយរំពឹកខ្ញុំឡើយ” ហើយក៏លា**ចូឆ្វ**ឡើងសេះបំផាយពុះទាហាន**ង៉ាន់លៀង**ចូលទៅ ឯទាហាន**ង៉ាន់លៀង**មិនទាន់ដឹងខ្លួន លុះឃើញ**គួនអ៊ូ**បំផាយសេះទម្លុះចូលមក ក៏ភ័យតក់ស្លុតទាំងអស់គ្នានាំគ្នាស្ទុះរត់ខ្ចាត់ខ្ចាយចេញទៅជាច្រើន។ **គួនអ៊ូ**ក៏បរសេះបំផាយចូលទៅដោយកម្លាំងដ៏រហ័ស ជិតនឹងប៉ះទង្គិចនឹងសេះ**ង៉ាន់លៀង** ៗក្រឡេកឃើញសេនាមុខក្រហមប្លែកខុសពីទាហានធម្មតា ក៏សម្គាល់ថាប្រហែល**គួនអ៊ូ**ប្អូន**ឡៅពី** ហៀបនឹងហាមាត់ប្រាប់ដំណឹងពី**ឡៅពី**តែប្រាប់មិនទាន់ ទទួល**គួនអ៊ូ**លើកដាវឡើងកាប់កង៉ាន់លៀងដាច់ជ្រុះធ្លាក់ទៅដី។ ទាហាន**ចូឆ្វ**ឃើញដូច្នោះ ក៏ស្ទុះស្រូចូលទៅសំដៅកាប់ចាក់ ទាហាន**ង៉ាន់លៀង**ស្លាប់ពិការជាច្រើន ហើយរើសយកគ្រឿងសាស្ត្រាវុធបានជាច្រើន។ **គួនអ៊ូ**ក៏លើកយកក្បាល**ង៉ាន់លៀង**យួរចូលទៅជូន**ចូឆ្វ**ក្នុងបន្ទាយ។ **ចូឆ្វ**ក្រឡេកឃើញទទួលអំណរណាស់ សរសើរ**គួនអ៊ូ**ថា ខ្លួនអ្នកនេះមិនមែនទាហានមនុស្សធម្មតា ដែលមានថ្វីដៃសមរហ័សដូច្នេះ សមជាទាហានទេពតា។

**គួនអ៊ូ**ឮ**ចូឆ្វ**ថាដូច្នោះ ក៏ក្លែងបន្ទោកខ្លួនថា ថ្វីដៃខ្ញុំបាទប៉ុណ្ណោះគ្រាន់តែជាប្រមាណ ប្អូនខ្ញុំឈ្មោះ**តៀវហ៊ុយ**មានកម្លាំងថ្វីដៃខ្លាំងពូកែលើសខ្ញុំបាទទៅទៀត ទោះទាហានប៉ុន្មានរយម៉ឺនការពារនាយទ័ពដូចម្ដេចក្ដី **តៀវហ៊ុយ**ក៏អាចទម្លុះពុះពារទៅកាត់ក្បាលយកមកបានដោយរហ័ស ឧបមាដូចគេចាប់ផ្លែក្រូចនៅក្នុងឡាំង។

**ចូឆូ**បានឮដូច្នោះក៏គិតញញើតខ្លាចថ្វីដៃ**តៀវហ៊ុយ** ហើយបង្គាប់ពួកទាហានឱ្យសរសេរអក្សរទុកក្នុងអាវគ្រប់គ្នាថា បើនរណាជួបប្រទះនឹង**តៀវហ៊ុយ** ក៏កុំអាលតស៊ូច្បាំងឱ្យរង់ស្តាប់កម្លាំងមើលសិន។

ឯទាហាន**ង៉ាន់លៀង** ក៏បែកខ្ចាត់ខ្ចាយរត់ទៅដល់កងទ័ព**អ៊ួនសៀវ** ហើយចូលទៅអធិប្បាយរឿងរ៉ាវឱ្យ**អ៊ួនសៀវ**ស្តាប់គ្រប់ប្រការ **អ៊ួនសៀវ**បានឮដូច្នោះក៏ភ័យស្លុតចិត្ត ហើយគិតពិភាល់ថា ពីដើមមកមិនបានប្រាកដជាទាហាន**ចូឆូ**មុខក្រហមពុតមាត់វែងមានកម្លាំងខ្លាំងពូកែដូច្នេះសោះ។ **ឈីស៊ីវ**ថា ទាហានមុខក្រហមពុកមាត់វែងនោះ ខ្ញុំបាទស្មានថា ប្រាកដជា**គួនអ៊ូ**ប្អូន**ឡៅពី**នោះឯង ឯអ្នកដទៃក៏មិនបានស្គាល់ជាប្រាកដ។ **អ៊ួនសៀវ**បានស្តាប់ក៏ខឹងណាស់ និយាយប្រាប់**ឡៅពី**ថា "ប្អូនអ្នកឯងចូលទៅធ្វើសេនា**ចូឆូ** ហើយមកសម្លាប់សេនាឯករបស់យើងស្លាប់ដូច្នេះ ក៏ឃើញថាអ្នកឯងជាពួកម៉ាកខាង**ចូឆូ** ក្លែងមកនៅនឹងយើងជាកលសឹក យើងនឹងចិញ្ចឹមទុកក៏មិនបាន" **អ៊ួនសៀវ**ក៏បង្គាប់ឱ្យទាហានចាប់**ឡៅពី**នឹងយកទៅសម្លាប់។

**ឡៅពី**បានឮដូច្នោះក៏ភ័យណាស់ និយាយនឹង**អ៊ួនសៀវ**វិញថា ហេតុម្តេចលោកមកស្រាលត្រចៀកស្តាប់តែពាក្យម្ខាងដូច្នេះ សុំឱ្យលោកត្រិះរិះមើលឱ្យគួរសិន ខ្លួនខ្ញុំបាទបង់ស្រុកទេសនិងនិរាសចាកបុត្រភរិយានូវអស់ស្នៃគ្របក្សពួក រត់ចូលមកជ្រកកោននៅនឹងលោកតែខ្លួនមួយ ដោយហេតុ**ចូឆូ**លើកទ័ពមកធ្វើអន្តរាយ **គួនអ៊ូ, តៀវហ៊ុយ**ប្អូនខ្ញុំបាទទាំងពីរកាយ ក៏ខ្ចាត់ខ្ចាយព្រាត់គ្នាទៅមិនដឹងជារស់ឬស្លាប់សាបសូន្យដំណឹងសោះ ដែលថាទាហានមុខក្រហមពុកមាត់វែងនោះ នឹងចំពោះមានតែ**គួនអ៊ូ**មួយក៏ទេ គង់មានរូបអ្នកឯទៀតទៅខ្លះដែរ លោកចូរពិគ្រោះពិចារណាឱ្យធ្ងនថៃទៅសិន។

**អ៊ួនសៀវ**នោះជាមនុស្សមិនមានចរិតមាំមួន លុះបានស្តាប់សម្តី**ឡៅពី**អធិប្បាយក៏រសាយកំហឹង ត្រឡប់ក្រោធខឹងនឹង**ឈីស៊ីវ**វិញថា "ខ្លួនជាមនុស្សអប្ប

ឥតប្រាជ្ញា ក្លែងចរចាញុះញង់ឲ្យយើងសម្លាប់**ឡៅពី**ដូច្នេះមិនគួរសោះ” ថាហើយក៏ក្រោកឡើងហៅ**ឡៅពី**ទៅបរិភោគអាហារ ពិគ្រោះគ្នានឹងលើកទ័ពទៅកម្ចាត់**ចូឆូ**។

**ប៊ុនធីវ**ជម្រាប**អ៊ួនសៀវ**ថា សេនា**ចូឆូ**ដែលសម្លាប់**ង៉ាន់លៀង**នោះ ខ្ញុំបាទនឹងសុំយកអាសាចេញទៅច្បាំងនឹង**ចូឆូ**ម្តងទៀត។ **អ៊ួនសៀវ**ឮហើយក៏ឆ្លើយទទួល ព្រោះឃើញ**ប៊ុនធីវ**មានកម្លាំងច្រើនខ្ពស់ប្រាំមួយហត្ថ មុខខ្មៅដូចសម្បុរខ្លាឃ្មុំ ទាំងមានថ្វីដៃខ្លាំងពូកែសមគួរនឹងតតាំងច្បាំងនឹងសេនា**ចូឆូ**បាន ទើបមានវាចាថា “អ្នកនឹងទទួលយកអាសាចេញទៅគ្រានេះ យើងមានសេចក្តីត្រេកអរណាស់” ហើយ**អ៊ួនសៀវ**ក៏ប្រគល់ទាហានឲ្យ**ប៊ុនធីវ**ដប់ម៉ឺន ចាត់សុទ្ធតែទូកចម្បាំងឲ្យ**ប៊ុនធីវ**លើកឆ្លងទន្លេហាងហោទៅតស៊ូនឹង**ចូឆូ**។

**ឈីស៊ីវ**ជម្រាប**អ៊ួនសៀវ**ថា **ចូឆូ**នោះជាមនុស្សចេះគិតល្បិតល្អន់ណាស់ មានជ័យជម្នះដូច្នេះហើយក៏មិនកំរើប ដែលលោកគិតស្រាលឲ្យ**ប៊ុនធីវ**លើកឆ្លងទន្លេទៅនោះ ខ្លាច**ចូឆូ**ដឹងលើកទាហានមកចាំស្កាត់វាយកាត់កណ្តាលផ្លូវ ក៏នឹងត្រូវថ្លោះការអសារទទេ។ **អ៊ួនសៀវ**ឮហើយខឹងណាស់ គំហកជេរ**ឈីស៊ីវ**ថា អាមនុស្សកម្លៅអប្បឥតប្រាជ្ញា វាគិតការឲ្យតែយើងបង្អៀត។ **ឈីស៊ីវ**មិនបានឆ្លើយទៀតថាម្តេច គេចក្រោកដើរទៅខាងក្រៅ ហើយដកដង្ហើមធំ និយាយកណ្តាលទីប្រជុំទាហានថា អ្នកទាំងឡាយជានាយកងនាយទ័ពរាល់គ្នា បើចៅហ្វាយនាយយើងមិនព្រមស្តាប់ទីប្រឹក្សា ធ្វើការប្រមាថមើលងាយដល់**ចូឆូ**ដូច្នេះ យើងក៏យល់ថាគង់នឹងថ្លោះការ នរណាៗជួយរំឭកពន្យល់ក៏មិនចេះជឿស្តាប់ អ្នកទាំងឡាយនឹងយកសាកអសុភមកចោលទុកនៅទីនេះជាប្រាកដហើយ។ តាំងពីថ្ងៃនោះមក **ឈីស៊ីវ**ក៏ធ្វើជាឈឺមិនបានទៅមករក**អ៊ួនសៀវ**ជួយប្រឹក្សាពិគ្រោះសោះ។ ក្នុងខណៈនោះ **អ៊ួនសៀវ**ក៏បង្ខំចាត់ចែងឲ្យ**ប៊ុនធីវ**លើកទ័ពទៅ។

**ឡៅពី**ក៏និយាយនឹង**អ៊ួនសៀវ**ថា ខ្ញុំមកនៅជ្រកកោននឹងលោកក៏បានសេចក្តីសុខ លោកមានគុណូបការនឹងខ្ញុំជាច្រើន ឥឡូវខ្ញុំសុំយកអាសាទៅជាមួយ**ប៊ុនធីវ**

ដើម្បីជាទីតបស្នងសងគុណលោក ប្រការមួយនឹងបានស៊ើបមើលឲ្យឃើញថា ទាហានមុខក្រហមពុកមាត់វែងនោះប្រាកដជាគួនអ៊ូឬអ្នកឯណាទៀតទេ។ **អ៊ួនសៀវ**បានស្តាប់ដូច្នោះ ក៏មានសេចក្តីត្រេកអរណាស់ និយាយនឹង**ប៊ុនធីវ**ថា **ឡៅពី**ជាមនុស្សមានសតិបញ្ញា យើងនឹងឲ្យចេញទៅជាមួយនឹងអ្នក ដើម្បីនឹងបានជួយគ្នាគិតការធ្វើសង្គ្រាមនឹង**ចូឆូ**។ **ប៊ុនធីវ**តបថា **ឡៅពី**ជាមនុស្សមានតម្រិះប្រាជ្ញាមែនហើយ តែនៅខ្លាចថ្វីដៃ**ចូឆូ** ដែលលោកនឹងឲ្យ**ឡៅពី**ទៅជាមួយនឹងខ្ញុំនោះ ខ្ញុំនឹងបែងរំលែកទាហានបីម៉ឺនឲ្យ**ឡៅពី**លើកចេញទៅជាកងក្រោយ។ លុះបានឫក្សជោគល្អ **ប៊ុនធីវ**ក៏លា**អ៊ួនសៀវ**លើកទ័ពចេញទៅជាកងមុខ ឆ្លងទន្លេហាងហោទៅ តែ**ឡៅពី**ចេញចាកទីនៅមិនទាន់ឆ្លងទន្លេ។

ខណៈកាល**ចូឆូ**មានជ័យជម្នះនោះ ក៏មានចិត្តត្រេកអរសប្បាយ តែងចុតហ្មាយស្នើគុណបំណាច់របស់**គួនអ៊ូ** ចូលទៅក្រាបទូលព្រះចៅ**ហៀនតេ** ៗទ្រង់ជ្រាបសេចក្តីក៏មានសេចក្តីសោមនស្សពន់ប្រមាណ ទើបទ្រង់ព្រះរាជទានត្រាសម្រាប់ងារតាំង**គួនអ៊ូ**ជា ***ហាន់ស៊ីវតេងហោ*** គឺមន្ត្រីមានយសខ្ពស់ធំក្នុងព្រះចៅ**ហៀនតេ** បម្រើក៏ទទួលយកត្រាតាំងនោះទៅប្រគល់ឲ្យ**គួនអ៊ូ**។ ទទួលបម្រើសេះចូលមកប្រាប់**ចូឆូ**ថា ឥឡូវ**អ៊ួនសៀវ**ប្រើ**ប៊ុនធីវ**ឲ្យលើកទាហានមកប្រហែលដប់ម៉ឺនឆ្លងទន្លេហាងហោ។

**ចូឆូ**បានស្តាប់ដូច្នោះ ក៏ចាត់ចែងទាហានកងក្រោយលើកមកជាកងមុខ យកទាហានកងខាងមុខឲ្យត្រឡប់ទៅនៅពីក្រោយ ហើយឲ្យនាំរទេះផ្ទុកស្បៀងអាហារបរទៅពីខាងមុខកងទ័ព។ **លីយ៉យ**ជម្រាបសួរ**ចូឆូ**ថា ហេតុម្តេចបានជាមហាឧបរាជឲ្យនាំយករទេះស្បៀងទៅដាក់ពីមុខកងទ័ពទៅវិញ? **ចូឆូ**តបថា យើងលើកទ័ពទៅធ្វើសង្គ្រាមរាល់ដងយកស្បៀងអាហារទៅដាក់ពីក្រោយ ចេះតែបរាជ័យ ម្តងនេះយើងឲ្យនាំទ័ពស្បៀងទៅដាក់ពីមុខវិញ។ **លីយ៉យ**ជម្រាបសួរថា បើជាប្រទះនឹងកងទ័ព**អ៊ួនសៀវ**កណ្តាលផ្លូវ ទាហាននាំស្បៀងទាំងឡាយសុទ្ធតែមិនចំណានក្នុងការសង្គ្រាម នឹងមិនខូចស្បៀងអាហារឬ? **ចូឆូ**តបថា "អ្នកកុំព្រួយចិត្តគិតអ្វីឡើយ ត្រង់

ដែលនឹងបាននឹងបង់ប្រការម្តេច គង់តែយូរទៅអ្នកនឹងដឹងគំនិតរបស់យើងមិនខាន” ហើយ**ចូឆ្វ**ក៏ស្រូតបង្ខំលើកកងទ័ពដល់កណ្តាលផ្លូវ ទ័ពមុខ**ចូឆ្វ**ជួបប្រទះនឹងទ័ព**ប៊ុនធីវ** បានតតាំងច្បាំងគ្នាជាពន្លឹក កងឡាំលៀងនៃ**ចូឆ្វ**ដែលនាំស្បៀងអាហារទៅនោះ មិនប៉ិនប្រសប់នឹងច្បាំង ក៏បែកខ្ចាត់ខ្ចាយទៅទាំងស្បៀងអាហារអស់។ ទាហាន**ប៊ុនធីវ** ក៏ចាប់បានស្បៀងអាហារនិងគ្រឿងសាស្ត្រាវុធជាច្រើន។ ឯកងឡាំលៀងដែលបែកទៅនោះ ក៏នាំយកព័ត៌មានមកជម្រាប**ចូឆ្វ**ថា ទាហាន**ប៊ុនធីវ**វាយកាត់យកស្បៀងបានអស់ហើយ ខ្ញុំនឹងស្រូតមកជម្រាបលោកមិនទាន់ការ ឥឡូវទាហាន**ប៊ុនធីវ**លើកទន្ទ្រានចូលមក។ **ចូឆ្វ**បានស្តាប់ក៏មិនឆ្លើយតបថាអ្វីសោះ ទទួលក្រឡេកឃើញជើងភ្នំនៅក្បែរផ្លូវ ក៏នាំទាហានទាំងពួងចូលទៅអែបនៅក្បែរជើងភ្នំនោះ ហើយឲ្យទាហានចុះពីលើសេះដោះក្រើសចេញ តែទាហានដែលនៅជិត**ចូឆ្វ**នោះឲ្យកាន់អាវុធប្រចាំការ។ ឯទាហាន**ចូឆ្វ**ក្រឡេកឃើញទាហាន**ប៊ុនធីវ** លើកតាមមកជិតក៏ភ័យណាស់ បបួលគ្នាស្រែកឆោឡោថា ត្រូវតែថយទៅបន្ទាយប៉េះប៉ែវិញ។

**ស៊ុនហ៊ីវ**ដឹងអធ្យាស្រ័យនៃ**ចូឆ្វ** លុះក្រឡេកឃើញទាហានកងទ័ពត្រឡប់បែកខ្ញែកដូច្នោះ ក៏ហាមឃាត់ពួងទាំងនោះថា កុំឲ្យភ្ញាក់ផ្អើលធ្វើអ្វី គ្រានេះយើងបានកលការហើយ។ **ចូឆ្វ**បានឮ**ស៊ុនហ៊ីវ**និយាយដូច្នោះ ក៏ត្រូវចិត្តណាស់អស់សំណើច ហើយញាក់មុខឲ្យ**ស៊ុនហ៊ីវ** ឯទាហាន**ប៊ុនធីវ**លុះលើកគ្នាមកឃើញកងទ័ព**ចូឆ្វ**នៅជើងភ្នំមិនបានរៀបរយជាក្បួនទ័ព **ប៊ុនធីវ**និងទាហានទាំងពួងក៏មានចិត្តកំរើប លើកគ្នាចូលវាយដណ្តើមយកសេះនិងគ្រឿងសាស្ត្រាវុធ ដែលដាក់រាត់រាយនៅក្បែរផ្លូវនោះ។ **ចូឆ្វ**យល់បានចំណាប់ក៏បង្គាប់ឲ្យកងទ័ព ដែលពួនបង្កប់នោះចេញមកឡោមព័ទ្ធ**ប៊ុនធីវ** ចូលចាប់សម្លាប់ទាហាន**ប៊ុនធីវ** ៗក៏វាទ័ពមកច្បាំងតស៊ូជាពន្លឹក លុះឃើញថាកម្លាំងនឹងតទល់មិនបាន ក៏ញាក់សេះស្ទុះបំពានទម្លាយទ័ព**ចូឆ្វ**ដែលព័ទ្ធនោះចេញទៅតែម្នាក់ឯង។ **ចូឆ្វ**នៅលើភ្នំក្រឡេកឃើញដូច្នោះក៏ស្រែកថា **ប៊ុនធីវ**ជា

សេនាឯក**អ៊ូនសៀវ**បំផាយសេះរត់ទៅខាងណោះហើយ នរណានឹងយកអាសាចាប់ឱ្យយើងបាន។

**តៀវលៀវ**និង**ស៊ីឡុង**ក៏ឆ្លើយឡើងទទួលយកអាសា ហើយបំផាយសេះតាមទៅ **ប៊ុនធីវ**ងាកមកឃើញទាហានសេះពីរបរដេញតាមមក ក៏យឺតធ្នូបាញ់ត្រឡប់មកវិញត្រូវកំពូលមួក**តៀវលៀវ**ដាច់ធ្លាក់ពីលើក្បាល **តៀវលៀវ**ខឹងណាស់ក៏ពង្រឹតសេះដេញចូលទៅមុខសេះ**ស៊ីឡុង**បំណងនឹងចាប់ខ្លួន**ប៊ុនធីវ**ឱ្យបាន។ **ប៊ុនធីវ**បាញ់ថែមមួយព្រួញទៀត ត្រូវកំផ្លៀង**តៀវលៀវ**ធ្លាក់ពីលើសេះ **ប៊ុនធីវ**ក៏ងាកត្រឡប់មកនឹងកាប់**តៀវលៀវ** ទទួល**ស៊ីឡុង**ស្ទុះទៅទាន់យកដាវរងដាវ**ប៊ុនធីវ**ជាប់ **ស៊ីឡុង**និង**ប៊ុនធីវ**ក៏ប្រយុទ្ធគ្នាទៅវិញទៅមកបានសាមសិបភ្លែង ទទួលទាហាន**ប៊ុនធីវ**ដែលទៅពីក្រោយលើកពួនចូលមកជាច្រើន **ស៊ីឡុង**ឃើញនឹងថ្លោះការ ក៏នាំ**តៀវលៀវ**ត្រឡប់ចេញមករក**ចូឆូ**។ **គួនអ៊ូ**ឃើញដូច្នោះក៏បំផាយសេះនាំទាហានប្រហែលដប់មួយដប់ពីរនាក់ស្ទាក់ពីមុខ**ប៊ុនធីវ** ហើយស្រែកសន្ធាប់ថា អាសត្រូវបរសេះរត់ទៅណា? **ប៊ុនធីវ**ឮច្បាស់ក៏ខឹងច្រឡោតចូលប្រយុទ្ធនឹង**គួនអ៊ូ**បានបីភ្លែង **ប៊ុនធីវ**យល់កម្លាំងនឹងទប់ពុំបានក៏បរសេះត្រឡប់ទៅរកកងទ័ព**ឡៅពី**។ **គួនអ៊ូ**បរសេះសឹកថៅដេញទៅដោយថ្វីជើងលឿនរហ័សដល់ត្រើយទន្លេហាងហោ ទាន់សេះ**ប៊ុនធីវ**។ **គួនអ៊ូ**ក៏លើកដាវកាប់ត្រូវ**ប៊ុនធីវ**ធ្លាក់ពីលើសេះស្លាប់។ **ចូឆូ**នៅលើកំពូលភ្នំក្រឡេកឃើញ ក៏ឱ្យទាហានដេញកាប់សម្លាប់កងទ័ព**ប៊ុនធីវ**ស្លាប់ជាច្រើន ទាហានដែលសល់ពីស្លាប់ក៏រត់បែកខ្ចាត់ខ្ចាយអស់ទៅ ស្បៀងនិងគ្រឿងសាស្ត្រាវុធ ដែលមាននៅទីនោះប៉ុន្មានក៏បានមកទាហាន**ចូឆូ**ទាំងអស់។

ឯ**ឡៅពី**លើកទាហានបីម៉ឺនជាទ័ពណ្ហូនមកពីក្រោយ**ប៊ុនធីវ** នៅមិនទាន់ឆ្លងទន្លេផង ទទួលជួបប្រទះនឹងទាហាន**ប៊ុនធីវ**ដែលបែកខ្ញែក មកនិយាយប្រាប់**ឡៅពី**ថា មានសេនា**ចូឆូ**ម្នាក់មុខក្រហមពុកមាត់វែង សម្លាប់**ប៊ុនធីវ**ស្លាប់ទៀតទៅហើយ។ **ឡៅពី**ឮដូច្នោះក៏ភ័យស្លុតចិត្ត ខំបរសេះស្រូតទៅដល់មាត់ទន្លេជាយព្រៃ ក្រឡេកទៅ

ឃើញកងទ័ពត្រើយម្ខាងស្គាល់ជាទាហាន**ចូឆ្វ** តែរកមិនឃើញខ្លួន**គួនអ៊ូ**សោះ ឃើញតែទង់ជ័យសរសេរឈ្មោះថា**គួនអ៊ូ** ទទួលទាហាន**ចូឆ្វ**ចុះទូកឆ្លងមក **ឡៅពី**ក៏ភ័យណាស់ នាំទាហានខ្លួនថយក្រោយមកវិញ។

ឯទាហាន**ប៊ុនធីវ**ដែលបែកខ្ញែកនោះមិញ ក៏នាំសេចក្ដីទៅប្រាប់**កួតៅ**និង**ស៊ីមធោយ**ថា ទាហាន**ចូឆ្វ**មុខក្រហមពុកមាត់វែងនោះឈ្មោះ**គួនអ៊ូ** សម្លាប់**ប៊ុនធីវ**ស្លាប់ទៅហើយ។ **កួតៅ**និង**ស៊ីមធោយ**ក៏នាំរឿងនោះទៅជម្រាប**អ៊ួនសៀវ**គ្រប់ប្រការ។ **អ៊ួនសៀវ**បានឮដូច្នោះខឹងណាស់ ក៏ជេរ**ឡៅពី**ថា អា**ឡៅពី**ត្រចៀកឃា! វាក្លែងឲ្យប្អូនវាមកសម្លាប់សេនាឯករបស់យើងដល់ពីរនាក់។ ទទួល**ឡៅពី**ចូលមកដល់ **អ៊ួនសៀវ**បង្គាប់ឲ្យចាប់**ឡៅពី**ទៅសម្លាប់។

**ឡៅពី**សួរថា ខ្ញុំបាទមានទោសទាស់ខុសអ្វី បានជាលោកឲ្យចាប់ខ្លួនខ្ញុំបាទទៅសម្លាប់ដូច្នេះ? **អ៊ួនសៀវ**តបថា កាលគ្រាមុនយើងក៏បានលើកទោសម្ដងទៅហើយ ឥឡូវខ្លួនក្លែងឲ្យប្អូនខ្លួនមកសម្លាប់សេនាឯករបស់យើងស្លាប់ម្នាក់ទៅទៀត ហេតុម្ដេចខ្លួនថាមិនមានទោស? **ឡៅពី**ថា “បើទុកជាដូច្នោះក្ដី សូមឲ្យខ្ញុំបាទជម្រាបសេចក្ដីឲ្យលោកជ្រាបមួយខសិន រួចសឹមសម្លាប់ខ្ញុំបាទៅចុះ” ហើយជម្រាបថា “អំពីមុននោះ**ចូឆ្វ**មានចិត្តរង្កៀសនឹងខ្ញុំបាទជាច្រើន គិតនឹងសម្លាប់ខ្ញុំបាទចោលចេញ ឥឡូវដឹងថា ខ្ញុំបាទមកសំណាក់ជ្រកកោននៅនឹងលោក ក៏ជាកម្លាំងគិតការតទៅទៀត **ចូឆ្វ**ក្លែងប្រើ**គួនអ៊ូ**មកសម្លាប់សេនាលោកចេញ បើលោកជ្រាបហើយ គង់ខឹងនឹងខ្ញុំបាទ ឧបមាដូច**ចូឆ្វ**ខ្ចីដៃលោកឲ្យសម្លាប់ខ្ញុំបាទ **គួនអ៊ូ**នោះប្រាកដជាមិនបានដឹងថា ខ្ញុំបាទមកជ្រកកោននៅនឹងលោកទេ ទើបសុំយកអាសា**ចូឆ្វ** មកសម្លាប់សេនាឯករបស់លោកចេញ បើខ្ញុំបាទមានសំបុត្រទៅប្រាប់**គួនអ៊ូ** ៗដឹងហើយនឹងចូលមករកខ្ញុំបាទ នឹងបានជួយមកធ្វើការជាកម្លាំងលោកតទៅ ដែលលោកខូចសេនាឯកពីរនាក់នោះ ឧបមាបីដូចជាខូចប្រើសពីរតួទៅវិញ”។

**អ៊្ហួនសៀវ**បានស្ដាប់ដូច្នោះ ក៏ត្រឡប់ចិត្តគិតឃើញត្រូវ មានអំណរណាស់ និយាយនឹង**ស៊ីមផោយ, ក្អួតៅ**ថា "ខ្លួនអ្នកទាំងពីរគិតគប់គ្នាមកញុះញង់យើងសម្លាប់**ឡៅពី** ដែលមានសតិបញ្ញាទៀងត្រង់នឹងផែនដីនោះ មនុស្សទាំងពួងដឹងឮហើយក៏នឹងគរហានិន្ទាដល់យើង" ថាហើយក៏បណ្ដេញ**ស៊ីមផោយ**និង**ក្អួតៅ**ចេញទៅ ហើយអញ្ជើញ**ឡៅពី**មកអង្គុយនិយាយថា បើយើងបាន**គួនអ៊ូ**មកទុក ក៏នឹងល្អជាង**ង៉ាន់លៀង**និង**ប៊ុនធីវ**ដប់ស្ទួនទៅទៀត។ **ឡៅពី**ក៏ធ្វើសំបុត្រផ្ញើទៅឲ្យ**គួនអ៊ូ** ហើយជូនទៅឲ្យ**អ៊្ហួនសៀវ**មើល **អ៊្ហួនសៀវ**ក៏ទទួលយកសំបុត្រនោះមកមើល ហើយចាត់មនុស្សឲ្យនាំសំបុត្រទៅឲ្យ**គួនអ៊ូ**នោះ តែមិនមាននរណាហ៊ានទទួលយកអាសាទៅឲ្យសោះ។ វេលានោះ **អ៊្ហួនសៀវ**ក៏ថយកងទ័ពត្រឡប់ទៅតាំងនៅតំបន់ប៊ូអៀង នាយទាហានក៏តាំងបន្ទាយរាយកងទ័ពចុះទៅ ចម្ងាយផ្លូវប្រហែលប្រាំរយសិន (២០ គ.ម) ឲ្យត្រួតរក្សាបន្ទាយទុកឲ្យមាំមួនមិនទាន់ឲ្យចេញច្បាំងនឹងកងទ័ព**ចូឆ្វ**។

ឯ**ចូឆ្វ**ក៏តាំងបន្ទាយនៅតំបន់គួរត លុះ**អ៊្ហួនសៀវ**មិនលើកមកច្បាំងសោះ **ចូឆ្វ**ក៏ចាត់ឲ្យ**ហៃហ៊្ហូទុន**ត្រួតត្រារក្សាបន្ទាយ **ចូឆ្វ**ឯងក៏នាំ**គួនអ៊ូ**លើកកងទ័ពត្រឡប់ចូលទៅក្រុងហ៊ូតោវិញ លុះដល់ហើយក៏ឲ្យរៀបតុលៀងភោជនាហារឲ្យ**គួនអ៊ូ** និងសេនាទាហានទាំងពួងបរិភោគ។ **ចូឆ្វ**ក៏និយាយនឹង**លីយ៉យ**ថា ដែលយើងឲ្យកងឡាំលៀងលើកទៅជាកងមុខនោះ នរណាក៏មិនបានដឹងគំនិតយើងជាកលសឹក បានជាអ្នកខ្លះមកនិយាយទទឹងទាស់នឹងយើង មានតែ**ស៊ុនហ៊ីវ**ម្នាក់ទេ ដែលអាចដឹងគំនិតយើងបាន។ ទាហានទាំងពួងក៏សរសើរតម្រិះប្រាជ្ញា**ចូឆ្វ**ថា លោកមានប្រាជ្ញាវាងវៃក្នុងកលសឹកសង្គ្រាម នឹងរកនរណាប្រៀបផ្ទឹមគ្មានឡើយ។

ខណៈនោះ ទទួលបម្រើសេះកាន់សំបុត្រមកពីការរាជការមកជូន**ចូឆ្វ**ថា **ចោហង**ដែលឲ្យរក្សាស្រុកឃីឡាំប្តឹងមកថា មានមេចោរពីរនាក់ឈ្មោះ **ឡៅផេក១, កុងតៅ១** លើកពួកម៉ាកមកជាច្រើន ដើររាតត្បាតធ្វើទុក្ខបុកម្នេញអាណាប្រជានុរាស្ត្រ

ក្នុងអាណាខេត្តយីឡាំ **ចោហាង**លើកទាហានទៅបង្ក្រាបជាច្រើនគ្រា ឃើញលើសកម្លាំងនឹងការពារពុំបាន ៗជាបកសំបុត្រមកសុំកងទ័ពឲ្យលើកទៅជួយ។

**គួនអ៊ូ**ឮដូច្នោះក៏ជម្រាប**ចូឆ្វ**ថា ដែលពួកចោរធ្វើទុច្ចរិតប្រព្រឹត្តអាក្រក់ដូច្នេះ ខ្ញុំបាទសុំយកអាសាលើកទាហានទៅប្រាបប្រាមឲ្យរាបទាបឲ្យបាន។ **ចូឆ្វ**ឆ្លើយថា អ្នកទើបមកពីធ្វើការសង្គ្រាមកំពុងនឿយហត់នៅឡើយ គុណបំណាច់របស់អ្នកដែលគាប់ប្រសើរក៏ខ្ញុំមិនទាន់បានទូលស្នើសុំឲ្យអ្នក ដែលអ្នកនឹងសុំយកអាសាទៅបង្ក្រាបចោរវេលានេះទៀតក៏មិនគួរ។ **គួនអ៊ូ**ឆ្លើយថា ខ្លួនខ្ញុំបាទនេះបើឈប់នៅស្ងៀមមិនធ្វើការសង្គ្រាមក៏រមែងឈឺថ្កាត់ មហាឧបរាជចូរមេត្តាបើកឲ្យខ្ញុំបាទចេញទៅធ្វើការសឹកចុះ ទើបនឹងបានសេចក្តីសប្បាយ។ **ចូឆ្វ**ថា “បើអ្នកនឹងចង់ទៅធ្វើការសឹកក៏តាមចិត្តចុះ ដែលយើងថាដូច្នេះព្រោះមានចិត្តប្រណី” ហើយ**ចូឆ្វ**ក៏កេណ្ឌទាហានឲ្យ**គួនអ៊ូ**ប្រាំម៉ឺន ឲ្យ**អ៊ីគឹម**និង**ង៉ាក់ជិន**អមទៅផង។ **គួនអ៊ូ, អ៊ីគឹម, ង៉ាក់ជិន** ក៏លា**ចូឆ្វ**លើកទ័ពចេញទៅ។

**ស៊ុនហុក**ចូលជម្រាប**ចូឆ្វ**ថា ដែលលោកប្រើឲ្យ**គួនអ៊ូ**លើកទ័ពចេញទៅនោះ ខ្ញុំបាទយល់ថា **គួនអ៊ូ**នឹងស៊ើបសួរដំណឹងរក**ឡៅពី** បើដឹងថា**ឡៅពី**នៅទីណា **គួនអ៊ូ**មុខជាទៅពុំខាន។ **ចូឆ្វ**តបថា យើងបានជាបើកមាត់ព្រមឲ្យគេទៅហើយ វេលានេះបើនឹងប្រែពាក្យសម្តីឲ្យហៅត្រឡប់មកវិញនោះ ឃើញថាមិនគួរសមសោះឡើយ ដល់តទៅមុខយើងនឹងលែងប្រើឲ្យទៅហើយ។

ឯ**គួនអ៊ូ**កាលលើកទ័ពចេញទៅនោះ បានទៅដល់ស្រុកយីឡាំឲ្យបោះទ័ពចាប់ធ្វើបន្ទាយជាមាំមួន លុះពេលកណ្តាលអាធ្រាត្រស្ងាត់ កងក្រវែលចាប់បានឈ្លើយពីរនាក់ ឃុំនាំខ្លួនជូន**គួនអ៊ូ** ៗក្រឡេកឃើញ**ស៊ុនខៀន**ក៏នឹកតែក្នុងចិត្តថា “**ស៊ុនខៀន**ទៅនៅទីណាបានជាឲ្យគេចាប់បានមក” **គួនអ៊ូ**ក៏បណ្តេញមនុស្សទាំងអស់ឲ្យដើរទៅខាងក្រៅ ទើបខ្សឹបសួរ**ស៊ុនខៀន**ថា តាំងពីយើងបែកគ្នានឹងទ័ព**ចូឆ្វ**ទៅគ្រានោះ យើង

ទាំងអស់គ្នាក៏ព្រាត់ប្រាសនិរាសទៅតែដោយខ្លួន **ឥឡូវ**អ្នកមកនៅឯណា បានជាគេចាប់បាន?

**ស៊ុនខៀន**តបថា “កាលយើងបែកគ្នាទៅនោះក៏ព្រាត់ខ្ចាត់ពី**ឡៅពី** ខ្ញុំមកអាស្រ័យនៅនឹង**ឡៅផេក**ក្នុងស្រុកយីឡាំ” រួច**ស៊ុនខៀន**ក៏សួរ**គួនអ៊ូ**វិញថា ហេតុម្ដេចបានជាអ្នកទៅនៅនឹង**ចូឆូ**? ចុះបងថ្លៃអ្នកទាំងពីរនោះ ជាសុខសប្បាយតាមធម្មតាទេឬ?

**គួនអ៊ូ**ក៏ពណ៌នាសេចក្ដីតាំងពីដើមដល់ចប់ ប្រាប់**ស៊ុនខៀន**ស្ដាប់គ្រប់ប្រការ **ស៊ុនខៀន**ក៏និយាយនឹង**គួនអ៊ូ**ថា ខ្ញុំបាទឮដំណឹងថា **ឡៅពី**ទៅនៅនឹង**អ៊ួនសៀវ** ចៅហ្វាយស្រុកគីជីវ ដែលខ្ញុំមកនៅនឹង**ឡៅផេក**នេះ ក៏ខ្ញុំបាននិយាយបញ្ចុះបញ្ចូល **ឡៅផេក**និង**កុងតៅ** ៗក៏ព្រមចូលទៅធ្វើការនឹង**ឡៅពី** ដើម្បីជួយគិតការកម្ចាត់**ចូឆូ** ចេញឲ្យបាន ឥឡូវ**ឡៅផេក**ដឹងថាអ្នកលើកទ័ពមក ទើបប្រើទាហាននេះឲ្យនាំផ្លូវខ្ញុំមក មានបំណងនឹងឲ្យខ្ញុំជូនដំណឹងអ្នកថា ពេលព្រឹកស្អែក**ឡៅផេក** និង**កុងតៅ**នឹងចេញមកច្បាំង ហើយធ្វើជាចាញ់ថយទ័ពទៅ ឲ្យអ្នកមានបំណាច់គាប់ប្រសើរនឹង **ចូឆូ** ដើម្បីនឹងបាននាំបងថ្លៃទាំងពីរទៅជួបនឹង**ឡៅពី**ឯស្រុកគីជីវ។

**គួនអ៊ូ**បានស្ដាប់ដូច្នោះក៏មានសេចក្ដីត្រេកអរណាស់ថា ឥឡូវយើងដឹងដំណឹងជាក់ហើយថា **ឡៅពី**ទៅនៅនឹង**អ៊ួនសៀវ** មុខជាយើងនឹងនាំបងថ្លៃទាំងពីរទៅជួបនឹង**ឡៅពី**មិនខាន ទោះបី**អ៊ួនសៀវ**ដឹងថាយើងបានសម្លាប់សេនាឯក**អ៊ួនសៀវ**ពីរនាក់ស្លាប់ **អ៊ួនសៀវ**នឹងសម្លាប់ជីវិតយើងវិញក៏តាមចិត្តចុះ សុំឲ្យតែឃើញមុខ**ឡៅពី**បងយើងសិន បើយើងមានជ័យជម្នះ**ឡៅផេក**ហើយ យើងនឹងត្រឡប់ចូលទៅក្រុងហ៊ូតោដើម្បីនឹងលា**ចូឆូ**នាំបងថ្លៃទាំងពីរទៅរក**ឡៅពី**។ **ស៊ុនខៀន**ថា បើដូច្នោះ ខ្ញុំនឹងទៅរកឡៅពីមុនអ្នក ដើម្បីស្ដាប់ដំណឹងមើលជា**អ៊ួនសៀវ**ខឹងខ្លាំងនឹងអ្នកណាស់ទៅឬប្រការម្ដេច? បើបានដំណឹងល្អឬអាក្រក់យ៉ាងណា ខ្ញុំនឹងស្រូតមកជម្រាបអ្នកឲ្យដឹងដំណឹងវិញ។ **គួនអ៊ូ**ក៏ពេញចិត្តណាស់ លុះពេលយាមបីក៏បង្គាប់ឲ្យទាហានដែល

ទំនុកទុកចិត្តនោះ ស្រាយលែង**ស៊ុនខៀន**និងទាហានម្នាក់លបរត់ចេញទៅពីបន្ទាយ ដល់ពេលព្រឹក**គួនអ៊ូ**ក៏ចាប់ចែងទាហានលើកចេញទៅច្បាំងនឹងពួកចោរ។

ឯ**កុងតៅ**លុះដឹងថា**គួនអ៊ូ**លើកទ័ពមក ក៏លើកទាហានចេញទៅត។ **គួនអ៊ូ** ក្រឡេកឃើញក៏បរសេះស្ទុះទៅពីមុខទាហានហើយក៏ក្ដែងស្រែកថា នែ**កុងតៅ**! ហេតុម្ដេចបានជាខ្លួនមកគប់នឹងបក្សពួកចោរ ធ្វើអំពើទុច្ចរិតក្បត់ផែនដីដូច្នេះ? **កុងតៅ**ឆ្លើយតបថា យើងនឹងបានជាមនុស្សទុច្ចរិតនឹងផែនដីក៏ទេ តែខ្លួនអ្នកឯង ទេតើជាមនុស្សអកតញ្ញូមិនដឹងគុណនាយចៅហ្វាយ ដូចយ៉ាង**ឡៅពី**ជានាយ ចៅហ្វាយរបស់ខ្លួនទៅនៅជ្រកកោននឹង**អ៊ួនសៀវ** ហេតុម្ដេចក៏ខ្លួនទៅចូលខាង**ចូឆូ** បើដូច្នេះខ្លួនមិនក្បត់នឹង**ឡៅពី**ឬ? **គួនអ៊ូ**មិនឆ្លើយតបសោះ ក៏បរសេះចូលប្រយុទ្ធនឹង **កុងតៅ**បានប្រាំភ្លែង **កុងតៅ**ធ្វើជាទាញសេះរត់ **គួនអ៊ូ**ក៏បំផាយសេះដេញពីក្រោយ **កុងតៅ**ឃើញ**គួនអ៊ូ**ដេញទាហានចូលទៅក៏រាបង្អង់សេះមកទឹមស្មាគ្នា ហើយងាកមុខ មកនិយាយនឹង**គួនអ៊ូ**ថា ស្រុកឃីឡាំដែលនៅក្នុងកណ្ដាប់ដៃយើងនេះ យើងនឹងលើក ប្រគល់ជូនអ្នកទាំងអស់ តែកុំឲ្យអ្នកភ្លេចគុណបំណាច់**ឡៅពី**ឡើយ។

**គួនអ៊ូ**បានឮ**កុងតៅ**ថាដូច្នោះ ក៏ឃើញត្រូវគ្នានឹងសម្ដី**ស៊ុនខៀន** ទើបក្ដែងបរ សេះដេញចូលទៅក្នុងពួកទាហាន**កុងតៅ** ៗក៏នាំ**ឡៅផេក**និងទាហានទាំងពួងរត់ទៅ ឯបណ្ដាស្រុកចំណុះដែលឡើងស្ដាប់បង្គាប់ស្រុកឃីឡាំទាំងប៉ុន្មាន ដែល**ឡៅផេក**និង **កុងតៅ**វាយយកបាននោះ **គួនអ៊ូ**ក៏ប្រាបប្រាមបានរាបទាបដូចដើម ហើយ**គួនអ៊ូ**ក៏ លើកទ័ពត្រឡប់ចូលទៅក្រុងហ៊ូតោវិញ នាំយកសេចក្ដីទៅជម្រាប**ចូឆូ**ថា បានប្រាប ប្រាមចោររាបទាបហើយ។ **ចូឆូ**សប្បាយរីករាយក្នុងចិត្តណាស់ ហៅ**គួនអ៊ូ**បរិភោគ អាហារជាមួយគ្នា ហើយឲ្យបំណាច់រង្វាន់សេនាទាហានតាមគុណានុរូបដ៏សមគួរ។

**គួនអ៊ូ**ក៏លា**ចូឆូ**មកផ្ទះ ទើបចូលទៅគំនាប់បងថ្លៃទាំងពីរតម្រង់មាត់ទ្វារ ពណ៌នាសេចក្ដីដែលបានទៅធ្វើការសង្គ្រាមមានជ័យជម្នះ ឲ្យបងថ្លៃស្ដាប់គ្រប់ ប្រការ។ នាង**កាំហ៊ូយិន**ក៏សាកសួរថា ប្អូនទៅធ្វើសឹកពីលើកហើយបានឮដំណឹងបង

អ្នកឯងខ្លះដែរឬទេ? **គួនអ៊ូ**ក៏គិតថា បើនឹងពណ៌នាដោយត្រង់ក្រែងខ្លួនខ្វាយសេចក្ដីទៅដល់**ចូអ្នូ**ទើបជម្រាបថា ខ្ញុំបាទទៅធ្វើការនោះ ក៏បានយកចិត្តគិតសាកសួរដំណឹងជាដរាប តែមិនបានដឹងថាបងនៅទីណាសោះ។ និយាយដូច្នោះហើយ **គួនអ៊ូ**ក៏លាបងថ្លៃថយទៅទីកន្លែង។ នាង**កាំហ៊្វុយិន**ឮ**គួនអ៊ូ**និយាយដូច្នោះក៏ឲ្យពិភាល់ណាស់ ប្រឹក្សាគ្នានឹង**ប៊ីហ៊្វុយិន**ថា "ប្រហែល**ឡ្វៅពី**ស្លាប់ហើយ **គួនអ៊ូ**ខ្លាចយើងនឹងសោកសៅ ក៏ក្លែងបញ្ឆោតភូតយើងមិនប្រាប់តាមត្រង់" និយាយហើយក៏កៀកកគ្នាសោកាទួញយំដំឱរ៉ា។

វេលានោះ ទាហានចាស់របស់**ឡ្វៅពី**ដែលទៅជាទ័ពជាមួយនឹង**គួនអ៊ូ** បានឃើញភរិយា**ឡ្វៅពី**សោកទួញយំដូច្នោះ ក៏ចូលទៅខ្សឹបប្រាប់ថា អ្នកកុំជាទុក្ខព្រួយពេក **ឡ្វៅពី**ចៅហ្វាយខ្ញុំបាទមិនមានអន្តរាយអ្វីទេ សព្វថ្ងៃលោកទៅនៅនឹង**អ៊ួនសៀវ** ចៅហ្វាយស្រុកគីជីវ។ នាង**កាំហ៊្វុយិន**និងនាង**ប៊ីហ៊្វុយិន**បានឮដូច្នោះក៏ធូរស្រាលក្នុងចិត្តទើបសួរថា ហេតុម្ដេចបានជាអ្នកឯងដឹងរឿងនេះ? ទាហាននោះក៏ជម្រាបថា ខ្ញុំបាទបានទៅទ័ពជាមួយនឹង**គួនអ៊ូ** មានគេប្រាប់ដំណឹងដូច្នោះ។ នាង**កាំហ៊្វុយិន**ក៏ឲ្យហៅ**គួនអ៊ូ**មកនិយាយហើយថា អ្នកឯងនៅនឹង**ឡ្វៅពី** ៗមិនបានធ្វើអ្វីឲ្យទាស់ចិត្តសោះ គ្រានេះបានចូលមកនៅនឹង**ចូអ្នូ** ៗក៏ទំនុកបម្រុងឲ្យពេញប្រាថ្នា បានជាសប្បាយដោយយសបណ្ដាស័ក្តិ ភ្លេចទឹកដល់**ឡ្វៅពី**ហើយឬ? បានជាមិនយកដំណឹងដែលឮពិតនោះមកប្រាប់ឲ្យយើងដឹងផង។ **គួនអ៊ូ**ភ័យស្លុតចិត្តលុតជង្គង់ចុះហើយជម្រាបថា ខ្ញុំបាទនឹងបានគិតប្រទូសរ៉ាយនឹង**ឡ្វៅពី**ជាបង ឬប៉ងនឹងបំភ្លេចគុណមិនទឹកនាដូច្នោះក៏ទេ តែថាបើខ្ញុំបាទនឹងជម្រាបអ្នកជាបងតាមត្រង់ទៅ ខ្លាចគេដឹងសាយសុះបែករឿងនោះទៅដល់**ចូអ្នូ** ៗក៏នឹងប្រុងប្រយ័ត្ន មិនឲ្យយើងចេញខ្លាត់ទៅបានដោយស្រួល ហេតុដូច្នេះបានជាខ្ញុំបាទមិនជម្រាបដោយត្រង់។

នាង**កាំហ៊្វុយិន**ថា បើប្អូនមានចិត្តគិតដល់បងអ្នកជាក់ប្រាកដ សូមឲ្យគុណសណ្ឋិតជួយឲ្យប្អូនបានជ័យឈ្នះសត្រូវគ្រប់ទិសចុះ វេលានេះបានដំណឹងហើយគួរ

តែប្អូនខំរិះគិត វេះវត់ទៅរកបងឲ្យឃើញមុខគ្នាជាប្រញាប់។ **គួនអ៊ូ**ក៏លាត្រឡប់មកវិញ ចេះតែរិះគិតមិនឈប់សម្រាក ឃ្លាតចាកចោលបរិភោគអាហារនិងនិទ្រាជានិរន្តរ៍។

ឯ**អ៊ីគីម**កាលទៅទ័ពជាមួយនឹង**គួនអ៊ូ**នោះ លុះដឹងដំណឹងថា **ឡៅពី**ទៅនៅនឹង**អ៊ួនសៀវ**ដូច្នោះ **អ៊ីគីម**ក៏នាំសេចក្តីនោះទៅជម្រាប**ចូឆូ**គ្រប់ប្រការ។ **ចូឆូ**បានស្តាប់ព័ត៌មានកាលណាក៏មិនមានសេចក្តីសប្បាយសោះ ទើបប្រើ**តៀវលៀវ**ឲ្យទៅស្តាប់ដំណឹង**គួនអ៊ូ**តើជានឹងរិះគិតយ៉ាងណា បើបានដំណឹង**ឡៅពី**ដូច្នេះហើយ។ **តៀវលៀវ**ក៏លា**ចូឆូ**ទៅរក**គួនអ៊ូ** ដល់ហើយក៏គំនាប់គួរសមនឹងគ្នា ឃើញកិរិយា**គួនអ៊ូ**មិនសប្បាយក៏និយាយថា ខ្ញុំឮគេថាអ្នកទៅគ្រានេះ បានឮដំណឹង**ឡៅពី**ថាទៅនៅខាងស្រុកទិសឯជើង ខ្ញុំក៏ភ្លយមានចិត្តសប្បាយជាមួយនឹងអ្នក។ **គួនអ៊ូ**តបថា ខ្ញុំដឹងដំណឹង**ឡៅពី**មានជីវិតរស់នៅឡើយ ឥឡូវខ្ញុំក៏មានសេចក្តីព្រួយវិតក្ក ព្រោះតែពុំបានឃើញមុខ**ឡៅពី**នោះសោះ ដែលអ្នកនឹងមានចិត្តសប្បុរសជាមួយនឹងខ្ញុំនោះ ធ្វើម្តេចនឹងត្រូវ។

**តៀវលៀវ**តបថា ខ្លួនអ្នកនឹង**ឡៅពី**បានជាមិត្តភក្តិ ហាក់ដូចជាបងប្អូនបង្កើតនឹងគ្នាទៅហើយ ខ្លួនខ្ញុំនេះក៏ជាមិត្តភក្តិនឹងអ្នកដែរ តើចិត្តអ្នកដែលស្រឡាញ់**ឡៅពី**និងដូចគ្នាដែរឬដូចម្តេច? **គួនអ៊ូ**តបថា អ្នកនិងខ្ញុំជាមិត្តរាប់អានគ្នាក៏មែន តែខ្ញុំមិនមែនមានចិត្តស្រឡាញ់ឲ្យស្មើ**ឡៅពី**ទេ ព្រោះ**ឡៅពី**នោះខ្ញុំបានគប់ប្រសព្វមកយូរហើយ ខាងខ្ញុំក៏លើកទុកដាក់ថាជាបងហើយជានាយចៅហ្វាយផង មួយទៀតបានទាំងស្បថស្បាន់ទុកនឹងគ្នាទៅវិញទៅមក ហេតុនេះបានជាខ្ញុំត្រូវរាប់អានស្រឡាញ់**ឡៅពី**ជាជាងអ្នក។ **តៀវលៀវ**ថា ឥឡូវអ្នកដឹងដំណឹងថា **ឡៅពី**នៅនឹង**អ៊ួនសៀវ**ហើយ អ្នកនឹងទៅឬ ៗនឹងគិតប្រការម្តេច? **គួនអ៊ូ**តបថា ពីដើមដំបូងខ្ញុំក៏បានជម្រាបទុកមកដល់មហាឧបរាជដូចខ្លួនអ្នកធ្វើជាបន្ទាល់ខ្ញុំស្រាប់ ថាខ្ញុំសូមលាទៅ

តាមពាក្យសញ្ញា ហេតុនេះបើអ្នកស្រឡាញ់ខ្ញុំសូមឲ្យជួយអនុគ្រោះនាំយកធុរៈនេះទៅស្នើដល់មហាឧបរាជឲ្យទានផងចុះ សូមកុំឲ្យមហាឧបរាជមានកំហឹងដល់ខ្ញុំឡើយ។

**តៀវលៀវ**ក៏នាំយកសេចក្ដីនោះទៅជម្រាប**ចូឆ្វ**គ្រប់ប្រការ **ចូឆ្វ**ក៏ថា យើងរិះគិតចងចិត្ត**គួនអ៊ូ**ទុកឲ្យបាន តែ**គួនអ៊ូ**ចេះរំខានព្រួយចិត្តគិតទៅរក**ឡៅពី**មិនភ្លេច។

ខណៈនោះ មានបម្រើទៅប្រាប់**គួនអ៊ូ**ថា មានគេមករកលោក។ **គួនអ៊ូ**ឲ្យហៅចូលទៅហើយសួរថា អ្នកឯងឈ្មោះអ្វី នៅស្រុកណា មានការអ្វីមករកយើង? **តាន់ជិន**ឆ្លើយថា ខ្ញុំបាទឈ្មោះ**តាន់ជិន**ជាទាហាន**អ៊ួនសៀវ** ឥឡូវ**អ៊ួនសៀវ**ប្រើខ្ញុំបាទឲ្យនាំសំបុត្រ**ឡៅពី**មកជូនលោក។ **គួនអ៊ូ**មានសេចក្ដីត្រេកអរពន់ពេក ទើបទទួលយកសំបុត្រនោះមកមើលឃើញសេចក្ដីថា “សំបុត្រ**ឡៅពី**ឲ្យមកដល់**គួនអ៊ូ**បានដឹងពីដើមខ្លួនយើងបានស្បថស្បាន់នឹងគ្នាទៅវិញទៅមកទាំងបីនាក់នៅទីសួនផ្កាថា នឹងរួមសុខទុក្ខនឹងគ្នា តែខ្លួនយើងបានទៅនៅពឹងអាស្រ័យនឹង**អ៊ួនសៀវ**ចៅហ្វាយស្រុកគីជីវ ខាងខ្លួនអ្នកមកពឹងពាក់អាស្រ័យនៅនឹង**ចូឆ្វ** ធ្វើការសង្គ្រាមមានសេចក្ដីគាប់ប្រសើរ គេក៏បានស្នើឲ្យគុណបំណាច់និងយសបណ្ដាស័ក្តិសមគួរនឹងគុណអាស្រ័យបានសេចក្ដីសុខដោយស្រីង្គារបរិវារ វេលានេះប្រហែលខ្លួនអ្នកភ្លេចវាចាដែលបានស្បថស្បាន់នឹងយើងនោះហើយ គ្រានេះខ្លួនយើងក៏រស់នៅឡើយមិនទាន់ស្លាប់ បើអ្នកប្រាថ្នានឹងចង់បានគុណគាប់ឲ្យ**ចូឆ្វ**រាប់អាន បានឡើងយសស័ក្តិឡើងទៀត យើងសុំឲ្យអ្នកឆ្លៀតចេញមកកាត់យកក្បាលយើងទៅឲ្យ**ចូឆ្វ**ចុះ”។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ២៤

**ចារឹករឿងទាញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**គួនអ៊ូ**ទទួលសំបុត្រ**ឡៅពី** យំរព្ញក**ឡៅពី** រហូតដល់**គួនអ៊ូ**រត់ពី**ចូឆូ**ទៅ **ហែហ៊ូទុន**លើកទាហានទៅតាមចាប់ខ្លួន មានបម្រើកាន់សំបុត្រ**ចូឆូ**មកឃាត់កុំឲ្យចាប់ បើកឲ្យ**គួនអ៊ូ**ទៅ។)*

**លុះគួនអ៊ូ**មើលសេចក្ដីសំបុត្រចប់ ក៏ស្ងួតស្ងប់ជាទុក្ខស្រក់ទឹកភ្នែកនៅមុខបម្រើនោះ ហើយនិយាយថា ដែលខ្ញុំមកនៅនឹង**ចូឆូ**នេះព្រោះតែទាល់គំនិត នឹងបានគិតបំភ្លេចមិននឹកដល់**ឡៅពី**ជាបងនោះក៏ទេ ទោះបីខ្ញុំសុំយកអាសាចេញទៅច្បាំងវេលាណា ក៏តែងស៊ើបសួរដំណឹងជាដរាប លុះបានដំណឹងថាបងទៅនៅនឹង**អ៊ួនសៀវ**ច្បាស់ ក៏រិះគិតនឹងរកឱកាសទៅ តែមិនទាន់មានពេលចន្លោះសោះ។ **តាន់ជិន**ថា បើអ្នកមានចិត្តសប្បុរសរក្សាពាក្យសត្យពិតដូចវាចា ក៏គួរខំខស្នាហ៍រិះគិតទៅរក**ឡៅពី**កុំឲ្យខាន។ **គួនអ៊ូ**តបថា “កាលខ្ញុំចុះចូលទៅនៅនឹង**ចូឆូ**ជាបឋមខ្ញុំក៏បានប្ដេជ្ញាទុកនឹង**ចូឆូ**បីប្រការ ឥឡូវបើដឹងដំណឹងហើយប្រញាប់ទៅតាមសញ្ញាមែនក៏គិតខ្លាចគេគរហានិន្ទា ដូច្នេះយើងត្រូវគិតរកឧបាយលា**ចូឆូ**ទៅឲ្យបានដោយស្រួលសិន ទោះបី**ចូឆូ**នឹងមិនព្រមឲ្យទៅ ខ្ញុំក៏ត្រូវតែទៅឲ្យបាន” ហើយ**គួនអ៊ូ**ក៏តែងសំបុត្រតបទៅ**ឡៅពី**វិញ តាមដំណើរដើមទងគ្រប់ប្រការ ប្រគល់ឲ្យ**តាន់ជិន** ៗ ទទួលសំបុត្រហើយក៏លា**គួនអ៊ូ**ចេញទៅវិញ។ **គួនអ៊ូ**ក៏នាំសំបុត្រនោះទៅពណ៌នាប្រាប់បងថ្លៃទាំងពីរឲ្យជ្រាបគ្រប់ប្រការ។ បងថ្លៃទាំងពីរក៏សោមនស្សត្រេកអរណាស់ **គួនអ៊ូ**ក៏លាបងថ្លៃទៅរក**ចូឆូ**ដើម្បីនឹងលាទៅរក**ឡៅពី**។

ខណៈនោះមានមនុស្សចូលទៅជម្រាប**ចូឆូ**ថា **គួនអ៊ូ**នឹងចូលមកជម្រាបលាលោកទៅរក**ឡៅពី**ហើយ។ **ចូឆូ**ក៏បិទទ្វារផ្ទះទាំងអស់ ហើយសរសេរសំបុត្រ

បម្រាមបិទទុកនៅមាត់ទ្វារថា មហាឧបរាជមិនសូវសប្បាយ កុំឲ្យអ្នកផងទាំងឡាយចូលទៅប្រឹក្សាការអ្វីៗឡើយ។ **គួនអ៊ូ**ដឹងដូច្នោះ ក៏ទៅដល់មាត់ទ្វារមើលបម្រាម ឃើញហាមហើយ ក៏ត្រឡប់ទៅលំនៅវិញ ហើយឲ្យទាហានរបស់ខ្លួនដប់មួយទៅដប់ពីរនាក់ រៀបប្រុងប្រៀងរថសម្រាប់បងថ្លៃទាំងពីរជិះនិងផ្ទុករបស់ស្រាលៗ និងគ្រឿងសម្លៀកបំពាក់និងមាសប្រាក់ ឯរបស់ទ្រព្យឯទៀតនិងស្រីបម្រើដែល**ចូឆូ**ឲ្យទៅនៅសម្រាប់ប្រើប្រាស់នោះ កុំឲ្យនរណាយកទៅណា លុះពេលព្រឹក**គួនអ៊ូ**ក៏ចូលទៅលាម្ដងទៀត ឃើញបិទទ្វារដដែលក៏ដើរចូលទៅផ្ទះ**តៀវលៀវ** តែអ្នកចាំទ្វារមិនព្រមឲ្យចូលទៅ ប្រាប់ថា**តៀវលៀវ**ឈឺ។

**គួនអ៊ូ**គិតថា "**ចូឆូ**ធ្វើដូច្នេះគឺក្លែងមិនឲ្យយើងទៅជួបនឹង**ឡៅពី** ខ្លួនយើងក៏មានបរិវិតក្កនឹងបង្អង់នៅតទៅមិនបាន" ក៏ត្រឡប់មកទីឋានវិញ ហើយសរសេរសំបុត្រទុកថា "ខ្ញុំបាទ**គួនអ៊ូ** សូមថ្លែងជម្រាបសេចក្ដីឲ្យមហាឧបរាជជ្រាប ព្រោះខ្ញុំបាទនិង**ឡៅពី**នោះបានស្បថស្បាន់ទុកនឹងគ្នាថា នឹងរួមចិត្តជីវិតមួយ គឺសុខទុក្ខជាមួយគ្នា បើនរណាស្លាប់ក៏សូមស្លាប់ជាមួយគ្នា នរណាៗក៏បានដឹងឮទាំងអស់ កាលលើកកងទ័ពទៅវាយស្រុកហែហ្វីនោះ ខ្ញុំបាទក៏បានចុះសញ្ញាជូនលោក ៗក៏ព្រមទទួលបដិញ្ញា បានជាខ្ញុំចូលមកនៅធ្វើការនឹងលោករហូតមកដល់ថ្ងៃនេះ ឥឡូវខ្ញុំបាទដឹងដំណឹង**ឡៅពី**ច្បាស់ហើយ ខ្ញុំបាទសូមប្រណិប័តន៍លាលោកទៅរក**ឡៅពី**តាមពាក្យប្ដេជ្ញា ដែលលោកមានគុណឧបការបានជួយទំនុកបម្រុងខ្លួនខ្ញុំបាទដរាបមកបានសេចក្ដីសុខនោះ ខ្ញុំបាទក៏ត្រូវនឹករឭកដល់ព្រះតេជព្រះគុណមិនភ្លេចទេ តែនឹងត្រឡប់លុបគុណ**ឡៅពី**ដែលមានមកពីមុននោះមិនបាន បើអំណើះទៅមុខខ្ញុំបាទនៅមានជីវិត គង់នឹងត្រឡប់មកតបស្នងសងគុណលោកទៀត" លុះសរសេរចប់ហើយ ក៏បិទស្រោមប្រើបម្រើយកទៅប្រគល់ឲ្យនាយទ្វារ ដែលរក្សាផ្ទះ**ចូឆូ**។ **គួនអ៊ូ**ក៏យកត្រាសម្រាប់ងារនិងទ្រព្យរបស់ដែល**ចូឆូ**ឲ្យនោះដាក់ក្នុងហឹប ចាក់សោប្រគល់ឲ្យស្រីបម្រើរក្សាទុក ហើយទើបអញ្ជើញបងថ្លៃទាំងពីរឡើងលើរថ ខ្លួន**គួនអ៊ូ**ឯង

កាន់ដាវជិះសេះសឹកថៅ នាំទាហានដប់មួយទៅដប់ពីរនាក់ចេញតាមទ្វារស្រុកខាងទិសឯជើង នាយទ្វារឃាត់មិនឲ្យចេញ **គួនអ៊ូ**ស្រែកគំហកដោយសំឡេងខ្លាំង នាយទ្វារក៏ភ័យភាំងស្មារតីស្ទុះរត់ទៅ **គួនអ៊ូ**ឲ្យទាហានដប់មួយដប់ពីរនាក់រក្សាបងថ្លៃចេញទៅខាងមុខ ខ្លួន**គួនអ៊ូ**ក៏នៅការពារពីខាងក្រោយ។ ទាហានទាំងនោះក៏បររថបណ្ដោយតាមផ្លូវហ្លួងចេញទៅ។

ឯ**ចូឆូ**ប្រឹក្សាគ្នានឹងនាយទាហានទាំងពួង ដើម្បីនឹងរកទំនងចង**គួនអ៊ូ**ទុក តែសេចក្ដីនោះក៏នៅមិនទាន់ស្រុះស្រួលគ្នា ទទួលនាយទ្វារយកសំបុត្រ**គួនអ៊ូ**ទៅជូន**ចូឆូ** ៗទទួលយកមកមើល លុះដឹងសេចក្ដីហើយក៏ភ្ញាក់ស្មារតីឆ្ងែឆ្ងានិយាយថា បើដូច្នោះ**គួនអ៊ូ**មិនទៅហើយឬ? ទទួលស្រីបម្រើដប់នាក់នាំយកហឹបដែលដាក់ត្រានិងទ្រព្យរបស់ ដែល**គួនអ៊ូ**ប្រគល់ទុកឲ្យនោះនាំទៅជូន**ចូឆូ** ហើយជម្រាបថា ឥឡូវ**គួនអ៊ូ**នាំបងថ្លៃទាំងពីរចេញបាត់ទៅហើយ។ **ចូឆូ**មិនទាន់ឆ្លើយតបថាម្ដេច ស្រាប់តែនាយទ្វារស្រុកខាងទិសឯជើង នាំយកដំណឹងមកជម្រាប**ចូឆូ**ថា **គួនអ៊ូ**នាំបងថ្លៃទាំងពីរចេញទៅហើយ ខ្ញុំបាទឃាត់ក៏មិនស្ដាប់ បើនឹងចាប់អូសទុញទាញ ក៏ខ្លាច**គួនអ៊ូ**សម្លាប់។ **ចូឆូ**និងទីប្រឹក្សាមិនទាន់ថាដូចម្ដេច**ស្ហួយ៉ុង**នាយទាហានបានស្ដាប់ដូច្នោះទើបឆ្លើយជម្រាប**ចូឆូ**ថា ដែល**គួនអ៊ូ**រត់ទៅនោះ ខ្ញុំបាទសុំទាហានបីពាន់យកអាសាទៅតាមចាប់ខ្លួនមកជូនលោកវិញ។

**ចូឆូ**ក៏ស្រែកគំហកឲ្យ**ស្ហួយ៉ុង**ថា ដែល**គួនអ៊ូ**ទៅនេះព្រោះមានចិត្តកតញ្ញូនឹង**ឡៅពី**ជានាយចៅហ្វាយ ប្រការមួយយើងក៏បានទទួលពាក្យប្ដេជ្ញាឲ្យគេហើយ គេក៏បានជូនសំបុត្រមកលាយើងតាមគួរសម ហេតុម្ដេចមកថាគេលួចរត់ដូច្នេះ អ្នកទាំងឡាយចូរមើលបែបយ៉ាង**គួនអ៊ូ**ចុះ ត្រូវមានចិត្តស្រឡាញ់នាយចៅហ្វាយដូចគេនេះ។ **ធៀយ៉ុក**ឆ្លើយថា មហាឧបរាជចិញ្ចឹមរក្សា**គួនអ៊ូ**ក៏ដល់ខ្នាតហើយ **គួនអ៊ូ**ក៏នៅមើលងាយមិនបានគោរពក្រាបលា ហ៊ានសរសេរសំបុត្រមកឲ្យដូច្នេះមិនគួរសោះ បើនឹងលែង**គួនអ៊ូ**ឲ្យទៅដល់**អ៊ួនសៀវ**ចូលនៅនឹង**អ៊ួនសៀវ**កាលណា ក៏មានចិត្តកំរើបឡើង

ទៀត ឧបមាដូចគេលែងខ្លាចឲ្យមានកម្លាំង សុំឲ្យលោកកេណ្ឌទាហានលើកតាមទៅចាប់**គួនអ៊ូ**មកស្លាប់ចេញ តទៅមុខទើបមិនមានចម្រូងចម្រាស។

**ចូឆ្វ**តបថា "យើងបានទទួលប្ដេជ្ញានឹងគេទុកមកហើយ បើនឹងឲ្យទៅតាមនាំយកខ្លួនមកវិញ ក៏នឹងខូចអសារពាក្យសម្ដីដែលនិយាយ ប្រការមួយ ចិត្ត**គួនអ៊ូ**ជាមនុស្សរក្សាសត្យសុចរិតពិតត្រង់ណាស់ អំណឹះទៅមុខគង់នឹងមិនធ្វើអន្តរាយដល់យើងជាប្រាកដ" ហើយ**ចូឆ្វ**និយាយនឹង**តៀវលៀវ**ថា យើងទំនុកបម្រុង**គួនអ៊ូ**ដល់ខ្នាតប៉ុណ្ណោះហើយ **គួនអ៊ូ**ក៏មិនឃើញដល់យសបណ្ដាស័ក្ដិនិងទ្រព្យសម្បត្តិ តាំងចិត្តរក្សាសេចក្ដីសត្យពិតត្រង់នឹងរកនរណាស្មើគ្មាន យើងក៏មានចិត្តកោតខ្លាច**គួនអ៊ូ** ហេតុនេះអ្នកចូរស្រូតទៅតាមប្រាប់**គួនអ៊ូ**ចុះ ថាយើងស្រឡាញ់សេចក្ដីសត្យសុចរិតចិត្ត**គួនអ៊ូ**ដែលល្អត្រង់ដូច្នេះ យើងក៏សុំជូនដំណើរទៅដល់ពាក់កណ្ដាលផ្លូវ ហើយនឹងឲ្យរង្វាន់ជាគ្រឿងសម្លៀកបំពាក់មាសប្រាក់ដល់**គួនអ៊ូ**ជាគុណថែមទៀត យូរទៅមុខជា**គួនអ៊ូ**នឹងនឹកគុណយើងមិនភ្លេចទេ។

**តៀវលៀវ**ក៏លា**ចូឆ្វ**ឡើងសេះស្រូតប្រញាប់តាមទៅ **ចូឆ្វ**ក៏រៀបចាត់ចែងទាហានមានយកទាំងមាសប្រាក់ទ្រព្យរបស់ ឡើងសេះនាំទាហានប្រមាណសាមសិបនាក់ មិនបានគ្រឿងអាវុធស្រូតទៅតាមជាក្រោយ។

ឯ**គួនអ៊ូ**នោះ លុះបានឮសំឡេងស្រែកហៅពីក្រោយថាឲ្យឈប់សិន **គួនអ៊ូ**ឮហើយក៏និយាយឲ្យទាហានរបស់ខ្លួនឃុំនាំរត់ទៅមុន ខ្លួន**គួនអ៊ូ**នៅការពារពីខាងក្រោយ ព្រោះមានទាហាន**ចូឆ្វ**ស្រែកហៅឲ្យឈប់មិនដឹងថាជាឬកាច ហើយ**គួនអ៊ូ**ក៏ញាក់សេះឈប់ ក្រឡេកទៅឃើញ**តៀវលៀវ**។ **គួនអ៊ូ**ក៏សួរទៅ**តៀវលៀវ**ថា អ្នកតាមមកនឹងចាប់យើងឬ? **តៀវលៀវ**តបថា មិនមែនទេ ដ្បិតមហាឧបរាជជ្រាបថាអ្នកនឹងទៅផ្លូវដាច់ស្រយាលឆ្ងាយណាស់។ លោកមានចិត្តអាណិតអ្នកទើបប្រើខ្ញុំឲ្យស្រូតតាមមកឃាត់អ្នកឲ្យឈប់សិន។ មហាឧបរាជនឹងតាមមកជូនដំណើរផង។ **គួនអ៊ូ**ឮហើយក៏មានសេចក្ដីសង្ស័យ ថយសេះមកក្រោយបញ្ឈប់នៅលើស្ពានសិន

ក្រឡេកទៅឃើញ**ចូឆ្វ**លើកទាហានឯកប្រហែលសាមសិបនាក់ លុះ**ចូឆ្វ**ទៅជិតនឹងដល់ ក៏ឲ្យទាហានតម្រៀបគ្នាឈរជាប៉ែកឆ្វេងស្ដាំ **គួនអ៊ូ**ឃើញទាហាន**ចូឆ្វ**គ្មានកាន់គ្រឿងអាវុធនៅដៃ ក៏អស់សេចក្ដីសង្ស័យ។

**ចូឆ្វ**ក៏សួរ**គួនអ៊ូ**ថា ហេតុម្ដេចបានជាអ្នកឯងចេញមកមិនឲ្យយើងដឹង? **គួនអ៊ូ**ក៏បន្ទន់ខ្លួនគំនាប់ជម្រាបថា ពីដើមឡើយខ្ញុំបាទក៏ជម្រាបមហាឧបរាជទុកដោយវាចា សូមប្ដេជ្ញាបីខ ប្រសាសន៍ក៏បានល្មមតាមបដិញ្ញា លុះខ្ញុំបាទបានដឹងដំណឹង**ឡៅពី**ហើយ បានចូលទៅជម្រាបប្រសាសន៍ដល់ពីរបីដង ក៏មិនបានដូចប្រាថ្នាសោះព្រោះអ្នកចាំទ្វារឃាត់ហាម ហើយមានទាំងបម្រាមបិទទុកនៅមាត់ទ្វារទៀតថាប្រសាសន៍ហាមមិនឲ្យចូល។ ខ្ញុំបាទក៏មានសេចក្ដីវិតក្កជាទុក្ខ ចង្អៀតចិត្តគិតនឹកដល់**ឡៅពី**ជាទីបំផុត បានជាសរសេរសំបុត្រគំនាប់លាប្រគល់ឲ្យអ្នកចាំទ្វារទុកជូនប្រសាសន៍ ឯរបស់ទ្រព្យជាគ្រឿងមាសប្រាក់ដែលប្រសាសន៍បានឲ្យជាទានដល់ខ្ញុំបាទ ហើយនិងត្រាសម្រាប់ងារនោះ ខ្ញុំបាទក៏បានប្រគល់ឲ្យស្រីបម្រើទុកជូនប្រសាសន៍ទាំងអស់ ដែលខ្ញុំបាទខំដោះស្រូតមកនេះ ប្រាថ្នានឹងឲ្យបានឃើញមុខ**ឡៅពី**ដែលនិរាសគ្នាជាយូរហើយនោះ ហេតុនេះសូមប្រសាសន៍មានសេចក្ដីករុណាគិតដល់ពាក្យប្ដេជ្ញាពីបឋម បើកឲ្យខ្ញុំបាទទៅដោយស្រួលចុះ។

**ចូឆ្វ**ថា "យើងធ្វើការសព្វថ្ងៃនេះ ដោយតាំងចិត្តប្រាថ្នារកអ្នកណាដែលកាន់ពាក្យសត្យសុចរិតត្រង់ ឲ្យដូចខ្លួនអ្នកមានចិត្តស្រឡាញ់**ឡៅពី**នោះណាស់ដែរ តែកម្រប្រទះទើបមកឃើញអ្នកល្អត្រង់ណាស់ យើងក៏មានចិត្តស្មោះសរស្រឡាញ់ដែលយើងបានទទួលពាក្យប្ដេជ្ញាទុកនឹងអ្នកនោះមិញ យើងក៏រក្សាពាក្យនោះឲ្យគង់នៅមិនត្រូវឲ្យប្រែប្រួលទៅជាពាក្យពីរបាន អ្នកនឹងទៅហើយយើងក៏មិនត្រូវឃាត់ឃាំងឲ្យឈប់ខានទេ តែយើងក្រែងផ្លូវដែលទៅនោះដាច់ឆ្ងាយស្រយាល ខ្វាចស្បៀងអាហារមិនគ្រប់គ្រាន់ បានជាយើងតាមមកឲ្យទាន់នឹងជូនដំណើរ ហើយដើម្បីនឹងយករបស់មកផ្ញើជាស្បៀងថែមទៀត" **ចូឆ្វ**និយាយហើយក៏ឲ្យទាហានយកមាស

មួយសម្ពៀតចាក់លើថាសមួយ ឲ្យទៅ**គួនអ៊ី** ៗក៏មិនព្រមទទួលយកមាសនោះ ជម្រាបតបទៅ**ចូឆ្វ**វិញថា ប្រាក់បៀវត្សដែលខ្ញុំបាទបានទទួលព្រះរាជទាននោះ ក៏នៅមានល្មមប្រើចាយគ្រប់គ្រាន់ហើយ សូមមហាឧបរាជកុំព្រួយរវល់ឡើយដល់ខ្ញុំចុះ សូមទុកមាសនោះនឹងចែកឲ្យទាហានដែលធ្វើការនឿយហត់តទៅ។ **ចូឆ្វ**ក៏ថា កាលអ្នកធ្វើការនឹងយើង អ្នកក៏មានសេចក្ដីគាប់ប្រសើរច្រើនណាស់ ដែលនឹងឲ្យមាសមួយថាសនេះ ក៏មិនទាន់ធួនល្មមនឹងគុណបំណាច់អ្នកទេ ហេតុម្ដេចបានជាអ្នកមិនទទួល?

**គួនអ៊ី**តបថា ខ្ញុំបាទនៅជ្រកកោននឹងមហាឧបរាជ ក៏មិនបានធ្វើការគាប់ប្រសើរណាស់ណាប៉ុន្មានទេ គ្រាន់តែបានយកអាសាចេញទៅធ្វើការសង្គ្រាមម្ដងពីរដងប៉ុណ្ណោះ មិនគួររាប់ថាគាប់ប្រសើរប៉ុន្មាន។ **ចូឆ្វ**បានឮ**គួនអ៊ី**ថាដូច្នោះក៏ឆ្លើយថា "ខ្លួនអ្នកជាទាហានមានថ្វីដៃខ្លាំងពូកែ ព្រមទាំងសេចក្ដីសត្យកតញ្ញូនឹងរកនរណាស្មើមិនមាន ខ្លួនយើងជាមនុស្សវាសនាទន់ បុណ្យគ្មាន ទើបមិនបានខ្លួនអ្នកទុកឲ្យដូចសេចក្ដីប្រាថ្នា មាសនេះបើអ្នកមិនត្រូវការក៏វាហើទៅចុះ ចូរទទួលយកតែអាវលាយមាសនេះទុកជាទីរឭករាប់អានបំណាច់យើងជូនដំណើរមក កុំឲ្យបង់វាចា" ហើយ**ចូឆ្វ**ក៏ឲ្យទាហានយកអាវនោះហុចទៅឲ្យ**គួនអ៊ី** ៗលុះនឹងចុះពីលើសេះទទួលយកអាវពីទាហានក៏មិនបានទុកចិត្ត**ចូឆ្វ**ទេ ទើបបង្អោនខ្លួនចុះហើយក៏ហុចចុងដាវទៅទទួលយកអាវ មកពាក់គ្របលើខ្លួនហើយក៏ថា "ព្រះតេជព្រះគុណមហាឧបរាជ ដែលមានលើខ្លួនខ្ញុំបាទពីមុនមក ក៏ច្រើនលើសលុប នឹងប្រៀបប្រាវពុំអស់ ថែមវេលានេះលោកក៏បានតាមមកជូនដំណើរហើយឲ្យទាំងអាវថែមទៀត ប្រសិនបើជីវិតខ្ញុំបាទរស់នៅ ខ្ញុំបាទក៏ត្រូវចាំគិតឆ្លៀតមកតបស្នងសងគុណមហាឧបរាជមិនភ្លេចឡើយ" **គួនអ៊ី**គំនាប់ហើយក៏លា**ចូឆ្វ**បរសេះចេញទៅ។

**ខៅធូ**ជម្រាប**ចូឆ្វ**ថា **គួនអ៊ី**នេះព្រហើនមើលងាយមហាឧបរាជណាស់ លោកបានឲ្យអាវទៅហើយក៏ហុចចុងដាវមកទទួល បើដូច្នេះ ជាទីមាក់ងាយហួសពេក

ហេតុម្តេចបានជាលោកមិនយកទោស? **ចូឆ្វ**ថា “ដែលនឹងប្រកាន់ទោស**គួនអ៊ូ**នោះមិនបានទេ ព្រោះគេតែម្នាក់ឯង យើងគ្នាច្រើនជាងគេ ៗមិនទុកចិត្តយើង ៗបានចេញវាចាថា ឲ្យគេទៅហើយកុំយកទោសគេឡើយ” ហើយ**ចូឆ្វ**ក៏នាំទាហានទាំងពួងត្រឡប់ទៅក្រុងហ៊្វូតោវិញ ចេះតែសរសើរ**គួនអ៊ូ**ថា មានសេចក្តីសត្យពិតត្រង់មិនដាច់ពីមាត់។

ឯ**គួនអ៊ូ**នៅចម្ងាយផ្លូវប្រហែលបីរយសិន (១២ គ.ម) មិនឃើញរថបងថ្លៃសោះ **គួនអ៊ូ**ក៏ភ័យស្លុតចិត្ត ក្រឡេកមើលទៅខាងណាក៏មិនឃើញ ទទួលឮសំឡេងស្រែកមកពីលើភ្នំថា**គួនអ៊ូ**ឈប់សិន! **គួនអ៊ូ**ក្រឡេកទៅឃើញទាហានកម្លោះតូចជូតក្បាលលឿង ពាក់អាវលាយមាស ជិះសេះកាន់ទួនយកក្បាលមនុស្សចងកសេះ នាំបក្សពួកប្រហែលមួយរយប្លាយចុះមកទន្ទឹមមុខ**គួនអ៊ូ** ៗសួរថា អ្នកឯងឈ្មោះអ្វី? មកពីណា? ឈ្មោះនោះចុះពីលើសេះបោះទួនចេញ ហើយលុតជង្គង់គំនាប់**គួនអ៊ូ**ថា “ខ្ញុំបាទឈ្មោះ**លៀវហ្វ**នៅស្រុកសុងយ៉ុង កាលគ្រាចោរជូតក្បាលលឿង ខ្ញុំបាទក៏បែកមកនៅក្នុងភ្នំនេះ ប្រមូលទាហានបានប្រហែលប្រាំរយប្លាយ វាយដណ្តើមយកស្រូវអង្ករចំណីអាហារបរិភោគចិញ្ចឹមជីវិត **តៅអ៊្វន**នាយចោរជាសម្លាញ់ខ្ញុំបាទលើកពួកម៉ាកចុះមកវាយដណ្តើមយកបានស្រីពីរនាក់ ខ្ញុំបាទសាកសួរមនុស្សដែលធ្វើដំណើរមកជាមួយ គេប្រាប់ថាភរិយា**ឡៅពី**មកជាមួយលោក ខ្ញុំបាទថានឹងយកជូនឲ្យលោក **តៅអ៊្វន**មិនព្រម ខ្ញុំបាទក៏សម្លាប់**តៅអ៊្វន**ចេញ កាត់ក្បាលនាំយកមកជូនលោក ភរិយា**ឡៅពី**ទាំងពីរនោះ ខ្ញុំបាទឲ្យទាហានឃុំនាំមកជាក្រោយ”។ ទទួលពួកចោរនាំរថមកដល់។

**គួនអ៊ូ**ក៏ចុះពីលើសេះទៅគំនាប់បងថ្លៃទាំងពីរ ហើយថា ដែលអ្នកជាបងមានសេចក្តីភ័យខ្លាច ទោសនោះខុសធ្ងន់ណាស់។ បងថ្លៃទាំងពីរក៏និយាយថា កាលចោរវានាំបងទៅលើភ្នំនោះ បើកុំតែ**លៀវហ្វ**មកជួយ បងក៏នឹងមានសេចក្តីអន្តរាយ។ **គួនអ៊ូ**ក៏សួរទៅទាហានដែលធ្វើដំណើរជាមួយថា កាលចោរនាំទៅនោះ ហេតុម្តេច

បានជា**លៀវហ្សួ**ចេញមកជួយ? ពួកទាហានឆ្លើយថា កាលខ្ញុំបាទឃុំនាំទាហានរត់ទៅនោះ ឃើញ**តៅអ៊្វិន**ឃុំនាំពួកចោរចុះមកនាំយករថឡើងទៅលើភ្នំ ហើយប្រាប់**លៀវហ្សួ**ថា បានស្រីមកពីរនាក់ នឹងចែកឲ្យជាភរិយា**លៀវហ្សួ**ម្នាក់។ **លៀវហ្សួ**សួរខ្ញុំថា ស្រីពីរនាក់នេះជាភរិយាអ្នកឯណា? ខ្ញុំបាទប្រាប់ថា ជាភរិយា**ឡៅពី**។ **គួនអ៊ូ**ជាប្អូនឃុំនាំមកនឹងទៅរក**ឡៅពី**ឯស្រុកគីជីវ។ **លៀវហ្សួ**ខឹងក៏សម្លាប់**តៅអ៊្វិន**ស្លាប់ ហើយឲ្យពួកម៉ាកឃុំនាំរថចុះមកនេះ។

**គួនអ៊ូ**ស្តាប់ហើយក៏មានចិត្តត្រេកអរណាស់ គំនាប់**លៀវហ្សួ**ហើយថា អ្នកដែលបានធ្វើគុណទុកដល់យើងគ្រានេះ យើងមានសេចក្តីត្រេកអរពន់ប្រមាណណាស់ បើជីវិតយើងមិនស្លាប់ យើងបានជួបប្រទះនឹងអ្នកវេលាណា យើងនឹងជួយឧបត្ថម្ភតបស្នងសងគុណអ្នកវិញ។

**លៀវហ្សួ**និយាយនឹង**គួនអ៊ូ**ថា ដែលលោកនឹងទៅឯមុខនោះជាផ្លូវឆ្ងាយដាច់ស្រយាលណាស់ ខ្ញុំបាទសុំលើកទាហានតាមជូនលោកទៅត្រាតែផុតដែនស្រុកហ៊្វិតោ។ **គួនអ៊ូ**ឮហើយក៏គិតតែក្នុងចិត្តថា "**លៀវហ្សួ**នេះជាចោរជូតក្បាលលឿង បើយើងឲ្យវាឃុំនាំបក្សពួកជូនយើងទៅ អ្នកស្រុកតាមផ្លូវនឹងគរហានិន្ទាថា យើងគប់នឹងពួកចោរ" **គួនអ៊ូ**ក៏និយាយនឹង**លៀវហ្សួ**ថា ដែលអ្នកនឹងជូនយើងទៅ យើងក៏អរគុណណាស់ហើយ កុំឲ្យអ្នកព្រួយនឹងជូនយើងទៅឲ្យលំបាកឡើយ។ **លៀវហ្សួ**យកមាសទៅឲ្យ**គួនអ៊ូ** ៗមិនព្រមទទួលតបថា របស់នេះអ្នកយកទុកចុះ។

**លៀវហ្សួ**ក៏លា**គួនអ៊ូ**នាំពួកចោរត្រឡប់ទៅទីលំនៅលើភ្នំនោះវិញ។ **គួនអ៊ូ**ក៏អធិប្បាយឲ្យបងថ្លៃទាំងពីរស្តាប់ អំពី**ចូឆូ**តាមមកជូនដំណើរនោះ ហើយក៏បង្គំឲ្យបររថទៅតាមផ្លូវ លុះពេលរសៀលល្ងាចឃើញផ្ទះនៅតំបន់មួយ **គួនអ៊ូ**ក៏នាំបងថ្លៃចូលទៅសុំសំណាក់។ ឈ្មោះ**ហោហ្សួ**ជាម្ចាស់ផ្ទះនោះអាយុចាស់ជរា សក់និងពុកមាត់ពុកចង្កាស្កូវទាំងអស់ លុះឃើញ**គួនអ៊ូ**ទៅដល់ក៏ចេញទៅទទួលដោយសប្បុរស

ហើយសួរថា អ្នកឈ្មោះអ្វី? មកពីណាទៅណា? **គួនអ៊ូ**ប្រាប់ថា ខ្ញុំឈ្មោះ**គួនអ៊ូ** ជាប្អូន**ឡ្បៅពី** ខ្ញុំនឹងទៅរកបងប្រុសឯស្រុកគីជីវ។

**ហោហ្លួ**សួរថា ខ្លួនអ្នកនេះហើយឬ ដែលសម្លាប់**ង៉ាន់លៀង, ប៊ុនធីវ**ទាហានឯក**អ៊ូនសៀវ**? **គួនអ៊ូ**ឆ្លើយថា បាទខ្ញុំនេះឯង។ **ហោហ្លួ**បានស្តាប់ក៏មានចិត្តត្រេកអរណាស់ ទើបថា អញ្ជើញអ្នកចូលទៅក្នុងផ្ទះចុះ។ **គួនអ៊ូ**ថា បងថ្លៃខ្ញុំទាំងពីរនៅឯក្រៅ។ **ហោហ្លួ**ក៏ហៅបុត្រនិងភរិយាឲ្យចុះទៅទទួលគួរសម នាំភរិយា**ឡ្បៅពី**ឡើងមកហើយក៏នាំចូលទៅខាងល្វែងក្នុង។ **ហោហ្លួ**ក៏អញ្ជើញ**គួនអ៊ូ**និងនាងទាំងពីរឲ្យបរិភោគអាហារជាមួយគ្នា។ **គួនអ៊ូ**ថា ខ្ញុំនឹងអង្គុយទន្ទឹមនឹងបងថ្លៃនោះមិនគួរ។ **ហោហ្លួ**ក៏អញ្ជើញនាងទាំងពីរចូលទៅបរិភោគខាងក្នុង រៀបឲ្យ**គួនអ៊ូ**និង**ហោហ្លួ**នៅបរិភោគខាងក្រៅ។

**គួនអ៊ូ**ក៏សួរ**ហោហ្លួ**ថា ហេតុម្តេចបានជាអ្នកមកនៅទីនេះ? **ហោហ្លួ**ឆ្លើយថា ពីដើមខ្ញុំក៏បានធ្វើជានាហ្មឺននៅក្នុងស្រុកក្រុង លុះខ្ញុំជរាហើយក៏សូមលាចេញពីរាជការ មកធ្វើស្រែចម្ការរកទទួលទាននៅតំបន់ស្រុកនេះ កូនខ្ញុំឈ្មោះ**ហោប៉ាន់**ជាទាហាន**អងសេក**ចៅហ្វាយស្រុកអៀងយ៉ុង ជាផ្លូវដែលអ្នកនឹងទៅស្រុកគីជីវនេះ ខ្ញុំនឹងផ្ញើសំបុត្រមួយឲ្យអ្នកយកទៅឲ្យ**ហោប៉ាន់**ផង។ **គួនអ៊ូ**ក៏ទទួលព្រម លុះពេលព្រឹក**ហោហ្លួ**រៀបលៀង**គួនអ៊ូ**និងបងថ្លៃ**គួនអ៊ូ**ទាំងពីរឲ្យបរិភោគហើយ ក៏ប្រគល់សំបុត្រឲ្យ**គួនអ៊ូ** ៗក៏គំនាប់លា**ហោហ្លួ**ចេញទៅផ្លូវទិសខាងជើង។

ឯ**ខុងស៊ីវ**ជានាយឃុំទាហានប្រាំរយនៅរក្សាគយតាំង**ឡេងគួន** បានចាត់ឲ្យទាហានដើរល្បាត។ បម្រើសេះក៏នាំសេចក្តីទៅប្តឹង**ខុងស៊ីវ**ថា ឥឡូវ**គួនអ៊ូ**នាំគ្រប់គ្រួ**ឡ្បៅពី**មកជិតនឹងដល់គយហើយ។ **ខុងស៊ីវ**ដឹងដូច្នោះ ក៏នាំទាហានចេញទៅទទួល**គួនអ៊ូ** ៗក៏ចុះពីលើសេះគំនាប់នាយគយ។ **ខុងស៊ីវ**សួរថា អ្នកមកនេះនឹងទៅណា? **គួនអ៊ូ**ប្រាប់ថា ខ្ញុំមកនេះបានលាមហាឧបរាជនឹងទៅរក**ឡ្បៅពី**ឯស្រុកគីជីវ។ **ខុងស៊ីវ**តបថា **អ៊ូនសៀវ**ចៅហ្វាយស្រុកគីជីវនោះជាសត្រូវនឹងមហាឧបរាជ ដែលអ្នកនឹង

ទៅស្រុកគីជីវនោះ បើមានសំបុត្រមហាឧបរាជបើកគយឲ្យមកយើង ៗនឹងបើកឲ្យទៅបាន។ **គួនអ៊ូ**ឆ្លើយថា កាលខ្ញុំបាទមកនោះជាការប្រញាប់គ្មានសំបុត្រគយមកទេ។ **ខុងស៊ីវ**ថា បើគ្មានសំបុត្របើកគយទេ សូមលោកបង្អង់នៅទីនេះសិន ចាំខ្ញុំនឹងឲ្យបម្រើចូលទៅប្ដឹងមហាឧបរាជ បើមានសំបុត្រប្រាប់មកឲ្យបើក សឹមខ្ញុំបើកឲ្យទៅ។ **គួនអ៊ូ**តបថា ខ្ញុំមានការប្រញាប់ បើអ្នកឲ្យខ្ញុំឈប់បង្អង់ នោះនឹងមិនយូរការទៅឬ? **ខុងស៊ីវ**ថា ច្បាប់សម្រាប់គយដូច្នេះ ខ្ញុំនឹងបើកឲ្យទៅមិនបានទេ។ **គួនអ៊ូ**ថា ដែលអ្នកនិយាយដូច្នេះមិនឃាត់ខ្ញុំជាប្រាកដឬ? **ខុងស៊ីវ**ថា បើអ្នកមានការប្រញាប់ត្រូវទុកគ្រប់គ្រួឲ្យនៅជាបញ្ចាំ ខ្លួនអ្នកនឹងទៅក៏ទៅចុះ។ **គួនអ៊ូ**ខឹងណាស់ កន្ត្រាក់ដាវលើកឡើងនឹងកាប់**ខុងស៊ីវ** ហើយថា បើអ្នកមិនឲ្យយើងទៅ យើងនឹងទម្លាយទៅឥឡូវនេះ។ **ខុងស៊ីវ**គេចទាន់ ក៏នាំទាហានរត់ចូលទៅក្នុងគយ ហើយលើកគ្នាចេញមក សុទ្ធតែពាក់ក្រើសកាន់គ្រឿងអាវុធគ្រប់ដៃ **ខុងស៊ីវ**ស្រែកឲ្យ**គួនអ៊ូ**ថា ខ្លួនខ្លាំងពូកែនឹងអាចហ៊ានកាត់ទម្លាយគយចេញទៅបាន ក៏ចូរលមើលចុះ។ **គួនអ៊ូ**ក៏រឹតតែខឹងឲ្យទាហានបររថបងថ្ពៃថយចៀសទៅម្ខាង ហើយ**គួនអ៊ូ**ក៏បរសេះរាំដាវចូលតយុទ្ធនឹង**ខុងស៊ីវ**បានមួយស្របក់ **គួនអ៊ូ**យកដាវកាប់**ខុងស៊ីវ**ធ្លាក់ពីលើសេះស្លាប់ ទាហានទាំងពួងឃើញ**ខុងស៊ីវ**ស្លាប់ដូច្នោះ ក៏ភ័យតក់ស្លុតរត់ខ្ចាត់ខ្ចាយចេញទៅ។

**គួនអ៊ូ**ស្រែកប្រកាសប្រាប់ទាហានទាំងពួងថា អ្នកទាំងអស់គ្នាកុំភ័យភិតបារម្ភខ្លាចអ្វីឡើយ យើងមិនធ្វើអន្តរាយដល់អ្នកទាំងឡាយទេ ដែលយើងសម្លាប់**ខុងស៊ីវ**នោះ ព្រោះ**ខុងស៊ីវ**ឃាត់ឃាំងយើង ហើយប្រមាថមើលងាយយើងផង អ្នកទាំងឡាយចូរនាំយកសេចក្ដីទាំងនេះទៅប្ដឹងមហាឧបរាជ ដោយពិតត្រង់ផងចុះ។ ទាហានទាំងនោះបានឮហើយនាំគ្នាចូលមកគំនាប់**គួនអ៊ូ**។

ឯបម្រើសេះបានឃើញហេតុដូច្នោះ ក៏ស្រូតរូតនាំរឿងនោះទៅប្ដឹង**ហាន់ហុក**ចៅហ្វាយស្រុកឡុកអៀង។ **ហាន់ហុក**បានដឹងសេចក្ដីក៏ប្រឹក្សានឹងទាហានទាំងពួងថា **គួនអ៊ូ**គ្មានសំបុត្របើកគយពីមហាឧបរាជឲ្យមកសោះ លុះ**ខុងស៊ីវ**ឃាត់ឃាំង

**គួនអ៊ូ**ក៏សម្លាប់ចេញហើយ បើដូច្នេះអ្នកទាំងអស់គ្នានឹងគិតប្រការម្តេច? **បេងថាន់**ឆ្លើយថា ដែល**គួនអ៊ូ**មកនេះមិនមានសំបុត្របើកផ្លូវគយ ខ្ញុំយល់ឃើញថា ប្រាកដជារត់មកពីមហាឧបរាជ បើយើងនឹងបើកលែងឲ្យទៅ ទោសក៏នឹងមានដល់យើង។

**ហាក់ហុក**ឆ្លើយថា **គួនអ៊ូ**នោះមានថ្វីដៃខ្លាំងពូកែណាស់ **ង៉ាន់លៀង, ប៊ុនធីវ** ដែលជាសេនាឯក**អ៊ួនសៀវ**ល្បីល្បាញជាអ្នកខ្លាំងពូកែ **គួនអ៊ូ**ក៏សម្លាប់ចេញបាន បើយើងនឹងតច្បាំងចាប់យកខ្លួនក្នុងគ្រានេះ មុខជាទល់កម្លាំង**គួនអ៊ូ**មិនបានទេ បើដូច្នេះត្រូវតែគិតកលឧបាយ ទើបចាប់ខ្លួន**គួនអ៊ូ**បាន។ **បេងថាន់**ឆ្លើយថា លោកគិតនេះត្រូវណាស់ ខ្ញុំនឹងសុំយកអាសាលើកទាហានចេញទៅច្បាំងនឹង**គួនអ៊ូ** ហើយធ្វើជាថយរត់ ឲ្យលោកនាំយកទាហានទៅបង្កប់ បើកាលណាឃើញ**គួនអ៊ូ**ដេញខ្ញុំមកឲ្យលោកយឹតធ្នូបាញ់ឲ្យត្រូវ បើ**គួនអ៊ូ**ធ្លាក់ពីលើសេះ ឲ្យលោកទៅចាប់យកខ្លួនបញ្ជូនទៅស្រុកក្រុង សេចក្តីគាប់ប្រសើរក៏គង់នឹងមានដល់លោក។ **ហាន់ហុក**ឃើញត្រូវផង ក៏កេណ្ឌទាហានត្រៀមបម្រុងទុក។ ទទួលបម្រើសេះមកប្រាប់**ហាន់ហុក**ថា ឥឡូវ**គួនអ៊ូ**លើកមកដល់ជិតស្រុកឡុកអៀងហើយ។ **ហាន់ហុក**ក៏ពាក់ក្រឹសកាន់ធ្នូឡើងសេះនាំទាហានមួយពាន់ លើកចេញទៅដល់ទ្វារស្រុក ទទួលក្រឡេកឃើញ**គួនអ៊ូ** **ហាន់ហុក**ក៏លើកទាហានប្រាំរយអែបបង្កប់ប្របទ្វារ។ **បេងថាន់**ក៏បរសេះនាំទាហានប្រាំរយចេញទៅធ្វើជាមិនដឹង ហើយសួរ**គួនអ៊ូ**ថា អ្នកឯងឈ្មោះអ្វី? មកពីណាទៅណា? **គួនអ៊ូ**ឆ្លើយថា យើងឈ្មោះ**គួនអ៊ូ**ជានាហ្មឺនទី***ហាន់ស៊ីវតេងហោ*** ដែលមកនេះនឹងសុំឆ្លងស្រុកឡុកអៀង ទៅផ្លូវទិសឯជើង។ **បេងថាន់**ឆ្លើយថា អ្នកជានាហ្មឺនចេញមកពីស្រុកក្រុង បើមានធុរៈនឹងចេញទៅស្រុកឯជើងនោះ គួរតែឲ្យមានសំបុត្រពិនិត្យបើកឲ្យពីមហាឧបរាជទើបទៅបាន។ **គួនអ៊ូ**ថា យើងមកនេះជាការរហ័សប្រញាប់ប្រញាល់ពេកណាស់ មិនមានសុំសំបុត្រចុតហ្មានអ្វីទេ។ **បេងថាន់**ថា ទីស្រុកឡុកអៀងជាដើមផ្លូវនឹងទៅស្រុកខាងទិសឯជើង មហាឧបរាជប្រើ**ហាន់ហុក**មកឈរក្សាស្រុកនេះ បើខ្លួនអ្នកជានាហ្មឺនមានការនឹងចេញទៅ ត្រូវតែមានសំបុត្រ

បើកគយ បើគ្មានហើយ យើងយល់ឃើញថា អ្នកមកនេះដោយវេះវត់ជាប្រាកដ។ **គួនអ៊ូ**ឮដូច្នោះក៏ខឹងណាស់ថា **ខុងស៊ីវ**នាយគយតាំងឡោងគួនឃាត់ឃាំងយើងដូច្នេះ យើងក៏សម្លាប់ចេញហើយ ហេតុម្ដេចក៏ខ្លួនចង់មកឃាត់ឃាំងយើង? ខ្លួនមិនស្រឡាញ់ជីវិតទេឬ? **បេងថាន់**ឮដូច្នោះក៏ខឹងណាស់ បរសេះរំាដាវចូលតយុទ្ធនឹង **គួនអ៊ូ** ៗក៏ឱ្យទាហានញាក់បររថចៀសចេញទៅ ហើយក៏បរសេះចូលប្រយុទ្ធនឹង **បេងថាន់**បានបីភ្លែង **បេងថាន់**ធ្វើជាថយរត់ទៅក្រោយ **គួនអ៊ូ**ក៏ដេញបណ្ដោយ ដោយកម្លាំងសេះសឹកថៅលឿនរហ័សជិតដល់ទ្វារស្រុក **គួនអ៊ូ**យកដាវកាប់**បេងថាន់**ត្រូវដាច់ពាក់កណ្ដាលខ្លួន ហើយញាក់សេះវេះត្រឡប់មកវិញ។ **ហាន់ហុក**ដែលជាពួកបង្កប់ប្របមាត់ទ្វារ ក៏លើកធ្នូបាញ់តម្រង់ដោយកម្លាំងដៃ ព្រួញត្រូវជាប់ស្មា**គួនអ៊ូ**ខាងឆ្វេង។ **គួនអ៊ូ**ភ័យណាស់យកដែកន្ត្រាក់ដកព្រួញចោលទៅ ឈាមក៏ហូរជោកពេញទាំងខ្លួន ឈឺពើតពិសជាខ្លាំងណាស់ ក្រឡេកមើលទៅឃើញ**ហាន់ហុក**នៅលើខ្នងសេះអែបប្របមាត់ទ្វារ។ **គួនអ៊ូ**ក៏មិនបានកោតញញើតឬគិតឈឺក្នុងខ្លួន ក៏បំផាយសេះស្ទុះទៅដល់ទីមនឹង**ហាន់ហុក** យកដាវកាប់ដាច់ខ្លួន**ហាន់ហុក**ធ្លាក់ពីលើសេះស្លាប់ ហើយក៏ដេញកាប់ទាហាន**ហាន់ហុក**ស្លាប់ពិការជាច្រើន រួច**គួនអ៊ូ**ក៏បំផាយសេះត្រឡប់ទៅតាមបងថ្លៃ ហើយមិនហ៊ានបង្អង់ឈប់ក្នុងស្រុកឡុកអៀង ព្រោះមិនទុកចិត្ត ទើបយកព្រែមករុំព័ទ្ធមុខរបួស ហើយក៏នាំបងថ្លៃទាំងពីរបររថស្រូតចេញទៅតាមផ្លូវគយគីស៊ុនគួន។

បម្រើសេះក៏នាំយកព័ត៌មានដែល**គួនអ៊ូ**សម្លាប់ចៅហ្វាយស្រុក និងនាយគយគ្រប់អន្លើទៅស្នើប្ដឹង**ពៀនហ៊ី**នាយគយគីស៊ុនគួនថា ឥឡូវ**គួនអ៊ូ**មកជិតដល់ទីនេះហើយ។ **ពៀនហ៊ី**នោះចំណានខាងចោលកូនឃ្លុប លុះដឹងសេចក្ដីហើយក៏ត្រិះរិះគិតថា ធ្វើម្ដេចយើងនឹងចាប់ខ្លួន**គួនអ៊ូ**បាន។ លុះគិតទៅគិតមកក៏នឹកឃើញថា វត្តទិនកុកជីដែលនៅមុខគយនោះជាទីចំណាប់ស្រួលណាស់ យើងនឹងរៀបចំឱ្យទាហានទៅពួនបង្កប់ទុកប្រហែលមួយរយបា្ទយ ហើយបបួល**គួនអ៊ូ**ចូលទៅបរិភោគអាហារ

រួចនឹងចោលពែងស្រាជាសម្គាល់ ឲ្យទាហានទាំងពួងស្ទុះចូលព្រមគ្នា ចាប់ខ្លួន**គួនអ៊ូ** មុខជានឹងបានដោយស្រួល។ លុះពេលព្រឹក**ពៀនហ៊ី**ក៏ចេញទៅទទួល**គួនអ៊ូ** ៗឃើញ**ពៀនហ៊ី**នាយគយនិងទាហានទាំងពួងគ្មានអាវុធកាន់នៅដៃចេញទៅទទួលដោយល្អក៏អស់សេចក្ដីសង្ស័យ ទើបចុះពីខ្នងសេះគំនាប់**ពៀនហ៊ី** ៗជម្រាបថា ខ្ញុំបាទជានាយគយនៅទីនេះ បណ្ដាមនុស្សទាំងពួងក៏ឮរន្ទឺល្បីឈ្មោះថាលោកខ្លាំងពូកែណាស់ មានទាំងសេចក្ដីសត្យកតញ្ញូល្អជាទីបំផុត។ ឥឡូវខ្ញុំបាទឮថាលោកនឹងទៅរក**ឡៅពី**ជាបង ខ្ញុំបាទក៏មានអំណរផង ទើបនាំបណ្ដារាស្ត្រពួកគយមកចាំទទួលលោក។

**គួនអ៊ូ**បានស្ដាប់ ក៏នាំយករឿងរ៉ាវដែល**ខុងស៊ីវ, បេងថាន់, ហាន់ហុក** ឃាត់ឃាំងខ្លួននោះឲ្យ**ពៀនហ៊ី**ស្ដាប់គ្រប់ប្រការ។ **ពៀនហ៊ី**ក៏ក្លែងនិយាយថា ដែលលោកសម្លាប់អ្នកទាំងបីនាក់នោះចេញ ក៏គួរដល់ទោសហើយ បើខ្ញុំបាទបានចូលទៅដល់មហាឧបរាជ ខ្ញុំបាទនឹងសុំជួយបាយបៀងស្នើតាមដំណើរជូនតាមសុភាព វេលានេះសូមឲ្យលោកឡើងសេះទៅកាន់ទីឋានរបស់ខ្ញុំចុះ។ **គួនអ៊ូ**ក៏មានសេចក្ដីត្រេកអរណាស់ ស្ទុះឡើងសេះនាំទាហានបររថតាម**ពៀនហ៊ី**ទៅដល់មុខវត្ត។ **ពៀនហ៊ី**ក៏អញ្ជើញ**គួនអ៊ូ**ឲ្យចូលទៅក្នុងវត្តទិនកុកជី ឯវត្តនោះជាដំណែលរបស់ព្រះចៅ**បេងគេស**ទ្រង់កសាងទុកពីបុរាណ ធ្លាប់ស្ដេចមកនមស្សការព្រះជារឿយៗ។ លោកសង្ឃទាំងពួងឃើញ**គួនអ៊ូ**ចូលទៅ ក៏វាយរគាំងគងស្គរទទួលគំនាប់ ឯលោក**ចិនកៅចេង**ជាមេវត្តកំណើតនៅស្រុកជាមួយនឹង**គួនអ៊ូ** ធ្លាប់ស្គាល់គ្នាមកពីដើម លុះឮដំណឹងថា**ពៀនហ៊ី**គិតនឹងធ្វើអន្តរាយ**គួនអ៊ូ**ដូច្នោះ លោក**ចិនកៅចេង**ក៏ចេញទៅទទួល ប្រាថ្នានឹងខ្សឹបប្រាប់សេចក្ដីឲ្យ**គួនអ៊ូ**ដឹងខ្លួន ហើយលោកនោះក៏សាកសួរ**គួនអ៊ូ**ថា អ្នកស្គាល់អាត្មាឬទេ? **គួនអ៊ូ**ថា ខ្ញុំចាំមិនបានទេ។ លោក**ចិនកៅចេង**ថា អ្នកចេញពីស្រុកកំណើតប៉ុន្មានឆ្នាំហើយ? **គួនអ៊ូ**ថា ខ្ញុំចេញពីស្រុកបានម្ភៃឆ្នាំហើយ។ លោក**ចិនកៅចេង**ថា ភូមិអ្នកនិងភូមិអាត្មាភាពនៅត្រង់មាត់ទន្លេត្រើយម្ខាងម្នាក់។

**ពៀនហ៊ី** ឃើញលោកគ្រូ**ចិនកៅចេង**និយាយសាកសួរ**គួនអ៊ូ**ថាជាពួកម៉ាកស្រុកទេសជាមួយគ្នាដូច្នោះ **ពៀនហ៊ី**ខ្លាចបែកការណ៍ដែលគិតទុកនោះនឹងខ្ចរខ្ចាយឡើង ក៏ស្រែកគំហកឲ្យលោកគ្រូ**ចិនកៅចេង**ថា យើងអញ្ជើញ**គួនអ៊ូ**នឹងបរិភោគអាហារក្នុងវត្តនេះ ហេតុម្ដេចលោកមកនាំនិយាយឲ្យយូរការ?

**គួនអ៊ូ**ថា លោកមេវត្តនេះជាពួកម៉ាកនៅស្រុកទេសជាមួយនឹងយើង បែកគ្នាមកជាយូរហើយ ទើបនឹងបានមកជួបគ្នាថ្ងៃនេះបានជាត្រូវសាកសួរសុខទុក្ខខ្លះ។ លោកគ្រូ**ចិនកៅចេង**ក៏រៀបចំទីកន្លែងឲ្យ**គួនអ៊ូ**អង្គុយ ហើយចាក់ទឹកតែឲ្យ**គួនអ៊ូ**ផឹក។ **គួនអ៊ូ**ថា បងថ្លៃខ្ញុំទាំងពីរនៅលើរថមុខវត្តឯនោះមិនបានផឹកផង ខ្ញុំនឹងផឹកមុនធ្វើម្ដេចបាន។ លោកគ្រូ**ចិនកៅចេង**ក៏យកទឹកតែនាំ**គួនអ៊ូ**ចេញទៅឲ្យបងថ្លៃលើរថផឹកទាំងពីរនាក់ លោករកឱកាសស្ងាត់នឹងប្រាប់**គួនអ៊ូ**ពុំបាន ព្រោះ**ពៀនហ៊ី**ចេះតែតាមមើល បើនឹងនិយាយក្រែង**ពៀនហ៊ី**ឮ ព្រោះពួកម៉ាក**ពៀនហ៊ី**ដើរទៅមកមិនដាច់។ លោកគ្រូ**ចិនកៅចេង**ក៏យកចង្អុលដៃចង្អុលទៅត្រង់គ្រប៊ី**គួនអ៊ូ**សៀត ហើយក៏ញាក់ភ្នែកឲ្យដឹង។ **គួនអ៊ូ**ក៏យល់សេចក្ដីថា**ពៀនហ៊ី**នឹងធ្វើអន្តរាយ បានជាបង្គាប់ឲ្យទាហានកាន់អាវុធតាម**គួនអ៊ូ**ទៅ។ លោកគ្រូ**ចិនកៅចេង** និង**គួនអ៊ូ**ក៏ត្រឡប់ចូលទៅវត្តវិញ។ **ពៀនហ៊ី**ជម្រាប**គួនអ៊ូ**ថា ខ្ញុំបាទឲ្យរៀបក្រយាជូនលោកពិសារៀបទុកជាស្រេចហើយ អញ្ជើញលោកចូលទៅខាងក្នុងចុះ។

**គួនអ៊ូ**បានស្ដាប់ហើយក៏ឥតកោតញញើតឡើយ ចូលទៅអង្គុយជាមួយនឹង**ពៀនហ៊ី** ឃើញពួកម៉ាក**ពៀនហ៊ី**ឈរតម្រាបគ្នា សុទ្ធតែសៀតគ្រប៊ីកាន់បង្កប់ក្នុងអាវ ឃើញដងលេចចេញមកខាងក្រៅ **គួនអ៊ូ**ក៏សួរ**ពៀនហ៊ី**ថា ដែលអ្នកអញ្ជើញយើងមក

បរិភោគនេះជាល្អឬអាក្រក់? **ពៀនហ៊ី**តក់ស្លុតក្នុងចិត្តញ័ររន្ធត់អស់ទាំងខ្លួនមិនឆ្លើយថាអ្វីសោះ។

**គួនអ៊ូ**ឃើញ**ពៀនហ៊ី**ជាប់ពិរុទ្ធដូច្នោះ ក៏ស្រែកគំហកថា អញគិតថាឯងជាមនុស្សល្អ អញក៏ធ្វើត្រង់ល្អចូលមក គួរឬឯងគិតប្រទូសរ៉ាយដល់អញ? **ពៀនហ៊ី**ឃើញ**គួនអ៊ូ**ដឹងរឿងហើយ ក៏ស្រែកហៅទាហានថា ពួកយើងចុះដៃជាប្រញាប់! ទាហានដែលឈរនោះមិនទាន់នឹងកម្រើកខ្លួន **គួនអ៊ូ**ស្ទុះទៅកាប់ស្លាប់ជាច្រើននាក់។ **ពៀនហ៊ី**ឃើញ**គួនអ៊ូ**ដេញជិតក៏យកកូនឃ្លុបត្រឡប់ចោលតម្រង់មកវិញ **គួនអ៊ូ**យកដាវរងទាត់កូនឃ្លុបខ្ទាតចេញ ក៏កាប់**ពៀនហ៊ី**ដាច់ពាក់កណ្ដាលខ្លួនស្លាប់ ហើយត្រឡប់វាទៅឯបងថ្លៃ ឃើញទាហាន**ពៀនហ៊ី**ព័ទ្ធជុំវិញជាច្រើន **គួនអ៊ូ**ក៏ដេញកាប់សម្លាប់ទាហានទាំងនោះបែករត់ទៅខ្លះ ស្លាប់ពិការខ្លះ ហើយ**គួនអ៊ូ**ក៏ចូលទៅទូលលោកគ្រូ**ចិនកៅចេង**ថា គ្រានេះបើកុំតែលោកឲ្យដំណឹងខ្ញុំ ៗក៏នឹងអន្តរាយជីវិត។ លោកគ្រូ**ចិនកៅចេង**ថា ខ្លួនអាត្មាភាពនឹងនៅក្នុងវត្តនេះតទៅ ពួកម៉ាក**ពៀនហ៊ី**ក៏នឹងគុំគួនធ្វើអន្តរាយជាមិនខាន អាត្មាភាពនឹងទៅរកវត្តឯទៀតនៅហើយ។ **គួនអ៊ូ**ក៏លាលោកគ្រូ**ចិនកៅចេង**ចេញទៅ នាំរថបងថ្លៃនិងទាហានតម្រង់តាមផ្លូវទៅស្រុកអៀងយ៉ុង។

ឯ**អងសិក**ចៅហ្វាយស្រុកអៀងយ៉ុង ដែលជាដន្លងនឹង**ហាន់ហុក**នោះ លុះឮដំណឹងថា **គួនអ៊ូ**សម្លាប់**ហាន់ហុក**ស្លាប់ ក៏គិតតែក្នុងចិត្តថា **គួនអ៊ូ**នេះមានថ្វីដៃខ្លាំងពូកែមែន បើនឹងចាប់យកខ្លួនចំពោះមុខមិនបានទេ ត្រូវតែធ្វើកលឧបាយឲ្យ**គួនអ៊ូ**ទុកចិត្តសិន ហើយសឹមចាប់**សម្លាប់**ចេញ” គិតហើយក៏កេណ្ឌប្រមូលទាហានឲ្យទៅស្កាត់នៅគយតាមផ្លូវជាច្រើនតំបន់ កុំឲ្យ**គួនអ៊ូ**រត់ទៅបាន។ លុះ**អងសិក**ដឹងដំណឹង

ថា **គួនអ៊ូ**មកជិតស្រុកហើយ ក៏ឡើងសេះនាំទាហានចេញទៅទទួល**គួនអ៊ូ**ដោយសុភាព ហើយសួរថា អ្នកមកនេះនឹងទៅណា? **គួនអ៊ូ**តបថា យើងលាមហាឧបរាជនឹងនាំបងថ្លៃទៅរក**ឡៅពី**ឯស្រុកគីជីវ។ **អងសិក**ថា អ្នកមកតាមនេះជាផ្លូវដាច់ស្រយាលឆ្ងាយណាស់ ពេលក៏ជិតយប់ហើយ សូមអញ្ជើញអ្នកនិងបងថ្លៃទៅសំណាក់ក្នុងស្រុកនេះសិន ព្រឹកឡើងសឹមអញ្ជើញទៅ។ **គួនអ៊ូ**បានស្ដាប់**អងសិក**និយាយក៏មិនមានសេចក្ដីសង្ស័យ ទើបឆ្លើយថា បើអ្នកអនុគ្រោះហើយ យើងក៏សំណាក់នៅទីនេះមួយយប់ចុះ។ **អងសិក**ក៏នាំ**គួនអ៊ូ**និងគ្រួសារ**ឡៅពី**ចូលទៅក្នុងស្រុក ហើយចាត់ចែងទីដំណេកនិងទីបរិភោគ ខណៈនោះ**អងសិក**ក៏ត្រឡប់មកឲ្យរៀបចំចំណីអាហារអញ្ជើញ**គួនអ៊ូ**បរិភោគ។ មនុស្សបម្រើក៏ទៅអញ្ជើញ**គួនអ៊ូ** ៗក៏នឹកតែក្នុងចិត្តថា “**ពៀនហ៊ី**ហៅយើងទៅបរិភោគអាហារ ក៏គិតប្រទូសរ៉ាយយើងម្ដងហើយ ឥឡូវ**អងសិក**ឲ្យហៅយើងទៅបរិភោគម្ដងទៀត ខ្លាចក្រែងតែជាកលឧបាយដូច**ពៀនហ៊ី**ទៀតទេដឹង?” **គួនអ៊ូ**ភ្នកនឹកក្នុងខណៈនោះក៏ឲ្យពិភាល់សង្ស័យ ទើបប្រាប់ទៅមនុស្សបម្រើនោះថា ដែល**អងសិក**ឲ្យហៅយើងទៅទទួលទានអាហារនោះ យើងមានសេចក្ដីអរគុណច្រើនណាស់ តែថាបងថ្លៃយើងជាស្រីគ្មាននរណានៅកំដរសោះ យើងនឹងទៅពុំបាន។ មនុស្សបម្រើនោះក៏វិលទៅប្រាប់**អងសិក** ៗក៏ឲ្យលើកយកចំណីអាហារទៅជូន**គួនអ៊ូ**ដល់ទីកន្លែង។ **គួនអ៊ូ**ក៏ឲ្យយកសម្រាប់នោះជូនទៅបងថ្លៃពិសា។ លុះពេលយប់**គួនអ៊ូ**បង្គាប់ទាហានឲ្យនាំគ្នាដេក ឯ**គួនអ៊ូ**ដោះក្រើសចេញអង្គុយអុជទៀនមើលសៀវភៅយាមរក្សាបងថ្លៃនៅខាងក្រៅ។

**អងសិក**ទើបបង្គាប់**ហោប៉ាន់**ថា ឥឡូវ**គួនអ៊ូ**រត់ពីមហាឧបរាជមក សម្លាប់**ហាន់ហុក**ចៅហ្វាយស្រុក និងនាយគយល្បាតទាំងពីរនាក់ស្លាប់ទៅហើយ បើយើង

នឹងព្រួតចាប់យកខ្លួនបញ្ជូនទៅទីក្រុងវិញ **គួនអ៊ូ**មានថ្វីដៃខ្លាំងពូកែណាស់ ទោះបីយើងនឹងចាប់ខ្លួនបានគង់តែទាហានយើងស្លាប់ជាច្រើននាក់មិនខាន ចាំយើងរិះគិតអានសម្លាប់**គួនអ៊ូ**ចេញក្នុងវេលាយប់នេះ ពេលយាមបីអ្នកឯងត្រូវលើកទាហានមួយពាន់ឲ្យកាន់ខសនិងចំបើងម្នាក់មួយបាច់ ទៅឡោមព័ទ្ធទីកន្លែងដែល**គួនអ៊ូ**សំណាក់ ហើយយកភ្លើងដុតព័ទ្ធជុំវិញទីនោះឲ្យ**គួនអ៊ូ**និងពួកម៉ាកស្លាប់តែម្តង។ បើកាលណាដុតភ្លើងឆេះឲ្យដុតផាវជាសញ្ញា យើងនឹងលើកទាហានទៅជួយ។ **ហោប៉ាន់**ក៏លើកទាហានមួយពាន់កាន់ខស និងចំបើងគ្រប់ដៃទៅគរទុកជុំវិញទីសំណាក់**គួនអ៊ូ** តែនៅមិនទាន់ដុតភ្លើង។

**ហោប៉ាន់**ត្រិះរិះគិតក្នុងចិត្តថា "មនុស្សនានាក៏បានឮល្បីថា **គួនអ៊ូ**នេះជាមនុស្សមានថ្វីដៃខ្លាំងពូកែខាងសឹកសង្គ្រាមណាស់ យើងក៏មិនដែលជួបប្រទះឃើញរូបរាងសោះ បើដូច្នេះយើងចាំទៅលបមើលឲ្យឃើញច្បាស់សិន" គិតហើយ**ហោប៉ាន់**ក៏ចូលទៅសួរនាយទ្វារថា **គួនអ៊ូ**នៅឯណា? នាយទ្វារប្រាប់ថា **គួនអ៊ូ**អង្គុយមើលសៀវភៅខាងល្វែងក្រៅ។ **ហោប៉ាន់**ក៏លបដើរចូលទៅឈរមើល ឃើញ**គួនអ៊ូ**អង្គុយមើលសៀវភៅលើកៅអី ដៃម្ខាងច្បូតពុកមាត់។

**ហោប៉ាន់**ពិនិត្យមើលទាល់តែភ្លេចស្មារតី ហើយស្រែកសរសើររូបឆោម**គួនអ៊ូ**ថា ល្អប្រហែលទេពតា។ **គួនអ៊ូ**បានឮសំឡេងក៏ភ្ញាក់ស្មារតីភ័យណាស់ ស្រែកសួរទៅវិញថា នរណាចូលមកមានការអ្វី? **ហោប៉ាន់**ក៏ចូលទៅលុតជង្គង់គំនាប់ហើយជម្រាបថា ខ្ញុំបាទឈ្មោះ**ហោប៉ាន់**នាយទាហាន**អងសិក**។ **គួនអ៊ូ**ឮថាឈ្មោះ**ហោប៉ាន់**ក៏នឹកចាំបាន ហើយសួរថា អ្នកឯងជាកូន**ហោហ៊ួ**ឬ? **ហោប៉ាន់**ឆ្លើយថាបាទ។ **គួនអ៊ូ**ក៏យកសំបុត្រដែល**ហោហ៊ួ**ផ្ញើមកនោះ ហុចទៅឲ្យ**ហោប៉ាន់** ៗទទួលយកមកមើល

ឃើញសេចក្ដីថា "**ហោហ៊្វ**ជាបិតា ផ្ញើសំបុត្រនេះមកដល់**ហោប៉ាន់**ជាកូនឲ្យបានដឹង ដ្បិត**គួនអ៊ូ**មានថ្វីដៃខ្លាំងពូកែណាស់ ទាំងចិត្តក៏ជាមនុស្សកតញ្ញូទៀងត្រង់នឹងផែនដី បើ**គួនអ៊ូ**មកដល់ទីតំបន់ណា ហើយ**ហោប៉ាន់**បានជួបប្រទះក៏កុំឲ្យគិតប្រទូសរ៉ាយ ត្រូវតែរកឧបាយជួយទំនុកបម្រុង**គួនអ៊ូ**ឲ្យបានចេញទៅដោយស្រួល ព្រោះតំណទៅឯមុខនឹងបានជាទីពឹងពំនាក់" **ហោប៉ាន់**ដឹងក្នុងសំបុត្រដូច្នោះក៏ភ័យស្លុតក្នុងចិត្ត ទើបចូលទៅជិត**គួនអ៊ូ**ហើយខ្សឹបថា "ខ្ញុំបាទមិនដឹងសោះជាឈ្មោះលោកល្អបរិសុទ្ធ កុំអីជីវិតលោកនឹងក្ស័យក្នុងទីនេះ ព្រោះ**អងសិក**គិតធ្វើប្រទូសរ៉ាយលោក ឲ្យទាហានយកឧសនិងចំបើងមកគរដុតភ្លើងឲ្យលោកស្លាប់។ ឥឡូវចូរត្រៀមខ្លួនទុកជាប្រញាប់ចុះ ខ្ញុំបាទនឹងទៅគិតឃាត់ហាមទាហានទាំងពួង ហើយនឹងហួសទៅបើកទ្វារស្រុកទុកឲ្យលោកចេញទៅដោយស្រួល" និយាយហើយក៏លាចេញទៅចាត់ការមួយរំពេច។

**គួនអ៊ូ**បានឮ**ហោប៉ាន់**ពណ៌នាប្រាប់សព្វសេចក្ដី ក៏ភ័យតក់ស្លុតរន្ធត់ចិត្ត ទាំងមានសេចក្ដីត្រេកអរគុណនឹង**ហោប៉ាន់**ពន់ប្រមាណណាស់ ទើបក្រោកឡើងពាក់ក្រឹសកាន់ដាវ ហើយអញ្ជើញបងថ្លៃឲ្យឡើងជិះរថ ឲ្យទាហានឃុំនាំចេញទៅមុខ **គួនអ៊ូ**ក៏ជិះសេះការពារពីក្រោយ លុះទៅដល់ឃើញទ្វារស្រុកចំហក៏មានអំណរណាស់ ទើបឲ្យទាហានបររថចេញផុតអំពីទ្វារក្រុងទៅ។ **ហោប៉ាន់**ឃើញ**គួនអ៊ូ**ចេញហួសទៅហើយ ក៏វិលត្រឡប់មកប្រាប់ទាហានឲ្យដុតភ្លើងគ្រប់គ្នាឡើង។ **គួនអ៊ូ**ចេញទៅចម្ងាយផ្លូវប្រហែលសាមសិបសិន (១.២ គ.ម) ក្រឡេកទៅឃើញភ្លើងឆេះកណ្ដាលស្រុកភ្លឺដូចថ្ងៃ ក៏ចូលចិត្តថា**ហោប៉ាន់**ធ្វើឧបាយលុបលាងសេចក្ដីកុំឲ្យអ្នកផងដឹងគំនិតខ្លួន។

ឯ**អងសិក**បានឮសំឡេងផាវហើយឃើញពន្លឺភ្លើងឆេះឡើង ក៏លើកទាហានស្រូតដល់ទីសំណាក់**គួនអ៊ូ** ទាហានទាំងពួងស្រែកថា **គួនអ៊ូ**រត់ពីភ្លើងចេញរួចទៅហើយ។ **អងសិក**ឮដូច្នោះ ក៏បរសេះនាំទាហានស្រូតតាមទៅដល់ក្រៅស្រុក ហើយស្រែកថា **គួនអ៊ូ**មានថ្វីដៃខ្លាំងពូកែ ហេតុម្ដេចក៏លបរត់ទៅមិននៅចាំតដៃនឹងយើងសិន? **គួនអ៊ូ**តបថា អញគ្មានធ្វើអ្វីខុសនឹងឯងសោះ ហេតុអ្វីឯងមកគិតប្រទូសរ៉ាយអញ? **អងសិក**ខឹងណាស់មិនឆ្លើយតបថាអ្វីសោះ ក៏បរសេះវាំទួនចូលច្បាំងនឹង**គួនអ៊ូ** ៗញាក់សេះរាថយមកតទល់យកដាវទាក់ទួនធ្លាក់ពីដៃ**អងសិក** ហើយលើកដាវកាប់**អងសិក**ដាច់ពាក់កណ្ដាលខ្លួនស្លាប់នៅទីនោះ។ ទាហានទាំងអស់ក៏រត់បែកខ្ចាត់ខ្ចាយអស់ទៅ។ **គួនអ៊ូ**បរសេះតាមបងថ្លៃទៅទៀត ក្នុងចិត្តនោះនឹកដល់គុណ**ហោប៉ាន់**មិនភ្លេច។

ឯ**ឡៅអៀន**ចៅហ្វាយស្រុកតងគុណដឹងដំណឹងថា **គួនអ៊ូ**រត់ពីមហាឧបរាជហែកទម្លាយគយល្បាតមក បានសម្លាប់នាយគយនិងចៅហ្វាយស្រុកស្លាប់ជាច្រើនតំបន់ **ឡៅអៀន**ក៏ឃុំទាហានប្រហែលសាមសិបនាក់ចេញមកចាំស្កាត់ផ្លូវ។ **គួនអ៊ូ**ឃើញ**ឡៅអៀន**ក៏សួរថា សព្វថ្ងៃនេះអ្នកនៅរក្សាស្រុកសុខសប្បាយទេឬ? **ឡៅអៀន**ឆ្លើយថា សុខសប្បាយជាទេ ចុះអ្នកមកនេះនឹងទៅណា? **គួនអ៊ូ**តបថា យើងបានលាមហាឧបរាជដើម្បីនឹងទៅរក**ឡៅពី**ជាបងយើង។ **ឡៅអៀន**តបថា **ឡៅពី**ទៅអាស្រ័យនៅនឹង**អ៊ួនសៀវ** ឥឡូវ**អ៊ួនសៀវ**និងមហាឧបរាជធ្វើសឹកសង្គ្រាមនឹងគ្នា ខ្ញុំយល់ថា មហាឧបរាជមិនមែនបើកឲ្យអ្នកទៅតាមស្រួលទេ ទុកជាអ្នកបានរត់មកដល់ទីនេះក៏នឹងមិនផុតទៅបាន ព្រោះ**ហៃហ៊្វទុន** និង**ជិនគី**តាំងទ័ពនៅតំបន់ត្រើយទន្លេហងហោ។

**គួនអ៊ូ**តបថា ពីដើមមហាឧបរាជទទួលប្ដេជ្ញាទុកនឹងយើង ឥឡូវយើងឮដំណឹងបងយើងហើយ យើងក៏ត្រូវចេញមកតាមសញ្ញា អ្នកចូរអាណិតជួយចាត់រកទូកចម្លងជូនយើងទៅត្រើយម្ខាង ត្រង់កំពង់ខាងត្បូង ឬខាងជើង ល្មមឲ្យផុតពីទ័ព**ហៃហ៊្លទុន**ចុះ។ **ឡៅអៀន**ថា ទូករបស់យើងក៏មាននៅស្រាប់ តែដែលនឹងចម្លងជូនអ្នកទៅ ទោសក៏ត្រូវមានដល់យើង។ **គួនអ៊ូ**តបថា ស្រុកដែលអ្នករក្សានៅនេះក៏ជាស្រុកមុខគយ ខ្លួនយើងក៏បានយកអាសាសម្លាប់**ង៉ាន់លៀង, ប៊ុនធីវ** ដែលជាទាហានឯក**អ៊ួនសៀវ**ស្លាប់ ហើយអ្នកទើបបានសេចក្ដីសប្បាយដោយសារយើងដែរ ហេតុម្ដេចក៏ភ្លេចគិតដល់គុណយើងផង គ្រាន់តែឲ្យចម្លងជូនទៅប៉ុណ្ណោះក៏មិនបាន។ ហើយ**គួនអ៊ូ**មិនបានគិតញញើត ទើបឲ្យទាហានបររថបង្ហួសទៅដល់មាត់ទន្លេហាងហោ។

ឯ**ជិនគី**ដែល**ហៃហ៊្លទុន**ឲ្យឃុំទាហានមកតាំងបន្ទាយនៅតំបន់មួយ លុះឮដំណឹងថា **គួនអ៊ូ**នាំបងថ្លៃមកដល់មាត់ទន្លេហើយ ក៏ឡើងសេះលើកទាហានចេញពីបន្ទាយ ហើយក្លែងស្រែកសួរថា នរណាហ៊ានដើររំលងមុខទ័ពយើង មកនេះនឹងទៅណា? **គួនអ៊ូ**ស្រែកតបថា យើងឈ្មោះ**គួនអ៊ូ**នឹងសុំឆ្លងទៅត្រើយម្ខាង ដើម្បីទៅរក**ឡៅពី**ជាបងយើងនៅស្រុកខាងជើង។ **ជិនគី**សួរថា មានសំបុត្រមហាឧបរាជបើកគយមកដែរឬទេ? **គួនអ៊ូ**ប្រាប់ថា យើងមិនមែនជាខ្ញុំកំដរស៊ីបៀវត្សរបស់មហាឧបរាជកាលណា ត្រូវការអ្វីនឹងសុំសំបុត្រនាំរវល់។ **ជិនគី**ស្រែកថា យើងជាទាហានរង **ហៃហ៊្លទុន**ជាមេទ័ពបង្គាប់យើងឲ្យមកនៅរក្សាទីនេះ មិនឲ្យនរណាដែលមិនមានសំបុត្របើកគយមកនោះឆ្លងទៅមកបានទេ កុំថាតែមនុស្សដើរដីដូចយ៉ាងអ្នកឯងនេះឡើយ ទោះជាសត្វមានស្លាបហើរលើអាកាសក៏ទៅមិនរួចនឹងដៃយើងឡើយ។

**គួនអ៊ូ**បានស្តាប់ដូច្នោះខឹងណាស់ ឆ្លើយថា ដែលយើងមកនេះខ្លួនមិនបានឮដំណឹងល្បីឈ្មោះយើងខ្លះទេឬ? អ្នកដែលឃាត់ឃាំងទទឹងយើង ៗសម្លាប់ចោលជាច្រើននាក់មកហើយ។ **ជិនគី**ថា ដែលខ្លួនសម្លាប់បាននោះតែទាហានណាដែលគ្មានថ្វីដៃ ឯមនុស្សយ៉ាងយើងអ្នកនឹងធ្វើម្តេចបាន។ **គួនអ៊ូ**ថា ដែលខ្លួនអួតថាខ្លាំងពូកែនោះ បើប្រៀបធៀបនឹងថ្វីដៃ**ង៉ាន់លៀង, ប៊ុនធីវ**បានឬទេ? **ជិនគី**បានស្តាប់ក៏ខឹងណាស់ ទើបបរសេះរាំដាវចូលច្បាំងនឹង**គួនអ៊ូ**បានមួយភ្លែង **គួនអ៊ូ**លើកដាវកាប់ត្រូវ**ជិនគី**ដាច់កធ្លាក់ពីលើសេះស្លាប់។ ទាហានទាំងអស់ក៏បែកបាក់ខ្ចាត់ខ្ចាយរត់ទៅ **គួនអ៊ូ**ក៏ស្រែកឃាត់ទាហានដែលរត់នោះឲ្យឈប់ថា អ្នកទាំងពួងមិនបានធ្វើខុសអ្វីកុំគប្បីរត់ខ្លាចយើងឡើយ យើងមិនបានធ្វើអន្តរាយអ្វីទេ ចូរជួយរកទូកចម្លងយើងទៅត្រើយម្ខាងចុះ។ ទាហានទាំងពួងបានស្តាប់**គួនអ៊ូ**ស្រែកដូច្នេះ ក៏បបួលគ្នាចាត់រកទូកចម្លងជូន**គួនអ៊ូ**ទៅត្រើយម្ខាង។

ខណៈកាល**គួនអ៊ូ**នាំបងថ្លៃទៅដល់ត្រើយម្ខាង ជាដែនស្រុកគីជីវរបស់**អ៊ួនសៀវ គួនអ៊ូ**ជិះសេះតាមរថទៅ មានវិតក្កព្រួយណាស់ដកដង្ហើមធំគិតថា “យើងមកគ្រានេះហែកទម្លាយគយល្បាតជាច្រើនអន្លើ ហើយសម្លាប់នាយទាហាន**ចូឆូ**ស្លាប់ដល់ប្រាំមួយនាក់ ព្រោះសេចក្តីទើសទាល់ បើ**ចូឆូ**មិនពិចារណាឲ្យល្អិតល្អន់ទេក៏នឹងឃើញថាជាមនុស្សអាក្រក់គ្មានកតញ្ញូ” ទទួលក្រឡេកឃើញ**ស៊ុនខៀន**ជិះសេះមកដល់ **គួនអ៊ូ**មានសេចក្តីសោមនស្សណាស់សួរថា កាលអ្នកទៅជួបនឹងខ្ញុំឯស្រុកយីឡាំនោះ អ្នកថានឹងទៅស៊ើបដំណឹងមកប្រាប់ខ្ញុំ ឥឡូវអ្នកបានដឹងដូចម្តេចខ្លះ? **ស៊ុនខៀន**ឆ្លើយថា កាលគ្រាដែលអ្នកលើកទ័ពត្រឡប់ទៅនោះ **ឡៅផេក, កុងតៅ**ក៏លើកទ័ពត្រឡប់មកវាយយកស្រុក**យីឡាំ**បាន ទើបឲ្យខ្ញុំកាន់សំបុត្រទៅដល់**អ៊ួនសៀវ**

ថា នឹងសុំចុះចូលមកធ្វើរាជការផង **អ៊ួនសៀវ**ក៏ព្រម ហើយគិតប្រឹក្សានឹងទាហានទាំងពួង ប៉ងនឹងលើកទ័ពទៅវាយយកស្រុកហ៊្វូតោ ប៉ុន្តែទីប្រឹក្សាទាំងពួងជជែកមិនចុះរុះគ្នា បានជាខ្ញុំរិះគិតនឹងឡៅពីឲ្យលា**អ៊ួនសៀវ**មកនៅស្រុកយីឡាំ នឹងបានគិតការកម្ចាត់**ចូឆូ**ចេញ។ **អ៊ួនសៀវ**ក៏ព្រមឲ្យ**ឡៅពី**មក ឥឡូវ**ឡៅពី**នៅបារម្ភក្រែងអ្នកដើរតម្រង់ទៅស្រុកគីជីវតែម្តង បានជាឲ្យខ្ញុំមកចាំស្ទាក់នាំផ្លូវទៅស្រុកយីឡាំ ដែល**ឡៅពី**ទៅនៅនោះវិញ។

**គួនអ៊ូ**បានស្តាប់ដូច្នោះក៏មានចិត្តសោមនស្សណាស់ នាំ**ស៊ុនខៀន**ទៅឯរថបងថ្លៃ។ **ស៊ុនខៀន**គំនាប់ហើយសារស័ព្ទរឿងដែល**ឡៅពី**ទៅនៅនឹង**អ៊ួនសៀវ** ហើយ**អ៊ួនសៀវ**ក្រោធថា **គួនអ៊ូ**សម្លាប់**ង៉ាន់លៀង** និង**ប៊ុនធីវ**ជាសេនាឯក។ **អ៊ួនសៀវ**ប្រុងនឹងសម្លាប់**ឡៅពី**សងសឹកដល់ពីរគ្រាមកហើយ **ឡៅពី**ចេះតែដោះស្រាយរួចខ្លួនបានគ្រប់គ្រា ទើបមិនបានអន្តរាយ រហូតមកដល់ឥឡូវនេះបានទៅដល់ស្រុកយីឡាំហើយ។ នាងទាំងពីរបានស្តាប់រឿងរ៉ាវ**ឡៅពី**សព្វគ្រប់ ក៏ឱនជ្រប់ដាក់មុខនឹកខ្លោចផ្សាចិត្តអាណិត**ឡៅពី**ពន់ប្រមាណ ទប់ពុំបានក៏សោកាពិលាបនៅលើរថស្ទើរនឹងបាត់វិញ្ញាណ។ **គួនអ៊ូ**ឲ្យ**ស៊ុនខៀន**នាំផ្លូវទៅស្រុកយីឡាំ ខណៈកាលដើរទៅនោះ ទទួលឮសំឡេងមនុស្សស្រែកហៅពីក្រៅអឹងកង **គួនអ៊ូ**ក្រឡេកទៅឃើញ**ហែហ៊្វូទុន**លើកទាហានផ្គងទន្លេហាងហោតាមមកជាច្រើន ឃើញ**ហែហ៊្វូទុន**ជិះសេះចេញមកខាងមុខទាហានហើយស្រែកថា អា**គួនអ៊ូ**ឈប់សិន។ **គួនអ៊ូ**បានឮដូច្នេះក៏និយាយនឹង**ស៊ុនខៀន**ឲ្យបង្ខំបររថទៅមុខ ខ្លួន**គួនអ៊ូ**នៅរេរាការពារពីក្រោយ ហើយ**គួនអ៊ូ**ក៏បរសេះត្រឡប់មុខមកក្រោយឈរនៅនោះ លុះឃើញ**ហែហ៊្វូទុន**ចូលមកជិត **គួនអ៊ូ**ក៏ស្រែកសួរថា ដែលអ្នកឃុំទាហានមកនេះ យើងឃើញថាល្មើសពាក្យមហាឧបរាជ។

**ហៃហ៊្លីទុន**ឆ្លើយតបថា “ខ្លួនមិនមានសំបុត្រមហាឧបរាជបើកគយឲ្យមក ហើយហ៊ានហែកទម្លាយគយល្បាតកន្លងខេត្តខណ្ឌមកជាច្រើនតំបន់ សម្លាប់ចៅហ្វាយស្រុកនិងមេគយល្បាតស្លាប់ជាច្រើន ហើយមកថែមសម្លាប់ទាហានរងរបស់យើងដែលមកតាំងបន្ទាយរាំងទ័ពនៅទីនេះស្លាប់ទៀត យើងនឹងចាប់ខ្លួនឯងបញ្ជូនទៅឲ្យមហាឧបរាជធ្វើទោសជាទម្ងន់” ថាហើយក៏បរសេះចូលទៅនឹងចាប់ខ្លួន**គួនអ៊្វ**។ ទទួលសេះបម្រើបំផាយមកស្រែកឃាត់**ហៃហ៊្លីទុន**ថា “កុំឲ្យធ្វើអន្តរាយ**គួនអ៊្វ**ឡើយ” ហើយហុចសំបុត្រនោះឲ្យ**ហៃហ៊្លីទុន**មើលរួចថា មហាឧបរាជមានចិត្តមេត្តា ដោយឃើញថា**គួនអ៊្វ**នេះជាមនុស្សមានសេចក្តីសត្យពិតត្រង់ មានបំណងនឹងទៅរក**ឡៅពី** តែខ្លាចចៅហ្វាយស្រុក និងនាយគយល្បាតទាំងពួងឃាត់ឃាំងខ្លួនទុក ទើបប្រើខ្ញុំបាទឲ្យកាន់សំបុត្របើកគយមកឲ្យលោកបានជ្រាប។

# រឿង សាមកុក

## អ្នកឧកញ៉ាវិបុលរាជសេនា **នូ-កន** ប្រែរៀបរៀង

## កណ្ឌទី ២៥

**ចារឹកឡើងវិញដោយ ៖ ឈុល ដារ៉ា**

*(តាំងពី**ហែហ៊្វូទុន** តាមទៅច្បាំងប៉ងនឹងចាប់ខ្លួន**គួនអ៊ូ** នៅត្រើយទន្លេហាងហោរហួត ដល់**អ៊ូនសៀវ**ធ្វើសំបុត្រឲ្យ**តាន់ជិន**យកទៅបញ្ចុះបញ្ចូល**ស៊ុនសេក**ស្រុកកាំងតាំង ឲ្យលើកទ័ពមកច្បាំងនឹង**ចូឆូ**)។*

**ហែហ៊្វូទុន**ក៏សួរបម្រើសេះថា **គួនអ៊ូ**កោងកាចអាចហ៊ានកាប់ទម្លាយគយល្បាត ហើយសម្លាប់ចៅហ្វាយស្រុកនិងនាយគយល្បាត ជាច្រើនតំបន់នោះ មហាឧបរាជបានជ្រាបដែរឬទេ? បម្រើសេះឆ្លើយថា ដែល**គួនអ៊ូ**ធ្វើដូច្នោះមហាឧបរាជមិនបានជ្រាបទេ។ **ហែហ៊្វូទុន**ថា ដែល**គួនអ៊ូ**ធ្វើល្មើសខ្លាំងដូច្នេះ ហើយមហាឧបរាជមិនជ្រាបនោះ ត្រូវតែយើងតាមចាប់ខ្លួន**គួនអ៊ូ**ឲ្យបាន ហើយបញ្ជូនទៅជាប្រញាប់។ **គួនអ៊ូ**បានឮក៏ខឹងណាស់ ឆ្លើយតបទៅនឹង**ហែហ៊្វូទុន**ថា "ហេតុម្តេចបានជាខ្លួនមកចរចាដូច្នេះ ខ្លួនស្មានថាយើងខ្លាចខ្លួនឬ?" ហើយ**គួនអ៊ូ**ក៏បរសេះចូលច្បាំងនឹង**ហែហ៊្វូទុន**បានដប់ភ្លែង ទទួលឃើញបម្រើសេះម្នាក់កាន់ទង់សម្រាប់ទ័ព**ចូឆូ**បក់ស្រែកឃាត់មកថា អ្នកទាំងពីរកុំអាលច្បាំងគ្នាសិន។ **ហែហ៊្វូទុន**ក៏ឈប់ហើយសួរបម្រើសេះនោះថា មានសំបុត្រមហាឧបរាជបង្គាប់ឲ្យយើងចាប់ខ្លួន**គួនអ៊ូ**បញ្ជូនទៅឬ? បម្រើសេះថា មិនមែនទេ មហាឧបរាជខ្លាចក្រែងគយល្បាតតាមផ្លូវឃាត់ឃាំង**គួនអ៊ូ**មិនឲ្យទៅ ទើបប្រើខ្ញុំបាទឲ្យយកទង់សម្រាប់កងទ័ពមកឃាត់ជាសម្គាល់ទៀត។ **ហែហ៊្វូទុន**ថា "**គួនអ៊ូ**ធ្វើល្មើសអាជ្ញា មហាឧបរាជមិនបានដឹង យើងនឹងបើកឲ្យទៅមិនបានទេ" ហើយក៏បង្គាប់ឲ្យទាហានទាំងពួងឡោមព័ទ្ធ**គួនអ៊ូ**ជុំវិញ។ **គួនអ៊ូ**

ខឹងណាស់ បរសេះរាំងាវចូលប្រយុទ្ធនឹង**ហែហ៊្វទុន**មួយលើកទៀត ទទួល**តៀវលៀវ**បំផាយសេះចូលទៅដល់ហើយស្រែកឃាត់ថា អ្នកទាំងពីរឈប់ច្បាំងគ្នា។ **ហែហ៊្វទុន**និង**គួនអ៊ូ**ក៏ឈប់ **តៀវលៀវ**និយាយប្រាប់**ហែហ៊្វទុន**ថា មហាឧបរាជជ្រាបថា**គួនអ៊ូ**ទម្លាយគយល្បាតចេញមក ហើយសម្លាប់ចៅហ្វាយស្រុកនិងនាយគយល្បាតស្លាប់ច្រើននោះ មហាឧបរាជបារម្ភណាស់ ក្រែងសេនាទាហានឯទៀតនឹងមានកំហឹងគុំគួន ព្រួតគ្នាតាមតតាំងច្បាំង មិនឲ្យ**គួនអ៊ូ**ចេញទៅបានដោយស្រួល បានជាប្រើខ្ញុំឲ្យស្រួតមកឃាត់។ **ហែហ៊្វទុន**ប្រាប់**តៀវលៀវ**ថា **ជិនគី**ជាក្មួយ**ស៊ូយ៉ុង** ៗប្រើឲ្យមកធ្វើរាជការជាមួយនឹងខ្ញុំ ឥឡូវ**គួនអ៊ូ**សម្លាប់**ជិនគី**ស្លាប់ទៅទៀត បើ**ស៊ូយ៉ុង**ដឹងហើយនឹងខឹងប្រកាន់ដល់ខ្ញុំមិនលែង។ **តៀវលៀវ**តបថា ដំណើររឿងនោះអ្នកកុំព្រួយ ទុកឲ្យខ្ញុំទៅនិយាយដោះសារនឹង**ស៊ូយ៉ុង**ចុះ ឯត្រង់**គួនអ៊ូ**នេះមហាឧបរាជមានសេចក្តីមេត្តាគេច្រើនណាស់ ត្រូវតែបណ្តោយឲ្យគេចេញទៅរក**ឡៅពី**តាមសញ្ញាចុះ បើអ្នកមកឃាត់ឃាំងមិនឲ្យ**គួនអ៊ូ**ទៅនោះ ឃើញថាទទឹងនឹងប្រសាសន៍មហាឧបរាជខ្លាំងណាស់។ **ហែហ៊្វទុន**ឮដូច្នោះក៏ហៅទាហានដែលឡោមព័ទ្ធនោះថយត្រឡប់ទៅវិញ។

រឿងត្រង់នេះគឺជាសេចក្តីមានពោលទុកមកថា កាល**គួនអ៊ូ**ទៅនោះ **ចូឆូ**ក៏គិតថាមុខជា**គួនអ៊ូ**ចេញទៅមិនរួច ព្រោះមានកន្លែងគយល្បាតជាច្រើនសង្កាត់ណាស់ លុះ**ចូឆូ**ដឹងថា**គួនអ៊ូ**សម្លាប់**ខុងស៊ីវ**នាយគយជាន់ក្នុងស្លាប់ហើយ ថែមទាំងសម្លាប់ចៅហ្វាយស្រុក និងនាយគយជាលំដាប់ច្រើនសង្កាត់ទៅទៀតជាច្រើននាក់ **ចូឆូ**ក៏គិតលើកទ័ពទៅតាមចាប់**គួនអ៊ូ** តែមកក្រែងគេនឹងគរហានិន្ទាថា ធ្វើជាធំចរចាជាពាក្យពីរម៉ាត់ មួយយ៉ាងទៀតមកគិតឃើញថាចៅហ្វាយស្រុក និងនាយគយល្បាតនោះក៏ស្លាប់អស់ទៅផង ទោះបីនឹងលើកទ័ពឆ្លងទៅតាមចាប់**គួនអ៊ូ**មកបាន ក៏មិនមែន

សេនាទាហានដែលស្លាប់នោះរស់ឡើងវិញបានឡើយ ម្ល៉ោះហើយ**ចូឆ្វ**ក៏យល់ថា **គួនអ៊ូ**កន្លងផុតដែនខេត្តជាចំណុះរបស់ខ្លួនទៅហើយ ក៏ត្រិះរិះគិតត្រឡប់ចិត្តបាន ថាត្រូវតែធ្វើគុណនឹង**គួនអ៊ូ**ឲ្យរហូតទុកទៅប្រសើរជាង អំណើះទៅមុខគង់តែ**គួនអ៊ូ**នឹងគិតឃើញគុណវិញ បានជាក្លែងប្រើបម្រើសេះឲ្យកាន់សំបុត្រនិងទង់ជ័យ ហើយប្រើ**តៀវលៀវ**ឲ្យទៅឃាត់ទៀត ដើម្បីឲ្យឃើញថាចិត្តថ្លើមរបស់**ចូឆ្វ**នោះស្រឡាញ់**គួនអ៊ូ**ច្រើនណាស់ សូម្បីនឹងធ្វើខុសល្មើសយ៉ាងណា **ចូឆ្វ**ក៏មិនយកទោសកំហុសសោះ។

ខណៈនោះ **តៀវលៀវ**ក៏សួរ**គួនអ៊ូ**ថា ដែលអ្នកមកនេះនឹងទៅរក**ឡៅពី**ឯទីណា? **គួនអ៊ូ**ឆ្លើយថា កាលពីថ្ងៃមុនខ្ញុំឮថា**ឡៅពី**បងខ្ញុំនៅនឹង**អ៊ួនសៀវ** បានជាខ្ញុំប៉ងនឹងទៅរក។ ឥឡូវមានគេមកប្រាប់ថា បងខ្ញុំចេញពី**អ៊ួនសៀវ**ទៅហើយ ខ្ញុំក៏ត្រូវតែស្វែងទៅស៊ើបសួររកឲ្យទាល់តែឃើញ។ **តៀវលៀវ**ថា បើអ្នកតាមរក**ឡៅពី**មិនដឹងថានៅឯណាទេ ចូរអ្នកវិលត្រឡប់ទៅនៅនឹងមហាឧបរាជវិញសិនចុះ កាលណាឮដំណឹងថា**ឡៅពី**នៅឯណាៗបានជាប្រាកដហើយ សឹមអ្នកត្រឡប់ទៅរកទៀត។ **គួនអ៊ូ**ឮហើយក៏អស់សំណើចហើយថា អ្នកនិយាយនេះមិនត្រូវសោះ បើអ្នកនឹងវិលត្រឡប់ចូលទៅក្រុងវិញ សូមឲ្យជួយយកសេចក្ដីណាសមគួរប្ដឹងមហាឧបរាជថា សូមកុំអាក់អន់ចិត្តនឹងខ្ញុំឡើយ បើបានជាធ្វើគុណហើយក៏ចូរធ្វើឲ្យរហូតទៅចុះ ទៅថ្ងៃមុខគង់តែខ្ញុំនឹងតបស្នងសងគុណមហាឧបរាជវិញទេ។ **តៀវលៀវ**ក៏លា**គួនអ៊ូ**ត្រឡប់ទៅវិញ។

ខណៈនោះ **គួនអ៊ូ**ក៏បរសេះទៅដល់រថបងថ្លៃ ហើយអធិប្បាយរឿងដែលបានតតាំងច្បាំងនឹង**ហែហ៊ូទុន** ព្រមទាំងឆ្លើយដោះសារគ្នានឹង**តៀវលៀវ**ឲ្យបងថ្លៃនិង**ស៊ុនខៀន**ស្ដាប់ ហើយនាំគ្នាដើរផ្លូវទៅប្រាំថ្ងៃ ទទួលភ្លៀងរំលាធំណាស់ នឹងរកទី

សំណាក់ពុំបាន ក៏ក្រឡេកទៅឃើញផ្ទះមួយនៅលើភ្នំ ទើបនាំគ្នាឡើងទៅនឹងសំណាក់អាស្រ័យ។ **គួសៀង**ម្ចាស់ផ្ទះនោះជាមនុស្សចាស់ជរា ក៏សួរសាកមកវិញថា អ្នកឈ្មោះអ្វី? មកពីណាទៅណា? **គួនអ៊ូ**ប្រាប់ថា "ខ្ញុំឈ្មោះ**គួនអ៊ូ**" ហើយពណ៌នារាយរឿងប្រាប់**គួសៀង**ស្ដាប់សព្វគ្រប់ប្រការ។ **គួសៀង**ក៏ថា "តាំងពីជីតាជីដូនខ្ញុំមកតែងអាស្រ័យរកស៊ីធ្វើស្រែចម្ការនៅទីនេះជាយូរហើយ ខ្ញុំក៏ធ្លាប់ឮគេនិយាយរៀងមកថា អ្នកមានថ្វីដៃខ្លាំងពូកែណាស់ ខ្ញុំឮតែឈ្មោះ ទើបតែបានឃើញមុខច្បាស់ថ្ងៃនេះ" ហើយគួសៀងអញ្ជើញ**គួនអ៊ូ**និងភរិយា**ឡៅពី**នោះឲ្យឡើងទៅលើផ្ទះ ហើយគាត់តែងបាយទឹកតាមគួរសមឲ្យ**គួនអ៊ូ**និងភរិយា**ឡៅពី**បរិភោគ។

លុះវេលាយប់បន្តិច កូនប្រុស**គួសៀង**ក៏នាំពួកភៀនប្រាំពីរនាក់ចូលមកក្នុងផ្ទះ **គួសៀង**ឃើញក៏ហៅឲ្យកូននោះឡើងមកគំនាប់**គួនអ៊ូ** ដើម្បីនឹងសូមផ្ញើខ្លួន កូននោះក៏ឡើងទៅឃើញ**គួនអ៊ូ** តែមិនបានគំនាប់តាមពាក្យបិតា ក៏ត្រឡប់ចុះទៅនាំបក្សពួកចេញទៅក្រៅផ្ទះ។ **គួនអ៊ូ**ក៏សួរ**គួសៀង**ថា នរណាដែលមកអម្បាញ់មិញនេះ ត្រូវជាអ្វីនឹងអ្នក? **គួសៀង**យំហើយជម្រាបថា អម្បាញ់មិញនេះគឺជាបុត្រផងខ្ញុំ ៗមានបុត្រតែមួយនេះ វាគ្មានចិត្តនឹងចង់ធ្វើស្រែចម្ការរកស៊ីសោះ គប់រកតែភៀនដើរបាញ់សត្វលេងគ្មានបានការអ្វីទេ ដែលខ្ញុំមានបុត្រយ៉ាងនេះក៏ជាកម្មរបស់ខ្ញុំផង។ **គួនអ៊ូ**ថា ផែនដីឥឡូវនេះកើតចលាចលរាល់ស្រុករាល់ខេត្ត ដែលនឹងដើរបរបាញ់សត្វលេងនោះ បើមានថ្វីដៃពូកែបាញ់ធ្នូគ្រាន់បើ ក៏ល្មមយោងខ្លួនរួចបាន ហេតុម្ដេចបានជាអ្នកថាមានកម្ម? **គួសៀង**តបថា កូនខ្ញុំនេះវាឃើញតែការសប្បាយ គប់បាបមិត្តប្រព្រឹត្តតែសេចក្ដីអាក្រក់ផ្សេងៗ លេងបាញ់សត្វរុតជញ្ជាត់ត្រី ទោះជាមានថ្វីដៃចេះបាញ់ធ្នូក៏ចេះគ្មានគ្រូបង្ហាត់ នឹងរាប់ថាចេះស្ទាត់ម្ដេចបាន ខ្ញុំឃើញថាតម្រិះវានេះនឹងយោង

ខ្លួនប្រាណមិនបានទេ ខ្ញុំទើបកើតទុក្ខពីព្រោះតែវា។ **គួនអ៊ូ**បានស្ដាប់ហើយក៏ដកដង្ហើមធំ ទើបថា ជាទម្លាប់ប្រពៃណីមកហើយ បើបុត្រល្អប្រសើរមាតាបិតាក៏ជាសុខ បើបុត្រអាក្រក់ជួជាតិមាតាបិតានិងសាច់ញាតិក៏ជាទុក្ខព្រួយដោយសារ។ **គួសៀង**ស្ដាប់ហើយក៏ទាល់ប្រាជ្ញា ទើបរៀបទីនិទ្រាឲ្យ**គួនអ៊ូ**និងភរិយា**ឡៅពី**ទទួលដំណេក ហើយខ្លួនឯងក៏ចេញទៅដេកនៅល្វែងក្រៅ។

**គួនអ៊ូ**និង**ស៊ុនខៀន**ក៏ដេកលក់ទៅមួយស្របក់ ស្រាប់តែឮសំឡេងសេះនិងមាត់មនុស្សស្រែកក៏ភ័យភ្ញាក់ឡើង។ **គួនអ៊ូ**ក៏ស្រែកហៅទាហានដែលរក្សាសេះ ទាហានទាំងនោះក៏ដេកលក់សូន្យមិនដឹងខ្លួនសោះ។ **គួនអ៊ូ**និង**ស៊ុនខៀន**ក៏ក្រោកកាន់គ្រប៊ីចុះទៅមើលស្រាប់តែឃើញបក្សពួកបងប្អូននិងអ្នកស្រុក លើកគ្នាមកជេរកូន**គួសៀង** ដែលដួលនៅទីនោះ។ **គួនអ៊ូ**ក៏សួរពួកនោះថា ហេតុម្ដេចបានជាកូន**គួសៀង**មកដួលនៅដូច្នេះ? ពួកនោះឆ្លើយថា អាដែងនេះវាអាក្រក់ណាស់ វាឃើញសេះរបស់លោកល្អ វាលបចូលមកនឹងលួចយកទៅ សេះនោះក៏ធាក់វាដួលនៅទីនេះ ខ្ញុំបានឮសំឡេងស្រែក បានជាបបួលគ្នាមកមើល។ **គួនអ៊ូ**បានស្ដាប់ដូច្នោះខឹងណាស់ ទើបនិយាយថា វានេះអាក្រក់ណាស់ បង្អង់ឲ្យវាដឹងខ្លួនភ្ញាក់ឡើងនឹងធ្វើទោសវាជាទម្ងន់។

**គួសៀង**បានឮសំឡេងអឺងកងក៏ភ័យភ្ញាក់ឡើង ស្ទុះចុះទៅមើលឃើញកូនរបស់ខ្លួនដួលសន្លប់ដូច្នោះ ឮអ្នកស្រុកនិងបងប្អូននិយាយរឿងរ៉ាវឲ្យស្ដាប់ **គួសៀង**ក៏គំនាប់អង្វរ**គួនអ៊ូ**ថា សូមឲ្យលោកអាណិតខ្ញុំម្ដងចុះ កូនខ្ញុំនេះវាអាក្រក់ណាស់ ខ្ញុំក៏បានជម្រាបរឿងវាឲ្យលោកជ្រាបមកពីមុនរួចហើយ ដែលវាធ្វើខុសដូច្នេះ ខ្ញុំនឹងបានចូលគំនិតជាមួយនឹងវាក៏ទេ។ ម្ដាយវាមានចិត្តស្រឡាញ់វា ព្រោះកូនតែមួយ សូមឲ្យ

លោកអាណិតអាសូរខ្ញុំ លើកទោសដែលវាធ្វើខុសនោះឲ្យទានចុះ។ **គួនអ៊ូ**ថា "ដែលអ្នកប្រាប់អំពីទុក្ខមកដល់ខ្ញុំនោះ ក៏ដូចពាក្យអ្នកជាប្រាកដ ទោសរបស់វាខ្ញុំក៏ព្រមលើកចោលឲ្យអ្នកហើយ" ហើយបង្គាប់ទាហានឲ្យរក្សាសេះទុកឲ្យល្អ ហើយនាំ**ស៊ុនខៀន**ឡើងមកដេកវិញ។

លុះព្រឹកឡើង **គួសៀង**និងភរិយាចេញមកគំនាប់**គួនអ៊ូ**ហើយថា កូនខ្ញុំធ្វើខុសហើយលោកអនុញ្ញាតលើកទោសចេញនោះ គុណរបស់លោករកទីបំផុតគ្មានឡើយ។ **គួនអ៊ូ**ឆ្លើយថា អ្នកចូរហៅវាឲ្យចេញមកជួបនឹងខ្ញុំ ៗនឹងជួយស្តីប្រដៅ។ **គួសៀង**ឆ្លើយថា កាលពីយប់វិញវាភ្ញាក់ដឹងខ្លួនហើយ ក៏នាំពួកភៀនវេះគេចទៅឯណាបាត់ទៅហើយ។ **គួនអ៊ូ**បានស្តាប់ហើយ ក៏លា**គួសៀង**នាំបងថ្លៃនិង**ស៊ុនខៀន**ចេញពីផ្ទះនោះទៅចម្ងាយផ្លូវប្រហែលបីរយសិន (១២ គ.ម) ទទួលក្រឡេកឃើញ**គួសៀង**នោះជិះសេះនាំមេចោរម្នាក់ជូតក្បាលលឿងសំពត់លឿង ជិះសេះកាន់ទួនលើកពួកភៀនប្រហែលមួយរយប្លាយនាក់ ចុះពីលើភ្នំមកស្ទាក់ទទឹងផ្លូវ។ មេចោរនោះក៏ស្រែកហៅ**គួនអ៊ូ**ថា ខ្លួនយើងឈ្មោះ**ហ៊ុយង្គួនសៀវ**ជាទាហាន**ទៀវកុក** ខ្លួននឹងទៅណាទើបអាចហ៊ាននាំគ្នាឆ្លងដែនយើងមក? បើខ្លួនស្រឡាញ់ជីវិត ចូរយកសេះដែលជិះនោះមកឲ្យយើង ៗនឹងលែងឲ្យទៅ។ **គួនអ៊ូ**បានស្តាប់ក៏អស់សំណើចហើយថា ខ្លួនជាទាហាន**ទៀវកុក**ជាចោរនោះធ្លាប់បានឮឈ្មោះ**ឡៅពី**, **គួនអ៊ូ**, **តៀវហ៊ុយ**ដែរឬទេ? **ហ៊ុយង្គួនសៀវ**ឆ្លើយថា ខ្ញុំមិនដឹងទេ គ្រាន់តែឮឈ្មោះ តែ**គួនអ៊ូ**នោះឮគេថាមុខក្រហមពុកមាត់វែង មានថ្វីដៃខ្លាំងពូកែណាស់ ចុះអ្នកឯងនេះឈ្មោះអ្វី? **គួនអ៊ូ**ក៏ស្រាយយកថង់ដែលព្យួរទ្រពុកមាត់នោះចេញមកឲ្យ**ហ៊ុយង្គួនសៀវ**មើល។ **ហ៊ុយង្គួនសៀវ**ឃើញច្បាស់ដូច្នោះ ក៏ដឹងថាប្រាកដជា**គួនអ៊ូ** ទើបលោតចុះពីលើសេះហើយបោះទួន

ចេញពីដៃ នាំកូន**គួសៀង**ចូលទៅលុតជង្គង់គំនាប់**គួនអ៊ូ**ហើយថា "ខ្ញុំបាទមិនដឹងសោះ ដែលខ្ញុំបាទនិយាយមើលងាយទ្រគោះប្រមាថដល់លោកនោះ សូមឲ្យលោកអភ័យទោសខ្ញុំបាទចុះ ព្រោះខ្លួនខ្ញុំបាទនេះតាំងតែពី**ទៀវកុក**ស្លាប់ទៅកាលណា ក៏នាំពួកភៀនមកធ្វើជាចោរនៅក្នុងទីភ្នំនេះ ដែលខ្ញុំបាទបានគិតមកប្រុងនឹងប្រទូសរ៉ាយលោកគ្រានេះ ព្រោះកូន**គួសៀង**បបួលនាំមក" ហើយក៏ពណ៌នារឿងរ៉ាវដែលកូន**គួសៀង**នាំគិតប្រទូសរ៉ាយនោះឲ្យ**គួនអ៊ូ**ស្ដាប់គ្រប់ប្រការ។ កូន**គួសៀង**ក៏លន់តួអង្វរថា ខ្ញុំបាទខុសហើយ សូមឲ្យលោកអភ័យទោសចុះ។

**គួនអ៊ូ**ថា ទោសខ្លួនខុសពីយប់មិញម្ដងហើយ យើងក៏លើកលែងមិនប្រកាន់ ឥឡូវខ្លួនមកគប់គិតគ្នាធ្វើយើងម្ដងទៀត បើយើងនឹងសម្លាប់ចេញក៏បាន តែយើងគិតដល់ផ្លូវមេត្រីនឹង**គួសៀង** ឯទោសខ្លួនទាំងពីរគ្រានេះ យើងលើកទោសឲ្យ ដោយយល់ដល់**គួសៀង**ជាបិតាឯង។ កូន**គួសៀង**ក៏មានសេចក្ដីត្រេកអរណាស់ ហើយលា**គួនអ៊ូ**ចេញទៅ។ **ហ៊ុយងួនសៀវ**និយាយប្រាប់**គួនអ៊ូ**ថា ភៀនខ្ញុំបាទម្នាក់ជាពួកអ្នកស្រុកឯលិចនៅធ្វើទាហាន**ទៀវប៉ោ** ឈ្មោះ**ជីវឆង** រូបរាងខ្ពស់ធំមានកម្លាំងខ្លាំងរែករបស់បានទម្ងន់ដប់ហាប លុះ**ទៀវប៉ោ**ស្លាប់ទៅហើយ **ជីវឆង**ក៏ឃុំពួកភៀនមកធ្វើជាចោរនៅភ្នំជីវសាន់ ផ្លូវអំពីនេះទៅប្រហែលបីរយសិន (១២ គ.ម) ខ្ញុំបាទទៅមករក**ជីវឆង** ៗតែងនិយាយចេញឈ្មោះលោកជារឿយៗ ហើយបបួលខ្ញុំបាទថា បើវាជួបនឹងលោក នឹងនាំខ្ញុំបាទមកនៅនឹងលោក។ ឥឡូវនេះជាភ័ព្វបុណ្យខ្ញុំបាទបានមកជួបនឹងលោកមុន។ **គួនអ៊ូ**តបថា បានកើតជាប្រុសហើយនាំគ្នាមកធ្វើជាចោរនៅព្រៃដូច្នេះ នរណានឹងរាប់អានថាល្អបាន ត្រូវចោលគំនិតអាក្រក់នោះចេញ ហើយនាំគ្នាទៅធ្វើស្រែចម្ការរកស៊ីក្នុងស្រុកជាប្រក្រតីប្រសើរជាជាងនៅក្នុងព្រៃ។ កាលកំពុង

និយាយគ្នានៅទីនោះ ស្រាប់តែ**គួនអ៊ូ**ក្រឡេកទៅឃើញនាយចោរម្នាក់ជិះសេះនាំទាហានប្រហែលមួយរយប្លាយនាក់តម្រង់មក។ **ហ៊ុយងួនសៀវ**ក៏ជម្រាប**គួនអ៊ូ**ថា **ជីវឆង**មកពីនោះហើយ។ **គួនអ៊ូ**ឃើញរូបរាងជីវឆងខ្ពស់ក៏សរសើរថា សមជាទាហាន។ **ជីវឆង**មកជិតក្រឡេកឃើញ**គួនអ៊ូ**ក៏មានអំណរណាស់ ចុះពីលើសេះបោះទួនចេញហើយក៏ចូលមកលុតជង្គង់គំនាប់**គួនអ៊ូ** ៗក៏សួរថា ហេតុម្ដេចបានជាអ្នកឯងស្គាល់ខ្ញុំរាប់អានខ្ញុំ?

**ជីវឆង**ឆ្លើយថា កាលដែលខ្ញុំបាទនៅនឹង**ទៀវប៉ោ**ជាមេចោរនោះ បានដឹងថាលោកមានថ្វីដៃខ្លាំងពូកែនិងមានសតិបញ្ញា ខ្ញុំមានចិត្តប្រាថ្នាប្រុងនឹងមកនៅនឹងលោក តែជាសេចក្ដីទុញទាល់គំនិតព្រោះដ្បិតបានជាទៅនៅក្នុងអំណាច**ទៀវប៉ោ**ហើយ លុះ**ទៀវប៉ោ**ស្លាប់ ខ្ញុំបាទក៏មកនៅធ្វើជាចោរព្រៃអាស្រ័យនៅក្នុងភ្នំង៉ោជីវសាន់ ក៏បាននិយាយនឹង**ហ៊ុយងួនសៀវ**គិតដល់លោកមិនដាច់ ឥឡូវបានមកជួបនឹងលោកហើយក៏ជាបុញ្ញលាភរបស់ខ្ញុំ ៗសូមនៅធ្វើជាទាហានកាន់ស៊ែសេះតាមលោកចុះ។

**គួនអ៊ូ**បានស្ដាប់ដូច្នោះ ក៏ពិគ្រោះមើលក្នុងពាក្យសម្ដី**ជីវឆង**ដែលនិយាយនោះ ក៏ឃើញដូចជាត្រង់សុចរិត ក៏ឲ្យមានចិត្តស្រឡាញ់អាណិតពន់ប្រមាណណាស់ទើបសួរថា បើអ្នកចង់ទៅនៅនឹងយើង តើពួកភឿនរបស់អ្នកនោះនឹងជាម្ដេចទៅវិញ? ពួកភឿន**ជីវឆង**បានឮដូច្នោះ ទាំងអស់គ្នាក៏ចូលមកលុងជង្គង់គំនាប់**គួនអ៊ូ**ហើយថា យើងខ្ញុំទាំងអស់គ្នាសូមចូលទៅនៅនឹងលោកផង។ **គួនអ៊ូ**ឮដូច្នោះ ក៏ចុះពីលើសេះទៅប្រាប់បងថ្លៃទាំងពីរ។ នាង**កាំហ៊ូយិន**ប្រាប់ថា តាំងពីយើងចេញពីស្រុកហ៊ូតោមក ក៏បានសេចក្ដីទុក្ខព្រួយលំបាកពន់ពេកណាស់ ប្អូនក៏គ្មាននឹកគិតនឹងរកអ្នកឯណាជាពួកភឿនសោះ។ វេលានេះមកផុតទុក្ខភ័យហើយ នឹងទទួលមនុស្សយកទៅ

ប្រយោជន៍អ្វី? មួយទៀត**លៀវហ៊្វ**មេចោរនោះក៏មានគុណដល់បង បានអង្វរសុំមកជាមួយផង ប្អូនឯងក៏ថាជាចោរនឹងឲ្យជូនមកខ្លាចគេគរហានិន្ទាថាគប់នឹងចោរ។ វេលានេះបើប្អូនទៅទទួល**ជីវផង**វិញជាគួរឬមិនគួរយ៉ាងម្តេច ស្រេចនៅលើប្អូនគិតមើលទៅចុះ។

**គួនអ៊ូ**បានស្តាប់ដូច្នោះ ក៏វលាត្រឡប់នឹកឃើញហើយនិយាយនឹង**ជីវផង**ថា បងថ្លៃយើងទាំងពីរជាធំ មិនព្រមឲ្យអ្នកទៅផងទេ អ្នកចូរគ្រប់គ្រងរក្សាគ្នារង់ចាំនៅទីនេះសិនចុះ បើយើងទៅជួបនឹង**ឡៅពី**ជាបងយើងវេលាណា សឹមយើងត្រឡប់មកទទួលអ្នកយកទៅនៅជាមួយគ្នា។ **ជីវផង**បានស្តាប់ដូច្នោះ ក៏លុតជង្គង់គំនាប់ហើយថា ខ្លួនខ្ញុំបាទបានកើតមកជាជាតិទាហានបានប្រព្រឹត្តភ្លាត់ភ្លាំងទៅធ្វើជាពួកចោរ ឧបមាដូចជាចូលទៅនៅក្នុងទីងងឹត ឥឡូវមកជួបនឹងលោកដូចបានមកឃើញទីដែលភ្លឺស្វាង ទោះបីបងថ្លៃលោកយល់ឃើញថា ពួកខ្ញុំបាទជាពួកចោរមិនគួរនឹងយកទៅ តែពួកភឿនទាំងអស់ខ្ញុំបាទនឹងឲ្យនៅនឹង**ហ៊ុយងួនសៀវ**ចុះ ឯខ្លួនខ្ញុំបាទមួយនឹងសូមកាន់ស៊ែសេះតាមលោកទៅ ទម្រាំតែអស់ជីវិត សូមឲ្យលោកអាណិតចុះ។

**គួនអ៊ូ**បានស្តាប់ដូច្នោះហើយ ក៏មានចិត្តអាណិតមេត្តា ទើបវិលសាយកសេចក្តីនោះទៅជម្រាបអង្វរបងថ្លៃទៀត។ នាង**កាំហ៊្វុយិន**ថា បើគេនឹងចង់ទៅតែមួយនាក់ពីរនាក់ក៏ទៅចុះ។ **គួនអ៊ូ**ក៏វិលមកប្រាប់**ជីវផង**វិញតាមពាក្យបងថ្លៃ។ **ហ៊ុយងួនសៀវ**ឮហើយក៏ថា ខ្ញុំបាទសូមទៅផងបានជាពីរនាក់នឹង**ជីវផង** ៗឆ្លើយថា បើអ្នកទៅផងហើយ តើពួកភឿនរបស់យើងនឹងបាននរណាត្រួតត្រារក្សា នឹងមិនខ្ចាត់ខ្ចាយទៅទេឬ? អ្នកចូរនៅគ្រប់គ្រងរក្សាពួកភឿនសិនចុះ ចាំយើងនៅនឹង**គួនអ៊ូ** បើបានទីកន្លែងសំណាក់ហើយ នឹងវិលត្រឡប់មកទទួលអ្នកនិងពួកភឿនទាំងអស់នាំ

យកទៅ។ **ហ៊ុយងួនសៀវ**យល់ឃើញត្រូវក៏លា**គួនអ៊ូ**ត្រឡប់នាំពួកម៉ាកទៅនៅក្នុងភ្នំដែលធ្លាប់នៅនោះវិញ។

**គួនអ៊ូ**ក៏នាំបងថ្លៃនិង**ស៊ុនខៀន, ជីវឆង** ដើរផ្លូវទៅបានបីថ្ងៃ ស្រាប់តែក្រឡេកមើលទៅឃើញកំពែងលើខ្នងភ្នំធំមួយ **គួនអ៊ូ**ក៏សួរអ្នកស្រុកនោះថា ស្រុកនេះឈ្មោះអ្វី? នរណានៅរក្សា? ពួកអ្នកស្រុកនោះប្រាប់ថា ឈ្មោះស្រុកកៅសៀ មានទាហានម្នាក់ឈ្មោះ**តៀវហ៊ុយ** មានថ្វីដៃខ្លាំងពូកែណាស់ បាននាំពួកភឿនប្រហែលហាសិបប្លាយនាក់ចូលមកដេញចៅហ្វាយស្រុកនោះចេញ។ **តៀវហ៊ុយ**ក៏នៅរក្សាស្រុកលុះដល់សព្វថ្ងៃ តែងតែបញ្ចុះបញ្ចូលមនុស្សម្នាមហាជនជាកម្លាំងបានប្រាំពាន់ប្លាយស្បៀងអាហារក៏បរិបូរឥតខ្វះ បណ្តាខេត្តខណ្ឌតូចធំទាំងពួងក៏កោតញញើតថ្វីដៃ**តៀវហ៊ុយ** មិនមាននរណាអាចមកញាំញីបានឡើយ តាំងពី**តៀវហ៊ុយ**មកឈររក្សាស្រុកនេះប្រហែលជាងប្រាំខែហើយ។

**គួនអ៊ូ**បានស្តាប់ដូច្នោះក៏សែនមានអំណរណាស់ ទើបនិយាយនឹង**ស៊ុនខៀន**ថាតាំងពីខូចបែកស្រុកគីជីវមក យើងបីនាក់បងប្អូនក៏ព្រាត់ប្រាសនិរាសគ្នា ឯ**ឡៅពី**នោះក៏បានដំណឹងហើយ នៅតែ**តៀវហ៊ុយ**ទើបនឹងបានដំណឹងក្នុងថ្ងៃនេះ អ្នកចូរស្រូតទៅប្រាប់ដល់**តៀវហ៊ុយ** ឲ្យចេញមកទទួលបងថ្លៃទាំងពីរជាប្រញាប់ចុះ។ **ស៊ុនខៀន**ទទួលពាក្យ**គួនអ៊ូ**ហើយ ក៏លាចេញទៅ។

ឯ**តៀវហ៊ុយ**នោះតាំងពីបែកនឹងទ័ព**ចូឆូ**ទៅ ក៏ទៅអាស្រ័យនៅលើភ្នំយ៉ងអៀងសាន់ប្រហែលជាងមួយខែ លុះដឹងថា**ឡៅពី**បែកទៅទៀត **តៀវហ៊ុយ**ក៏លើកពួកទាហានដែលសល់នោះស្វែងដើរស៊ើបរកឡៅពី លុះមកដល់ស្រុកកៅសៀ ទទួលដាច់អស់ស្បៀងក៏ចូលទៅសូមស្បៀងអាហារចៅហ្វាយស្រុក ៗមិនឲ្យ **តៀវហ៊ុយ**

ខឹងណាស់ក៏ចូលទៅវាយយកត្រាសម្រាប់ងារបាន ហើយសម្លាប់ចៅហ្វាយស្រុកនោះស្លាប់ទៅ ហើយតាំងគិតរៀបចំបង្គាត់សេនាទាហាន ទុកប្រាថ្នានឹងចាំស្តាប់ដំណឹងឡៅពី បើដឹងឮថានៅឯណាក៏នឹងទៅតាមរក ឯខ្លួន**តៀវហ៊ុយ**នោះក៏ជាទុក្ខសោកព្រួយរំខានគ្មានលោះវេលា ទទួលនាយទ្វារបានយកដំណើរសេចក្តីនោះចូលទៅប្រាប់**តៀវហ៊ុយ**ថា មានទាហានម្នាក់ឈ្មោះ**ស៊ុនខៀន**នឹងមករកលោក។ **តៀវហ៊ុយ**ឮដូច្នោះអរណាស់ ក៏ចេញទៅទទួល**ស៊ុនខៀន**នាំចូលមក។ **ស៊ុនខៀន**ក៏និយាយប្រាប់**តៀវហ៊ុយ**ថា **ឡៅពី**បែកទៅអាស្រ័យនឹង**អ៊្វូនសៀវ**ក្នុងស្រុកគីជីវ ខ្ញុំបាទទៅគិតគូរនឹង**ឡៅពី** ក៏បានចេញទៅនៅស្រុកយីឡាំ ហើយឥឡូវ**គួនអ៊្វូ**នាំបងថ្លៃទាំងពីរមកឈប់នៅខាងក្រៅស្រុកនេះ ហើយឲ្យខ្ញុំចូលមកប្រាប់ដំណឹងដល់អ្នកឲ្យប្រញាប់ចេញទៅទទួល។

**តៀវហ៊ុយ**បានស្តាប់ដូច្នោះហើយក៏មានចិត្តត្រេកអរ ព្រោះបានដឹងដំណឹង**ឡៅពី** តែគិតខឹងនឹងគួនអ៊្វូណាស់ ព្រោះឮថាចូលទៅនៅនឹង**ចូឆូ**។ **តៀវហ៊ុយ**ក៏ពាក់ក្រឹសកាន់ទួនហើយនាំ**ស៊ុនខៀន** និងទាហានទាំងមួយពាន់ចេញទៅផុតពីមាត់ទ្វារស្រុក។ **គួនអ៊្វូ**ក្រឡេកឃើញ**តៀវហ៊ុយ**ចេញមកក៏មានអំណរណាស់ ទើបប្រគល់ដាវដងវែងឲ្យទៅ**ជីវឆង** ហើយបរសេះចូលតម្រង់ទៅ**តៀវហ៊ុយ** ដើម្បីនឹងទទួលគំនាប់។ **តៀវហ៊ុយ**ឃើញ**គួនអ៊្វូ**បរសេះចូលមកនឹកខឹងណាស់ ក៏ស្រែកគំហកដោយសំឡេងខ្លាំង ហើយយកទួនដេញចាក់**គួនអ៊្វូ** ៗភ័យខ្លាំងណាស់ ក៏បរសេះថយត្រឡប់មកនៅពីក្រោយរថបងថ្លៃ ហើយស្រែកថា ហេតុម្តេចក៏**តៀវហ៊ុយ**ឯងធ្វើដូច្នេះ អ្នកមិនបង់ពាក្យសត្យទៅហើយឬ? **តៀវហ៊ុយ**តបថា ហេតុម្តេចបានជាថាយើងបង់ពាក្យសត្យ? ខ្លួនទេតើបង់ពាក្យសត្យមុនយើង វេលានេះទើបបែរមុខមករក យើង

មិនជឿទេ។ **គួនអ៊ូ**តបថា ហេតុម្តេចបានជាថាយើងបង់ពាក្យសត្យ? **តៀវហ៊ុយ**តបថា ខ្លួនលះចោលពាក្យសត្យដោះគេចទៅនៅនឹង**ចូឆូ**យកអាសាមានសេចក្តីគាប់ប្រសើរ **ចូឆូ**ក៏ចិញ្ចឹមរក្សាទូលស្នើតាំងឲ្យមានឈ្មោះសំឡេងយសសក្តិជាធំដល់ខ្មាត។ ឥឡូវខ្លួនក្លែងតែងរកឧបាយចេញមកវាទអាទិគិតប្រទូសរ៉ាយដល់យើង ៗក៏ដឹងខ្លួនហើយ បើយើងនឹងស្លាប់ អ្នកត្រូវគង់ជីវិតរស់នៅចុះ បើខ្លួនអ្នកស្លាប់ យើងក៏រស់នៅជាមនុស្ស។ **គួនអ៊ូ**តបថា អ្នកខឹងនឹងបងពីព្រោះហេតុនោះខុសទេ បើបងប្រាប់តាមក្រសែដែលត្រង់ ក៏គង់តែអ្នកមិនជឿដែរ ការដែលវៀចនិងត្រង់នោះ អ្នកចូរទៅសួរបងថ្លៃយើងទាំងពីរនាក់ ដែលបងនាំមកនៅលើរថនោះចុះ អ្នកសួរហើយគង់នឹងដឹងសេចក្តីពិតទៀងត្រង់របស់បងមិនខាន។

ឯនាងទាំងពីរ លុះបានឮសំឡេង**គួនអ៊ូ**និង**តៀវហ៊ុយ**ឆ្លាស់ឆ្លើយគ្នាដោយកំហឹងដូច្នោះហើយ ក៏ភ័យណាស់បើករនាំងឡើង ហើយនិយាយទៅនឹង**តៀវហ៊ុយ**ថា ហេតុដូចម្តេចបានជាអ្នកធ្វើរឹករវរទាស់ទែងគ្នានឹងបងដូច្នេះ? **តៀវហ៊ុយ**ឆ្លើយថា បងទាំងពីរមិនទាន់ជ្រាប កុំឃាត់ហាមខ្ញុំឡើយ ត្រូវតែចាំមើលខ្ញុំនឹងសម្លាប់មនុស្សដែលបង់ពាក្យសត្យ ហើយនឹងអញ្ជើញបងទាំងពីរចូលទៅក្នុងស្រុក។ នាងទាំងពីរក៏តបថា កាល**ឡៅពី**និងអ្នកបែកគ្នាទៅនោះ **ចូឆូ**លើកទាហានទៅព័ទ្ធ**គួនអ៊ូ**ជុំជិត។ **គួនអ៊ូ**ទាល់ច្រកចេញមិនរួចលើសកម្លាំង មិនអាចនឹងតតាំងច្បាំងបាន ទើបកាត់ចិត្តប្រថុយខ្លួនទៅនៅនឹង**ចូឆូ** ឯសេចក្តីពិតត្រង់របស់**គួនអ៊ូ**នោះមិនលះបង់ទេ តែងឧស្សាហ៍ប្រណិប័តន៍រក្សាយើងទាំងពីរជាដរាបមក ហើយយកអាសា**ចូឆូ**ចេញទៅធ្វើសង្គ្រាម ប្រាថ្នានឹងស៊ើបដំណឹង**ឡៅពី**រាល់គ្រា។ លុះដឹងថា**ឡៅពី**ទៅនៅនឹង**អ៊ួនសៀវ**ហើយ ទើបនាំគ្នាមកដល់កណ្តាលផ្លូវប្រទះនឹង**ស៊ុនខៀន**មកប្រាប់ថា ឥឡូវ

**ឡៅពី**ដើរចេញពី**អ៊ួនសៀវ**ទៅនៅស្រុកយីឡាំ។ **គួនអ៊ូ**ក៏នាំយើងមក ការដែលអ្នកមិនដឹងដំណើរសេចក្ដីឲ្យជាក់លាក់តាមពិត យកតែចិត្តគំនិតស្រាល ហើយគុំគួនខឹងប្រទូសរ៉ាយនឹង**គួនអ៊ូ**ជាបង ដែលមានគុណដល់យើងមកនោះ មិនគួរសមសោះ។

**តៀវហ៊ុយ**តបថា ដែល**គួនអ៊ូ**ធ្វើការជាកលឧបាយនាំបងទាំងពីរមក បងក៏មិនដឹងកលឧបាយ**គួនអ៊ូ**សោះ នៅសម្គាល់ឃើញថា**គួនអ៊ូ**កាន់ពាក្យសត្យពិតត្រង់ធម្មតាកើតមកជាកូនប្រុសជាតិទាហានបានចេញថាស្បថស្បាន់ទុកហើយ ទោះបីនឹងស្លាប់ក៏មិនឲ្យសាបសូន្យវាចាឬក៏ស្ដាយជីវិត ឯចិត្តថ្លើម**គួនអ៊ូ**លះបង់ពាក្យសត្យចោល ជាមនុស្សម្ចាស់ពីរ នាយចៅហ្វាយពីរដូច្នេះ នឹងជឿកាន់យកដូចម្ដេចបាន?

**ស៊ុនខៀន**ក៏និយាយនឹង**តៀវហ៊ុយ**ថា ឯចិត្តថ្លើម**គួនអ៊ូ**នោះប្រាកដជារក្សាសេចក្ដីសត្យពិតត្រង់ណាស់ នឹងរកនរណាមកផ្ទឹមឲ្យត្រឹមស្មើគ្មាន ឧស្សាហ៍ទូន្មានកាយមិនមានស្ដាយជីវិតសោះ ខំដោះខ្លួននាំបងថ្លៃទាំងពីរមករក**ឡៅពី** លុះឮដំណឹងថាអ្នកនៅក្នុងស្រុកនេះ ទើបឲ្យខ្ញុំចូលទៅអញ្ជើញចេញមក ហេតុម្ដេចបានជាអ្នកនៅសង្ស័យនឹង**គួនអ៊ូ**ដូច្នេះទៀត? **តៀវហ៊ុយ**ឮ**ស៊ុនខៀន**និយាយដូច្នោះក៏ស្រែកគំហកហើយថា **គួនអ៊ូ**គិតកលឧបាយមករកចាប់ខ្លួនយើងទៅឲ្យ**ចូឆូ** ហេតុម្ដេចបានជាខ្លួនមកលើកសរសើរថា **គួនអ៊ូ**នៅមានសេចក្ដីសត្យពិតត្រង់វិញ?

**គួនអ៊ូ**ថា បើយើងប៉ងនឹងធ្វើប្រទូសរ៉ាយដល់អ្នក យើងមិនចាំបាច់នាំបងថ្លៃទាំងពីរមកទេ ទាហាន**ចូឆូ**ក៏មាន គង់តែយើងនឹងនាំយកមកខ្លះ។ ខណៈនោះទទួល**តៀវហ៊ុយ**ក្រឡេកទៅឃើញកងសេនាទាហានលើកតាមមកជាច្រើន។ **តៀវហ៊ុយ**ក៏និយាយនឹង**គួនអ៊ូ**ថា “នេះមិនមែនជាសេនាទាហានរបស់**ចូឆូ**ទេឬ? លើកមកជាក្រោយខ្លួនទៀតហើយ ខ្លួនមកក្លែងតែងកលធ្វើជានាំបងថ្លៃមកមុន ឲ្យកងទ័ពលើក

មកតាមក្រោយប្រាថ្នានឹងចាប់យើង” ថាហើយ**តៀវហ៊ុយ**ក៏ខាំធ្មេញមាត់ស្រែកគំរាម ហើយយកទួនដេញកាប់**គួនអ៊ូ** ៗការពារគេចខ្លួនចេញបាន ហើយថា **តៀវហ៊ុយ**កុំអាលធ្វើអន្តរាយដល់យើងសិន ដែលទាហានលើកមកនោះ មិនមែនពួកបងទេ ចាំបងទៅកាត់យកក្បាលមេទ័ពនោះមកឲ្យអ្នកឃើញច្បាស់ឲ្យបាន។ **តៀវហ៊ុយ**តបថា បើខ្លួនធ្វើបានដូច្នោះទើបឃើញថាពិតត្រង់ដូចអ្នកថាមែន យើងនឹងជួយវាយស្គរជ័យឲ្យច្បាំងគ្នាថែមទៀត។

ឯ**ស៊ូយ៉ុង**ដែលលើកទ័ពមកនោះ លុះនាំទាហានមកជិតហើយ ឃើញ**គួនអ៊ូ**ក៏ខឹងណាស់ស្រែកថា ឯងនេះរត់ពីមហាឧបរាជចេញមក សម្លាប់ចៅហ្វាយស្រុក និងនាយគយល្បាតស្លាប់ជាច្រើនអន្លើ ហើយថែមទាំងមកសម្លាប់**ជិនគី**ជាក្មួយអញទៀតផង។ ឥឡូវមហាឧបរាជប្រើអញឲ្យលើកកងទ័ពមកចាប់ខ្លួនឯងបញ្ជូនទៅ។ **គួនអ៊ូ**បានឮដូច្នោះក៏ខឹងណាស់ បរសេះកាន់ដាវចូលទៅច្បាំងនឹង**ស៊ូយ៉ុង**។ **តៀវហ៊ុយ**ក៏វាយស្គរទ័ពមួយភ្លែង ឃើញ**គួនអ៊ូ**កាប់**ស៊ូយ៉ុង**ដាច់កស្លាប់ ចំណែក**គួនអ៊ូ**កាលបើឈ្នះហើយ ក៏ដេញចាក់កាប់សម្លាប់កងទ័ព**ស៊ូយ៉ុង**ស្លាប់វិនាសអស់ជាច្រើនណាស់ ហើយចាប់បានទាហានដែលកាន់ទង់ជ័យដើរមុខទ័ពម្នាក់ និងក្បាល**ស៊ូយ៉ុង**យកមកឲ្យ**តៀវហ៊ុយ** ៗឃើញដូច្នោះក៏ប្រគល់ទួនឲ្យទៅពួកទាហាន ហើយចុះពីលើសេះទៅគំនាប់**គួនអ៊ូ** ៗនិង**តៀវហ៊ុយ**ក៏នាំគ្នាចូលទៅពីមុខរថបងថ្លៃ ហើយ**តៀវហ៊ុយ**និយាយសុំទោស**គួនអ៊ូ**ថា ដែលខ្ញុំបាទបានប្រមាថមើលងាយបងនោះ ព្រោះចិត្តស្រាលរបស់ មិនបានស្តាប់ពាក្យសម្តីឲ្យជាក់លាក់ ទោសខ្ញុំបាទខុសណាស់ហើយ ខ្ញុំបាទសូមឲ្យបងអនុញ្ញាតលើកទោសចុះ។

ឯ**គួនអ៊ូ**ក៏ព្រមលើកទោសឲ្យ**តៀវហ៊ុយ** ហើយសួរទាហានដែលចាប់បាននោះថា ហេតុម្ដេចបានជា**ស៊ូយ៉ុង**លើកទ័ពមក? ទាហានទាំងនោះប្រាប់ថា ព្រោះ**ស៊ូយ៉ុង**ឮដំណឹងថាលោកសម្លាប់**ជិនគី**ជាក្មួយ បានជាសូមអាសាមហាឧបរាជលើកទ័ពមកចាប់លោក។ មហាឧបរាជថាបានប្ដេជ្ញានឹងលោកហើយ នឹងទៅចាប់ម្ដេចបាន? ទទួលឮដំណឹងថា **ឡៅផេក**និង**កុងតៅ**ដែលជាមេចោរនោះ លើកបក្សពួកត្រឡប់ទៅវាយយកស្រុកយីឡាំវិញ បានជាមហាឧបរាជប្រើ**ស៊ូយ៉ុង**ឲ្យលើកទ័ពមកចាប់**ឡៅផេកនិងកុងតៅ** តែ**ស៊ូយ៉ុង**នោះគាត់មានចិត្តអាឃាតព្យាបាទនឹងលោកព្រោះថាលោកសម្លាប់**ជិនគី**ជាក្មួយ លុះមកជួបប្រទះលោកក៏បង្គាប់ឲ្យចូលតយុទ្ធទាល់តែដល់នូវសេចក្ដីស្លាប់អសារ។ **តៀវហ៊ុយ**ឮដូច្នោះក៏សោមនស្សត្រេកអរអញ្ជើញបងថ្លៃទាំងពីរ និង**គួនអ៊ូ**ចូលទៅក្នុងស្រុក។

ទទួលពេលនោះ នាយទ្វារបាលទិសខាងត្បូងមកប្ដឹង**តៀវហ៊ុយ**ថា ឥឡូវ**ប៊ីតុក**និង**ប៊ីហាង** ប្អូនប្រពន្ធ**ឡៅពី**នាំទាហានជិះសេះសែសិបទៅហាសិបនាក់ មកប្រាប់ថានឹងចូលមកជួបនឹងលោក។ **តៀវហ៊ុយ**បានឮក៏ចេញទៅជួបគ្នានឹង**ប៊ីតុក, ប៊ីហាង** ហើយក៏គំនាប់សាកសួរគ្នាទៅវិញទៅមក។ **ប៊ីតុក** និង**ប៊ីហាង**និយាយថា កាល**ឡៅពី**ប្រើខ្ញុំទៅនៅរក្សាស្រុកគីជីវនោះ ខ្ញុំក៏ឃើញថាកម្លាំងនឹងទប់ទល់នឹង**ចូឆូ**មិនបាន ទើបនាំគ្នារត់ទៅនៅស្រុកដើមកំណើតវិញ។ ខ្ញុំឮដំណឹងថា **ឡៅពី**ទៅនៅនឹង**អ៊ួនសៀវ**។ **កាន់យ៉ុង**ដឹងដំណឹងក៏តាម**ឡៅពី**ជាក្រោយ ឯ**គួនអ៊ូ**ក៏ទៅនៅនឹង**ចូឆូ** តែខ្លួនអ្នកមួយខ្ញុំឥតបានដឹងដំណឹងអ្វីសោះ អំណើះតមកបានប្រហែលប្រាំខែប្លាយហើយ ទើបបានឮដំណឹងថា អ្នកបានមកធ្វើចៅហ្វាយស្រុកនៅខេត្តនេះ បានជាខ្ញុំនាំគ្នាមករក ដើម្បីនឹងឲ្យដំណឹងពី**ឡៅពី**និង**គួនអ៊ូ**បានជ្រាបតទៅ។

**តៀវហ៊ុយ**ថា ឥឡូវនេះ**គួនអ៊ូ**និង**ស៊ុនខៀន**បាននាំបងថ្លៃមកដល់យើងហើយ។ **ប៊ីតុក, ប៊ីហាង**ឮដូច្នោះក៏មានសេចក្តីត្រេកអរពន់ប្រមាណណាស់។ **តៀវហ៊ុយ**ក៏នាំចូលទៅជួបនឹង**គួនអ៊ូ** និងបងថ្លៃស្រីទាំងពីរ។ នាងទាំងពីរក្រឡេកឃើញប្អូន ក៏មានសេចក្តីត្រេកអរពន់ប្រមាណណាស់ លុះជួបជុំគ្នាហើយក៏ពណ៌នាសំណេះសំណាលរាយរឿងដែលនិរាសបែកពីស្រុកហែហ្វី រហូតដល់**គួនអ៊ូ**ហែកទម្លាយគយដានចេញមកបាន ឲ្យប្អូនទាំងពីរនាក់ស្តាប់។ **តៀវហ៊ុយ**និង**ប៊ីតុក, ប៊ីហាង**ឮរឿងរ៉ាវដែលកម្សត់ព្រាត់ប្រាសនិរាសគ្នា ក៏នាំគ្នាយំសោកាពិលាបអាណិតអានាថទាំងអស់គ្នា ក៏សឹងតែយំរាល់គ្នា ហើយរាយរឿងប្រាប់គ្នាទៅវិញទៅមក តាមដែលបានទទួលទុក្ខលំបាកផ្សេងៗ។ **តៀវហ៊ុយ**ក៏ឲ្យរៀបចំតាក់តែងតុលៀងភោជនាហារ។ លុះវេលាព្រឹកកាលណា **តៀវហ៊ុយ**ក៏បបួល**គួនអ៊ូ**ថា យើងត្រូវទៅរក**ឡៅពី**ឯស្រុកយីឡាំតែពីរនាក់សិន។ **គួនអ៊ូ**តបថា អ្នកនៅរក្សាបងថ្លៃទាំងពីរចុះ សឹមបងនិង**ស៊ុនខៀន**នាំគ្នាទៅរកមុន **តៀវហ៊ុយ**ក៏ព្រម។

**គួនអ៊ូ**ក៏លាបងថ្លៃនាំ**ស៊ុនខៀន** និងទាហានដប់នាក់ស្រូតទៅស្រុកយីឡាំ **ស៊ុនខៀន**ក៏នាំ**គួនអ៊ូ**ចូលទៅជួបនឹង**ឡៅផេក, កុងតៅ** ហើយសួរថា **ឡៅពី**នៅឯណា? **ឡៅផេក, កុងតៅ**ប្រាប់ថា **ឡៅពី**មកនៅស្រុកនេះប្រហែលដប់ប្រាំថ្ងៃ ស្រាប់តែឃើញទាហានតិចតួចស្តួចស្តើងក៏ត្រឡប់ទៅនៅនឹង**អ៊ួនសៀវ**វិញ ប្រាថ្នានឹងប្រឹក្សាការដែលក្រលំបាក។ **គួនអ៊ូ**បានស្តាប់ក៏ដកដង្ហើមធំមិនសប្បាយ។ **ស៊ុនខៀន**ទើបថា អ្នកនឹងកើតទុក្ខព្រួយចិត្តធ្វើអ្វី ចាំយើងតាមទៅជួបនឹង**ឡៅពី**។ **គួនអ៊ូ**ក៏លា**ឡៅផេក, កុងតៅ**ត្រឡប់ទៅស្រុកកៅសៀវិញ ទើបនាំព័ត៌មាននោះទៅនិយាយប្រាប់បងថ្លៃទាំងពីរឲ្យស្តាប់សព្វគ្រប់ប្រការ ហើយថាខ្ញុំបាទនឹងតាម**ឡៅពី**ទៅស្រុកគីជីវ

ទៀត នឹងបានគិតការតទៅ។ **តៀវហ៊ុយ**ថាខ្ញុំសូមទៅជាមួយផង។ គួនអ៊ូតបថា យើងបានយកស្រុកនេះទុកជាទីសំណាក់អាស្រ័យហើយ យើងនឹងដើរចោលឲ្យនៅទំនេរនោះមិនគួរទេ ប្អូនចូរនៅរក្សាស្រុកនេះចុះ ឲ្យបងនិង**ស៊ុនខៀន**ទាំងពីរនាក់ទៅវិញ បើបានជួបប្រទះនឹង**ឡៅពី**ហើយនឹងបាននាំមកអាស្រ័យនៅក្នុងស្រុកនេះ។ **តៀវហ៊ុយ**ថាបងបានសម្លាប់**ង៉ាន់លៀង**និង**ប៊ុនធីវ** ជាទាហានឯក**អ៊ួនសៀវ** ដែលបងនឹងទៅនោះ ខ្ញុំក្រែង**អ៊ួនសៀវ**នឹងធ្វើអន្តរាយដល់បង។ **គួនអ៊ូ**ថា “ខនេះអ្នកកុំវិតក្កជាទុក្ខព្រួយឡើយ បើបងទៅហើយ**អ៊ួនសៀវ**នឹងប្រទូសរ៉ាយយ៉ាងណា បងក៏ល្មមកែខៃបាន”។ ហើយ**គួនអ៊ូ**សួរ**ជីវឆង**ថា **ហ៊ុយងួនសៀវ**លើកពួកចោរទៅនៅលើភ្នំង៉ោជិនសាន់នោះប្រហែលប៉ុន្មាននាក់? **ជីវឆង**ឆ្លើយថា បក្សពួកនោះប្រហែលប្រាំរយប្លាយនាក់។ **គួនអ៊ូ**ថា ខ្លួនយើងនឹង**ស៊ុនខៀន**នឹងស្រួតទៅរក**ឡៅពី**មុន ខ្លួនអ្នកឯងចូលទៅប្រាប់**ហ៊ុយងួនសៀវ**ឲ្យលើកបក្សពួកទៅចាំយើងនៅកណ្ដាលផ្លូវ បើយើងនាំ**ឡៅពី**មក ក្រែងមានភ័យអន្តរាយយើងបានជួយការពារគ្នា។ **ជីវឆង**ទទួលព្រមទើបលាចេញទៅ។

**គួនអ៊ូ**និង**ស៊ុនខៀន**ក៏នាំទាហានប្រហែលម្ភៃប្លាយនាក់ ទៅតាមផ្លូវទិសឯជើងលុះទៅដល់ជិតស្រុកគីជីវ **ស៊ុនខៀន**និយាយនឹង**គួនអ៊ូ**ថា “អ្នកចូរនៅត្រង់ទីនេះសិនចុះ ខ្ញុំនឹងលបចូលទៅរក**ឡៅពី** ស្ដាប់ដំណឹងស្រួលមិនស្រួលមើលសិន រួចសឹមគិតអានតទៅ” ហើយ**ស៊ុនខៀន**ក៏ចូលទៅក្នុងស្រុកនោះទៅ។

ឯ**គួនអ៊ូ**ឃើញភូមិមួយនៅក្នុងព្រៃ ក៏នាំទាហានចូលទៅសុំអាស្រ័យនៅផ្ទះនោះ។ **គួនតេង**ម្ចាស់ផ្ទះនោះជាមនុស្សចាស់ជរាណាស់ហើយ ឃើញ**គួនអ៊ូ**ចូលមករកក៏សាកសួរថា អ្នកឈ្មោះអ្វី? ទៅណាមកណាមានការអ្វី? **គួនអ៊ូ**ប្រាប់ថា ខ្ញុំឈ្មោះ

**គួនអ៊ូ** មកតាមរក**ឡៅពី**។ **គួនតេង**ថា លោកនិងខ្ញុំជាសែត្រកូលជាមួយគ្នា កាលពីដើមខ្ញុំក៏បានឮថាលោកមានថ្វីដៃខ្លាំងពូកែ ព្រមទាំងមានសេចក្ដីសត្យកតញ្ញូល្អណាស់ វេលានេះខ្ញុំបានជួបក៏ជាបុណ្យភ័ព្វរបស់ខ្ញុំ” ហើយហៅ**គួនហ្វេង**និង**គួនប៉េង**ជាកូនឲ្យចេញមកគំនាប់**គួនអ៊ូ** ហើយចាត់ចែងទីដំណេកឲ្យ**គួនអ៊ូ**នៅអាស្រ័យ។

ឯ**ស៊ុនខៀន**កាលចូលទៅជួបនឹង**ឡៅពី** ក៏ពណ៌នាសេចក្ដីដែលប្រទះនឹង**គួនអ៊ូ**, **តៀវហ៊ុយ** និងភរិយាទាំងពីរស្ដាប់គ្រប់ប្រការ។ **ឡៅពី**បានស្ដាប់ដូច្នោះក៏សោមនស្សត្រេកអរណាស់ ទើបប្រាប់ថា ឥឡូវ**កាន់យ៉ុង**មកនៅក្នុងស្រុកនេះហើយ តែធ្វើជាមិនស្គាល់យើង ៗគិតនឹងប្រើមនុស្សស្និទ្ធស្នាលឲ្យលបទៅហៅមកនឹងគិតការនឹងគ្នា។ លុះដល់ពេលយប់ ទទួល**កាន់យ៉ុង**លបមករក**ឡៅពី** ៗអញ្ជើញឲ្យអង្គុយ ហើយនិយាយប្រាប់ថា **ស៊ុនខៀន**តាមមករកយើង ៗគិតថានឹងឲ្យមនុស្សលបទៅហៅអ្នកនឹងបានប្រឹក្សាការគ្នា ដើម្បីនឹងរកឱកាសចេញទៅរួចពី**អ៊ូនសៀវ** ហើយនឹងបានគិតការតទៅ។ **កាន់យ៉ុង**ឆ្លើយតបថា លោកគិតនេះគួរណាស់ ដល់ព្រឹកស្អែកលោកចូរទៅនិយាយនឹង**អ៊ូនសៀវ**ថា នឹងសូមអាសាចេញទៅបញ្ចុះបញ្ចូល**ឡៅពៀវ**ចៅហ្វាយស្រុកកេងជីវ។ **ឡៅពី**ថា បើដូច្នោះអ្នកចូលទៅជាមួយនឹងយើងបានឬទេ? **កាន់យ៉ុង**ឆ្លើយថា ឯចិត្តខ្ញុំបាទនេះចង់ទៅជាមួយនឹងលោក បើ**អ៊ូនសៀវ**នឹងទទឹងទាស់ដូចម្ដេច ខ្ញុំបាទនឹងបានគិតដោះសាររកសេចក្ដីនិយាយឲ្យបាន។ **ឡៅពី**យល់ឃើញត្រូវ ឯ**កាន់យ៉ុង**ក៏លា**ឡៅពី**ត្រឡប់ទៅទីលំនៅវិញ។

លុះពេលព្រឹកឡើង **ឡៅពី**ក៏ចូលទៅនិយាយនឹង**អ៊ូនសៀវ**ថា ស្រុកកេងជីវដែល**ឡៅពៀវ**នៅឈររក្សាមកនោះ ស្បៀងអាហារស្រូវអង្ករក៏បរិបូរ ហើយមានអាណាខេត្តឡើងដល់ទៅប្រាំបួនមណ្ឌល ខ្ញុំបាទនឹងសូមទៅនិយាយបញ្ចុះបញ្ចូល

**ឡៅពៀវ** ឱ្យមកចំណុះធ្វើការជាមួយនឹងលោកនឹងបានរិះគិតការកម្ចាត់**ចូអ្វ**ចេញ។ **អ៊ួនសៀវ**ឆ្លើយថា អ្នកគិតនេះត្រូវចិត្តយើងណាស់ តែយើងបានទៅនិយាយបញ្ចុះបញ្ចូលច្រើនលើកណាស់មកហើយ តែ**ឡៅពៀវ**មិនព្រម។ **ឡៅពី**ថា **ឯឡៅពៀវ**មានសែត្រកូលជាមួយនឹងខ្ញុំបាទ បើខ្ញុំបាទទៅនិយាយបបួលមុខជា**ឡៅពៀវ**នឹងព្រមចុះចូលមករកលោកជាប្រាកដ។ **អ៊ួនសៀវ**ថា ដែលអ្នកនឹងទៅនោះ យើងក៏ព្រមឱ្យទៅ បើបញ្ចុះបញ្ចូល**ឡៅពៀវ**បានសមដូចសេចក្ដីប្រាថ្នា ក៏ល្អជាងបាន**ឡៅផេក**មកទុកដប់ស្នួនទៅទៀត។ ហើយបន្ថែមថា "យើងបានឮដំណឹងថា **គួនអ៊ូ**ប្អូនអ្នកដែលទៅយកអាសា**ចូអ្វ** បានសម្លាប់**ង៉ាន់លៀង, ប៊ុនធីវ**នោះ ឥឡូវបានចេញពី**ចូអ្វ**មករកអ្នកវិញហើយ បើ**គួនអ៊ូ**មកដល់ យើងនឹងចាប់សម្លាប់ចេញ ទើបអស់កំហឹង។

**ឡៅពី**តបថា ពីដើមលោកបាននិយាយនឹងខ្ញុំថា ចង់បាន**គួនអ៊ូ**មកទុកជាកម្លាំង ខ្ញុំក៏បានផ្ញើសំបុត្រទៅ**គួនអ៊ូ**ឱ្យមក ហេតុម្ដេចលោកមានប្រសាសន៍ដូច្នេះវិញ? **អ៊ួនសៀវ**ថា ដែល**គួនអ៊ូ**មកនោះ ខ្ញុំក៏មានចិត្តត្រេកអរដែរ តែខ្ញុំនិយាយប៉ុណ្ណេះប្រយោជន៍ចង់ល្បងចិត្តលោកមើលទេ តើអ្នកស្រឡាញ់**គួនអ៊ូ**មែនឬដូចម្ដេច? អ្នកចូរទៅប្រាប់**គួនអ៊ូ**ឱ្យចូលមកចុះ យើងនឹងទទួលចិញ្ចឹមរក្សាដោយប្រក្រតី។ **ឡៅពី**ក៏លា**អ៊ួនសៀវ**មកទីលំនៅវិញ។

**កាន់យ៉ុង**និយាយនឹង**អ៊ួនសៀវ**ថា ដែលលោកប្រើ**ឡៅពី**ឱ្យទៅបញ្ចុះបញ្ចូល**ឡៅពៀវ**នោះ ខ្ញុំបាទក្រែង**ឡៅពី**មិនព្រមត្រឡប់មកនៅនឹងលោកវិញ បើដូច្នោះខ្ញុំបាទនឹងសូមអាសាកាន់កាប់**ឡៅពី**ទៅផង ហើយនឹងបាននិយាយពន្យល់**ឡៅពៀវ**ឱ្យចូលចិត្តមកនៅរួមធ្វើការជាមួយនឹងលោកឱ្យខាងតែបាន។ **អ៊ួនសៀវ**មិនយល់កល

ឧបាយក៏យល់ថា **កាន់យ៉ុង**និយាយត្រូវ ក៏ព្រមឲ្យ**កាន់យ៉ុង**ទៅ។ **កាន់យ៉ុង**ក៏លា**អ៊ួនសៀវ**តាម**ឡៅពី**ទៅដល់ទីលំនៅ។

**គួតៅ**និយាយនឹង**អ៊ួនសៀវ**ថា កាលគ្រាមុនលោកបានឲ្យ**ឡៅពី**ទៅបញ្ចុះបញ្ចូល**ឡៅផេក** តែមិនបានសមដូចប្រាថ្នា ឥឡូវនេះលោកឲ្យ**ឡៅពី**និង**កាន់យ៉ុង**ទៅនិយាយបញ្ចុះបញ្ចូល**ឡៅពៀវ**ទៀតនោះ ខ្ញុំបាទយល់ឃើញថា **ឡៅពី**និង**កាន់យ៉ុង**នឹងមិនព្រមត្រឡប់មករកលោកវិញទេ។ **អ៊ួនសៀវ**តបថា ឯ**កាន់យ៉ុង**នោះមានសតិបញ្ញាទៀងត្រង់នឹងយើងណាស់ ទោះបី**ឡៅពី**ព្រងើយកន្តើយមិនមកយ៉ាងណា មុខជា**កាន់យ៉ុង**នឹងរិះគិតនាំខ្លួន**ឡៅពី**មកវិញទាល់តែបាន។ **គួតៅ**បានស្តាប់ហើយ ក៏ដកដង្ហើមធំមិនឆ្លើយតបថាអ្វីសោះ។

ឯ**ឡៅពី**ក៏ប្រើ**ស៊ុនខៀន**ឲ្យត្រឡប់ចេញទៅប្រាប់**គួនអ៊ូ**ថា ឥឡូវ**អ៊ួនសៀវ**ប្រើយើងនិង**កាន់យ៉ុង**ឲ្យទៅបញ្ចុះបញ្ចូល**ឡៅពៀវ**ចៅហ្វាយស្រុកកេងជីវ ដូច្នេះកុំឲ្យ**គួនអ៊ូ**ចូលមកឡើយ ឲ្យនៅចាំនៅទីនោះចុះ។ **ស៊ុនខៀន**ក៏លា**ឡៅពី**ចេញទៅប្រាប់**គួនអ៊ូ**តាមបង្គាប់។ ឯឡៅពីក៏នាំ**កាន់យ៉ុង**ចេញពីស្រុកគីជីវទៅ។ **គួនអ៊ូ**ឃើញ**ឡៅពី**ទៅដល់ក៏មានអំណរណាស់ ចុះពីលើខ្នងសេះទៅគំនាប់**ឡៅពី** ហើយក៏ពណ៌នារឿងរ៉ាវដែលព្រាត់ប្រាសនិរាសគ្នាតាំងពីដើមដល់ចប់ឲ្យ**ឡៅពី**ស្តាប់គ្រប់ប្រការ ហើយនាំ**ឡៅពី**ចូលទៅក្នុងផ្ទះ**គួនតេង** ទើបនិយាយនឹង**គួនតេង**ថា ដែលខ្ញុំមកតាមដិតដោយដូច្នេះ ព្រោះសេចក្តីចាំចិត្តគិតអាល័យវិស័យដូចបងខ្ញុំបង្កើត ឥឡូវបានជួបនឹង**ឡៅពី**បងខ្ញុំហើយ។

**គួនតេង**ក៏ហៅកូនទាំងពីរឲ្យចេញមកគំនាប់**ឡៅពី** ៗក៏សួរថា អ្នកនឹងកូនទាំងពីរនេះឈ្មោះអ្វី? **គួនអ៊ូ**ប្រាប់ថា បិតាឈ្មោះ**គួនតេង** ជាសែស្រឡាយជាមួយនឹង

ខ្ញុំ ឯកូនទាំងពីរនោះ កូនច្បងឈ្មោះ**គួនហ្វេង** ប្អូនឈ្មោះ**គួនប៉េង**។ **គួនតេង**ជម្រាប**ឡៅពី**ថា ខ្ញុំបាទនឹងឲ្យ**គួនប៉េង**ជាកូនពៅខ្ញុំទៅនៅនឹង**គួនអ៊ូ** តែក្រែងថាលោកមិនយល់ព្រមផង។ **ឡៅពី**ក៏សួរថា អាយុ**គួនប៉េង**ប៉ុន្មានឆ្នាំហើយ? **គួនតេង**ឆ្លើយថា អាយុគួនប៉េងដប់ប្រាំឆ្នាំហើយ។ **ឡៅពី**ថា អ្នកឲ្យ**គួនប៉េង**ទៅនៅនឹង**គួនអ៊ូ**នោះ យើងក៏មានសេចក្ដីត្រេកអរណាស់ ព្រោះ**គួនអ៊ូ**គ្មានកូនសោះ។ ចូរអ្នកតាំងចិត្តប្ដេជ្ញាឲ្យ**គួនប៉េង**ទៅជាកូនចិញ្ចឹម**គួនអ៊ូ**ចុះ។ **គួនតេង**បានស្ដាប់ដូច្នោះក៏ពេញចិត្តណាស់ ទើបសូមអនុញ្ញាតឲ្យ**គួនប៉េង**ធ្វើជាកូនចិញ្ចឹម**គួនអ៊ូ** ហើយហៅ**ឡៅពី**ថាអាពុកធំ។ **ឡៅពី**ក៏និយាយនឹង**គួនតេង**ថា កាលបើយើងនឹងបង្អង់នៅទីនេះយូរទៅ ខ្លាច**អ៊ួនសៀវ**ដឹងការណ៍នឹងគិតកែប្រែឡើងវិញ ឲ្យទាហានមកតាមយើងទៅ ដូច្នេះយើងត្រូវស្រូតចេញទៅឲ្យផុតទើបស្រួល។ **គួនអ៊ូ**យល់ត្រូវផងក៏នាំគ្នាលា**គួនតេង** នាំ**គួនប៉េង**និងទាហានទាំងពួងតម្រង់ទៅផ្លូវភ្នំង៉ោជីវសាន់។ **គួនអ៊ូ**ជិះសេះនាំមុខទទួលជួបនឹង**ជីវឆង**លើកទាហានប្រហែលជាងសាមសិបនាក់ ឃើញកាយត្រូវអាវុធមុតអស់ទាំងខ្លួន ឈាមក៏ប្រឡាក់ជោករាងកាយទាំងនាយទាំងកូនទាហាន **គួនអ៊ូ**ក៏នាំ**ជីវឆង**ចូលទៅគំនាប់**ឡៅពី**។ **ជីវឆង**គំនាប់**ឡៅពី**រួចហើយជម្រាបថា កាល**គួនអ៊ូ**ប្រើខ្ញុំបាទទៅរក**ហ៊ុយងួនសៀវ**នោះ មានទាហានម្នាក់ជិះសេះមកតែម្នាក់ឯងសម្លាប់**ហ៊ុយងួនសៀវ**ស្លាប់ ខ្ញុំបាទក៏ចូលទៅច្បាំងតាំងតគ្នានឹងទាហាននោះទៀត។ ទាហាននោះពូកែណាស់ កាប់ចាក់ខ្ញុំបាទនិងទាហានត្រូវរបួសពិការគ្រប់គ្នា។ ខ្ញុំបាទរងពុំឈ្នះក៏ប្រាសរត់មក ឥឡូវទាហាននោះឃុំនាំទាហាន**ហ៊ុយងួនសៀវ**ទៅលើភ្នំ**ង៉ោជីវសាន់**។ **ឡៅពី**សួរថា ទាហាននោះមានរូបរាងមុខមាត់យ៉ាងដូចម្ដេច? អ្នកឯងស្គាល់ឬទេ? **ជីវឆង**ឆ្លើយថា ឈ្មោះនោះខ្ញុំបាទមិនស្គាល់ទេ តែឃើញរូបរាងខ្ពស់ធំ

មាំមួនណាស់។ **ឡៅពី** និង**គួនអ៊ូ**ក៏ឲ្យនាំឡើងទៅលើភ្នំង៉ោជីវសាន់ ហើយ**ជីវឆង**ក៏ស្រែកជេរដៀលត្មះ។

**ទៀវជូឡុង**បានឮដូច្នោះក៏ខឹងណាស់ ក៏ពាក់ក្រោះឡើងជិះសេះកាន់ទួនចេញមកមុខទាហាន **ឡៅពី**ក្រឡេកឃើញក៏ស្គាល់ច្បាស់ជា**ជូឡុង**។ **ឡៅពី**ក៏បរសេះចេញទៅបង្ហាញខ្លួនឲ្យ**ទៀវជូឡុង**ឃើញ។ **ទៀវជូឡុង**ក្រឡេកទៅស្គាល់ជាក់ជា**ឡៅពី**ក៏ត្រេកអរណាស់ លោតចុះពីលើសេះបោះទួនចេញពីដៃ ហើយចូលទីគំនាប់**ឡៅពី**។ **គួនអ៊ូ**ក្រឡេកឃើញ**ទៀវជូឡុង**ចូលមក ក៏ចុះពីលើសេះទៅគំនាប់ហើយសួរ**ទៀវជូឡុង**ថា ហេតុម្តេចបានជាអ្នកមកនៅលើភ្នំនេះ? **ទៀវជូឡុង**ឆ្លើយថា កាលខ្ញុំបាទនៅជាមួយ**កងស៊ុនចាន** ៗបានធ្វើសង្គ្រាមមិនព្រមជឿស្តាប់ពាក្យទីប្រឹក្សាទាំងពួង ទើបថ្លោះការចាញ់**អ៊ួនសៀវ**ទាល់តែខ្លួនអនិច្ចកម្ម។ **អ៊ួនសៀវ**ឲ្យទាហានមកល្បួងលួងលោមខ្ញុំបាទជាច្រើនគ្រា។ ខ្ញុំបាទដឹងចិត្ត**អ៊ួនសៀវ**បានជាមិនព្រមទៅនៅជាមួយផង លុះខ្ញុំបាទដឹងថាលោកមកនៅស្រុកគីជីវនេះក៏ស្វែងនឹងទៅរកលោក លុះទៅដល់កណ្តាលផ្លូវឮដំណឹងថាលោកចាញ់ទ័ព**ចូឆ្វ** ខ្លួនលោកក៏បែកទៅនៅនឹង**អ៊ួនសៀវ** ឮថាគួនអ៊ូភ្លាត់ទៅនៅនឹង**ចូឆ្វ** លុះខ្ញុំបាទនឹងតាមលោកទៅស្រុកគីជីវក៏នឹកខ្លាច**អ៊ួនសៀវ**ដឹង នឹងខឹងចងគំនុំព្យាបាទធ្វើអន្តរាយខ្ញុំបាទ ៗក៏ស្វែងមកជួបនឹងពួកចោរនៅលើភ្នំនេះ **ហ៊ុយង្ហួនសៀវ**ក៏លើកបក្សពួកចេញមកនឹងដណ្តើមយកសេះខ្ញុំបាទ ៗបានច្បាំងគ្នាជាពន្លឹក។ ខ្ញុំបាទក៏សម្លាប់**ហ៊ុយង្ហួនសៀវ**ស្លាប់ ស្រាប់តែពួកចោរបែកទៅខ្លះ ខ្ញុំបាទក៏ឃុំពួកចោរនៅសម្រាកលើភ្នំនេះ បានឮដំណឹងថា**តៀវហ៊ុយ**មកធ្វើចៅហ្វាយស្រុកកៅសៀ ខ្ញុំបាទក៏ចាំស្តាប់ដំណឹងឲ្យបានប្រាកដនឹងទៅរក**តៀវហ៊ុយ**។

**ឡៅពី** និង**គួនអ៊ូ** ទាំងអស់គ្នាក៏ពណ៌នារឿងរ៉ាវដែលបែកទៅនៅនឹង**អ៊ួនសៀវ**និង**ចូឆ្វូ**នោះឲ្យ**ទៀវជូឡុង**ស្ដាប់គ្រប់ប្រការ ហើយ**ឡៅពី**ថា យើងបានជួបនឹងអ្នកកាលគ្រាដែលអ្នកនៅនឹង**កងស៊ុនចាន**នោះ យើងក៏ជាប់ចិត្តស្រឡាញ់ពេកណាស់ តែដោយឥតបុណ្យវាសនាបានជាមិនបានអ្នកមកជួយធ្វើការផង។ ឥឡូវបុណ្យសំណាងយើងល្អត្រកាល ទើបបណ្ដាលឲ្យមកជួបប្រទះគ្នានៅទីនេះ គួរអ្នកនឹងរិះគិតទៅនៅធ្វើការជាមួយនឹងយើងចុះ។ **ទៀវជូឡុង**ឆ្លើយថា “ខ្ញុំបាទស្វះស្វែងគ្រប់ស្រុកគ្រប់តំបន់ច្រើនតំណាក់ ដើម្បីនឹងរកទីពឹងពំនាក់ឲ្យមានស្វាមីភក្ដិស្ម័គ្រស្រឡាញ់អស់អញ ដូចខ្ញុំបាទរាប់អានស្រឡាញ់លោកនោះគ្មានសោះ។ គ្រានេះបុណ្យវាសនារបស់ខ្ញុំបាទបានមកជួបប្រទះនឹងលោកហើយ ខ្ញុំបាទក៏សូមផ្ញើរូបអង្គប្តូងចិត្តនៅជាបាវលោក ឲ្យលោកប្រើប្រាស់តាមការចុះ ទោះបីស្លាប់រស់ឬនឹងមានសេចក្ដីក្រីក្រលំបាកប្រការដូចម្ដេចក៏ដោយ ខ្ញុំបាទក៏សូមយកអាសាត្រាតែរលត់ផុតជីវិតទៅចុះ” លុះពណ៌នាប្រារព្ធសព្វគ្រប់ប្រការដូច្នេះហើយ **ទៀវជូឡុង**ក៏នាំពួកភឿនទាំងនោះតាម**ឡៅពី**ទៅស្រុកកៅសៀ។

ឯ**តៀវហ៊ុយ**និង**ប៊ីតុក, ប៊ីហាង** ដឹងថា**ឡៅពី**មកជិតដល់ស្រុកហើយ មានអំណរណាស់នាំគ្នាចេញទៅទទួល**ឡៅពី**នាំចូលមក។ ខណៈនោះនាង**កាំហ៊ូយិន**នាង**ប៊ីហ៊ូយិន**ក៏ចេញមកគំនាប់**ឡៅពី** ហើយពណ៌នារឿងដែលព្រាត់និរាសគ្នា តាំងពីដើមរហូតដល់គ្រាបាក់បែកខូចស្រុកហែហ្វី នឹងដែល**គួនអ៊ូ**ទៅនៅនឹង**ចូឆ្វូ**សព្វគ្រប់ប្រការឲ្យ**ឡៅពី**ស្ដាប់។ **ឡៅពី**បានស្ដាប់ហើយក៏សរសើរ**គួនអ៊ូ** ថាជាមនុស្សមានសេចក្ដីសត្យកតញ្ញូនឹងរកនរណាស្មើគ្មាន។ **តៀវហ៊ុយ**ក៏ឲ្យតែងគ្រឿងបួងសួងដល់ទេវតាហើយលៀងភោជនាហារ។

លុះកន្លងមក ថ្ងៃមួយនោះ**ឡៅពី**ក៏ប្រជុំប្រឹក្សានឹង**គួនអ៊ូ, តៀវហ៊ុយ** នូវអស់សេនាទាហានទាំងពួងថា ស្រុកកៅសៀនេះ ជាស្រុកចត្វាដែលនឹងនៅជាទីមាំមួននោះមិនបានទេ ត្រូវយើងនាំគ្នាទៅនៅស្រុកយីហ្វាវិញ ព្រោះជាទីដែនស្រុកធំនឹងបានជាទីមាំមួនគិតការតទៅ។ ទទួលមានបម្រើសេះម្នាក់កាន់សំបុត្រ**ឡៅផេក**មកជូន**ឡៅពី**សេចក្តីថា ឥឡូវ**ឡៅផេក**ដឹងថា **ឡៅពី**នៅស្រុកកៅសៀនោះមិនមាំមួនទេ បានជាមានសំបុត្រមកសុំអញ្ជើញ**ឡៅពី**ទៅតាំងនៅស្រុកយីហ្វាវិញ។ លុះ**ឡៅពី**ដឹងក្នុងសេចក្តីសំបុត្រដូច្នោះហើយ ក៏មានអំណរណាស់ ប្រឹក្សាឃើញព្រមគ្នា ទើបនាំ**គួនអ៊ូ, តៀវហ៊ុយ**នូវអស់គ្រួសារនិងទាហានឯក ព្រមទាំងពលសេនាទាហានទាំងពួងប្រហែលប្រាំរយប្លាយនាក់ ទៅនៅស្រុកយីហ្វា។

ឯ**អ៊ួនសៀវ**ដឹងច្បាស់ដូច្នោះក៏ខឹងណាស់ ទើបកេណ្ឌសេនាទាហាននឹងលើកទ័ពទៅចាប់**ឡៅពី**។ **គួតៅ**ជម្រាបថា ដែលលោកនឹងលើកទ័ពទៅចាប់**ឡៅពី**នោះ ខ្ញុំបាទយល់ឃើញថាមិនគួរសោះ ទោះបី**ឡៅពី**មិនបានទៅបញ្ចុះបញ្ចូល**ឡៅពៀវ**មកជួយគិតការក៏មិនជាការអ្វី។ សព្វថ្ងៃនេះ ខ្ញុំបាទមានបារម្ភខ្លាចតែ**ចូឆូ**ជាសឹកសត្រូវ និង**ស៊ុនសេក** ដែលតាំងនៅស្រុកកាំងតាំងនោះ មានទាហានជាច្រើន ស្បៀងអាហារចំណីត្រីសាច់ក៏បរិបូរ មានស្រុកឡើងប្រាំមួយមណ្ឌល សូមលោករិះគិតរកចាត់ប្រើអ្នកណា ដែលមានសតិបញ្ញាឲ្យទៅនិយាយបញ្ចុះបញ្ចូល**ស៊ុនសេក**មកទុក ឲ្យជួយគិតការកម្ចាត់**ចូឆូ**ដែលជាសឹកសត្រូវធំចេញទើបគួរ។ ឯ**ឡៅពី**នោះទាហានក៏តិច បើលោកនឹងលើកទ័ពទៅច្បាំងវេលាណាក៏ចេះតែបានដោយងាយណាស់។ **អ៊ួនសៀវ**យល់ព្រមផង ទើបធ្វើសំបុត្រចាត់ប្រើ**តាន់ជិន**ឲ្យទៅបញ្ចុះបញ្ចូល**ស៊ុនសេក**។ **តាន់ជិន**ក៏ទទួលសំបុត្រហើយលា**អ៊ួនសៀវ**ទៅ។ ឯ**ស៊ុនសេក**ចៅហ្វាយស្រុក

កាំងតាំងនោះ កាលព្រះចៅ**ហៀនតេ**សោយរាជ្យ ស្ដេចយាងទៅនៅក្រុងហ៊្វិតោបាន ប្អូនឆ្នាំនោះ **ស៊ុនសេក**លើកទ័ពទៅវាយស្រុកលោកាំង ស្រុកអ៊ីចៀង បានហើយកៀរយកគ្រួមកទុកបានជាច្រើន។

ចប់សៀវភៅទីបី

សូមរង់ចាំអានសៀវភៅទីបួនបន្តទៀត។

សូមអរគុណ។

ណុល ដារ៉ា